# **រឿង សាមកុក**

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៥៨

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

(*តាំងពី**ឡោពី**លើកទ័ពចេញទៅវាយយកស្រុកហាន់តុង បានសម្លាប់ **ហែហ៊្វូអៀន** ទាហានឯក**ចូឆូ** រហូតដល់**ចូឆូ**ចាញ់ទ័ព**ជូឡុង**រត់ទៅនៅស្រុក ឡាំតេង*)

**សម័យ**នោះព្រះចៅ**ហៀនតេ**ទៅគង់នៅស្រុកហ៊ូតោបាន២៣ឆ្នាំ ព.ស ៦៧១ ជាទេសកាលខែស្រាពណ៍ **ឡោពី**លើកទ័ពពីស្រុកសៃឈួន លុះទៅដល់គយហែបេងគួន ក៏ឲ្យតាំងបន្ទាយយ៉ាងមាំមួននៅក្រៅទីគយនោះ ហើយឲ្យបម្រើសេះស្រួតទៅហៅយកខ្លួន**ហាងតុង** និង**ងៀមង៉ាន់**មកឲ្យបំណាច់រង្វាន់ជាច្រើន ហើយថា ទាហានទាំងពួងសឹងតែមើលងាយថា ខ្លួនអ្នកចាស់ជរានឹងធ្វើការសង្គ្រាមមិនបាន មានតែ**ខុងបេង**និងយើងដឹងថា អ្នកនឹងធ្វើការសង្គ្រាមបាន បានជាឲ្យយកអាសាមកធ្វើការយកជ័យជម្នះដល់**ទៀវខាប់**។ ឥឡូវនេះអ្នកក៏បានស្បៀងអាហារនិងគ្រឿងប្រដាប់ខាងភ្នំធៀនតងសាន់អស់ហើយ នៅឡើយតែស្បៀងខាងភ្នំតេងគុនសាន់ ដែល**ហែហ៊្វូអៀន**ត្រួតត្រារក្សានោះ បើយើងមានស្បៀងនៅតំបន់នោះទៀត ស្រុកហាន់តុងក៏នៅក្នុងកណ្ដាប់ដៃយើងមិនខាន។

**ហាងតុង**ថា ខ្ញុំបាទសុំយកអាសាទៅទម្លាយស្បៀងនៅភ្នំតេងគុនសាន់ឲ្យបាន។ **ខុងបេង**ថា អ្នកជាមនុស្សចាស់មានថ្វីដៃខ្លាំងពូកែមែនហើយ តែកម្លាំងគង់អន់ថយដោយអាការជរា ឯ**ហែហ៊្វូអៀន**គេមានថ្វីដៃលើសជាង**ទៀវខាប់** ហើយនៅក្មេងជាងអ្នក **ចូឆូ**ក៏ស្ម័គ្រស្រឡាញ់ពេញចិត្តណាស់ បានជាប្រើឲ្យមកឈររក្សាស្រុកហាន់តុង ដែលអ្នកប្រុងនឹងទៅកាច់បំបាក់យកដោយពលក្ការៈនោះមិនងាយទេ ចាំ

គិតផ្ទេរឲ្យមនុស្សទៅរក្សាស្រុកកេងជីវជំនួស**គួនអ៊ូ** ឲ្យ**គួនអ៊ូ**មកតស៊ូនឹង**ហែហ៊្លីអៀន** ទើបបាន។

**ហងតុង**ឮ**ខុងបេង**ថាដូច្នោះ ក៏ខឹងណាស់ថា កាលគ្រាចៅហ្វាយស្រុកកុក មានទាហានម្នាក់ឈ្មោះ**លៀមផៅ** អាយុ៥០ប្លាយឆ្នាំ មានកម្លាំងច្រើនណាស់ ស៊ីបាយមួយពេលព្រឹកមួយពេលល្ងាចអស់អង្ករមួយថាំង ស៊ីសាច់ជ្រូកមួយថ្ងៃអស់៥នាឡិ អាណាខេត្តទាំងពួងរមែងកោតខ្លាច**លៀមផៅ**គ្រប់ៗគ្នា យ៉ាងដូចខ្លួនខ្ញុំត្រឹមតែអាយុ៧០ឆ្នាំនៅឡើយ នឹងសុំទាហានតែបីពាន់ទៅជាមួយជួយធ្វើការ ខ្ញុំនឹងកាត់យកសិរសា**ហែហ៊្លីអៀន**មកជូនលោកឲ្យបាន។ **ខុងបេង**ក៏ចេះតែនិយាយឃាត់ហាមដល់បីដង **ហងតុង**មិនស្ដាប់ ចេះតែអង្វរសុំឲ្យខ្លួនយកអាសាទៅឲ្យបាន **ខុងបេង**ក៏និយាយនឹង**ហងតុង**ថា អ្នកនឹងទៅតាមចិត្តចុះ យើងនឹងឲ្យ**ហ៊្លីតចេង**ទៅផង ខ្លួនយើងនៅក្រោយនឹងចាត់ចែងទាហានលើកជាជំនួយទៅជួយ។ **ហងតុង**ក៏ប្រមូលទាហានរបស់ខ្លួន និងទាហាន**ហ៊្លីតចេង**បញ្ចូលគ្នាហើយក៏គំនាប់លា**ខុងបេង**ស្រូតលើកទ័ពតម្រង់ទៅភ្នំតេងគុនសាន់។

**ខុងបេង**ក៏និយាយនឹង**ឡៅពី**ថា ខ្ញុំបានញុះឲ្យ**ហងតុង**ទាហានចាស់ទុំទៅធ្វើការគ្រានេះនឹងទុកចិត្តមិនទាន់បានទេ ព្រោះ**ហងតុង**ជរាណាស់ ទៅហើយត្រូវតែយើងឲ្យទាហានលើកជំនួយទៅទៀត **ខុងបេង**ក៏បង្គាប់**ជូឡុង**ថា អ្នកចូរលើកទាហានមួយកងស្រូតទៅតាមផ្លូវតូច បើឃើញ**ហងតុង**ទន់ថយក៏ឲ្យលើកចូលទៅជួយឲ្យឆាប់ បើឃើញបានចំណាប់ក៏ឲ្យពួនស្ដាប់ក្នុងទីកំបាំង ហើយក៏បង្គាប់ឲ្យ**ឡៅហង**និង**បេងតាត់**ថា ឲ្យអ្នកទាំងពីរលើកទាហានបីពាន់ទៅផ្លូវមួយបើដល់ភ្នំតេងគុនសាន់ហើយឃើញទីណាស្រឡះ ក៏ឲ្យឈប់កងទ័ពនៅទីនោះ ហើយឲ្យទាហានដោតទង់លើកឡើងស្រែកហ៊ោឲ្យខ្លាំងកុំឈប់។

**ជូឡុង, ឡៅហាង** និង**បេងតាត់**ក៏គំនាប់លា**ខុងបេង**ចេញទៅ ទាំងអស់គ្នាក៏លើកទ័ពទៅធ្វើតាមបង្គាប់**ខុងបេង** ហើយ**ខុងបេង**ក៏ឲ្យ**ង៉ៀមង៉ាន់**ទៅនៅរក្សាស្រុកប៉ាសេ ឲ្យហៅ**តៀវហ៊ុយ**និង**អ៊ុយអៀន**ចូលមកឯបន្ទាយហែបេងគួន នឹងគិតលើកទ័ពទៅវាយយកស្រុកហាន់តុង។

ខណៈនោះ**ទៀវខាប់** និង**ហែហ៊្វូសុង**ក៏ទៅប្ដឹងព័ត៌មាន **ហែហ៊្វូអៀន**ថាទីភ្នំផៀនតងសាន់នោះបែកបានទៅ**ហាងតុង**ហើយ **ហែហ៊្វូតេក** និង**ហាន់ហោ**ក៏ស្លាប់ក្នុងទីចម្បាំង ឥឡូវឮដំណឹងថា **ឡៅពី**លើកទ័ពមកវាយយកស្រុកហាន់តុងទៀត ការនេះត្រូវតែយើងនឹងយកសេចក្ដីពីរាជការគ្រប់ជំពូក បកប្ដឹងចូលទៅក្រាបទូលព្រះចៅ**វុយអេង**ទើបគួរ ដើម្បីនឹងបានគិតការសង្គ្រាមការពារទ័ព**ឡៅពី**។ **ហែហ៊្វូអៀន**បានស្ដាប់ក៏យល់ឃើញត្រូវ ទើបឲ្យបម្រើស្រួតទៅប្ដឹង**ចោហាង**ឯស្រុកឡាំតេង។ **ចោហាង**ក៏ឲ្យកាន់សំបុត្រចូលទៅក្រាបទូលព្រះចៅ**វុយអេង**ឯក្រុងហ៊្វូតោ ទូលថ្លែងសេចក្ដីទាំងពួងគ្រប់ប្រការ។

**ចូឆូ**ដឹងការហើយក៏ភ័យខ្លាំងណាស់ ទើបប្រឹក្សានឹងទាហានទាំងពួងថា ឥឡូវភ្នំផៀនតងសាន់ខូចនឹង**ឡៅពី**ទៅហើយ **ឡៅពី**រិះគិតលើកកងទ័ពទៅវាយយកស្រុកហាន់តុង អ្នកទាំងពួងនឹងយល់ឃើញប្រការម្ដេច? **ឡៅហ៊្វូ**ទូលថា ឯស្រុកហាន់តុងនោះជាស្រុកមុខគយនៃស្រុកយើង បើ**ឡៅពី**បានស្រុកហាន់តុងហើយ មុខជានឹងកន្លងចូលមកវាយយកស្រុកយើងទៀតជាប្រាកដ សូមព្រះអង្គទ្រង់រិះគិតលើកទ័ពទៅជួយការពារអន្តរាយនេះទើបបានស្រួល។

ព្រះចៅ**វុយអេង**ថា យើងនឹកឡើងគួរតូចចិត្តណាស់ ព្រោះមិនព្រមជឿស្ដាប់ពាក្យអ្នកពន្យល់ពីកាលនោះ បានជា**ឡៅពី**នៅរស់ ចេះគិតធ្វើការកន្លងចូលមកដោយសេចក្ដីមើលងាយប្រមាថយើងដល់ទីនេះ បើប្រសិនជាយើងសម្លាប់វាចេញ តាម

ពាក្យអ្នកគ្រានោះឲ្យហើយ កាលណាឡើយនឹងព្រួយរវល់អំពល់ក្តៅក្រហាយដូច្នេះ។ ថាហើយក៏ឲ្យប្រមូលពលទាហានបានសែសិបម៉ឺន ញែកចេញជាពីរកង ឲ្យ**ហៃហ៊្លួទុន**ជាកងទ័ពមុខ ឲ្យ**ចោហ៊ីវ**ជានាយកងទ័ពក្រោយ លុះបានឫក្សពារពេលល្អ ក៏ឲ្យ**ហៃហ៊្លួទុន**លើកចេញទៅមុន។

ខណៈនោះព្រះចៅ**ហៀនតេ**បានទៅគង់នៅក្រុងហ៊ូតោ២៣ឆ្នាំ ដល់ខែភទ្របទ ព្រះចៅ**វុយអេង**តែងខ្លួនយ៉ាងក្សត្រកាន់ទង់អាជ្ញាសិទ្ធិ ជិះសេះចងគ្រឿងមាសបាំងសប្បធន់មាសមានទាហានដើរហែមុខសេះកាន់ទង់រូបខែ រូបថ្ងៃ ទង់មករ ទង់ហង្ស តាមទំនៀមក្សត្រ ហើយចាត់ទាហានដែលមានថ្វីដៃសម្រាប់រក្សាព្រះអង្គចំនួនម្ភៃប្រាំពាន់ ញែកជាប្រាំកង កងមុខឲ្យកាន់ទង់ក្រហមជាសម្គាល់ កងស្តាំឲ្យកាន់ទង់ខៀវ កងឆ្វេងឲ្យកាន់ទង់ស កងក្រោយឲ្យកាន់ទង់ខ្មៅ កងកណ្តាលដែលដើរអមសេះនោះ ឲ្យកាន់ទង់លឿង។

លុះពេលកំណត់ពេលា ក៏ឲ្យទាហានស្រែកហ៊ោវាយគងទូងស្គរឃ្មោះ តាំងក្បួនហែចេញទៅពីទីក្រុង តម្រង់ទៅស្រុកហាន់តុង។ **ចោហ៊ីវ**ក៏លើកទាហានកងក្រោយតាមទៅផុតគយតុងគួន។ **ចូឆូ**នៅលើខ្នងសេះ ក្រឡេកឃើញកម្ពោតឈើធំមានស្លឹកស្ពោមសាខានៅក្នុងព្រៃខាងស្តាំដៃ ក៏សួរទាហានថា ព្រៃនេះហៅឈ្មោះអ្វី? ទាហានទូលថា ឈ្មោះតំបន់ឡាំឆាន់ ផុតព្រៃនេះចុះទៅដល់កំពង់ទឹក ហៅតំបន់ស្រុកសួកែជឹង។ **សួយ៉ុង**ដែលជាមេឃុំភូមិនោះ មានកូនស្រីម្នាក់រូបល្អណាស់ ឈ្មោះនាង**សួអៀម, ចោអៀនអង**ចាប់យកទៅ។

**ចូឆូ**ឮដូច្នោះក៏ថា **សួយ៉ុង**នេះពីដើមយើងបានស្គាល់រាប់អានគ្នា កាលគ្រា**ចោអៀនអង**ចាប់យកកូនទៅនោះ ហើយឲ្យទាហានយកមាសមួយពាន់ដំឡឹងទៅដូរយកមក យើងក៏បានតុបតែងលើកឲ្យជាភរិយា**តាំងគី** ឥឡូវ**សួយ៉ុង**ស្លាប់ហើយ

យើងនឹងគេចចូលទៅសួរនាង**សួរអៀម**បន្តិចចុះ។ លុះទៅដល់មុខផ្ទះ **ចូឆ្វ**ក៏ឲ្យទាហានលើកហួសរំលងទៅមុខ **ចូឆ្វ**និងមនុស្សស្និទ្ធប្រហែលមួយរយប្លាយនាក់ ក៏នាំគ្នាចូលទៅក្នុងភូមិស្វ៊ែកជឹងដល់ទ្វារភូមិ **ចូឆ្វ**ក៏ចុះពីលើសេះដើរចូលទៅ។

នាង**សួរអៀម**ឃើញក៏មានចិត្តត្រេកអរណាស់ រត់ចេញមកគំនាប់អញ្ជើញ**ចូឆ្វ**ឲ្យទៅលើផ្ទះ **ចូឆ្វ**ឃើញថ្មមួយផ្ទាំងបញ្ឈរទុកនៅក្បែរទ្វារផ្ទះនោះ ក៏សួរនាង**សួរអៀម**ថា នោះគឺថ្មអ្វី? នាង**សួរអៀម**ឆ្លើយថា កាលគ្រាព្រះចៅ**ហោតេ**បានសោយរាជសម្បត្តិក្នុងស្រុកហ្លួង បិតានាង**ចោង៉**មកលេងប្រណាំងទូកធ្លាក់ទឹកស្លាប់បាត់សពរកមិនឃើញ នាង**ចោង៉**ជាបុត្រីអាយុបាន១៤ឆ្នាំ ខំស្វះស្វែងរកខ្មោចអាពុកដល់៧ថ្ងៃ ចេះតែយំសោកក៏រកមិនឃើញ នាង**ចោង៉**នឹកខឹងចិត្តក៏លោតទឹកស្លាប់តាមបិតា កន្លងមក៥ថ្ងៃទៀត នាង**ចោង៉**ក៏កៀកឱបសពបិតាអណ្តែតឡើងទាំងពីរ។ ចៅហ្វាយស្រុកតោសៀងក៏យកសេចក្តីនេះទៅក្រាបទូលព្រះចៅ**ហោតេ** ព្រះចៅ**ហោតេ**ក៏ត្រាស់ឲ្យសរសេរឆ្លាក់អក្សរជាឈ្មោះនាង**ចោង៉**ដាក់ក្នុងថ្មនេះ មកដោតទុកជាពាក្យថា (ហៅលី, រោសីៗ ប្រែថា នាងដឹងគុណមាតាបិតា)។

**ចូឆ្វ**ឮដូច្នោះក៏ថា ដែលនាង**ចោង៉**មានកតញ្ញូនឹងអ្នកដ៏មានគុណដូច្នោះប្រសើរណាស់ គួរឲ្យមនុស្សទាំងពួងមើលមកជាយឿងយ៉ាងតទៅ ហើយ**ចូឆ្វ**ក៏លានាង**សួរអៀម**ចេញពីភូមិនោះស្រូតទៅទៀត ដើរផ្លូវកន្លះថ្ងៃទើបដល់ស្រុកឡាំតេង ដែល**ចោហាង**នៅរក្សាព្រមគ្នានឹងទាហានដែលមកដល់មុន។ **ចោហាង**ក៏មានអំណរណាស់ចេញមកគំនាប់អញ្ជើញ**ចូឆ្វ**ចូលទៅក្នុងស្រុកនោះ ហើយទូលអាថ៌សេចក្តីតាមដែល**ទៀវខាប់**ធ្វើការឲ្យថ្លោះធ្លោយដល់សត្រូវ ឲ្យទ្រង់ព្រះសណ្តាប់គ្រប់ប្រការ។

**ចូឆ្វ**ថា ធម្មតាការសង្គ្រាមនោះ នឹងសម្គាល់យកឈ្នះតែម្យ៉ាងនោះមិនបានទេ ត្រូវតែមានចាញ់ខ្លះជាធម្មតា ដែល**ទៀវខាប់**បរាជ័យគ្រានេះយើងនឹងលើកទោស

ទុកឲ្យធ្វើការរាជការកែខ្លួនម្តងទៀត។ **ចៅហង**ទូលថា ឥឡូវ**ឡៅពី**ឲ្យ**ហងតុង**លើកមកច្បាំងយកភ្នំតេងកុនសាន់ **ហែហ៊្វអៀន**ដឹងថា ព្រះអង្គលើកកងទ័ពមក ក៏បង្អែបង្អង់នៅឡើយ មិនទាន់ចេញតស៊ូនឹង**ហងតុង**ទេ។ **ចូឆូ**ឮដូច្នោះ ក៏ធ្វើព្រះតម្រាស់នឹងទាហានកាន់យកទៅឲ្យ**ហែហ៊្វអៀន**មួយច្បាប់ សេចក្តីថា ឲ្យ**ហែហ៊្វអៀន**ខំយកចិត្តទុកដាក់ ស្រូតរូតលើកទ័ពទៅច្បាំងនឹង**ហងតុង**ជាប្រញាប់។ **ឡៅហ៊្វ**ទូលថា **ហែហ៊្វអៀន**នោះជាមនុស្សមោហោច្រើន នឹងធ្វើការអ្វីមិនសូវមានពិគ្រោះពិចារណាសោះ ខ្លាចក្រែង**ឡៅពី, ខុងបេង**នឹងរិះគិតធ្វើកលឧបាយបញ្ឆោត មុខជា**ហែហ៊្វអៀន**ដឹងមិនដល់ ក៏ចាញ់កលគេខូចការទៅ ដែលព្រះអង្គនឹងឲ្យ**ហែហ៊្វអៀន**ចេញច្បាំងនឹង**ហងតុង**នោះ ចូរទ្រង់ពិគ្រោះមើលឲ្យគួរសិន។

**ចូឆូ**បានឮដូច្នោះក៏យល់ឃើញត្រូវ ទើបតែងព្រះតម្រាស់មួយច្បាប់ទៀត សេចក្តីថា ធម្មតាអ្នកដែលជានាយទ័ព នាយកងនឹងធ្វើការសង្គ្រាមនោះ ត្រូវឲ្យដឹងស្គាល់ទីបង់ទីបាន កុំឲ្យស្មានអាងថ្វីដៃរបស់ខ្លួន វិស័យថ្វីដៃរបស់ខ្លួននោះ នឹងកាច់បំបាក់យកមនុស្សរយមនុស្សពាន់ មិនត្រូវទេ នឹងតគ្នាបានតែខ្លួនមួយនឹងខ្លួនមួយ រៀរមួយតែអ្នកដែលមានតម្រិះចេះគិតដឹងកលជ្រៅឆ្ងាយក្នុងការសង្គ្រាម ទើបនឹងអាចធ្វើតាមយោបល់ឲ្យបានជ័យជម្នះអស់ពួកបច្ចាមិត្ត ដែលច្រើននោះបាន ដែល**ហែហ៊្វអៀន**នឹងធ្វើការសង្គ្រាមនេះ ត្រូវឲ្យត្រិះរិះឲ្យមួនមាំមែនទែន កុំឲ្យថ្លោះការអសារកេរ្តិ៍ឈ្មោះ បំណាច់យើងចិញ្ចឹមឲ្យមានសក្តិយសពេញជានាយទាហានឯកមកយូរហើយ។ ឥឡូវយើងក៏បានលើកពលមកដល់ស្រុកឡាំតេងហើយ នឹងបង្អង់មើលសេចក្តីរិះគិតរបស់ចៅមួយគ្រាសិន មួយទៀតដែល**ទៀវខាប់**ធ្វើការមុនឲ្យថ្លោះការនឹងសត្រូវនោះ យើងក៏លើកទោសចោលហើយ ឲ្យខំរិះគិតធ្វើការកែខ្លួនទៅ

ទៀតចុះ។ ហើយ**ចូឆូ**ក៏ប្រើទាហានឲ្យកាន់សំបុត្រនោះទៅឲ្យ**ហែហ៊ូអៀន**ទាំងពីរច្បាប់។

**ហែហ៊ូអៀន**បានទទួលព្រះតម្រាស់ទាំងពីរច្បាប់ មើលយល់សេចក្ដីហើយ ក៏អរណាស់ទើបបង្គាប់បម្រើដែលកាន់សំបុត្រនោះថា ឲ្យអ្នកឯងវិលចូលទៅក្រាបទូលព្រះចៅ**វុយអេង**ចុះថា កុំឲ្យទ្រង់ព្រះវិតក្កឡើយ ការតែប៉ុណ្ណេះយើងនឹងទទួលអាសាធ្វើឲ្យសម្រេចបាន។ បម្រើក៏វិលត្រឡប់ទៅទូលតាមសេចក្ដីនោះ ឲ្យ**ចូឆូ**ជ្រាបគ្រប់ប្រការ។ **ហែហ៊ូ**ក៏ឲ្យរកហៅខ្លួន**ទៀវខាប់**មកបង្ហាញសំបុត្រនោះឲ្យមើលហើយប្រឹក្សាគ្នាថា ឥឡូវព្រះចៅ**វុយអេង**ក៏លើកទ័ពហ្លួងមកតាំងនៅស្រុកឡាំតេងយើងនឹងបង្អង់នៅស្ងៀមឲ្យយូរការ នឹងមានសេចក្ដីគាប់ប្រសើរឬបំណាច់នោះមកពីណា វេលាព្រឹកនេះត្រូវតែយើងរិះគិតលើកទ័ពចេញទៅច្បាំងនឹង**ហាងតុង**ចុះ ដើម្បីនឹងចាប់ខ្លួន**ហាងតុង**ឲ្យបាន។

**ទៀវខាប់**ថា **ហាងតុង**នោះជាមនុស្សមានថ្វីដៃខ្លាំងពូកែស្ទាញស្ទាត់ក្នុងចម្បាំងណាស់ ឯ**ហ៊ួតចេង**សោតក៏មានតម្រិះប្រាជ្ញាឆ្លៀវឆ្លាតណាស់ដែរ លោកកុំអាលមើលងាយ**ហាងតុង**នោះឡើយ។ មួយទៀតភ្នំតេងគុនសាន់នោះក៏ជាទីសំខាន់មាំមួន **ហ៊ួតចេង**នឹងគិតកលឧបាយប្រការម្ដេច យើងក៏ពុំអាចដឹងបាន សុំឲ្យលោកនៅតាំងឲ្យខ្ជាប់ខ្ជួនបន្តិចសិនទៅ ដើម្បីនឹងចាំស្ដាប់ដំណឹងសឹកមើល។

**ហែហ៊ូអៀន**ថា អ្នកថានេះក៏ត្រូវហើយ តែខ្ញុំគិតឃើញថា បើមានអ្នកណាទៀត មកដណ្ដើមវាយយក**ហាងតុង**បែកបាក់ជាមុនយើងទៅ យើងមិនបានសេចក្ដីអប្បយសខូចឈ្មោះទេឬ នឹងមកមុខត្រង់ណាចេញទៅគាល់ព្រះចៅ**វុយអេង**ឲ្យស្មើនឹងគេបាន បើអ្នកមិនយល់ព្រមក៏ត្រូវនៅរក្សាបន្ទាយចុះ តែកម្លាំងខ្ញុំម្នាក់ឯងប៉ុណ្ណោះ ក៏គង់យកជ័យជម្នះបានដែរ។ ហើយ**ហែហ៊ូអៀន**ក៏សួរទាហានទាំងពួងថា

នរណានឹងយកអាសាជានាយកងទ័ពមុខបាន? **ហៃហ៊្សួសុង**ឆ្លើយទទួលថា ខ្ញុំបាទសូមអាសាជានាយកងទ័ពមុខលើកទៅវាយមុន។

**ហៃហ៊្សួអៀន**ឮដូច្នោះក៏មានអំណរណាស់ ទើបប្រគល់ទាហានបីពាន់ឲ្យ **ហៃហ៊្សួសុង** ហើយបង្គាប់ថា អ្នកឯងនឹងចេញទៅវាយ**ហាងតុង**គ្រានេះ យើងនឹងគិតកលឧបាយយកជ័យជម្នះជាខាងក្រោយឲ្យបាន។ **ហៃហ៊្សួសុង**ទទួលពាក្យហើយ ក៏លើកទាហានបីពាន់ចេញពីបន្ទាយទៅ។ **ហៃហ៊្សួអៀន**ក៏លើកទាហានចេញទៅប្រចាំនៅមាត់ផ្លូវ ហើយឲ្យទាហានជញ្ជូនដុំថ្ម កាត់ដើមឈើជាកំណាត់ៗគរទុកនៅលើភ្នំទាំងសងខាងផ្លូវជាច្រើន។

ឯ**ហាងតុង**និង**ហ៊្សួតចេង**នោះ ក៏លើកកងទ័ពទៅតាំងនៅមុខភ្នំយូរណាស់ ចេះតែប្រើទាហានឲ្យទៅស្រែកជេរបញ្ឈឺចិត្តគ្រប់ពេលវេលា ក៏មិនឃើញ**ហៃហ៊្សួអៀន**ចេញមកយុទ្ធនាសោះ សំងំនៅក្នុងរូងភ្នំយូរថ្ងៃ **ហាងតុង**ក៏ប្រុងប្រយ័ត្នការនៅក្នុងបន្ទាយ ស្រាប់តែមានទាហានចូលទៅប្រាប់ថា ឃើញ**ហៃហ៊្សួសុង**លើកទាហានមកច្រើនណាស់ នោះ**ហាងតុង**ក៏លើកទាហានចេញពីបន្ទាយ **តាន់សេក**នាយទាហានជម្រាប**ហាងតុង**ថា ការតែប៉ុណ្ណេះលោកមិនបាច់ព្រួយរវល់ទេ ខ្ញុំបាទនឹងសុំអាសាចេញទៅតស៊ូនឹង**ហៃហ៊្សួសុង**ចាប់ខ្លួនវាឲ្យបាន។

**ហាងតុង**ឮដូច្នោះក៏អរណាស់ ប្រគល់ទាហានមួយពាន់ឲ្យ**តាន់សេក**លើកចេញទៅមុខបន្ទាយ លុះ**ហៃហ៊្សួសុង**លើកមកប្រទះគ្នា **តាន់សេក**ក៏បរសេះចូលប្រយុទ្ធគ្នានឹង**ហៃហ៊្សួសុង**បានប្រាំពីរភ្លែង **ហៃហ៊្សួសុង**ធ្វើជាចាញ់បំផាយសេះរត់ទៅក្រោយ **តាន់សេក**ក៏ដេញបណ្ដោយទៅប្រមាណម្ភៃសិន (៨០០ម) ដល់ច្រករូងភ្នំដែល**ហៃហ៊្សួអៀន**ត្រៀមទាហានចាំបង្កប់នៅទីនោះ ៗទាហាននៅលើភ្នំក៏ប្រមៀលដុំថ្មនិងកំណាត់ឈើចុះមកដូចគេបាចសាច។ **តាន់សេក**តក់ស្លុតភិតភ័យណាស់ ក៏

បំផាយសេះត្រឡប់មកក្រោយវិញ ប្រទះនឹង**ហែហ៊្សូអៀន**លើកទាហានស្ទាក់ពីមុខជាប់ **ហែហ៊្សូអៀន**ឃើញ**តាន់សេក**គ្រាំគ្រានឹងដុំថ្មគំនរឈើប៉ះទង្គិចខ្ទេចអស់ទាំងខ្លួន ក៏បំផាយសេះចូលទៅចាប់ខ្លួន**តាន់សេក**បាន ចងនាំចូលទៅបន្ទាយ ទាហាន**តាន់សេក**ក៏បាក់បែកខ្ចាត់ខ្ចាយស្លាប់អន្តរាយច្រើនណាស់ **ហែហ៊្សូអៀន**ចាប់បានខ្លះៗរត់រួចចូលទៅបន្ទាយវិញ ហើយយកសេចក្តីប្តឹងឲ្យ**ហាងតុង**ដឹងគ្រប់ប្រការ។

**ហាងតុង**ដឹងហើយក៏ភ័យណាស់ ប្រឹក្សាពិគ្រោះនឹង**ហ៊្សួតចេង**ថា វេលានេះ **តាន់សេក**លើកទ័ពទៅធ្វើការបរាជ័យនឹង**ហែហ៊្សូអៀន**ហើយ យើងនឹងរិះគិតប្រការម្តេចទើបនឹងសងសឹកយកជ័យជម្នះបានវិញ? **ហ៊្សួតចេង**ថា **ហែហ៊្សូអៀន**នោះមានកម្លាំងនិងថ្វីដៃខ្លាំងពូកែក៏មែន តែមោហោច្រើន គ្មានតម្រិះចេះគិតការរាក់ជ្រៅទេ នឹងធ្វើការអ្វីក៏ពុំសូវពិនិត្យពិច័យ យើងនឹងគិតកលសឹកតដៃវិញ ហៅថាកល (ហ៊្សូនខេក អ៊ុយជូជីអ៊្សួត) ប្រែថា ភ្ញៀវត្រឡប់មកជួយម្ចាស់ផ្ទះ។ យើងនឹងតាំងបន្ទាយរៀងជាលំដាប់គ្នាទៅ ទុកត្រង់ចន្លោះចុងផ្លូវចម្ងាយពីគ្នាមួយសិន (៤០ម) គ្រប់ៗបន្ទាយ ហើយឲ្យយករបស់ទ្រព្យផ្សេងៗទៅទុកក្នុងបន្ទាយ ហើយទាហាននៅថែរក្សាតែបន្តិចបន្តួចក៏បាន។ **ហែហ៊្សូអៀន**ឃើញថា យើងតាំងបន្ទាយភ្ជាប់ៗគ្នារៀងទៅជួបគ្នា ក៏គង់នឹងលើកទ័ពមកវាយ។ យើងនឹងឲ្យទាហានដែលថែរក្សាបន្ទាយនោះ ធ្វើជាបែកផ្កាយនាំគ្នារត់ចោលបន្ទាយទាំងអស់។ **ហែហ៊្សូអៀន**បានទ្រព្យរបស់ច្រើន ក៏នឹងទន្ទ្រានបំពានវាយចូលមកទៀត សឹមយើងលើកទាហានទៅចោមព័ទ្ធជុំវិញឲ្យជាប់ មុខជានឹងចាប់ខ្លួន**ហែហ៊្សូអៀន**បានដោយងាយ។

**ហាងតុង**បានស្តាប់ក៏ចាប់ចិត្តគិតឃើញត្រូវ ទើបឲ្យទាហានតាំងបន្ទាយរៀងគ្នាជាលំដាប់ទៅ ចម្ងាយប្រហែលមួយសិនពីគ្នា (៤០ម) ហើយយករបស់ទ្រព្យផ្សេងៗទៅគរដាក់តាមពាក្យ**ហ៊្សួតចេង**ថា។ **ហែហ៊្សូអៀន**ឃើញដូច្នោះមិនយល់ក្នុង

កល**ហ៊្លួតចេង** ក៏គិតថា **ហាងតុង**តាំងបន្ទាយភ្ជាប់ៗគ្នាមកដូច្នោះ មុខជានឹងគិតចូលចោមវាយបន្ទាយយើងជាប្រាកដ។ គិតហើយក៏រៀបចាត់ចែងទាហាននឹងលើកចេញទៅវាយបន្ទាយ**ហាងតុង**។

**ទៀវខាប់**ក៏និយាយនឹង**ហែហ៊្លួអៀន**ថា ដែល**ហាងតុង**ធ្វើការយ៉ាងនេះ មិនមែននឹងលើកទ័ពមកកាច់បំបាក់ទម្លាយបន្ទាយយើងទេ គឺធ្វើជាកលឧបាយហៅថា (ហ៊្លួនខេក អ៊ុយជូជីអ៊្លួត) បើលោកនឹងលើកចេញទៅច្បាំងវេលានេះ មុខជានឹងថ្លោះការបរាជ័យនឹង**ហាងតុង**ជាប្រាកដមិនខាន។ **ហែហ៊្លួអៀន**មិនស្ដាប់ បង្គាប់ឲ្យ**ហែហ៊្លួសុង**លើកទាហានមួយពាន់ ចេញទៅវាយបន្ទាយ**ហាងតុង** ឯក្នុងបន្ទាយនោះក៏ធ្វើជាបែកទម្លាយរត់ចេញតាមសញ្ញា **ហែហ៊្លួសុង**ក៏កំរើបចិត្តក្លៀវក្លាលើកចូលទៅ **ហាងតុង**ក៏ចាប់ខ្លួន**ហែហ៊្លួសុង**បាន ចងនាំចូលទៅក្នុងបន្ទាយ ពួកទាហានក៏បាក់បែកខ្ចាយខ្ចាយរត់ទៅអស់ ខ្លះក៏ចូលទៅយកសេចក្ដីប្ដឹង**ហែហ៊្លួអៀន**គ្រប់ប្រការ។

**ហែហ៊្លួអៀន**ដឹងដូច្នោះ ក៏ប្រើទាហានទៅស្រែកប្រាប់**ហាងតុង**ថា កាលពីម្សិលមិញ យើងចាប់ខ្លួន**តាន់សេក**បាន ឥឡូវខាងនេះចាប់ខ្លួន**ហែហ៊្លួសុង**បានវិញ សង្គ្រាមក៏ទុកជាស្មើគ្នាទាំងសងខាង ក៏មិនមានចាញ់ប្រៀបគ្នាទេ អ្នកចូរលែងខ្លួន**ហែហ៊្លួសុង**មកឲ្យយើងចុះ យើងនឹងលែងខ្លួន**តាន់សេក**ទៅវិញ។ **ហាងតុង**ឮដូច្នោះក៏ឆ្លើយតបថា អ្នកឯងនិយាយមកនេះគួរហើយ ព្រឹកស្អែកឲ្យ**ហែហ៊្លួអៀន**លែងខ្លួន**តាន់សេក**មកឲ្យយើងចុះ យើងនឹងលែងខ្លួន**ហែហ៊្លួសុង**ទៅវិញ តែកុំឲ្យពាក់ក្រោះកាន់អាវុធនៅដៃដូចគ្នាទាំងសងខាង ទាហាននោះក៏វិលទៅប្រាប់**ហែហ៊្លួអៀន**គ្រប់ប្រការ។

**ហែហ៊្លួអៀន**ឮដូច្នោះអរណាស់ លុះដល់ពេលព្រឹកក៏ឲ្យនាំខ្លួន**តាន់សេក**ចេញមកដល់ក្បែរជើងភ្នំ ចំមុខបន្ទាយ**ហាងតុង** ។ក៏ឲ្យនាំខ្លួន**ហែហ៊្លួសុង**ចេញមកមុខ

បន្ទាយ ឲ្យឡើងសេះត្រៀមទុកសងខាង ហើយក៏ឲ្យវាយស្គរតាសញ្ញា **តាន់សេក**ក៏បំផាយសេះចេញមកបន្ទាយ **ហែហ៊ួសុង**ក៏បំផាយសេះចូលទៅបន្ទាយខាងម្ខាងព្រមគ្នា។ ខណៈកាល**ហែហ៊ួសុង**បំផាយសេះទៅនោះ **ហងតុង**ក៏ដំឡើងធ្នូទុកស្រេច លុះ**ហែហ៊ួសុង**បំបោលសេះទៅដល់ជិតទ្វារបន្ទាយ **ហងតុង**ក៏បាញ់ធ្នូតម្រង់ ព្រួញក៏រត់ទៅត្រូវ**ហែហ៊ួសុង**ធ្លាក់ពីលើសេះស្លាប់។

**ហែហ៊ួអៀន**ឃើញដូច្នោះក៏ខឹងណាស់ បំផាយសេះចូលទៅតដៃនឹង**ហងតុង** បានម្ភៃភ្លែង ទាហានដែលនៅក្នុងបន្ទាយក៏វាយឃ្មោះហៅ**ហែហ៊ួអៀន**តាមសញ្ញា **ហែហ៊ួអៀន**ក៏ញាក់សេះត្រឡប់ចូលបន្ទាយ **ហងតុង**ដេញទម្លាយកាប់សម្លាប់ទាហាន**ហែហ៊ួអៀន**ស្លាប់ជាច្រើន។ **ហែហ៊ួអៀន**សួរទាហានក្នុងបន្ទាយថា ហេតុម្តេចបានជាវាយឃ្មោះហៅយើង ដោយហេតុអ្វី? ទាហានក្នុងបន្ទាយឆ្លើយថា កាលលោកនិង**ហងតុង**កំពុងប្រយុទ្ធគ្នានោះ អស់យើងខ្ញុំបានឃើញទាហានសត្រូវទៅប្រជុំនៅរូងភ្នំជាច្រើនណាស់ ហើយឃើញដោតទង់ជាក្បួនទ័ពធំ យើងខ្ញុំខ្លាចក្រែងសត្រូវនឹងធ្វើកលឧបាយយកទាហានទៅពួនបង្កប់ បានជាវាយឃ្មោះឲ្យលោកវិលត្រឡប់មកវិញ។ **ហែហ៊ួអៀន**ឮដូច្នោះ ក៏ឲ្យទាហានប្រុងប្រយ័ត្នរក្សាបន្ទាយជាមាំមួន មិនបានលើកចេញច្បាំងនឹង**ហងតុង** ។ក៏ប្រឹក្សានឹង**ហ៊ួតចេង**ថា យើងធ្វើការសង្គ្រាមគ្រានេះ ចាញ់ប្រៀប**ហែហ៊ួអៀន**ច្រើនណាស់ ព្រោះ**ហែហ៊ួអៀន**តាំងនៅក្នុងរូងភ្នំ កាលណាវាឃើញបានឱកាសស្រួល ទើបលើកទ័ពចេញមកច្បាំងនឹងយើង បើវាឃើញមិនស្រួលក៏រត់ចូលបន្ទាយ យើងនឹងរិះគិតធ្វើយ៉ាងម្តេច ទើបនឹងចាប់ខ្លួន**ហែហ៊ួអៀន**បាន?

**ហ៊ួតចេង**ថា បើយើងបានភ្នំថៃសាន់ខាងទិសឯលិចហើយ ភ្នំតេងគុនសាន់ក៏មិនផុតពីកណ្តាប់ដៃយើង ព្រោះភ្នំនោះខ្ពស់ជាទីសំខាន់ស្រួលណាស់ បើយើងឡើង

ទៅនៅខាងលើបាន ទោះបី**ហៃហ៊្វូអៀន**នឹងតាំងក្បួនទ័ពប្រការម្តេចៗ យើងក៏ក្រឡេកមើលឃើញទាំងអស់ យើងនឹងគិតធ្វើការវេលាណាក៏នឹងបានដោយស្រួល។

**ហាងតុង**ឮដូច្នោះក៏យល់ឃើញត្រូវ លុះដល់ពេលយប់យាមពីរក៏ប្រមូលទាហានព្រមគ្នាហើយក៏លើកទ័ពឡើងទៅដល់កំពូលភ្នំថៃសាន់ នោះ**តោស៊ុប**ដែល**ហៃហ៊្វូអៀន**ឲ្យលើកទាហានមួយរយទៅនៅរក្សាភ្នំនោះ បានឃើញ**ហាងតុង**លើកពលឡើងទៅជាច្រើន ក៏នាំទាហានរត់ចុះតាមផ្លូវក្រោយទៅប្រាប់**ហៃហ៊្វូអៀន**។

**ហ៊្វូតចេង**ក៏និយាយនឹង**ហាងតុង**ថា គ្រានេះយើងបានចំណាប់ហើយ ឲ្យលោកតាំងទ័ពនៅឲ្យមាំនៅលើភ្នំនេះចុះ ខ្ញុំនឹងលើកទាហានឡើងទៅលើកំពូលភ្នំខ្ពស់ បើ**ហៃហ៊្វូអៀន**ខឹងលើកមកនិយាយឡកចំអកឲ្យយ៉ាងណាក្តី គប្បីឲ្យមើលសម្គាល់ខាងខ្ញុំសិន បើឃើញខ្ញុំកាន់ទង់ស ក៏កុំអាលលើកចេញច្បាំងនឹង**ហៃហ៊្វូអៀន** បើឃើញខ្ញុំកាន់ទង់ក្រហមលើកឡើងហើយ សឹមលោកលើកទាហានចេញច្បាំងចុះ មុខជា**ហៃហ៊្វូអៀន**មានថ្លោះការនឹងយើងជាប្រាកដមិនខាន។ **ហាងតុង**យល់ឃើញត្រូវ ក៏នៅធ្វើតាមពាក្យ**ហ៊្វូតចេង**ក្នុងទីនោះគ្រប់ប្រការ។

**ហៃហ៊្វូអៀន**នោះ លុះដឹងថា**ហាងតុង**លើកទៅដណ្តើមយកភ្នំថៃសាន់បានដូច្នោះ ក៏ខឹងពន់ប្រមាណណាស់ទើបថា យើងស្ងៀមនៅដូច្នេះមិនគួរសោះ ត្រូវតែលើកទាហានទៅច្បាំងដណ្តើមយកភ្នំថៃសាន់វិញឲ្យបានទើបត្រូវ។ **ទៀវខាប់**ថា **ហាងតុង**ធ្វើការម្តងនេះ គឺតម្រិះកលឧបាយរបស់**ហ៊្វូតចេង** សូមឲ្យលោកតាំងឲ្យនឹងនៅកន្លែងត្រង់នេះសិន ដើម្បីស្តាប់ការ។ **ហៃហ៊្វូអៀន**មិនបានស្តាប់សោះចេះតែលើកទាហានចេញពីបន្ទាយទៅព័ទ្ធភ្នំថៃសាន់ទុកជាបួនផ្លូវ ហើយឲ្យទាហានចូលទៅស្រែកជេរប្រមាថ**ហាងតុង**ខ្លាំងណាស់។ **ហាងតុង**ខឹងគិតនឹងលើកទាហានទៅច្បាំងនឹង**ហៃហ៊្វូអៀន** ក៏ឃើញ**ហ៊្វូតចេង**នៅតែលើកទង់ស។

លុះពេលរសៀលល្ងាច **ហ៊្វិតចេង**ឃើញទាហាន**ហែហ៊្វិអៀន**អស់កម្លាំងចុះព្រោះអត់អាហារ ក៏លើកទង់**ក្រហម**ជាសញ្ញាឡើង។ **ហងតុង**ក៏ឲ្យទាហានប្រៀបប្រុងស្រែកហ៊ោវាយគងស្គរឃ្មោះ លើកបង្រុះចុះពីលើភ្នំមក ឃើញ**ហែហ៊្វិអៀន**ទម្លាក់ខ្លួនអង្គុយចុះដោះគ្រឿងសាស្ត្រាវុធ **ហងតុង**ក៏បំផាយសេះចូលទៅជិតនឹងដល់ហើយស្រែកគំហកដោយសំឡេងខ្លាំង។ **ហែហ៊្វិអៀន**តក់ស្លុតស្មារតីភ័យណាស់ មិនទាន់ចាប់អាវុធសោះ **ហងតុង**ក៏លើកដាវកាប់ត្រូវ**ហែហ៊្វិអៀន**ដាច់ក្បាលស្លាប់នៅទីនោះ អស់ពួកទាហានក៏បែកបាក់រត់ខ្ចាត់ខ្ចាយ។ **ហងតុង**ក៏លើកទាហានទាំងឡាយទៅវាយយកភ្នំតេងគុនសាន់ទៀត។

ឯ**ទៀវខាប់**នោះ លុះឃើញ**ហងតុង**វាយទ័ពសម្លាប់**ហែហ៊្វិអៀន**បែកអស់ហើយលើកដេញមកទៀត ក៏នាំទាហានរត់ចេញពីបន្ទាយ **ហងតុង**និង**តាន់សេក**ក៏ពារទម្លាយដេញចាក់កាប់សម្លាប់ទាហាន**ទៀវខាប់**ស្លាប់ច្រើនណាស់។ **ទៀវខាប់**នឹងទប់កម្លាំងតនឹង**ហងតុង**ពុំបាន ក៏រត់ចោលបន្ទាយភ្នំតេងគុនសាន់នោះ បង្រុះរត់កាត់តម្រង់ទៅស្រុកឡាំតេង ស្រាប់តែប្រទះនឹងជូឡុង ដែល**ខុងបេង**ប្រើឲ្យលើកពលទៅពួនបង្កប់នៅដើមផ្លូវនោះ ស្ទុះស្រចេញមកពីច្រកភ្នំហើយស្រែកថា អញឈ្មោះ**ជូឡុង**។ **ទៀវខាប់**ឮដូច្នោះភ័យណាស់ បំផាយសេះនាំទាហានរត់កាត់ផ្លូវទៅក្នុងព្រៃ **ជូឡុង**ក៏លើកទាហានវិលទៅស្រុកសែឈ្នួនវិញ។

ខណៈកាល**ទៀវខាប់**និង**ហងតុង**ចេញទៅច្បាំងគ្នាក្រៅបន្ទាយនោះ **ឡៅហង**និង**បេងតាត់** ដែលតាំងទ័ពនៅប្រហប់ច្រកភ្នំនោះ ក៏លើកទាហានចោមព័ទ្ធវាយយកបន្ទាយតេងគុនសាន់។ **តោស៊ិប**ដែលនៅរក្សាបន្ទាយនោះទប់ទល់ពុំឈ្នះ ក៏នាំទាហានរត់កាត់ទៅក្នុងព្រៃ ទទួល**ទៀវខាប់**រត់ទៅក៏ជួបប្រទះគ្នា ហើយពណ៌នារឿងរ៉ាវដែលខូចបន្ទាយតងគុនសាន់នឹងដៃ**ឡៅហង**, **បេងតាត់**នោះឲ្យ**ទៀវខាប់**ស្តាប់។

**ទៀវខាប់**ក៏នាំ**តោស៊ិប**ប្រញាប់ស្រូតទៅដល់វាយហាន់ស៊ុយ ទើបឲ្យតាំងបន្ទាយសម្រាកឈប់នៅទីនោះ ហើយឲ្យបម្រើនាំយកព័ត៌មានទាំងពួងទៅក្រាបទូលព្រះចៅ**វុយអេង**ឯស្រុកឡាំតេង។

**ចូឆូ**បានស្តាប់ ក៏យំសោកាល័យ**ហែហ៊្វឺអៀន**ជាច្រើន ហើយនឹកខឹងនឹង**ហងតុង**ខ្លាំងណាស់ ទើបចាត់ចែងទាហានឲ្យ**ស៊ីឡុង**ជានាយកងទ័ពមុខ **ចូឆូ**ជាមេទ័ពហ្លួង លើកទាហានសែសិបម៉ឺនទៅដល់វាយហាន់ស៊ុយ។ **ទៀវខាប់**និង**តោស៊ិប**ដឹងដំណឹងក៏ចេញទៅគំនាប់**ចូឆូ**ហើយទូលថា **ហងតុង**លើកទ័ពមកនេះ គឺ**ហ៊្វឺតចេង**ជាអ្នកត្រិះរិះធ្វើកលឧបាយផ្សេងៗ ទូលបង្គំក៏បានហាមឃាត់**ហែហ៊្វឺអៀន**ជាច្រើនគ្រា ថាឲ្យរារង់បង្អង់ឈប់ស្តាប់ការសិន។ **ហែហ៊្វឺអៀន**មិនព្រមស្តាប់ ចចេសលើកទ័ពទៅច្បាំងដោយកម្លាំងរោហារ បានជាថ្លោះការទាំងម៉្លេះ គឺចំណេះពី**ហែហ៊្វឺអៀន**ឯង ឥឡូវនៅភ្នំប៊ិសងសាន់មានស្បៀងអាហារសល់ច្រើនណាស់ សូមឲ្យលោកម្ចាស់ទៅរំលែកផ្លាស់ប្តូរយកមកទុកសិន រួចសឹមលើកទ័ពទៅប្រកាប់គ្នានឹង**ហងតុង**ជាក្រោយ។ **ចូឆូ**ស្តាប់យល់ឃើញត្រូវ ក៏ចាត់ប្រើ**ទៀវខាប់**និងពលទាហានឲ្យទៅជញ្ជូនស្បៀងយកមកទុកក្នុងបន្ទាយភ្នំប៉ាក់សាន់។

ឯ**ហងតុង**នោះ លុះបានជ័យជម្នះហើយ ឃើញថា**ឡៅហង**និង**បេងតាត់**វាយបានបន្ទាយតេងគុនសាន់ហើយ ក៏កាត់យកក្បាល**ហែហ៊្វឺអៀន**នាំ**ហ៊្វឺតចេង**លើកទាហានត្រឡប់ទៅគំនាប់**ឡៅពី**ឯទីគយហែបេងគួន។ **ឡៅពី**ឃើញ**ហងតុង**បានជ័យជម្នះមកក៏មានចិត្តសោមនស្សសាទរអរពន់ពេកណាស់ តាំងឲ្យ**ហងតុង**ជា (ចេងលៃតៃចងកុន) ប្រែថា នាយទាហានប្រាបសត្រូវខាងទិសបស្ចិម ហើយឲ្យបំណាច់រង្វាន់តាមសមគួរ។ ខណៈនោះទទួល**ទៀវឃី**ចូលមកជម្រាប**ឡៅពី**ថា **ចូឆូ**ប្រើ**ទៀវខាប់**ទៅជញ្ជូនស្បៀងពីភ្នំប៊ិសងសាន់ ទៅទុកក្នុងបន្ទាយហាន់ស៊ុយជា

ច្រើនណាស់ ឥឡូវលើកទាហានប្រមាណសែសិបម៉ឺនប្លាយមកនៅភ្នំតេងគុនសាន់ ប្រាថ្នានឹងសងសឹក**ហាងតុង**ឲ្យបានវិញ។

**ខុងបេង**ឮហើយក៏ថា **ចូឆូ**លើកទ័ពមកគ្រានេះធំពន្លឹកណាស់ បើមានទាហានណាខ្លាំងពូកែលបលើកទ័ពទៅដុតស្បៀងអាហារ**ចូឆូ**ឯបន្ទាយហាន់ស៊ុយបាន **ចូឆូ**នឹងបរាជ័យចាញ់ដៃយើងទៀតជាប្រាកដ។ **ហាងតុង**ឮដូច្នោះក៏ទទួលអាសាថា ការតែប៉ុណ្ណោះកុំបាច់ឲ្យរវល់ដល់អ្នកដទៃឡើយ ខ្ញុំបាទជាទាហានចាស់ជរានឹងសុំយកអាសាទៅខ្លួនឯង។ **ខុងបេង**ថា អ្នកកុំអាលមើលងាយការថាដូច្នោះ ព្រោះ**ចូឆូ**នោះមានសតិបញ្ញាជ្រៅទូលាយឆ្ងាយណាស់ មិនមែនដូច**ហែហ៊្វូអៀន**ទេ។ **ឡៅពី**ឮដូច្នោះក៏ថា **ហែហ៊្វូអៀន**មានកម្លាំងនិងថ្វីដៃពូកែក៏មែន តែតម្រិះរិះគិតលើសជាង**ទៀវខាប់**ណាស់ ទោះនឹងសម្លាប់មនុស្សយ៉ាង**ហែហ៊្វូអៀន**បានដល់ដប់នាក់ ក៏មិនទាន់ស្មើបានសម្លាប់**ទៀវខាប់**ម្នាក់នោះឡើយ។ **ហាងតុង**ឮដូច្នោះក៏គិតថា លោកកុំព្រួយខ្ញុំបាទនឹងសុំទៅធ្វើការនេះឲ្យបានសម្រេច ផ្ដាច់យកក្បាល**ទៀវខាប់**មកជូនលោកឲ្យបានទៀត។ **ខុងបេង**ក៏និយាយនឹង**ហាងតុង**ថា បើអ្នកនឹងទៅក៏ទៅចុះ យើងនឹងឲ្យ**ជូឡុង**ទៅផង បើធ្វើការទៅក្រងាយប្រការម្ដេច ក៏ប្រឹក្សាគ្នាដើម្បីយើងនឹងបានមើលឲ្យឃើញថ្វីដៃនិងតម្រិះប្រាជ្ញាផង លុះវិលត្រឡប់មកវិញនោះ នរណានឹងបានសេចក្ដីគាប់ប្រសើរជាង។ **ហាងតុង**និង**ជូឡុង**ក៏ចាត់ចែងទាហានលើកចេញទៅ។ **ខុងបេង**ក៏ចាត់ប្រើ**ទៀវឃី**ឲ្យលើកទាហានជាកងជំនួយតាមទៅទៀត លុះទៅដល់ជិតវាលហាន់ស៊ុយ **ហាងតុង**និង**ជូឡុង**ក៏តាំងបន្ទាយនៅទីនោះ។ **ជូឡុង**គិតនឹងចង់យកសេចក្ដីគាប់ប្រសើរតែម្នាក់ឯង ក៏និយាយនឹង**ហាងតុង**ថា **ចូឆូ**លើកកងទ័ពមកតាំងបន្ទាយនៅគ្រានេះមាំមួនណាស់ មានទាហានដល់សាមសិបម៉ឺនប្លាយ ហើយតាំង

វាយគ្នាទៅដល់ដប់កង ការនេះមិនមែនតិចតួចទេ ហេតុម្តេចក៏អ្នកអាចហ៊ានទទួលអាសាដល់នាយចៅហ្វាយយើងថា នឹងប្លន់យកស្បៀងអាហារ**ចូឆ្វ**ឲ្យបានងាយៗ?

**ហាងតុង**ដឹងគំនិត**ជូឡុង**ច្បាស់ ទើបថា អ្នកកុំព្រួយរវល់ជាធុរៈឡើយ យើងបានទទួលអាសាមកហើយ តែកម្លាំងយើងម្នាក់ឯង ក៏អាចធ្វើការនេះឲ្យសម្រេចទៅបាន។ **ជូឡុង**ថា ខ្ញុំជាមនុស្សក្មេង នឹងឲ្យអ្នកជាមនុស្សចាស់ចេញទៅធ្វើការមុនក្មេង ដូចជាមិនសមគួរ ខ្ញុំនឹងសុំយកអាសាចេញទៅធ្វើការជាមុនសិន។ **ហាងតុង**ថា ការទាំងអម្បាលនេះ យើងជាគំនិតទទួលអាសាចេញមក ដែលនឹងឲ្យអ្នកជាជំនួយចូលទៅធ្វើការមុននោះមិនត្រូវ ខ្លាចក្រែងថ្លោះធ្លោយទៅកំហុសក៏នឹងត្រូវធ្លាក់មកលើខ្លួនយើង។ **ជូឡុង**ថា ខ្លួនអ្នក និងខ្ញុំទាំងពីរនាក់នេះ គឺ**ខុងបេង**ចាត់ប្រើមកជាមួយគ្នា ថាបើធ្វើការអ្វីៗ ក៏ឲ្យប្រឹក្សាពិគ្រោះគ្នាសិនសឹមធ្វើ បើមានសេចក្តីខុសហើយ ទោះបីខ្លួនខ្ញុំក៏គង់មិនរួចទោសដូចគ្នា ដែលនឹងមកប្រទាំងប្រទូស្តគ្នាដូច្នេះ មិនត្រូវការសោះ។ បើដូច្នេះខ្ញុំនឹងធ្វើស្លាកឲ្យចាប់ជាមួយគ្នា បើរនណាបានស្លាកមុន ឲ្យចេញទៅធ្វើការមុនចុះ នរណាបានក្រោយឲ្យចេញទៅជាក្រោយ។

**ហាងតុង**យល់ឃើញស្រួល ក៏ឲ្យធ្វើស្លាកចាប់ **ហាងតុង**ចាប់បានស្លាកមុន ក៏មានអំណរណាស់។ **ជូឡុង**និយាយនឹង**ហាងតុង**ថា អ្នកបានស្លាកមុនហើយនឹងចេញទៅវាយជាមុនចុះ ព្រឹកស្អែកនេះសន្យាត្រឹមថ្ងៃត្រង់ បើមិនឃើញអ្នកត្រឡប់មកវិញទេ ខ្ញុំនឹងលើកទាហានជាជំនួយតាមទៅជួយ។ **ហាងតុង**ឮដូច្នេះក៏យល់ឃើញផង។ **ជូឡុង**ក៏ត្រឡប់វិលទៅបន្ទាយ ទើបបង្គាប់**ទៀវអេក**ថា **ហាងតុង**នឹងចូលប្លន់ស្បៀងក្នុងបន្ទាយ**ចូឆ្វ** បើព្រឹកស្អែកពេលថ្ងៃត្រង់មិនឃើញ**ហាងតុង**វិលមកវិញទេ យើងនឹងលើកទាហានទៅជួយ ខ្លួនអ្នកឯងនៅឯក្រោយ ចូររវាំងរក្សាបន្ទាយកុំបីធ្វេសប្រមាថឲ្យថ្លោះការឡើយ។

ឯ**ហាងតុង**នោះ លុះពេលល្ងាចក៏ហៅ**ទៀវឃី**ចូលមកផ្ដាំថា ព្រឹកស្អែកនឹងលើកទាហានចូលទៅប្លន់បន្ទាយ**ចូឆ្វ** ខ្លួនអ្នកឯងចូរនៅចាត់ចែងទាហានរក្សាបន្ទាយចំនួនប្រាំរយ ក្រៅអំពីនោះ ចូរឲ្យត្រៀមខ្លួនទុកឲ្យព្រម ឯការគ្រានេះ ឃើញថាមិនជាអ្វីប៉ុន្មានទេ ព្រោះ**ទៀវខាប់**នៅញញើតខ្លាចថ្វីដៃយើង កាលពីគ្រាលើកទៅច្បាំងនៅភ្នំតេងគុនសាន់ សម្លាប់**ហែហ៊្សូអៀន**នោះក៏ខ្លាចជាប់មក មុខជាមិនហ៊ានតស៊ូនឹងយើងទេ យើងនឹងលើកទាហានទៅតាមជើងភ្នំបាក់សាន់ ចូលវាយបន្ទាយ**ទៀវខាប់**ចាប់ខ្លួនឲ្យបានមុនសិន រួចសឹមអ្នកឯងលើកទៅប្លន់បន្ទាយស្បៀង**ចូឆ្វ**ចុះ។ **ទៀវឃី**ទទួលពាក្យហើយ ក៏ប្រុងប្រៀបទាហានទុកព្រមតាមពាក្យ**ហាងតុង**បង្គាប់ លុះដល់ពេលយាមបី ទាហានទាំងពួងបរិភោគអាហារត្រៀមទុករួចជាស្រេច **ហាងតុង**ក៏លើកតម្រង់ទៅបន្ទាយ**ទៀវខាប់** ឯ**ទៀវឃី**ក៏លើកទាហានបីរយឡើងទៅលើភ្នំប៉ាក់សាន់។ ទាហានដែល**ចូឆ្វ**ឲ្យទៅរក្សាស្បៀងនោះក៏តិចណាស់ លុះឃើញ**ទៀវឃី**លើកទាហានឡើងមក ក៏ចោលស្បៀងអស់ ហើយរត់ទៅរក**ទៀវខាប់**ឯបន្ទាយហាន់ស៊ុយ។ **ទៀវខាប់**ដឹងដូច្នោះក៏លើកទាហានចេញពីបន្ទាយ ស្រាប់តែប្រទះនឹង**ហាងតុង**ក៏ចូលច្បាំងគ្នាជាចលាចល។

ឯ**ចូឆ្វ**លុះដឹងដូច្នោះហើយ ក៏ឲ្យ**ស៊ីឡុង**និង**ប៊ុនផេង**លើកទាហានទៅជួយ**ទៀវខាប់**។ ឯ**ទៀវឃី**ដែលឡើងទៅដល់កំពូលភ្នំ ឃើញស្បៀងអាហារជាច្រើន ក៏ប្រើទាហានឲ្យរកចំបើងនិងឧសមកបង្កាត់ភ្លើង ទទួលពេលភ្លឺឡើងក្រឡេកចុះមកឃើញ**ហាងតុង**ច្បាំងគ្នាជាប់ដៃ ហើយឃើញទាហានលើកចេញពីបន្ទាយ**ចូឆ្វ**ជាច្រើនណាស់ ក៏ភ័យស្លុតស្មារតីស្រូតលើកទាហានចុះមកពីលើភ្នំនឹងរត់ចូលបន្ទាយ លុះចុះមកដល់ជើងភ្នំក៏ប្រទះនឹង**ស៊ីឡុង, ប៊ុនផេង**លើកទាហានមកដល់។ **ស៊ីឡុង, ប៊ុនផេង**ក៏ដេញទាហានឲ្យព័ទ្ធ**ទៀវឃី**និង**ហាងតុង**ក្នុងទីកន្លែងជាមួយគ្នា។

ខណៈនោះ **ជូឡុង**ក៏ចាំមើល**ហាងតុង**ពីព្រឹកទាល់តែថ្ងៃត្រង់ មិនបានឃើញ**ហាងតុង**ត្រឡប់មកវិញ ក៏បង្គាប់**ទៀវអេក**ថា ឥឡូវ**ហាងតុង**ទៅធ្វើការហួសពេលកំណត់ហើយ យើងនឹងលើកទាហានទៅជួយតាមសញ្ញា អ្នកឯងនៅរក្សាបន្ទាយឯក្រោយ បើឃើញ**ចូឆូ**ប្រើទាហានមកវាយបន្ទាយនេះ ក៏កុំឲ្យចេញតច្បាំងឡើយ ត្រូវឲ្យតែទាហានបាញ់ធ្នូការពាររក្សាបន្ទាយទុក ឲ្យមាំមួនកុំឲ្យអន្តរាយ។ ហើយ**ជូឡុង**ក៏ឡើងសេះកាន់លំពែងនាំទាហានបីពាន់ លើកតាម**ហាងតុង**ទៅដល់តំបន់ហាន់ស៊ុយ ឃើញ**ប៊ូលៀត**លើកទាហានចេញមកស្ទាក់កណ្ដាលផ្លូវ **ប៊ូលៀត**ក៏បរសេះរាំងាវចូលប្រយុទ្ធគ្នានឹង**ជូឡុង** ៗយកលំពែងចាក់ត្រូវ**ប៊ូលៀត**ធ្លាក់ពីលើសេះស្លាប់។ ទាហានទាំងពួងក៏បាក់បែកខ្ចាត់ខ្ចាយថយរត់ចេញ **ជូឡុង**ក៏លើកចូលទៅដល់ទីចំណោមទ័ព មានទាហានម្នាក់ឈ្មោះ**ចោបេង**លើកមកស្ទាក់ពីមុខសេះ**ជូឡុង** ៗក៏សម្គាល់ថាជាទាហានរបស់ខ្លួនទើបស្រែកសួរថា ទាហានយើងនៅឯណា? **ចោបេង**ឆ្លើយថា ទាហានអ្នកឯងយើងសម្លាប់អស់ហើយ។ **ជូឡុង**ឮដូច្នោះក៏ខឹងណាស់ ទើបបរសេះរាំលំពែងចូលទៅចាក់**ចោបេង**ធ្លាក់ពីលើសេះស្លាប់ ហើយដេញទាហាន**ចោបេង**បែករត់អស់ទៅ **ជូឡុង**ក៏បំផាយសេះតម្រង់ទៅទិសឯជើងប្រទះនឹង**ទៀវខាប់, ស៊ីឡុង**ទាំងពីរនាយ លើកទាហានមកចោមព័ទ្ធ**ហាងតុង** ៗនៅក្នុងចំណោមទ័ពនោះ ឯពួកទាហានដែលនៅក្នុងបន្ទាយដែលព័ទ្ធចោមនោះ ក៏បានតតាំងច្បាំងគ្នាជាយូរណាស់ **ជូឡុង**ក៏ញាក់សេះទៅជិត ហើយស្រែកដោយសំឡេងយ៉ាងខ្លាំង តាំងបរសេះចូលទៅដេញកាប់ទាហានក្នុងកងទ័ពនោះ ត្រឡប់ពីស្ដាំទៅឆ្វេងពីឆ្វេងទៅស្ដាំ បីដូចជាគ្មានមនុស្សសោះ។ **ទៀវខាប់**ឃើញ**ជូឡុង**មានកម្លាំងខ្លាំងណាស់ មិនអាចនឹងចេញតស៊ូបាន។ **ជូឡុង**ក៏ដោះយកខ្លួន**ហាងតុង**ចេញមកបាន ក៏នាំគ្នាចុះមក **ចូឆូ**តាំងកងទ័ពនៅលើទីខ្ពស់ ក្រឡេកទៅឃើញក៏ភ័យណាស់ សួរ

ទាហានទាំងអស់ថា នោះឈ្មោះអ្វី? ទាហានទាំងពួងក៏ឆ្លើយថា ឈ្មោះ**ជូឡុង** ពួកស្រុកសៀងសាន់។ **ចូឆូ**ឮដូច្នោះក៏ចូលចិត្តថា កាលជាន់មុនយើងលើកទ័ពប៉ែតសិបម៉ឺនទៅពីទីស្រុកឡុកអៀង ត្រង់ស្ពានឡេងប៉ាន់ប៉ោ មានទាហានម្នាក់ថ្វីដៃខ្លាំងពូកែ គឺឈ្មោះនេះឯង ទើបបង្គាប់ទាហានទាំងពួងថា ដែលនឹងតច្បាំងនឹង**ជូឡុង**នោះ កុំបីប្រមាថជាដាច់ខាតតែម្តង។

ឯ**ជូឡុង**និង**ហាងតុង**ក៏នាំគ្នាមកតាមផ្លូវ ទាហានទាំងពួងដែលមកជាមួយផងនោះក៏ចង្អុលប្រាប់ថា ទិសខាងត្បូងទាហាន**ចូឆូ**ចោមព័ទ្ធ**ទៀវឃី** ពួកយើងជាប់ក្នុង **ជូឡុង**ឮដូច្នោះក៏មិនត្រឡប់ទៅបន្ទាយ ឲ្យយកទង់ដែលសរសេរជាអក្សរបួនតួថា (សៀងសាន់ **ជូឡុង**) ឲ្យទាហានកាន់នាំមុខទៅ។ ទាហាន**ចូឆូ**ដែលព័ទ្ធឡោមនៅទីនោះ ក្រឡេកឃើញទង់អក្សរបួនតួក៏ដឹងច្បាស់ ទើបប្រាប់គ្នាថា ទ័ពដែលលើកមកនេះ គឺ**ជូឡុង**មានថ្វីដៃខ្លាំងពូកែណាស់ យើងតស៊ូមិនបានទេ ទាំងអស់គ្នាក៏ថយរត់ចេញទៅ។

**ចូឆូ**ឃើញ**ជូឡុង**នេះរនាតដណ្តើមយក**ហាងតុង**, **ទៀវឃី**ទៅបាន ក៏មានចិត្តខឹងក្តៅខ្លាំងណាស់ ទើបចេញទាហានឆ្វេងស្តាំឲ្យតាម**ជូឡុង**ទៅ។ **ជូឡុង**ក៏នាំ**ហាងតុង**, **ទៀវឃី**ត្រឡប់ចូលបន្ទាយ។ **ទៀវអេក**ដែលនៅរក្សាបន្ទាយក៏ចេញមកទទួល**ជូឡុង** ស្រាប់តែក្រឡេកមើលទៅក្រោយ ឃើញផង់ធូលីហុយទ្រលោមឡើង ក៏ដឹងថា មានទ័ពលើកតាមមកទៀត **ទៀវអេក**ក៏ប្រាប់**ជូឡុង**ថា មានទាហាន**ចូឆូ**លើកតាមមកជិតនឹងដល់ទៀតហើយ ចូរប្រញាប់បិទទ្វារបន្ទាយ ឡើងលើសើនត្រួតត្រារក្សាប្រុងប្រយ័ត្នឲ្យមាំមួនចុះ។ **ជូឡុង**ថា កុំឲ្យបិទទ្វារបន្ទាយថ្វី ចៅមិនដឹងទេឬ? កាលយើងច្បាំងនៅស្រុកឡុកអៀង យើងជិះសេះកាន់លំពែងនៅតែម្នាក់ឯង ទាហាន**ចូឆូ**ដល់ប៉ែតសិបម៉ឺន មើលទៅឃើញបីដូចស្មៅជើងក្រាស ឥឡូវមានទាំង

នាយនិងពលទាហានហើយ ហេតុអ្វីទៅខ្លាចសត្រូវប៉ុណ្ណោះ ថាតែប៉ុណ្ណោះហើយ ក៏មូរទង់នៅមុខបន្ទាយចេញ គងឈ្មោះនិងស្គរក៏មិនឲ្យវាយ ឲ្យទាហានកាន់ធ្នូទៅពួនបង្កប់នៅក្នុងគូក្រៅបន្ទាយ ឯខ្លួន**ជូឡុង**នោះ ក៏ជិះសេះកាន់លំពែងចេញទៅឈរនៅមុខបន្ទាយ។

**ទៀវខាប់, ស៊ីឡុង**លើកពលជាប់តាមមក លុះជិតនឹងដល់បន្ទាយ**ជូឡុង**ទទួលពេលក៏ជិតព្រលប់ ក្រឡេកមើលទៅក្នុងបន្ទាយមិនឃើញមានទង់សោះ ទាំងសំឡេងគងស្គរនិងឃ្មោះក៏ស្ងាត់ឈឹងស្ងួន្យ ទាំងទ្វារបន្ទាយក៏បើកចំហ ឃើញតែ**ជូឡុង**ជិះសេះកាន់លំពែងឈរនៅមុខបន្ទាយតែម្នាក់ឯង **ទៀវខាប់**និង**ស៊ីឡុង**ឃើញប្លែកចិត្តណាស់ ក៏បង្អែរបង្អង់នៅមិនអាចនឹងចូលរុករានទន្ទ្រានចូលទៅ ឃើញ**ជូឡុង**ជិះសេះ នៅមិនបានភិតភ័យតក់ស្លុតសោះ ទាហានទាំងអស់នោះសង្ស័យក្នុងចិត្ត ក៏នាំគ្នាវិលត្រឡប់ថយក្រោយទៅវិញ។ **ជូឡុង**បានចំណាប់ក៏ស្ទុះដេញគ្រវីលំពែងជាសម្គាល់ ឯទាហានដែលកាន់ធ្នូបង្កប់នោះ លុះឃើញកងទ័ពត្រឡប់ថយក្រោយទៅវិញ ក៏ស្ទុះស្រចេញមកបាញ់ធ្នូតម្រង់ទៅពីក្រោយ ទាល់តែព្រលប់ងឹត។ **ចូឆ្វូ**មិនដឹងថាទាហាន**ជូឡុង**ច្រើនឬតិចប៉ុន្មាន ក៏ត្រឡប់សេះថយទៅវិញ លុះបានឮសំឡេងស្រែកហ៊ោជាប់ជិតមក ក៏នាំគ្នាភ័យរត់ប្រពាក់ប្រពូនជាន់លើគ្នា ដួលទង្គិចគ្រេចដៃជើងច្រើនណាស់ ខ្លះក៏រត់ចុះទៅក្នុងទន្លេហាន់ស៊ុយលង់ទឹកស្លាប់ជាច្រើន។ **ជូឡុង, ហងតុង, ទៀវឃី**ក៏នាំពួកទាហានជាប់តាមទៅ។

ខណៈកាល**ចូឆ្វូ**បែកទ័ពរត់នឹង**ជូឡុង**នោះ តាំងចិត្តគិតថានឹងរត់តម្រង់ទៅវាលហាន់ស៊ុយ ដែលឲ្យតាំងទ័ពឈប់ធ្វើបន្ទាយរក្សាស្បៀងនោះ លុះទៅដល់កណ្ដាលផ្លូវ ក៏ឮដំណឹងថា **ឡៅហង**និង**បេងតាត់**លើកទ័ពមកចាំស្កាត់ជាពីរកងលើកមកតាមជើងភ្នំប៊ិសងសាន់ បានដុតស្បៀងបំផ្លាញអស់ទៅហើយ។ **ចូឆ្វូ**ក៏

ទោមនស្សតូចចិត្តណាស់ ចោលភ្នំបាក់សាន់នៅទិសឯជើងដែលទុកស្បៀងនោះចេញទៅទៀត ហើយក៏រត់ត្រឡប់ទៅស្រុកឡាំតេង។ **ទៀវខាប់**និង**ស៊ីឡុង**ដែលតាំងបន្ទាយនៅវាលហាន់ស៊ុយនោះ ឃើញថានឹងនៅមិនបាន ក៏ភ្លយលើកទ័ពត្រឡប់រត់ទៅ តាម**ចូឆ្វូ**ទៅទៀត ឯ**ជូឡុង, ហងតុង**ដែលលើកដេញដិតប្រកិតតាមមកនោះ ក៏មានជ័យជម្នះរើសបានគ្រឿងសាស្ត្រាវុធនិងស្បៀងអាហារជាច្រើនណាស់ ហើយនាំយកដំណឹងរាជការប្ដឹងចូលទៅ**ឡៅពី**គ្រប់ប្រការ។

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លក៖*

[www.khmerliterature.wordpress.com](www.khmerliterature.wordpress.com)

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៥៩

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡៅពី**ប្រើ**ហាងតុង**និង**ជូឡុង** ទៅវាយទ័ព**ចូឆូ**បែកបានបន្ទាយ នៅវាលហាន់ស៊ុយរហូតទៅដល់**ចូឆូ**ឲ្យសំបុត្រទៅ**ស៊ុនគួន** ឲ្យលើកទ័ពទៅវាយយកស្រុកកេងជីវ)*។

**ឡៅពី**ដឹងដូច្នោះ ក៏ឲ្យត្រៀមកងទ័ពលើកទៅជាមួយនឹង**ខុងបេង**ដោយបង្ខំ លុះទៅដល់វាលហាន់ស៊ុយ ក៏ឲ្យទាហាន**ជូឡុង**ទៅសួរថា ដែល**ជូឡុង**ទៅធ្វើការសង្គ្រាមនឹង**ចូឆូ**គ្រានេះបានជ័យជម្នះដោយប្រការម្ដេច? ទាហាននោះក៏ជម្រាប**ឡៅពី**តាមដំណើរ ដែលបានធ្វើការមកពីដំបូងគ្រប់ប្រការ។ **ឡៅពី**បានដឹងដូច្នេះក៏មានចិត្តសប្បាយណាស់ ពិចារណាមើលទៅមុខភ្នំ ក្រោយភ្នំ ឃើញមានផ្លូវច្រកល្ហកសុទ្ធតែផ្លូវស្រួលស្រឡះ ទើបនិយាយនឹង**ខុងបេង**ថា តម្រេះប្រាជ្ញារបស់**ជូឡុង**ដែលគិតធ្វើការសង្គ្រាមនេះ សុទ្ធតែជាវោហារទាំងអស់ ហើយឲ្យហៅ**ជូឡុង**និងទាហានទាំងពួងមកប្រជុំព្រមគ្នា រួចនិយាយនឹង**ជូឡុង**ថា អ្នកមានសេចក្ដីគាប់ប្រសើរក្នុងការសង្គ្រាមច្រើនណាស់ យើងនឹងតាំងឲ្យមានកិត្តិយសហៅថា ទាហានខ្លា ហើយឲ្យរៀបតុលៀងអាហារតាមសេចក្ដីស្មោះសរទទួលអំណរសប្បាយ។ លុះវេលាល្ងាចមានបម្រើចូលមកប្ដឹង**ឡៅពី**ថា ឥឡូវ**ចូឆូ**នឹងលើកទ័ពធំមកតាមផ្លូវស្កាត់ផ្លូវតូច ដើម្បីនឹងច្បាំងដណ្ដើមយកវាលហាន់ស៊ុយវិញឲ្យបាន។ **ឡៅពី**ឮដូច្នោះក៏អស់សំណើចហើយថា ដែល**ចូឆូ**នឹងលើកទ័ពមកប្រាថ្នាដូច្នោះ មិនឈ្នះយើងទេ ព្រោះ

យើងតាំងទីមាំណាស់ហើយ ឥឡូវនឹងឲ្យទាហានលើកទៅតាំងបន្ទាយមួយទៀត ដើម្បីនឹងទប់ទាំងទ័ពនៅទិសបស្ចិម ចុងវាលហាន់ស៊ុយឲ្យយ៉ាងមាំ។

ឯ**ចូឆូ**ក៏ប្រុងប្រៀបទាហានត្រៀមទុកស្រេច ទើបចាត់ឲ្យ**ស៊ីឡុង**ជានាយកងទ័ពមុខនឹងលើកទៅ។ **អងបេង**ជាភ្នាក់ងាររក្សាទ្វារចូលទៅគំនាប់**ចូឆូ** ហើយថា ទូលបង្គំបានរៀនមើលទីតាំងបន្ទាយដឹងថា ទីនេះមានជ័យឬបរាជ័យ។ គ្រានេះទូលបង្គំនឹងសុំអាសាទៅធ្វើរាជការជាមួយ**ស៊ីឡុង**តាមសតិបញ្ញា យកជ័យជម្នះឲ្យបាន។ **ចូឆូ**មានសេចក្ដីត្រេកអរណាស់ តាំង**អងបេង**ជានាយកងទ័ពមុខទាហានស្ដាំជួយគាំពារ**ស៊ីឡុង** លុះចាត់ចែងស្រេចហើយក៏លើកតម្រង់ទៅភ្នំតេងគុនសាន់ទិសឧត្តរ។ **ស៊ីឡុង** និង**អងបេង**នាយទ័ពឆ្វេងស្ដាំ ក៏នាំទាហានលើករំលងទៅដល់វាលហាន់ស៊ុយ **ស៊ីឡុង**ក៏ប្រឹក្សាថា យើងឆ្លងទឹកទៅតាំងបន្ទាយនៅត្រើយម្ខាង តើជាយ៉ាងម្ដេច?

**អងបេង**ថា បើនឹងឆ្លងទៅក៏បាន តែខ្លាចក្រែងទៅមិនទាន់ដល់ទីកន្លែងស្រាប់តែមានសត្រូវលើកមកស្ទាក់ ក្នុងខណៈនោះតើយើងនឹងដោះវេះទៅខាងណាបាន? **ស៊ីឡុង**តបថា កាលគ្រា**ហាន់ស៊ិន**ធ្វើសង្គ្រាមនឹងព្រះចៅ**ឈប៉ាអង**នោះ ក៏បានលើកពលទៅតាំងបន្ទាយនៅក្បែរមាត់ទឹក ថ្លោះការសឹកនឹងសត្រូវ ម្ដេចក៏នៅយកជ័យជម្នះបាន ដូចគ្រានេះយើងនឹងលើកទៅតាំងបន្ទាយទប់ទល់ដល់មាត់ទឹកនោះ តើនឹងខ្លាចចាញ់ដោយហេតុអ្វី? **អងបេង**ថា កាលគ្រា**ហាន់ស៊ិន**នោះ **ហាន់ស៊ិន**ឃើញពលព្រះចៅ**ឈប៉ាអង**កំពុងនឿយហត់អត់អាហារ បានជាលើកយោធាទៅតាំងបន្ទាយនៅក្បែរមាត់ទឹកបាន វេលានេះអ្នកអាចដឹងថា កម្លាំង**ជូឡុង**និង**ហងតុង**នោះជាប្រការម្ដេច បានជាអាចទៅតាំងបន្ទាយឲ្យដូច**ហាន់ស៊ិន**នោះ ខ្ញុំមិនយល់ឃើញផងសោះ។ **ស៊ីឡុង**ថា បើអ្នកមិនយល់ឃើញផងទេ ក៏តាមចិត្តចុះ បើដូច្នោះត្រូវអ្នកឯង

នាំទាហានទៅតាំងបន្ទាយ ក្បែរមាត់ទឹកខាងទិសបូព៌ាឲ្យជាយ៉ាងមាំចុះ ដើម្បីកុំឲ្យកើតអន្តរាយបាន។ **ស៊ីឡុង**ក៏នាំទាហានទាំងពួងធ្វើស្ពានផែឆ្លងទន្លេហាន់ស៊ុយ ទៅតាំងបន្ទាយតាមដែលនិយាយគ្នានោះ។

ឯ**ហាងតុង**និង**ជូឡុង**ទាំងពីរនាក់ ក៏នាំគ្នាចូលទៅគំនាប់**ឡៅពី** ហើយថា ខ្ញុំបាទទាំងពីរនាក់នឹងសុំអាសាលើកទាហានទៅច្បាំងនឹងកងទ័ព**ចូឆូ** យកជ័យជម្នះគ្រានេះឲ្យបានទៀត។ **ឡៅពី**ក៏យល់ឃើញផង។ **ហាងតុង**និង**ជូឡុង**ក៏លើកទ័ពចេញទៅ លុះទៅដល់កណ្តាលផ្លូវ **ហាងតុង**និយាយនឹង**ជូឡុង**ថា ដែល**ស៊ីឡុង**លើកទ័ពមកគ្រានេះ មានកម្លាំងខ្លាំងជាពន្លឹកណាស់ យើងកុំអាលចូលទ័ពវាយទ័ពខាងគេ ត្រូវឲ្យគិតគ្នេរមើលកម្លាំងទាហានគេសិន បើឃើញអស់ដៃចុះវេលាណា បានការចំណាប់ខាងយើងហើយ សឹមលើកទាហានទន្ទ្រានចូលវាយប្រសព្វខ្ទប់យកជ័យជម្នះឲ្យបានដោយងាយ។ **ជូឡុង**យល់ឃើញត្រូវផង ក៏ស្រុះស្រួលបបួលគ្នាទៅតាំងបន្ទាយតាមពាក្យប្រឹក្សា។

លុះវេលាព្រឹកឡើង **ស៊ីឡុង**ក៏លើកទាហានចេញមកនឹងតយុទ្ធគ្នានឹង**ជូឡុង** ចេះតែទៅប្រុងចាំនៅទីស្នាមភ្លោះទាល់តែថ្ងៃរសៀល ក៏មិនឃើញទ័ព**ជូឡុង**ចេញទៅតស៊ូគ្នា **ស៊ីឡុង**ក៏ឲ្យទាហានកងមុខយឹតធ្នូបាញ់តម្រង់ទៅបន្ទាយ។ **ហាងតុង**ឃើញដូច្នេះក៏ប្រាប់**ជូឡុង**ថា សត្រូវបាញ់ធ្នូមកគ្រានេះ បែបពួកទាហានទាំងពួងនោះឃើញជារសាយដៃអស់ហើយ បើយើងនឹងលើកគំហុកចូលទៅវាយមុខជានឹងបែក។ អ្នកទាំងពីរកំពុងតែនិយាយគ្នាមិនទាន់ផុតមាត់ ស្រាប់តែមានពួកល្បាតចូលមកប្រាប់ថា ទ័ពមុខ**ស៊ីឡុង**ថយទៅហើយ។ **ហាងតុង**អរណាស់ ក៏លើកទាហានចេញទៅព្រមគ្នា ហើយឲ្យវាយឃ្មោះគងស្គរស្រែកហ៊ោអឹងកង លើកកងទ័ពចេញទៅវាយប្រសព្វខ្ទប់ទ័ព**ស៊ីឡុង** ៗក៏បែកទ័ពត្រឡប់រត់ទៅដល់ទន្លេក្បែរវាលហាន់ស៊ុយ

ពួកពលដួលត្រឡប់ជាន់គ្នាស្លាប់ជាច្រើនណាស់។ ចំណែកខ្លួន**ស៊ីឡុង**ដែលមានកម្លាំងច្រើនក៏រត់ទៅដល់បន្ទាយ**អងបេង** ហើយសួរ**អងបេង**ថា អ្នកឯងបានឃើញទាហានយើងអន់ថយកម្លាំងនឹងសត្រូវ ហេតុម្តេចបានជាមិនលើកទៅជួយ?

**អងបេង**តបថា ខ្ញុំបាទនឹងលើកទ័ពទៅជួយលោក ក៏គ្មានអ្នកណានៅថែរក្សាបន្ទាយ កាលពីដំបូងដែលលើកទ័ពទៅនោះ ខ្ញុំបាទក៏បានឃាត់ឃាំងរាំងរាលោកកុំឲ្យលើកទៅ លោកក៏មិនព្រមស្តាប់ពាក្យខ្ញុំ បានជាច្នោះការទាំងម្ល៉េះលោកនឹងបន្ទោសនរណា? **ស៊ីឡុង**ឮដូច្នោះក៏ខឹងណាស់ គិតនឹងសម្លាប់**អងបេង**ចេញ។ **អងបេង**ឃើញ**ស៊ីឡុង**ខឹងខ្លាំងដូច្នោះក៏គិតថា សេចក្តីអន្តរាយនឹងកើតមានដល់ខ្លួនជាប្រាកដ។ លុះដល់ពេលយប់ **អងបេង**ក៏ឲ្យទាហានរបស់ខ្លួនយកភ្លើងដុតបំផ្លាញបន្ទាយនោះ ភ្លើងក៏ឆេះរាលដាលឡើង **ស៊ីឡុង**ឃើញដូច្នោះក៏ភ័យណាស់ លើកទាហានរត់ចោលបន្ទាយនោះទៅ ឯ**អងបេង**ក៏រត់ឆ្លងទន្លេហាន់ស៊ុយទៅស្ម័គ្រចូលនៅនឹង**ជូឡុង** ៗក៏នាំយកខ្លួន**អងបេង**ទៅគំនាប់**ឡៅពី**។ **អងបេង**ជម្រាប**ឡៅពី**ថា ក្នុងតំបន់ហាន់ស៊ុយនេះ ខ្ញុំបាទដឹងស្គាល់យល់ច្រកល្ហកផ្លូវទាំងអស់។

**ឡៅពី**ឮដូច្នោះក៏ពេញចិត្តណាស់ ទើបនិយាយថា អ្នកមកនៅនឹងយើងហើយ ការដែលយើងនឹងគិតវាយយកស្រុកហាន់ស៊ុយនោះ ឃើញថាគង់នឹងបានសម្រេចដូចសេចក្តីប្រាថ្នា ហើយក៏តាំង**អងបេង**ឲ្យធ្វើជានាយទាហានសម្រាប់នាំផ្លូវធ្វើការសង្គ្រាមតទៅ។ ឯ**ស៊ីឡុង**រត់ទៅដល់**ចូឆូ**ហើយ ក៏ទូលសេចក្តីរៀបរាប់ថា ឥឡូវ**អងបេង**ចេញជាក្បត់រត់ចូលទៅនៅនឹង**ឡៅពី**ហើយ។

**ចូឆូ**ឮដូច្នោះក៏ខឹងណាស់ ទើបប្រមូលពលទាហានបានព្រមព្រៀងហើយ នឹងលើកទៅវាយដណ្តើមយកតំបន់បន្ទាយហាន់ស៊ុយមកវិញ ឯ**ជូឡុង**លុះមានជ័យជម្នះហើយ ក៏ប្រុងប្រៀបតាំងបន្ទាយមាំមួនណាស់ លុះឮដំណឹងថា**ចូឆូ**នឹងលើកទ័ពមក

វាយ ឃើញថានឹងតាំងបន្ទាយនៅទីនោះពុំស្រួល ក៏ប្រមូលពលទាហានលើកថយទ័ពត្រឡប់ទៅតាំងនៅក្បែរទន្លេហាន់ស៊ុយត្រើយខាងលិច ហើយឲ្យកបន្ទាយជាមាំមួននៅទីនោះ។

ឯ**ឡៅពី**នោះ លុះដល់ថ្ងៃរសៀលក៏នាំ**ខុងបេង**ចេញត្រួតមើលច្រកផ្លូវ **ខុងបេង**ថា តំបន់ហាន់ស៊ុយនេះ មានភ្នំនៅខាងជើងជាច្រើនស្រទាប់ ល្មមនឹងបញ្ចុះទាហានបានមួយពាន់ប្លាយ ហើយក៏នាំគ្នាវិលមកចូលបន្ទាយវិញ ទើបឲ្យហៅ**ជូឡុង**ចូលមកបង្គាប់ថា អ្នកឯងត្រូវនាំទាហានប្រាំរយឲ្យយកស្គរ និងត្រែទៅប្រចាំការនៅទីជើងភ្នំខាងលើទឹក កាលណាដល់ពេលកណ្តាលយប់ បើឮសូរផាវអុជក្នុងបន្ទាយយើងជាសញ្ញាហើយ ត្រូវឲ្យផ្លុំត្រែវាយឃ្មោះគោះគងទូងភេរីឲ្យឮអឹងកងក្នុងទីនោះ តែកុំបីចេញច្បាំងឡើយ។ ខណៈនោះ**ជូឡុង**ក៏តាំងនាំទាហានទៅប្រចាំការតាមពាក្យ**ខុងបេង**បង្គាប់ ឯខ្លួន**ខុងបេង**នោះ លុះរសៀលត្រជាក់ក៏ឡើងទៅនៅកំពូលភ្នំខ្ពស់ចាំមើលកលការ**ចូឆូ** តើនឹងធ្វើប្រការម្តេច។

លុះវេលាព្រឹកទាហាន**ចូឆូ**នឹងចេញច្បាំង **ឡៅពី**ក៏ឃាត់ឃាំងពួកទាហានឲ្យនៅសំងំក្នុងបន្ទាយមិនឲ្យចេញតស៊ូគ្នា ទាហាន**ចូឆូ**ឃើញដូច្នោះក៏នឹកពិភាល់ណាស់ លុះដល់ពេលព្រលប់ក៏នាំគ្នាត្រឡប់វិលទៅវិញ។ ដល់ពេលកណ្តាលអាធ្រាត្រ **ខុងបេង**មិនបានឃើញទាហាន**ចូឆូ**នៅក្នុងបន្ទាយ ទាំងពន្លឺភ្លើងក៏គ្មាន ងងឹតសូន្យទាំងអស់ ក៏ឲ្យទាហានអុជផាវជាសញ្ញាឡើង។ **ជូឡុង**ដែលតាំងពួនបង្កប់នោះ លុះពេលបានឮដូច្នោះ ក៏ឲ្យទាហានវាយឃ្មោះគោះគងទូងភេរីផ្លុំត្រែឡើងព្រមគ្នា **ចូឆូ**បានឮក៏ភ័យណាស់ សម្គាល់ថា **ឡៅពី**ទៅប្លន់បន្ទាយ ទើបឲ្យទាហានចេញទៅមើល ទាហានក៏វិលត្រឡប់ទៅប្រាប់**ចូឆូ**វិញថា ខ្ញុំបាទចេញទៅមើលមិនឃើញមានអ្វីសោះ។

លុះដល់ពេលយប់ស្ងាត់ ទើបឮសំឡេងឃ្មោះគងទូងភេរីផ្លុំត្រែអុជផាវ សន្ធឹកសន្ធាប់ជាចម្លែកណាស់ តាំងពីយប់នោះរំលងទៅទៀតដល់បីយប់ ក៏មិនបានឈប់សម្រាកបានសោះ **ចូឆូ**នោះក៏ចេះតែព្រួយបារម្ភពន់ប្រមាណ ទើបឲ្យថយទ័ពត្រឡប់ពីទីនោះចម្ងាយប្រហែលបីរយសិន (១២ គ.ម) ក៏តាំងបន្ទាយនៅទីវាលធំទូលាយមួយអន្លើ។ **ខុងបេង**ក្រឡេកទៅឃើញក៏អស់សំណើច ហើយនិយាយនឹង**ឡៅពី**ថា **ចូឆូ**នេះល្អតែខាងការរណរង្គសង្គ្រាមម្យ៉ាង ត្រង់ឧបាយកលសឹកនឹងមិនយល់សោះ ថ្ងៃនេះសូមអញ្ជើញលោកទៅតាំងបន្ទាយនៅត្រើយម្ខាងនោះចុះ។

**ឡៅពី**ឮដូច្នោះក៏សួរថា លោកនឹងឲ្យយើងទៅនោះ ដោយឧបាយកលគិតដូចម្តេច? **ខុងបេង**ថា ខ្ញុំគិតទុកថា បើ**ចូឆូ**លើកទ័ពមកគ្រានេះ ខាងលោកនិង**ឡៅហង, បេងតាត់**ឲ្យធ្វើជាបែកទ័ពចោលបន្ទាយ និងគ្រឿងសាស្ត្រាវុធចេញ ខាងខ្ញុំនឹងត្រៀមទាហានទុកឲ្យព្រមទាំងប៉ែកស្តាំនិងឆ្វេងទៅចាំឯកំពង់ បើឃើញខ្ញុំបក់ទង់ជាសញ្ញា ចូរឲ្យអ្នកត្រឡប់មុខវាយចុះ។ **ឡៅពី**យល់ឃើញត្រូវ ទើបនាំទាហានឆ្លងទៅប្រញាប់។

ឯ**ចូឆូ**នោះ លុះឃើញ**ឡៅពី**ឆ្លងទៅតាំងបន្ទាយដូច្នោះ ក៏នឹកពិភាល់ណាស់ ទើបសរសេរសំបុត្រចាត់បម្រើឲ្យនាំទៅឲ្យ**ឡៅពី**សេចក្តីថា នឹងណាត់ពេលច្បាំងគ្នាវេលាណា? **ខុងបេង**សរសេរតបនឹងច្បាំងគ្នាវេលាព្រឹកស្អែក។ លុះព្រឹកឡើងទាំងសងខាង ក៏លើកទាហានចេញទៅឈប់នៅមុខភ្នំង៉ោកែសាន់ព្រមគ្នាទាំងសងខាង។ **ចូឆូ**ជិះសេះចេញទៅឈរនៅក្បែរទង់ចម្បាំង ឲ្យទាហានវាយស្គរបីបទ ហៅ**ឡៅពី**ចេញទៅនិយាយគ្នា។ **ឡៅពី**ក៏យក**ឡៅហង, បេងតាត់** និងទាហានស្រុកសៃឈួនដែលបានមកទុកនោះទៅជាមួយ។ **ចូឆូ**ឃើញ**ឡៅពី**ចេញមក ក៏យកសែ៊សេះចង្អុល

មុខហើយដេរ**ឡៅពី**ថា អាមនុស្សអកតញ្ញូបង់សត្យបាត់សុចរិត គិតមកទុរយសទ្រុស្តក្បត់នឹងម្ចាស់ផែនដី។

**ឡៅពី**តបថា អាណាមកពោលបង្កាច់គេ មើលងាយយើងដូច្នេះមិនត្រូវសោះ ព្រោះយើងជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**ជាម្ចាស់ កាន់ព្រះតម្រាស់ចេញមកប្រាបអាសត្រូវរាជសម្បត្តិប៉ុណ្ណោះ អាណាធ្វើខុសសម្លាប់ព្រះអគ្គមហេសីម្ចាស់ផែនដីដោយអំណាចចិត្ត ប្រព្រឹត្តទុច្ចរិតគិតលើកខ្លួនជាស្ដេចសម្រេចរាជការ បៀតបៀនប្រាថ្នាយករាជសម្បត្តិចិត្តទ្រនង់ស័ក្តិ អានោះឯងមកលើកទុកដាក់ខ្លួនជាត្រូវវិញពេញជាក្បត់ឬទេ? **ចូឆ្វូ**ឮដូច្នោះក៏ខឹងណាស់ ប្រើ**ស៊ីឡុង**ឲ្យចូលច្បាំងនឹង**ឡៅពី** ៗក៏ប្រើ**ឡៅហង**ឲ្យចេញរងទទួល។

ខណៈកាល**ឡៅហង**និង**ស៊ីឡុង**ចូលប្រយុទ្ធគ្នាដោយភ្លេងលំពែង **ឡៅពី**ក៏ក្រលៀសខ្លួនចូលទៅក្នុងកងទ័ព លុះ**ឡៅហង**តស៊ូនឹង**ស៊ីឡុង**ពុំបាន **ឡៅពី**ក៏ធ្វើជាបែកទ័ពត្រឡប់រត់ទៅ **ចូឆ្វូ**ឃើញដូច្នោះក៏បង្គាប់ទាហានទាំងពួងថា បើនរណាចាប់ខ្លួន**ឡៅពី**បាន យើងនឹងឲ្យបំណាច់រង្វាន់ធ្វើជាចៅហ្វាយស្រុកសែឈ្មួន។ ទាហានទាំងពួងឮដូច្នោះក៏នាំគ្នាស្រែកហ៊ោដេញតាម**ឡៅពី**ទៅ។

ឯ**ឡៅពី**និងទាហានទាំងពួងធ្វើជាបាក់ទ័ពរត់ត្រឡប់ទៅអស់ ចោលគ្រឿងសាស្ត្រាវុធនៅក្នុងទីស្នាមចម្បាំង តាំងតែរត់តម្រង់ទៅតាមផ្លូវសំដៅទៅវាលហាន់ស៊ុយ។ ទាហាន**ចូឆ្វូ**បានបន្ទាយក៏សប្បាយចិត្តណាស់ ចូលដណ្តើមយកទ្រព្យរបស់គ្រឿងសាស្ត្រាវុធប្រពាក់ប្រពូន។ **ចូឆ្វូ**ក៏ឲ្យវាយឃ្មោះគងទូងភេរីហៅទាហានឲ្យឈប់ ទាហានទាំងពួងថា យើងខ្ញុំនឹងដេញតាមចាប់**ឡៅពី**ឲ្យបាន ហេតុម្តេចក៏លោកហាមឃាត់វិញ។ **ចូឆ្វូ**ថា យើងពិគ្រោះមើលកលការឃើញខុសប្លែកណាស់ ដែល**ឡៅពី**ផ្លងទន្លេមកតាំងបន្ទាយត្រើយខាងនេះ មិនទាន់ធ្វើការយុទ្ធប៉ុន្មានក៏បែកទៅគួរ

ឲ្យសង្ស័យ ខមួយ ដែលចោលសេះនិងគ្រឿងសាស្ត្រាវុធទុកក្នុងបន្ទាយច្រើនក៏គួរឲ្យសង្ស័យ ខមួយ ហេតុនេះត្រូវតែយើងរំសាយកងទ័ពចេញសិន កុំអាលឲ្យទាហានទាំងពួងរើសយកទ្រព្យរបស់ទាំងនេះឡើយ បើនរណាហើយមិនស្ដាប់យើងនឹងសម្លាប់ជីវិតបង់ ថាហើយក៏រំសាយកងទ័ពត្រឡប់ទៅ។

ខណៈកាល**ចូឆ្វ**សំសាយទ័ពត្រឡប់ទៅនោះ **ខុងបេង**ក៏ឲ្យលើកទង់គ្រវីឡើងជាសម្គាល់ **ឡៅពី**ឃើញក៏បរពលចូលមកវិញ ឲ្យ**ហាងតុង**ចេញជាប៉ែកស្ដាំ ឲ្យ**ជូឡុង**ជាប៉ែកឆ្វេងវាយខ្ទប់ប្រសព្វគ្នាទាំងសងខាង។ **ចូឆ្វ**មិនអាចតស៊ូបានក៏បែកទ័ពត្រឡប់រត់ទៅ។ **ខុងបេង**ក៏ឲ្យដេញតាមទៅទាំងពេលកណ្ដាលយប់នោះ។ **ចូឆ្វ**រត់ទៅដល់ជិតស្រុកឡៅតេង ក្រឡេកឃើញពន្លឺភ្លើងឆេះឡើងក្នុងស្រុកគ្រប់ទិសទាំងបួន ក៏ភ័យណាស់ ទើបដឹងច្បាស់ថា ស្រុកនេះខូចអន្តរាយដោយសត្រូវអស់ហើយ ព្រោះពីដើមនោះ**ខុងបេង**ប្រើ**ង៉ៀមង៉ាន់**ឲ្យនៅរក្សាស្រុកប៉ាសេជាជំនួស**អ៊ុយអៀន** ហើយឲ្យ**តៀវហ៊ុយ, អ៊ុយអៀន** ពីរនាយនោះ លើកទៅវាយស្រុកឡាំតេងបាន។ **ចូឆ្វ**ក៏រត់ទៅតាមផ្លូវសំដៅទៅគយអេងបេងគួន។

ឯ**ឡៅពី, ខុងបេង** ដែលលើកទាហានតាម**ចូឆ្វ**នោះ ក៏ចូលទៅក្នុងស្រុកឡាំតេង ហើយបញ្ចុះបញ្ចូលទាហាន និងអាណាប្រជានុរាស្ត្រឲ្យនៅជាប្រក្រតី។ ថ្ងៃមួយ**ឡៅពី**សួរ**ខុងបេង**ថា ដែល**ចូឆ្វ**លើកទ័ពមកធ្វើការសង្គ្រាមនឹងយើងគ្រានេះ ហេតុម្ដេចក៏ភ្លាំងភ្លាត់ចាញ់យើងនោះ ដោយប្រការអ្វី? **ខុងបេង**ឆ្លើយថា **ចូឆ្វ**នោះជាមនុស្សមានសន្ដានចិត្តមិននឹងនួន រមែងគិតសង្ស័យច្រើន ឃើញចំណានតែប្រើទាហានចូលច្បាំងម្យ៉ាង ហេតុដូច្នេះទើបផ្ដោះផ្ដោយចាញ់យើងដោយងាយ។ **ឡៅពី**ថា ឥឡូវឃើញថា **ចូឆ្វ**នឹងរត់ទៅនៅគយអេងបេងគួនហើយ មានពួកតែមួយលោកនឹងគិតឧបាយប្រការម្ដេចទើបនឹងបានខ្លួន**ចូឆ្វ**នោះ? **ខុងបេង**ថា ខ្ញុំគិតទុក

ស្រេចហើយ ទើបឲ្យ**តៀវហ៊ុយ**និង**អ៊ុយអៀន**នាំទាហានទៅជាពីរផ្លូវ ចាំស្ទាក់ស្កាត់កាត់យកស្បៀង**ចូឆ្វូ**ឲ្យបាន ហើយទើបប្រើ**ហាងតុង**និង**ជូឡុង**ទៅដុតផ្លូវក្បែរភ្នំ ដែល**ចូឆ្វូ**នឹងទៅនោះចេញ នាយទាហានទាំងបួនពួកទទួលបង្គាប់ហើយ ក៏លា**ឡៅពី, ខុងបេង**លើកទាហានឲ្យមនុស្សនាំផ្លូវទៅ។

**ចូឆ្វូ**ទៅនៅក្នុងបន្ទាយអេងបេងគួន ប្រើទាហានឲ្យទៅយាមល្បាតមើលគ្រប់តំបន់ ទាហានល្បាតវិលទៅជម្រាប**ចូឆ្វូ**ថា ឃើញទាហាន**ឡៅពី**កាត់ដើមឈើបិទផ្លូវតូច និងផ្លូវធំជិតទាំងអស់ ហើយយកភ្លើងដុតប្រចាំ មិនដឹងថាទាហាន**ឡៅពី**នឹងពួនបង្កប់នៅទីណាខ្លះ មិនដឹងប្រាកដសោះ។ **ចូឆ្វូ**ឮដូច្នោះក៏ចេះតែគិតសង្ស័យ។

ខណៈនោះមានមនុស្សទៅប្រាប់**ចូឆ្វូ**ថា **តៀវហ៊ុយ, អ៊ុយអៀន**លើកទាហានទៅស្កាត់ និងដណ្ដើមយកស្បៀងរបស់យើងហើយ។ **ចូឆ្វូ**ក៏សួរទាហានទាំងពួងថា នរណានឹងយកអាសាចេញទៅតស៊ូនឹង**តៀវហ៊ុយ, អ៊ុយអៀន**បាន? **ខៅធូ**ឆ្លើយថា ខ្ញុំបាទនឹងសុំអាសាទៅតស៊ូឲ្យបាន។ **ចូឆ្វូ**ក៏ចាត់ទាហានឲ្យ**ខៅធូ**មួយពាន់ **ខៅធូ**ក៏រៀបលើកចេញទៅតាមផ្លូវគយអេងបេងគួន ដើម្បីចាំការពាររក្សាស្បៀងមិនឲ្យអន្តរាយ។

ឯបណ្ដាភ្នាក់ងារដែលឃុំរក្សាស្បៀងនៅទីនោះ ឃើញ**ខៅធូ**ទៅដល់ក៏សប្បាយចិត្តណាស់ថា បើយើងមិនបានអ្នកមកជួយ ក៏ឃើញថានឹងទៅមិនដល់គយអេងបេងគួនទេ ទើបយកស្រាបាយនិងសាច់ជ្រូកមាត់ទាមកលៀងឲ្យ**ខៅធូ**បរិភោគ **ខៅធូ**ផឹកស្រាស្រវឹងខ្លាំងណាស់ ក៏ដើរនាំមុខរទេះស្បៀងទៅ លុះទៅដល់កណ្ដាលផ្លូវ ភ្នាក់ងារដែលនាំស្បៀងក៏និយាយនឹង**ខៅធូ**ថា វេលានេះល្ងាចហើយ ខាងមុខតំបន់ស្រុកប៉ោជីវមានភ្នំនៅក្បែរមាត់ផ្លូវកណ្ដាលផ្លូវ យើងនឹងទៅឥឡូវនេះ ក្រែងមានភ័យអន្តរាយ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ៦០

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពីព្រះចៅ**វុយអេង** គឺ**ចូឆូ** ជំនុំនឹងទីប្រឹក្សាយល់ឃើញថា ត្រូវធ្វើសំបុត្រទៅព្រះ**ស៊ុនគួន**ស្រុកកាំងតាំង ឲ្យលើកទ័ពទៅវាយយកស្រុកកេងជីវពី**គួនអ៊ូ** រហូតដល់ទៅដល់ **លីបង**វាយយកបានស្រុកកេងជីវ **ស៊ីឡុង**វាយយកបានស្រុកសុងយ៉ុងថែមទៀត ។)*

**ខណៈ**នោះ បម្រើសេះដែលទៅស៊ើបរាជការ ក៏នាំយកដំណឹងទៅទូលព្រះចៅ**វុយអេង**ដែលនៅក្នុងក្រុងហ៊ូតោថា ឥឡូវកងទ័ពដែលលើកទៅជួយស្រុកអ៊ួនសៀនោះ ចាញ់គេទៅហើយ ។ **គួនអ៊ូ**ចាប់បាន**អ៊ីគឹម**សម្លាប់ទាំង**បាំងតេក**ដល់នូវសេចក្ដីស្លាប់ ពលទាហានក៏សូន្យវិនាសអស់ ។ ព្រះចៅ**វុយអេង**លុះទ្រង់ជ្រាបដូច្នោះហើយក៏ព្រួយព្រះទ័យណាស់ឲ្យហៅអស់មន្ត្រី ភ្នាក់ងារខ្ញុំរាជការចូលមកប្រជុំហើយប្រឹក្សាថា **គួនអ៊ូ**នោះជាមនុស្សល្អមានវិជ្ជាជំនាញក្នុងការសង្គ្រាមណាស់ ឥឡូវគេចាប់បាន**អ៊ីគឹម**ទៅបាន ថែមទាំងសម្លាប់**បាំងតេក**ដល់នូវសេចក្ដីស្លាប់ទៅទៀត បើគេនឹងលើកទ័ពមកវាយសង្កត់យកស្រុកយើង ៗនឹងគិតផ្លាស់ប្ដូរទីកន្លែងរត់ទៅសិនឬ? ឬនឹងគិតប្រការម្ដេចឲ្យបានស្រួល?

**សុម៉ាអ៊ី**យកសេចក្ដីក្រាបទូលថា ទូលបង្គំបានដឹងជាប្រាកដថា ដែល**អ៊ីគឹម**ចាញ់**គួនអ៊ូ**វេលានេះ មិនមែននឹងចាញ់ក្នុងកម្លាំងក្បួនសង្គ្រាមចម្បាំងដៃគ្នាក៏ទេ ចាញ់ព្រោះទេសកាលទឹកជន់ឡើងលិចខ្លាំង នឹងរកទីកន្លែងធ្វើការក៏ពុំបាន វេលានេះទូលបង្គំយល់ឃើញថា **ស៊ុនគួន**ចៅហ្វាយស្រុកកាំងតាំងនោះ ក៏មិនជាទីត្រូវ

អធ្យាស្រ័យនឹង**ឡៅពី**ទេ សព្វថ្ងៃនេះ **ស៊ុនគួន**គ្មានសេចក្ដីសប្បាយចិត្តសោះ ព្រោះខ្លាចក្រែង**គួនអ៊ូ**នឹងលើកទ័ពទៅវាយយកស្រុករបស់ខ្លួន។ បើដូច្នេះសូមព្រះអង្គទ្រង់ចាត់ចែងឲ្យបម្រើទៅញុះញង់**ស៊ុនគួន** ឲ្យមានកំហឹងនឹងលើកទ័ពទៅវាយយកស្រុកកេងជីវវិញ បើ**ស៊ុនគួន**បានស្រុកកេងជីវហើយ សឹមយើងលើកស្រុកកាំងឡាំទិសខាងត្បូងឲ្យទៅ**ស៊ុនគួន**ចុះ មុខជាស្រុកអ៊ូនសៀនោះនឹងភ្លយរួចផង។

**ចៀវចេស**មុហបញ្ជើក៏ទូលព្រះចៅ**រុយអេង**ថា ពាក្យដែល**សុម៉ាអ៊ី**ក្រាបទូលនេះគួរណាស់ហើយ សូមព្រះអង្គទ្រង់ធ្វើតាមចុះ ឯដែលព្រះអង្គនឹងគិតផ្លាស់តែទីកន្លែងទៅនៅស្រុកដទៃនោះមិនត្រូវទេ មុខជាប្រជានុរាស្ត្រចំណុះស្រុកនឹងកើតវឹកវរជាចលាចល ខូចចិត្តគិតប្រែប្រួលអស់ទៅ។ **ចូឆូ**បានឮដូច្នោះ ក៏ពិគ្រោះមើលយល់ឃើញត្រូវផង ក៏ត្រឡប់មិនបានផ្លាស់ប្រែទីកន្លែងវិញ ហើយគិតរំពឹងតូចចិត្តថា **អ៊ុគីម**នោះ ចំពោះបានធ្វើការសង្គ្រាមតាមយើងមកជាអំឡុងយូរហើយប្រហែលសាមសិបឆ្នាំ គួរឬមកមានកម្មឲ្យផ្ដោះផ្ដោយដោយសត្រូវយ៉ាងដូច្នេះ ឯ**បាំងតេក**នោះ ក៏គ្រាន់តែជាទីនាយទាហានមកចំណូលថ្មី មានសេចក្ដីមានះ ធ្វើការសង្គ្រាមទាល់តែស្លាប់ខ្លួនទៅទៀត យើងគិតទៅគួរឲ្យពេញចិត្តអាណិតពេកណាស់ ហើយក៏ឲ្យធ្វើសំបុត្រចាត់បម្រើឲ្យកាន់ទៅដល់**ស៊ុនគួន**ឯស្រុកកាំងតាំង តាមពាក្យ**សុម៉ាអ៊ី**ក្រាបទូលនោះគ្រប់ប្រការ រួចទើបប្រឹក្សានឹងទាហានទាំងពួងថា នរណានឹងយកអាសាចេញទៅច្បាំងនឹង**គួនអ៊ូ**បាន? **ស៊ីឡុង**ទូលថា ទូលបង្គំនឹងសុំយកអាសាលើកទាហានទៅច្បាំងយកជ័យជម្នះតបព្រះតេជព្រះគុណព្រះអង្គឲ្យបាន។ **ចូឆូ**បានឮ**ស៊ីឡុង**ទូលដូច្នោះ ក៏ពេញព្រះទ័យណាស់ ទើបត្រាស់ចាត់ទាហានឲ្យ**ស៊ីឡុង**ចំនួនប្រាំម៉ឺន ហើយចាត់តាំង**លីទៀន**ជាបាឡាត់ទ័ព លុះបានឫក្សល្អ **ស៊ីឡុង**ក៏លាលើកព្យុហៈ

ទ័ពចេញទៅបោះបន្ទាយនៅតំបន់អៀងឡុងធោ ចាំស្តាប់ដំណឹង**ស៊ុនគួន**នឹងប្រាថ្នាមក ឬជាប្រការម្តេច ទើបនឹងលើកទ័ពចូលទៅជួយស្រុកអ៊្វនសៀ។

ឯ**ស៊ុនគួន**នោះ លុះដឹងតាមសំបុត្រ**ចូឆូ**ឲ្យទៅ ក៏ពេញអំណរណាស់ ទើបប្រាប់អ្នកកាន់សំបុត្រនោះឲ្យវិលទៅទូល**ចូឆូ**ថា ដែលនឹងឲ្យយើងលើកទៅវាយយកស្រុកកេងជីវនោះ យើងក៏នឹងលើកទ័ពទៅវាយឆាប់ហើយ ៗឲ្យប្រមូលមន្ត្រីភ្នាក់ងារមកប្រជុំព្រមគ្នាហើយប្រឹក្សាថា **ចូឆូ**នឹងឲ្យយើងទៅវាយយកស្រុកកេងជីវនោះ អស់អ្នករាល់គ្នានឹងយល់ឃើញប្រការម្តេច? **ទៀវចៀវ**ឆ្លើយថា ខ្ញុំបាទដឹងថា **ចូឆូ**ប្រើ**អ៊ីគឹម**និង**បាំងតេក**លើកទ័ពទៅជួយស្រុកអ៊្វនសៀ ក៏ចាញ់**គួនអ៊ូ**ទៅ ឥឡូវខ្ញុំបាទឃើញថា **ចូឆូ**នឹងញញើតខ្លាច**គួនអ៊ូ**ណាស់ បានជាត្រឡប់មកបបួលយើងឲ្យលើកទ័ពទៅវាយយកស្រុកកេងជីវឲ្យបាន ហើយថានឹងលើកតំបន់កាំងឡាំឲ្យយើងទៀតផង ពាក្យនេះមិនមែនប្រាកដទេ។ កំពុងតែប្រឹក្សាគ្នាមិនទាន់ផុតមាត់ ស្រាប់តែឮ**លីបង**ដែលនៅឈររក្សាគយឡុកខៅចូលមកដោយទូកតូចរហ័ស **ស៊ុនគួន**ក៏ហៅខ្លួនចូលមកហើយសួរថា ចៅមកនេះដោយកិច្ចរាជការប្រការម្តេច?

**លីបង**ឆ្លើយថា វេលានេះ**គួនអ៊ូ**លះបង់ស្រុកកេងជីវ លើកទ័ពទៅតាំងព័ទ្ធស្រុកអ៊្វនសៀជាទីឆ្ងាយដាច់ស្រយាលហើយ គួរយើងនឹងស្រូតរូតលើកទ័ពទៅវាយយកស្រុកកេងជីវ មុខជានឹងបានដោយងាយណាស់។ ទើប**ស៊ុនគួន**ក្លែងល្បងចិត្ត**លីបង**ថា យើងគិតនឹងលើកទ័ពទៅវាយយកស្រុកឈីជីវដែលឡើង**ចូឆូ**នោះទេ ព្រោះស្រុកនោះមនុស្សតិចសមគួរ ល្មមនឹងវាយយកបាន អ្នកនឹងយល់ឃើញប្រការដូចម្តេច? **លីបង**ឆ្លើយថា ដែលលោកនឹងលើកទៅវាយយកស្រុកឈីជីវ ខាងទិសឯជើងដែលឡើង**ចូឆូ**នោះ មនុស្សតិចល្មមនឹងវាយបានហើយ តែខ្ញុំបាទគិតថា ដែលនឹងលើកកងទ័ពទៅនោះ ជាផ្លូវដាច់ស្រយាល ជើងគោក ក៏មុខជាលំបាកដល់ពល

ទាហានណាស់ ទោះបីវាយបានហើយក៏តាំងនៅមិនជាប់ បើលើកទៅវាយយកស្រុកកេងជីវល្អជាង បើបានស្រុកនោះហើយ សឹមគិតការតទៅទៀត។

**ស៊ុនគួន**ថា យើងក៏គិតនឹងចង់ទៅវាយយកស្រុកកេងជីវ តែដែលថាទាំងនេះក្លែងចង់ដឹងចិត្តថៅទេតើ! បើដូច្នោះ ថៅត្រូវរៀបខ្លួនទៅជួយយើងធ្វើការនេះ ដើម្បីវាយយកស្រុកកេងជីវឲ្យបានសិន រួចសឹមយើងលើកទ័ពទៅតាមជាក្រោយ។ **លីបង**ទទួលប្រសាសន៍**ស៊ុនគួន**ហើយ ក៏ត្រឡប់វិលទៅឯគយឡុកខៅវិញ។

បម្រើសេះដឹងថា**លីបង**វិលមកហើយ ក៏ចូលទៅជម្រាប**លីបង**ថា ឥឡូវនេះនៅស្រុកកេងជីវ មានគិតធ្វើការឲ្យតាំងរានភ្លើងរាយជាលំដាប់គ្នា តាមក្បែរទឹករៀងទៅចម្ងាយពីគ្នាប្រហែលពីររយសិនខ្លះ បីរយសិនខ្លះ មានមនុស្សនៅរក្សាជានិច្ចមិនដាច់ ទាំងទាហានក្នុងស្រុកក៏បម្រុងការទុកព្រមមាំមួនណាស់។ **លីបង**បានឮដូច្នោះក៏ភ័យណាស់រំពឹងគិតថា ដែលយើងបានទទួលប្រសាសន៍**ស៊ុនគួន**ថា នឹងលើកទៅវាយយកស្រុកកេងជីវនោះ ឥឡូវទាហានគេបម្រុងខ្លួនជាមាំមួនម្ល៉េះ មុខជានឹងទៅធ្វើការនោះមិនស្រួល បើដូច្នេះយើងត្រូវគិតនិយាយកែខ្លួននឹង**ស៊ុនគួន**ប្រការម្ដេច ទើបនឹងផុតសេចក្ដីវៀចនោះបាន? គិតហើយក៏ប្រើឧបាយឲ្យបម្រើជម្រាប**ស៊ុនគួន**ថា វេលានេះ**លីបង**ឈឺមិនសូវសប្បាយ។

**ស៊ុនគួន**ឮបម្រើប្រាប់ថា**លីបង**ឈឺដូច្នោះ ក៏អស់សេចក្ដីសប្បាយ **ឡុកស៊ុន**ក៏ជម្រាប**ស៊ុនគួន**ថា ដែល**លីបង**ឈឺនោះ គឺជាឧបាយ មិនមែនឈឺទេ។ **ស៊ុនគួន**ថា បើចង់ដឹងឧបាយដែល**លីបង**ឈឺនោះ មានតែថៅទៅពិនិត្យមើលឲ្យឃើញនឹងភ្នែកទើបច្បាស់។ **ឡុកស៊ុន**ឮដូច្នោះក៏លបចេញទៅដល់បន្ទាយឡុកខៅ ហើយក៏ចូលទៅជួបនឹង**លីបង** ឃើញមុខ**លីបង**រីករាយដូចធម្មតាគ្មានឈឺអ្វីសោះ ទើបសួរ**លីបង**ថា ឥឡូវ**ស៊ុនគួន**ប្រើខ្ញុំឲ្យមកសួរអ្នក ព្រោះឮថាអ្នកឈឺនោះ តើជាយ៉ាងម្ដេច?

**លីបង**តបថា ខ្ញុំឈឺគ្រានេះមិនជាទម្ងន់ប៉ុន្មានទេ។ **ឡុកស៊ុន**ថា ដែល**ស៊ុនគួន**ប្រើអ្នកឲ្យប្រុងប្រៀបទាហាន នឹងលើកទៅវាយយកស្រុកកេងជីវនោះ ហេតុម្ដេចបានជាអ្នកនៅស្ងៀមមិនគិតយ៉ាងម្ដេចសោះ? **លីបង**ឮ**ឡុកស៊ុន**ថាដូច្នោះ ក៏ដឹងថា**ឡុកស៊ុន**ដឹងដល់គំនិតនិងកិរិយាខ្លួន ក្រឡេកមើលមុខមើលភ្នែក**ឡុកស៊ុន** ហើយក៏ស្ងៀមនៅមិនឆ្លើយសោះ។ **ឡុកស៊ុន**ថា ខ្ញុំមានថ្នាំឱសថមួយយ៉ាងនឹងរក្សារោគអ្នកដែលឈឺនេះឲ្យជាសះបាន អ្នកនឹងឲ្យខ្ញុំដាក់ថ្នាំនេះលមើលឬប្រការម្ដេច? **លីបង**ឮ**ឡុកស៊ុន**ថាដូច្នេះ ក៏បណ្ដេញមនុស្សបម្រើឲ្យចេញទៅក្រៅទាំងអស់ ហើយសួរថា អ្នកនឹងឲ្យថ្នាំខ្ញុំយ៉ាងដូចម្ដេច? **ឡុកស៊ុន**អស់សំណើចហើយថា ជំងឺអ្នកនេះខ្ញុំដឹងថា ព្រោះហេតុតែស្រុកកេងជីវឲ្យទោស ដោយខ្ញុំឮគេថា វេលានេះគេកំពុងបម្រុងរៀបទាហាន ហើយធ្វើរានភ្លើងវាយហៃក្បែរមាត់ទឹករៀងទៅ ដើម្បីនឹងការពារស្រុកគេជាមាំមួនណាស់ បានជាអ្នកបង្កើតបរិវិតក្កជាទុក្ខព្រួយឲ្យកើតជារោគក្នុងចិត្ត ដ្បិតរឿងនេះឯង ខ្ញុំនៅមានថ្នាំមួយជាឧបាយជម្រះរោគនេះបាន គឺត្រូវធ្វើឲ្យទាហានស្រុកកេងជីវដែលធ្វើការរក្សាស្រុកនោះ ឲ្យមកចំណុះចុះចូលដល់អ្នក មិនឲ្យលំបាកឡើយ តើអ្នកនឹងឃើញប្រការម្ដេច?

**លីបង**បានឮ**ឡុកស៊ុន**និយាយដឹងដល់គំនិតរបស់ខ្លួន ដោយល្បិចដូច្នោះ ក៏គួរឲ្យភ័យស្លុតក្នុងចិត្ត ទើបសួរថា ចុះផ្លូវជាឧបាយរបស់អ្នក ដែលនឹងគិតឲ្យពួកអ្នកស្រុកកេងជីវមកចំណុះយើងនោះ តើដោយប្រការយ៉ាងដូចម្ដេច? **ឡុកស៊ុន**ឆ្លើយថា អ្នកស្រុកកេងជីវដែលបានប្រុងប្រៀបរៀបចំបម្រុងទាហាន ព្រមទាំងមានការចាត់ចែងស្រុកទុកដូចម្ដេចៗនោះ មកពី**គួនអ៊ូ**មានសេចក្ដីបារម្ភនឹងអ្នកដែលមកតាំងនៅទីនេះ ហើយមិនទុកចិត្ត បើអ្នកដឹងឧបាយហើយធ្វើជាឈឺដើរចេញពីទីនេះទៅ ចាត់តម្រូវឲ្យអ្នកឯទៀតមកឈរជំនួសអ្នកវិញ ហើយឲ្យបញ្ចេញបរិហារសម្ដីនិយាយ

សរសើរ**គួនអ៊ូ** ៗក៏នឹងទ្រទន់ចិត្ត គិតតែច្បាំងយកស្រុកអ៊ួនសៀឲ្យបាន មិនមាននឹករវាំងទៅខាងក្រោយទេ ទើបយើងនឹងគិតគេចត្រឡប់ទៅវាយយកស្រុកកេងជីវឲ្យបានដោយងាយ។ **លីបង**ឮដូច្នោះក៏សប្បាយក្នុងចិត្តណាស់ និយាយនឹង**ឡុកស៊ុន**ថា ឧបាយរបស់អ្នកយ៉ាងនេះល្អណាស់។ **លីបង**ក៏នៅតែធ្វើជាឈឺដូចដែល ទើបឲ្យ**ឡុកស៊ុន**នាំសំបុត្រមួយច្បាប់ទៅជម្រាប**ស៊ុនគួន**ថា ខ្ញុំបាទ**លីបង**នឹងសុំលាទីរាជការចេញហើយ។ **ឡុកស៊ុន**ក៏នាំយកសំបុត្រនោះទៅជម្រាប**ស៊ុនគួន**តាមការ។

**ស៊ុនគួន** លុះដឹងដំណឹងតាមសំបុត្រហើយ ក៏ឲ្យហៅ**លីបង**ត្រឡប់មករក្សាខ្លួនដែលមានជំងឺ **លីបង**ក៏ចូលមកជួបនឹង**ស៊ុនគួន** ៗនិយាយថា កាលពីដើម**ជីវយី**និយាយនឹងយើងឲ្យតាំង**ឡោសុក**ចេញទៅឈរនៅទីគយឡុកខៅ លុះនៅយូរមក**ឡោសុក**មកនិយាយថា ឲ្យតាំងខ្លួនអ្នកឯងចេញទៅឈរជំនួសទៀត ឥឡូវត្រូវអ្នកឯងមានជំងឺឈឺដូច្នេះ ក៏គួរឲ្យយើងនឹងចាត់មនុស្សឯទៀត ដែលមានតម្រិះប្រាជ្ញាចេញទៅឈរជំនួសខ្លួនអ្នកឯងវិញ។ **លីបង**ថា ដែលលោកនឹងរើសមនុស្សល្អឲ្យចេញទៅឈរជំនួសខ្ញុំបាទនោះ ខាង**គួនអ៊ូ**ក៏មិនទុកចិត្ត គង់នឹងគិតប្រឹងរក្សាស្រុកទុកយ៉ាងមាំមួនណាស់ ឯ**ឡុកស៊ុន**នោះសោតនៅមិនទាន់ប្រាកដកេរ្តិ៍ឈ្មោះឮពីរោះពិសាអ្វីនៅឡើយ គួរលោកចាត់ប្រើឲ្យទៅឈរជំនួសខ្ញុំបាទចុះ **គួនអ៊ូ**នឹងធ្វេសប្រមាទមិនរវាំងក្រោយទេ មុខជាចោលស្រុកកេងជីវឲ្យនៅទំនេរ យើងនឹងវាយយកបានដោយស្រួល។

**ស៊ុនគួន**ឮដូច្នោះក៏ពេញចិត្តណាស់ ទើបតាំង**ឡុកស៊ុន**ជានាយកងទ័ពឆ្វេង ឲ្យទៅឈររក្សាបន្ទាយឡុកខៅ ជាជំនួស**លីបង**។ **ឡុកស៊ុន**ថា ខ្ញុំបាទនៅក្មេងសេចក្តីខ្លីគំនិតប្រាជ្ញាមិនដឹងការអ្វីសោះ ដែលលោកថានឹងឲ្យខ្ញុំបាទទៅឈររក្សាស្រុកឡុកខៅនោះ ឃើញដូចមិនសមគួរសោះ។ **ស៊ុនគួន**ថា **លីបង**គេប្រាប់យើងថា ចៅមាន

តម្រិះប្រាជ្ញាជ្រៅទូលាយណាស់ មុខជាបានការរាជការខ្លះមិនខាន បើដូច្នេះត្រូវតែទៅចុះ កុំធ្វើឲ្យទាស់ខុសពីគំនិតដែលយើងគិតទៅហើយឡើយ។ **ឡុកស៊ុន**មិនហ៊ានរឹងទទឹង ក៏ទទួលយកត្រាចេញទៅឈររក្សាស្រុកឡុកខៅ។

លុះដល់មកថ្ងៃមួយនោះ **ឡុកស៊ុន**ក៏ប្រើមនុស្សឲ្យនាំសំបុត្រ និងគ្រឿងបណ្ណាការទៅគំនាប់**គួនអ៊ូ**ថា ឥឡូវ**ស៊ុនគួន**ប្រើខ្ញុំបាទឲ្យចេញមកឈររក្សាបន្ទាយឡុកខៅជំនួស**លីបង**ហើយ ខ្ញុំបាទទទឹងមិនបាន បានជាចេញមកឈរនៅទីនោះ សូមលោកបានជាទីពឹងខ្ញុំបាទផងចុះ។ **គួនអ៊ូ**ក៏សួរអ្នកកាន់សំបុត្រនោះថា **លីបង**ដែលមកឈរមុននោះ ឥឡូវទៅណាហើយ? អ្នកកាន់សំបុត្រនោះឆ្លើយថា **លីបង**ឈឺវិលទៅនៅមើលខ្លួនឯស្រុកកាំងតាំង បានជាឲ្យ**ឡុកស៊ុន**មកឈរជំនួស។ **គួនអ៊ូ**ថា **ស៊ុនគួន**នោះជាមនុស្សចេះដឹងត្រឹមត្រូវណាស់ ហេតុម្តេចបានជាប្រើកូនក្មេងឲ្យមកឈររក្សាបន្ទាយដូច្នោះ? អ្នកកាន់សំបុត្រនោះថា **ឡុកស៊ុន**ឲ្យខ្ញុំបាទនាំសំបុត្រ និងបណ្ណាការទាំងអស់នេះមកគំនាប់ជូនលោក ដើម្បីសូមឲ្យលោកទាំងសងខាងជាមេត្រីនឹងគ្នាទៅវិញទៅមក សូមឲ្យលោកព្រមទទួលយករបស់ទាំងនេះឲ្យទានចុះ។

**គួនអ៊ូ**នោះ លុះដឹងថា**ឡុកស៊ុន**បង្អោនខ្លួនជូនរបស់ទ្រព្យនិងសំបុត្រចូលមកផ្ញើខ្លួនប្រាណដូច្នោះ ក៏អស់សំណើចហើយឲ្យបាវព្រាវទទួលយកជំនួននោះទៅទុក។ អ្នកកាន់សំបុត្រលាត្រឡប់ទៅប្រាប់**ឡុកស៊ុន**ថា **គួនអ៊ូ**មានសេចក្តីត្រេកអរសាទរណាស់ មុខជានឹងជឿទុកចិត្តគិតថា ស្រុកកាំងតាំងមិនប្រុងនឹងវាយយកស្រុករបស់ខ្លួនទេ។ **ឡុកស៊ុន**សប្បាយចិត្តណាស់ ទើបចាត់ទាហានឲ្យចេញទៅស៊ើបស្តាប់ការណ៍ ដឹងថាក្នុងស្រុកកេងជីវនោះគ្មានប្រុងប្រៀបរៀបចំទាហានជាមួនមាំទេ មានតែគិតលើកទាហានទៅវាយយកស្រុកអ៊្វនសៀ ហើយឃើញថា**គួនអ៊ូ**នឹងនៅរង់

ឲ្យរបួសព្រួញនេះជាសិន ទើបនឹងលើកទ័ពចូលទៅវាយយកស្រុកអ៊ូនសៀតែម្ដង។ **ឡុកស៊ុន**ក៏នាំយកព័ត៌មាននោះទៅប្ដឹងឲ្យ**ស៊ុនគួន**ជ្រាបគ្រប់ប្រការ។

**ស៊ុនគួន**ក៏ប្រឹក្សានឹង**លីបង**ថា ឥឡូវ**គួនអ៊ូ**គ្មានមន្ទិលពិភាល់ដល់ស្រុកយើងទេ ចេះតែលើកទាហានទៅបំពេញ ដើម្បីនឹងតាំងចិត្តគិតវាយយកស្រុកអ៊ូនសៀឲ្យបាន យើងគិតថា នឹងឲ្យអ្នកនិង**ស៊ុនកៀវ**ជាកូនមាខ្ញុំ លើកទ័ពទៅវាយយកស្រុកកេងជីវ តើអ្នកនឹងយល់ឃើញប្រការម្ដេច? **លីបង**ថា ដែលលោកនឹងប្រើ**ស៊ុនកៀវ**និងខ្ញុំបាទទៅធ្វើការជាមួយគ្នានេះ ខ្ញុំបាទយល់ឃើញថាមិនស្រួលសោះ តែថាបើលោកនឹងឲ្យ**ស៊ុនកៀវ**ទៅ ក៏ឲ្យទៅតែឯងចុះ លោកចាំមិនបានទេឬ? កាលគ្រាលោកប្រើ**ជៀវយី**និង**ជៀវផៅ** ដែលជាមនុស្សចាស់របស់លោក ជាមេទ័ពឆ្វេងស្ដាំឲ្យទៅធ្វើការជាមួយគ្នានោះ ឯ**ជីវយី**ជាមនុស្សមានសតិបញ្ញា នឹងថាអ្វីៗបានទាំងអស់ **ជៀវផៅ**ដែលជាមេទ័ពឆ្វេងក៏បង្អោនខ្លួនស្ដាប់បង្គាប់**ជីវយី** ទើបធ្វើការផងគ្នាបាន ឥឡូវលោកនឹងឲ្យខ្ញុំបាទទៅជាមួយនឹង**ស៊ុនកៀវ**នោះ ប្រាជ្ញាខ្ញុំបាទមិនបានដូច**ជីវយី** ទោះបីនឹងនិយាយកិច្ចការអ្វីៗក៏មុខជាមិនស្រួល ព្រោះ**ស៊ុនកៀវ**នេះជាសាច់ញាតិនឹងលោក គេមានបញ្ញាឆ្លៀវឆ្លាតណាស់ សុំលោកចាត់ប្រើ**ស៊ុនកៀវ**ឲ្យទៅម្នាក់ឯងចុះ គង់តែនឹងធ្វើការបាន មិនមានទាស់ទែងសោះឡើយ។

**ស៊ុនគួន**បានឮ**លីបង**និយាយដូច្នោះ ក៏ត្រឡប់គិតឃើញផង ទើបតាំង**លីបង**ឲ្យជាមេទ័ពធំ ជាងនាយទាហានក្នុងអាណាខេត្តស្រុកកាំងតាំង សម្រាប់គិតការសឹកសង្គ្រាមទាំងពួង ហើយតាំង**ស៊ុនកៀវ**ឲ្យជានាយទាហានកងស្បៀង នៅក្នុងបង្គាប់**លីបង**។ **លីបង**គំនាប់**ស៊ុនគួន**ហើយ ក៏ប្រមូលពលទាហានបានបីម៉ឺន ឲ្យជាពួកពួនបង្កប់ក្នុងទូកប៉ែតសិប ហើយឲ្យទាហានដែលស្ទាត់ជំនាញក្នុងក្បួនទូកនោះពាក់អាវសធ្វើភេទជាកូនឈ្នួលដង្កោសម្រាប់ចែវទូកទើបចាត់ឲ្យ**ហាន់តុង**, **ជីវថាយ**,

**ជីវឃឹម, ជូហៀន, ភូជៀង, ឈីសេង, តេងហង**ជានាយទាហានប្រាំពីរនាក់ ប្រៀបប្រុងបម្រុងខ្លួនឲ្យព្រម នឹងលើកទៅវាយយកស្រុកកេងជីវ ឯទាហានក្រៅពីពួកដែលចុះទូកទៅនោះ ត្រូវទុកជាទ័ពជំនួយ ចាំលើកទៅជាមួយនឹង**ស៊ុនគួន**។ លុះចាត់ចែងទាហានទាំងពួងរួចហើយ **ស៊ុនគួន**ក៏មានសំបុត្រទៅដល់**ចូឆ្វ** ឲ្យលើកទ័ពប្រញាប់ត្រឡប់ទៅវាយទ័ព**គួនអ៊ី** ដែលតាំងនៅស្រុកអ៊ូនសៀនោះឲ្យបាន ហើយឲ្យបម្រើទៅប្រាប់**ឡុកស៊ុន**ថា ឥឡូវការដែលគិតគ្នាទុកនោះ យើងបានបម្រុងទាហានទុកព្រមហើយ ឲ្យអ្នកស្រុកចាត់ចែងឲ្យស្រេចចុះ ហើយលើកទ័ពទូកចេញទៅតាមទន្លេឃឹមអៀង ត្រង់ទីវានភ្លើងនៅតំបន់ហៃខៅ។

ឯទាហានល្បាតស្រែកសួរថា ពួកនេះមកពីណា? ទាហាន**លីបង**ឆ្លើយថា យើងជាកូនឈ្មួលដង្ហៅសំពៅ ត្រូវខ្យល់ព្យុះបក់ផាត់រសាត់មក។ **លីបង**ក៏ឲ្យយកទ្រព្យឡើងទៅចែកឲ្យទាហានចាំវានភ្លើង។ ពួកចាំវានភ្លើងក៏ជឿប្រាកដឲ្យចតទូកសម្រាកនៅទីនោះ។ លុះពេលប្រហែលម៉ោងមួយយប់ **លីបង**ឲ្យទាហានពួកនោះឡើងព័ទ្ធចាប់ពួកអ្នករក្សាវានភ្លើងនោះចុះដាក់ក្នុងទូកទាំងអស់គ្រប់វាន ហើយចែវទូកចូលទៅដល់ស្រុកកេងជីវ ក្នុងពេលកណ្ដាលយប់នោះ ឥតមាននរណានឹងអាចដឹងថា **លីបង**លើកទ័ពចូលទៅសោះ **លីបង**ក៏លួងយកចិត្តទាហានដែលចាប់បានទៅពីវានភ្លើងថា អស់អ្នករាល់គ្នា ចូរនៅធ្វើការសឹកជាមួយនឹងយើងចុះ យើងនឹងឲ្យបំណាច់រង្វាន់ឲ្យពេញចិត្ត ហើយប្រើឲ្យហៅពួកអ្នកស្រុកដែលជាគូកននឹងគ្នានោះឲ្យបើកទ្វារស្រុកទទួល។

ឯទាហានក្នុងស្រុកនោះ មិនទាន់ដឹងថាពួកសត្រូវគិតថាជាគូកនជាមួយគ្នា ក៏បើកទ្វារទទួលឲ្យចូលទៅ។ **លីបង**ឃើញដូច្នោះក៏ដេញទាហានឲ្យចូលទៅ ហើយស្រែកហ៊ោកញ្ជ្រៀវ យកភ្លើងដុតឆេះឡើង នឹងរកអ្នកឯណាតស៊ូច្បាំងគ្នាគ្មានសោះ។

វេលានោះ**លីបង**ក៏យកស្រុកកេងជីវបានដោយងាយ។ **លីបង**ក៏ឲ្យប៉ាវគងដល់ពួកកងទ័ពទាំងអស់ថា បើនរណាអង់អាចកាចសាហាវទៅកាប់សម្លាប់អ្នកស្រុក ឬធ្វើទុក្ខបុកម្នេញដេញឆក់ដណ្ដើមយករបស់ទ្រព្យ រឹងរាតត្បាតរាស្ត្រ ឲ្យបានសេចក្ដីក្ដៅក្រហាយ យើងនឹងយកទោសអ្នកនោះដល់ជីវិត។ ឯបណ្ដានាហ្មឺនទាំងប៉ុន្មានដែលមានក្នុងស្រុកកេងជីវនោះ ក៏ទំនុកបម្រុងឲ្យគង់យសសក្ដិនៅដូចដែលគ្រប់តំណែង ឯបណ្ដាបុត្រភរិយា**គួនអ៊ូ**នោះ **លីបង**ក៏ឲ្យមនុស្សទៅពិភក្ដិរក្សាជានិច្ចនិរន្តរ៍ មិនមាននរណាអាចទៅបៀតបៀនឲ្យមានសៅហ្មងឡើយ។ **លីបង**នោះ លុះបានស្រុកកេងជីវហើយ ក៏ប្រើបម្រើឲ្យនាំសំបុត្រទៅដល់**ស៊ុនគួន**ថា វេលានេះខ្ញុំបាទវាយយកបានស្រុកកេងជីវហើយ សូមអញ្ជើញលោកលើកកងទ័ពទៅចុះ។

លុះកន្លងមកក្នុងថ្ងៃមួយនោះ **លីបង**ជិះសេះចេញទៅត្រួតត្រាមើលភូមិស្រុក ស្រាប់តែមានភ្លៀងរលាធំណាស់ ក្រឡេកទៅឃើញទាហានម្នាក់ចូលទៅឆក់ដណ្ដើមរបស់ទ្រព្យអ្នកស្រុក **លីបង**ក៏ឲ្យចាប់យកខ្លួនទាហាននោះទៅសួរថា ឯងជាពួកនរណា ម្ដេចក៏ហ៊ានធ្វើដូច្នេះ?

ទាហាននោះឆ្លើយថា ខ្ញុំបាទជាពួកកងទ័ពមកជាមួយនឹងលោក ដែលខ្ញុំបាទឆក់ដណ្ដើមនេះ មិនបានយករបស់ទ្រព្យមាសប្រាក់គេទេ យកតែឆ័ត្រមួយ គ្រាន់បាំងទឹកភ្លៀងនឹងទៅប៉ុណ្ណោះ។ **លីបង**ថា យើងបានឲ្យប្រកាសទុកពីថ្ងៃមុនថា មិនឲ្យនរណាបៀតបៀនដល់អាណាប្រជានុរាស្ត្រឲ្យបានសេចក្ដីក្ដៅក្រហាយ ដែលឯងល្មើសមកធ្វើដូច្នេះ ត្រូវទោសដល់ស្លាប់ហើយ។ ទាហាននោះឆ្លើយថា ខ្ញុំបាទគិតថា អាវក្រោះនេះមុខជាទទឹកខូច បានជាដណ្ដើមយកឆ័ត្រមកបាំងដូច្នេះ ទោសខ្ញុំបាទខុសហើយ សូមលោកអាណិតមេត្តាអត់ទោសខ្ញុំបាទតែម្ដងនេះទៅចុះ។ **លីបង**មិនស្ដាប់ ឲ្យចាប់ទាហាននោះយកទៅសម្លាប់ រួចទើបត្រឡប់គិតឃើញគួរឲ្យនឹក

អាណិតពេកណាស់ ហើយឲ្យយកសពទៅកប់តាមសមគួរ។ ទាហានទាំងពួងឃើញ**លីបង**ធ្វើទោសដូច្នោះ ក៏រឹតតែកោតខ្លាច មិនមានអ្នកឯណាអាចហ៊ានធ្វើអន្តរាយដល់ពួកអ្នកស្រុកដល់តិចតួចឡើយ។

**ស៊ុនគួន**ដឹងថា **លីបង**បានស្រុកកេងជីវហើយ ក៏សប្បាយចិត្តណាស់ បង្ខំលើកទាហានជាប់តាមទៅឯស្រុកកេងជីវ។ **លីបង**ដឹងថា **ស៊ុនគួន**លើកទ័ពមកដល់ហើយ ក៏ចេញទៅគំនាប់អញ្ជើញចូលទៅក្នុងស្រុក **ស៊ុនគួន**ក៏តាំង**ភូយ៉ូយ**ឲ្យធ្វើជាចៅហ្វាយស្រុកកេងជីវ ហើយដោះ**អ៊ីគឹម**ឲ្យរួចចេញពីគុក ឲ្យវិលចូលទៅស្រុកហូតោវិញ។ **ស៊ុនគួន**ក៏តាំងតែបញ្ចុះបញ្ចូលអស់អាណាប្រជានុរាស្ត្រឲ្យនៅជាសុខក្សេមក្សាន្ត បានឲ្យទាំងបំណាច់រង្វាន់ដល់ពួកទាហានទាំងពួងតាមមានសេចក្ដីគាប់ប្រសើរ ស្រេចហើយក៏និយាយនឹង**លីបង**ថា វេលានេះយើងវាយយកបានស្រុកកេងជីវហើយ ដែល**ប៉ៅស៊ូយិន**តាំងនៅស្រុកកាំងអាន់ និង**ប៊ីហង**តាំងនៅស្រុកឡាំគុននោះ យើងនឹងរិះគិតប្រការម្ដេច ទើបនឹងបានស្រុកទាំងពីរនេះ? **ជីលួន**បានឮដូច្នោះក៏ឆ្លើយថា បើលោកនឹងគិតយកស្រុកកាំងអាន់ ដែល**ប៉ៅស៊ូយិន**នៅនោះ ទុកងារឲ្យខ្ញុំបាទចុះ ខ្ញុំបាទនឹងសុំអាសាទៅនិយាយនឹងអណ្ដាត ឲ្យឈ្មោះនេះស្ម័គ្រនៅនឹងលោកដោយស្រួល មិនបាច់ព្រួយដល់ច្បាំងឲ្យលំបាកពលទាហានឡើយ។

**ស៊ុនគួន**សួរ**ជីលួន**ថា ដែលអ្នកឯងនឹងទៅយកស្រុកកាំងអាន់ឲ្យបាន ដោយអណ្ដាតនោះ ឧបាយរបស់អ្នកឯងប្រការម្ដេច? **ជីលួន**ថា ខ្ញុំបាទនិង**ប៉ៅស៊ូយិន**នោះ ជាមនុស្សស្រឡាញ់រាប់អានគ្នាមកតាំងពីតូច ជាទីទុកចិត្តស្និទ្ធស្នាលណាស់ ខ្ញុំបាទគិតឃើញថា នឹងនិយាយបញ្ចុះបញ្ចូលដោយឧបាយផ្សេងៗ មុខជាជឿមកចូលនៅនឹងលោក។ **ស៊ុនគួន**សប្បាយចិត្តណាស់ ទើបប្រគល់ទាហានឲ្យ**ជីលួន**ប្រាំរយ ហើយ**ជីលួន**ក៏លា**ស៊ុនគួន**លើកទៅស្រុកកាំងអាន់។

ឯ**ប៉ោស៊ូយិន**នោះ លុះដឹងថា ស្រុកកេងជីវខូចនឹងសត្រូវហើយ ក៏នៅមិនទាន់ទុកចិត្តឲ្យទាហានត្រៀមគ្រឿងសាស្ត្រាវុធ បិទទ្វារស្រុកទុកយ៉ាងមាំមួនណាស់ មិនឲ្យចូលទៅក្នុងស្រុកបាន។ លុះ**ជីល្អូន**ទៅដល់ស្រុកកាំងអាន់ ហើយឃើញទ្វារបិទជិតដូច្នោះ ក៏សរសេរសំបុត្រចងនៅចុងព្រួញ ហើយបាញ់ទម្លាក់ទៅខាងក្នុងស្រុកប្រាថ្នានឹងឲ្យ**ប៉ោស៊ូយិន**ដឹងសេចក្តី។

ទាហាន**ប៉ោស៊ូយិន**បានឃើញសំបុត្រនៅចុងព្រួញមានសេចក្តីថា ខ្ញុំឈ្មោះ **ជីល្អូន**បានមករក**ប៉ោស៊ូយិន**ដោយល្អ ដ្បិត**ស៊ុនគួន**ចៅហ្វាយខ្ញុំប៉ងនឹងលើកទ័ពមកវាយយកស្រុកនេះ ខ្ញុំគិតឃើញថា អ្នកនិងខ្ញុំធ្លាប់ជាមនុស្សវិស្សាសៈ រាប់អានស្រឡាញ់គ្នាមកតាំងពីតូច កាលដែលនៅជាមួយគ្នានោះ បានជាខ្ញុំនិយាយអង្វរ**ស៊ុនគួន**មិនឲ្យលើកទ័ពមក។ ហេតុនេះបានជាខ្ញុំមកពន្យល់អ្នក ឲ្យប្រញាប់ចេញមកស្មគ្រនៅនឹងចៅហ្វាយខ្ញុំទៅចុះ ទើបនឹងអស់ភ័យអន្តរាយ។

ឯ**ប៉ោស៊ូយិន** លុះមើលដឹងសេចក្តីនោះហើយ ក៏រំពឹងគិតថា **គួនអ៊ូ**និងអញនេះមានសេចក្តីព្យាបាទគ្នាជាប់ តាំងពីគ្រាអញធ្វើឲ្យភ្លើងឆេះបន្ទាយ កាលលើកទ័ពនោះឲ្យវាយអញបានសេចក្តីឈឺចាប់ជាទម្ងន់ណាស់ ហើយចាំនឹងសម្លាប់អញឲ្យបាន។ វេលានេះ គួរអញនឹងទៅចំណុះចុះចូលនៅនឹង**ស៊ុនគួន**ចុះ ទើបនឹងអស់គ្រោះភ័យ។ លុះគិតដូច្នោះហើយ ក៏បង្គាប់ទាហានឲ្យបើកទ្វារស្រុកទទួល**ជីល្អូន**ចូលទៅគំនាប់តាមប្រពៃណី។ **ជីល្អូន**ថា ឯ**ស៊ុនគួន**ចៅហ្វាយខ្ញុំនោះ ប្រកបទៅដោយចិត្តអាណិតរាប់អានពលទាហានណាស់ បើអ្នកឯណាមានសតិបញ្ញាឆ្លៀវឆ្លាតក្នុងការសឹក ក៏ឲ្យបំណាច់រង្វាន់ផ្សេងៗ រីព្រះតេជព្រះគុណនោះនឹងរកអ្វីប្រៀបផ្ទៀបពុំបានឡើយ។ **ប៉ោស៊ូយិន**បានឮដូច្នោះក៏ពេញចិត្តណាស់ ទើបព្រមស្មគ្រទៅចូលនឹង**ស៊ុនគួន** បានទៅដល់ស្រុកកេងជីវជាមួយនឹង**ជីល្អូន**។

**ស៊ុនគួន**ឮដំណឹងថា **ប៉ៅស៊ូយិន**ស្ម័គ្រចូលមកនៅផង ក៏សប្បាយចិត្តណាស់ ឲ្យហៅខ្លួនចូលទៅជួប ហើយតាំងឲ្យគង់នៅជាទីដដែល។ លុះកន្លងយូរមក **លីបង** ក៏ខ្សឹបប្រាប់**ស៊ុនគួន**ថា ឯខ្លួន**គួនអ៊ូ**យើងក៏នៅចាប់ពុំទាន់បាន លោកនឹងតាំង **ប៉ៅស៊ូយិន**ឲ្យគង់ទីតំណែងចាស់នោះ មុខជា**ប៉ៅស៊ូយិន**នឹងមិនធ្វើដោយសុចរិតទេ គួរតែលោកនឹងឲ្យទៅបញ្ចុះបញ្ចូលយកខ្លួន**ប៊ីហង** ដែលឈរនៅស្រុកឡាំគុននោះ ឲ្យស្ម័គ្រមកនៅនឹងលោកទៀតទើបស្រួល។

**ស៊ុនគួន**យល់ត្រូវផង ទើបឲ្យហៅខ្លួន**ប៉ៅស៊ូយិន**ចូលទៅនិយាយថា **ប៊ីហង** ដែលនៅឈរស្រុកឡាំគុននោះ ក៏ជាមនុស្សពួកម៉ាករបស់អ្នកឯង ៗចូរប្រញាប់ទៅបបួលយកខ្លួនមកចូលនៅនឹងយើង ៗនឹងឲ្យបំណាច់រង្វាន់ដល់អ្នកម្តងទៀត។ **ប៉ៅស៊ូយិន**ទទួលប្រសាសន៍**ស៊ុនគួន**ហើយ ក៏លាឡើងសេះទៅដល់ស្រុកឡាំគុន ជាមួយនឹងទាហានសេះហាសិបនាក់។

ឯ**ប៊ីហង** ដឹងថាស្រុកកេងជីវខូចបានទៅ**ស៊ុនគួន**ហើយ ក៏ភ័យខ្លាំងណាស់ ខំគិតការដែលនឹងរក្សាការពារស្រុករបស់ខ្លួនទុកឲ្យមាំមួន ស្រាប់តែមានទាហានចូលទៅប្រាប់ថា **ប៉ៅស៊ូយិន**មានមកចង់ជួប។ **ប៊ីហង**ក៏ឲ្យអញ្ជើញ**ប៉ៅស៊ូយិន**ចូលទៅ ហើយសួរថា អ្នកមកដោយរាជការអ្វី? **ប៉ៅស៊ូយិន**អធិប្បាយតាមពិតថា ឥឡូវ **ស៊ុនគួន**លើកកងទ័ពមកវាយយកស្រុកកេងជីវបានទៅហើយ ខ្ញុំឃើញថាកម្លាំងគេច្រើនណាស់ យើងនឹងលើកទៅតនឹងគេមិនបានទេ ខ្ញុំបាទស្ម័គ្រចិត្តចូលទៅនៅខាងគេទៅហើយ។ ឯព្រះចៅ**ឡៅពី**លោកក៏មានព្រះគុណនឹងយើងច្រើនមែនហើយ តែថាវេលានេះ យើងមានសេចក្តីអាប់ចុនខ្លាំងណាស់ បើមិនគួរនឹងចូល ក៏ត្រូវតែចូលទៅខាងគេឲ្យរួចខ្លួនសិន ចុះចំណែកខ្លួនអ្នក ៗនឹងគិតយ៉ាងម្តេច?

**ប៊ីហាង**តបថា ខ្លួនខ្ញុំបាទផឹកទឹកវិភទ្ទសច្ចាជាខ្ញុំព្រះចៅ**ឡៅពី**ទៅហើយ ដែលនឹងស្ម័គ្រទៅចូលនៅខាង**ស៊ុនគួន**វិញមិនបាន។ **ប៉ៅស៊ូយិន**ថា កាលគ្រាមុននោះយើងទាំងពីរនាក់ក៏បានសេចក្ដីខុស **គួនអ៊ូ**បានឲ្យព្យួរទោសទុកថា បើលើកទ័ពទៅច្បាំងមានជ័យ ឈ្នះវិលមកវិញនឹងសម្លាប់យើងចេញ គ្រានេះឃើញថា យើងទាំងពីរមុខជាមិនរួចពីសេចក្ដីស្លាប់ ហើយអ្នកចូរពិគ្រោះមើលចុះ។ **ប៊ីហាង**ថា ញាតិសន្តានរបស់ខ្ញុំ បានធ្វើជាខ្ញុំរាជការមកច្រើនតំណហើយ ដែលនឹងប្រែចិត្តគិតវៀចទៅចូលខាងបច្ចាមិត្តនោះ ពុំដែលមានសោះ ខ្ញុំក៏អស់ផ្លូវគិតហើយ។ ខណៈនោះស្រាប់តែមានបម្រើ**គួនអ៊ូ**ចូលទៅឲ្យដំណឹងជារាជការថា លោកមកនៅទីនេះព្រមគ្នាទាំងពីរនាក់ក៏ជាហើយ ដ្បិត**គួនអ៊ូ**បង្គាប់មកឲ្យខេត្តលោកទាំងពីរនេះចាត់ស្រូវជាស្បៀងឲ្យបានប្រាំរយរទេះ ហើយឲ្យលោកទាំងពីរឃុំនាំទៅជូនដល់គយ កុំឲ្យយឺតយូរ ល្គឹកណាតែមិនបានដូចបង្គាប់ទេ នឹងយកទោសដល់ជីវិត។ **ប៊ីហាង**ឮដូច្នោះក៏សម្លឹងមុខ**ប៉ៅស៊ូយិន** ហើយថា ឥឡូវស្រុកកេងជីវ **ស៊ុនគួន**គេវាយយកបានទៅហើយ បើយើងនឹងនាំស្រូវស្បៀងទៅឲ្យនោះ ធ្វើម្ដេចបាន? ព្រោះផ្លូវដែលទៅនោះចំពោះទៅលើស្រុកកេងជីវ? **ប៉ៅស៊ូយិន**ក៏ស្រែកគំហកខ្លាំងទៅឲ្យបម្រើនោះថា មិនត្រូវមកនាំរវល់ដល់យើងទេ ថាហើយក៏កន្ត្រាក់គ្រប៊ីកាប់បម្រើដែលមកនោះស្លាប់ក្នុងទីនោះ។ **ប៊ីហាង**ឃើញដូច្នោះក៏ថា អ្នកមកធ្វើការដូច្នេះនឹងគិតប្រការម្ដេចទៅវិញ? **ប៉ៅស៊ូយិន**ថា **គួនអ៊ូ**គិតក្លែងនឹងសម្លាប់យើងទាំងពីរមែនហើយ បានជាឲ្យបម្រើមកនិយាយយ៉ាងនេះ យើងនឹងចាំតែស្លាប់ម្ដេចបាន។ មកយើងត្រូវនាំគ្នាទៅស្ម័គ្រចិត្តចូលនៅនឹង**ស៊ុនគួន**ចុះ។

ខណៈនោះ ទទួល**លីបង**លើកពលទៅដល់ជើងកំពែងស្រុកឡាំគុក **ប៊ីហាង**ដឹងដូច្នោះភ័យណាស់ ទើបចេញទៅជាមួយនឹង**ប៉ៅស៊ូយិន** សុំចំណុះចុះចូល**លីបង** ៗក៏

នាំយកខ្លួន**ប៊ីហាង**និង**ប៉ៅស៊ូយិន**ទៅគំនាប់**ស៊ុនគួន** ៗមានអំណរណាស់ ឲ្យបំណាច់រង្វាន់**ប៉ៅស៊ូយិន**និង**ប៊ីហាង**តាមសមគួរ ហើយឲ្យបញ្ចុះបញ្ចូលអាណាប្រជានុរាស្ត្រឲ្យនៅជាសុខក្នុងស្រុកទាំងពីរ។

ខណៈនោះ **ចូឆ្វ**ក៏ប្រឹក្សានឹងនាហ្មឺនទាំងពួងថា នឹងវាយយកស្រុកកេងជីវ ស្រាប់តែមានបម្រើ**ស៊ុនគួន**នាំសំបុត្រទៅ**ចូឆ្វ** ៗក៏ឲ្យហៅបម្រើនោះទៅ បម្រើនោះគំនាប់ហើយក៏ថ្វាយសំបុត្រទៅ**ចូឆ្វ** ៗមើលឃើញសេចក្ដីថា **ស៊ុនគួន**បានវាយយកស្រុកកេងជីវហើយ សូមឲ្យព្រះចៅ**វុយអេង**លើកទ័ពទៅវាយ**គួនអ៊ូ**ចុះ តែសេចក្ដីនេះកុំអាលឲ្យបែកការ ក្រែងដឹងទៅដល់**គួនអ៊ូ** ៗនឹងត្រៀមបម្រុងទាហានរក្សាខ្លួន។ **ចូឆ្វ**ដឹងដូច្នោះ ក៏ប្រឹក្សានឹងនាហ្មឺនទាំងពួងថា យើងនឹងគិតយ៉ាងម្ដេច? **តាំងចៀវ** សមុហៈបញ្ជីទូលថា ឥឡូវនេះស្រុកអ៊ួនសៀអាប់ចុនទៅហើយ គួរយើងនឹងយកសំបុត្រនេះចងនៅចុងព្រួញ ហើយបាញ់ធ្នូទម្លាក់ទៅក្នុងស្រុកអ៊ួនសៀ **ចោយិន**និងទាហានទាំងពួងដឹងការតាមសេចក្ដីសំបុត្រនេះ ក៏នឹងមានទឹកចិត្តគិតប្រឹងធ្វើការឡើង។

ព្រះចៅ**វុយអេង**ទ្រង់យល់ត្រូវ ក៏ឲ្យធ្វើតាមពាក្យ**តាំងចៀវ** ហើយប្រើបម្រើឲ្យទៅប្រាប់**ស៊ីឡុង**ដែលតាំងទ័ពនៅវាលអេងឡុងផោនោះ។ លុះប្រើបម្រើទៅហើយក៏លើកកងទ័ពហ្លួងចេញទៅ បោះបន្ទាយនៅទីវាលអេងឡុងផោ ប្រយោជន៍ចាំជួយរាជការស្រុកអ៊ួនសៀ។ ឯ**ស៊ីឡុង**នោះ លុះឃើញបម្រើទៅដល់ក៏សួរថា មកមានការអ្វី? បម្រើឆ្លើយថា ឥឡូវព្រះចៅ**វុយអេង**លើកកងទ័ពចេញពីស្រុកហើយ ឲ្យលោកខំស្រួតលើកទៅវាយទ័ព**គួនអ៊ូ** ជួយដោះយកស្រុកអ៊ួនសៀឲ្យបាន។

ខណៈនោះស្រាប់តែបម្រើចូលទៅប្រាប់**ស៊ីឡុង**ថា ឥឡូវ**គួនប៉េង**លើកទ័ពទៅតាំងនៅស្រុកអៀនសៀហើយ **លៀវហ៊្វ**តាំងនៅតំបន់ស៊ូថុង **គួនប៉េង**និង**លៀវហ៊្វ**ពីរ

នាយនេះ តាំងបន្ទាយជាប់គ្នាចំនួនដប់ពីរបន្ទាយ។ **ស៊ីឡុង**បានឮដូច្នោះ ក៏ប្រើ **លីសៀង, លីទៀន** នាយទាហានរងទាំងពីរនាក់យកទង់សម្គាល់**ស៊ីឡុង**លើកចូលទៅវាយយកគយខាងមុខ **ស៊ីឡុង**លើកទាហានប្រាំរយទៅតាមផ្លូវធីកែស៊ុយចូលទៅខាងគយក្រោយ នឹងវាយយកស្រុកអៀនសៀ។

ឯ**គួនប៉េង**សម្គាល់ថាទង់**ស៊ីឡុង**លើកចូលទៅ ក៏ឡើងសេះនាំទាហានចេញច្បាំងនឹង**លីសៀង** ល្មមបានបីភ្លែង **លីសៀង**ធ្វើជាបាក់ទ័ពរត់ទៅក្រោយ **លីទៀន**ក៏ចូលតនឹង**គួនប៉េង**បានប្រាំមួយភ្លែង ក៏ធ្វើជាបាក់ទ័ពរត់ទៅទៀត **គួនប៉េង**បានចំណាប់ក៏ដេញតាមទៅចម្ងាយផ្លូវប្រហែលពីររយសិន (៨ គ.ម)។ **ស៊ីឡុង**ឃើញ**គួនប៉េង**ទៅឆ្ងាយពីបន្ទាយដូច្នោះ ក៏ឲ្យទាហានយកភ្លើងដុតស្រុកនោះឆេះឡើង។ **គួនប៉េង**ឃើញភ្លើងឆេះឡើងកណ្ដាលស្រុក ក៏ដឹងថាគេក្លែងធ្វើឧបាយក៏លើកទ័ពត្រឡប់ទៅលុតភ្លើងវិញ ស្រាប់តែប្រទះនឹងកងទ័ព**ស៊ីឡុង**ស្ទាក់នៅពីមុខពីក្រោយ **ស៊ីឡុង**ឃើញ**គួនប៉េង**ត្រឡប់មកស្រែកថា ខ្លួនអ្នកឯងមិនរួចពីសេចក្ដីស្លាប់ហើយគ្រានេះ **ស៊ុនគួន**គេវាយយកស្រុកកេងជីវបានទៅហើយ ម្ដេចមកនៅមមីធ្វើការឯណេះវិញ?

**គួនប៉េង**ឮ**ស៊ីឡុង**ថាដូច្នោះ ក៏ខឹងណាស់ បំផាយសេះចូលទៅប្រយុទ្ធគ្នានឹង**ស៊ីឡុង**មិនទាន់បានបីបួនភ្លែង ទាហាន**ស៊ីឡុង**ស្រែកហ៊ោឡើងព្រមគ្នា **គួនប៉េង**ឃើញភ្លើងឆេះស្រុកអៀនសៀឡើងសន្ធឹកណាស់ មិនអាចនឹងច្បាំងតទៅ ក៏បំផាយសេះនាំទាហានរត់តម្រង់ទៅបន្ទាយ។

ពេលនោះ **លៀវហ្វ៊ួ**ដែលតាំងនៅតំបន់ស៊្វថុងនោះ ក៏ប្រាប់**គួនប៉េង**ថា ដ្បិតខ្ញុំបាទឮដំណឹងមកថា **លីបង**លើកទ័ពទៅវាយយកបានស្រុកកេងជីវអស់ហើយ ទាហានទាំងពួងដឹងសេចក្ដី ក៏នាំគ្នាញញើតដៃទាំងអស់មិនខាន បើជាពិតដូច្នោះមែន

យើងនឹងរិះគិតប្រការម្ដេច? **គួនប៉េង**ថា ការនេះមិនទាន់ប្រាកដទេ គឺជាពាក្យពួកសត្រូវវានិយាយបញ្ឆោតយើង ឲ្យកើតកង្វល់ចិត្ត មិនគួរនឹងយកពាក្យនេះមកនិយាយតទៅឡើយ បើនរណានៅតែទទូចនិយាយដូច្នេះទៀត យើងនឹងយកទោសសម្លាប់ជីវិត។

ខណៈនោះ មានបម្រើសេះមកប្រាប់ថា ឥឡូវ**ស៊ីឡុង**នឹងលើកទៅវាយយកបន្ទាយខាងជើងដែលតាំងនៅក្បែរមាត់ទឹកទន្លេកៃស៊ុយនោះទាំងអស់។ **គួនប៉េង**ថា បើបន្ទាយខាងជើងខូចដោយសត្រូវអស់ហើយ យើញថាបន្ទាយឯទៀតៗនឹងមិនបានសប្បាយសោះឡើយ ព្រោះមានសេចក្ដីលំបាកដោយលិចទឹក បើដូច្នេះគួរយើងនឹងលើកទៅជួយកុំឲ្យខូចអសារ ដោយសត្រូវបៀតបៀនឲ្យអន្តរាយ។ **លៀវហ៊្វ**បានឮដូច្នោះ ក៏តាំងចាត់ចែងទាហានឲ្យនៅរក្សាបន្ទាយល្អមសមគួរ ហើយផ្ដាំថា បើមានសឹកសត្រូវលើកមកវាយ ឲ្យដុងភ្លើងឲ្យឆេះឡើងជាសម្គាល់ យើងនឹងបានលើកទ័ពមកជួយវិញ។ ពួកទាហានឆ្លើយថា បន្ទាយស៊ូថុងនេះជាបន្ទាយធំមាំណាស់ ទាំងស្នាមភ្លោះក៏ជ្រៅ ទោះបីសត្រូវនឹងហើរបកចូលក៏មិនបាន នឹងខ្លាចអ្វីចំពោះសត្រូវប៉ុណ្ណោះ។ **គួនប៉េង**និង**លៀវហ៊្វ**បានឮដូច្នោះ ក៏មានអំណរក្នុងចិត្តណាស់ ទើបលើកទាហានទៅជួយបន្ទាយខាងជើង លុះទៅដល់ក៏សម្លឹងមើលទៅបន្ទាយមួយ តាំងនៅលើភ្នំតូចដែល**ស៊ីឡុង**ធ្វើបញ្ឆោតទុកនោះ **គួនប៉េង**ក៏ប្រឹក្សានឹង**លៀវហ៊្វ**ថា ដែល**ស៊ីឡុង**ទៅតាំងបន្ទាយនៅទីនោះ ជាទីល្អស្រួលណាស់ គួរយើងនឹងលើកទៅលុកប្លន់យកបន្ទាយនោះក្នុងពេលយប់នេះ មុខជានឹងបានដោយងាយ។

**លៀវហ៊្វ**ឆ្លើយថា ខ្ញុំបាទសុំនៅចាំរក្សាបន្ទាយនេះចុះ លោកចូរលើកទាហានទៅធ្វើការខាងនោះ។ លុះពេលយប់ជ្រៅ **គួនប៉េង**ក៏លើកទ័ពទៅឃើញតែបន្ទាយទទេ គ្មានមនុស្សនៅសោះ ទើបចូលចិត្តថា គេមកបញ្ឆោតដោយឧបាយកល ក៏ថយ

ត្រឡប់ទ័ពមកចូលបន្ទាយវិញ។ ខណៈនោះ ស្រាប់តែ**លីសៀង**និង**លីទៀន**លើកទាហានទៅព័ទ្ធទុកទាំងបួនផ្លូវ។ **គួនប៉េង**និង**លៀវហ៊ួ**យល់ថានឹងនៅក្នុងបន្ទាយនោះមិនបាន ក៏ចោលបន្ទាយនោះ រត់ចេញទៅទាំងទាហានដ៏ច្រើន លុះរត់ទៅឆ្ងាយហើយ ទើបក្រឡេកឃើញទង់សម្គាល់របស់**ស៊ីឡុង**ដោតនៅមុខបន្ទាយស៊្វថុង ក៏មិនអាចនឹងចូលទៅបាន ទើបត្រឡប់រត់ទៅតាមផ្លូវធំតម្រង់ទៅបន្ទាយ**គួនអ៊្វ** ដែលទ័ពស្រុកអ៊្វនសៀនៅនោះ ស្រាប់តែប្រទះនឹង**ស៊ីឡុង** ដែលចេញមកស្ទាក់កណ្ដាលផ្លូវ ក៏ចូលប្រយុទ្ធគ្នា ហើយចូលទៅក្នុងបន្ទាយ**គួនអ៊្វ**បាន។ **គួនប៉េង**ក៏ចូលទៅជម្រាបប្ដឹង**គួនអ៊្វ**ថា ដ្បិត**ស៊ីឡុង**លើកទ័ពមកវាយយកស្រុកអៀនសៀវបានហើយ ឯបន្ទាយទាំងពួងក៏ខូចនឹងសត្រូវទាំងអស់ ឥឡូវ**ចូឆូ**លើកកងទ័ពទៅជាបីផ្លូវ នឹងមកជួយស្រុកអ៊្វនសៀ មួយទៀត បានឮដំណឹងជាប្រាកដថា **លីបង**ទៅវាយយកស្រុកកេងជីវបានហើយ។

**គួនអ៊្វ**ឮដូច្នោះក៏ស្រែកថា ពាក្យទាំងអស់នេះមិនមែនសោះទេ គឺជាពាក្យសត្រូវវាក្លែងបញ្ឆោត ប្រាថ្នានឹងឲ្យទាហានយើងខូចចិត្តគំនិត មួយទៀត **លីបង**នៅស្រុកកាំងតាំងក៏ឈឺ ឥឡូវ**ឡុកស៊ុន**ជាក្មេងកម្លោះ ចេញមករក្សាបន្ទាយឡុកខៅ ជំនួស**លីបង** យើងនឹងព្រួយវិតក្កចិត្តថ្វី។

ខណៈនោះមានបម្រើសេះនាំដំណឹងមកប្រាប់ថា ដ្បិត**ស៊ីឡុង**លើកទ័ពមកដល់ហើយ។ **គួនអ៊្វ**ក៏តាំងប្រុងប្រៀបរៀបទាហានទុកព្រម ដើម្បីនឹងចេញទៅតនឹង**ស៊ីឡុង**។ **គួនប៉េង**ថា លោកអាពុកកំពុងឈឺនឹងរបួសព្រួញ មិនទាន់បានជាស្និទ្ធ ដែលនឹងចេញទៅច្បាំងនោះ មុខជាមិនស្រួលទេ។ **គួនអ៊្វ**ថា **ស៊ីឡុង**នោះថ្វីដៃវាយ៉ាងណាល្មមដឹងគ្នាបានហើយ បើ**ស៊ីឡុង**មិនថយទៅ ខំតែចចេសលើកចូលមក យើងនឹងសម្លាប់ចេញ ដើម្បីនឹងឲ្យទាហានទាំងពួងមានសេចក្ដីក្រែងខ្លាច ពីព្រោះបាន

ឃើញជាក់ច្បាស់ លុះនិយាយប៉ុណ្ណោះហើយក៏យកអាវក្រោះមកពាក់ រួចឡើងជិះសេះកាន់ដាវចេញទៅឈរនៅមុខទាហាន។

ឯទាហានខាង**ស៊ីឡុង**ក្រឡេកឃើញ**គួនអ៊ូ** ក៏រួញរាញញើតទាំងអស់គ្នា **គួនអ៊ូ**ក្រឡេកឃើញ**ស៊ីឡុង**ក៏ស្រែកសួរថា ខ្លួន**ស៊ីឡុង**នៅឯណា? **ស៊ីឡុង**ក៏បរសេះចេញមកឈរនៅមុខទាហាន ចំមុខ**គួនអ៊ូ**ធ្វើជាបន្ទន់ខ្លួនចុះបន្តិច ហើយក៏ស្រែកប្រាប់ទៅ**គួនអ៊ូ**ថា តាំងពីខ្ញុំបាទឃ្លាតចាកមកក៏យូរឆ្នាំណាស់ហើយ អ្វីដែលលោកបានរំឭកប្រដៅទុកមកពីដើម ខ្ញុំបាទក៏នៅចាំ នឹងរឭកគុណលោកមិនលោះថ្ងៃ ដូចយ៉ាងខ្លួនលោកជាអ្នកខ្ពស់ មានកិត្តិយសក្នុងផែនដី ខ្ញុំបាទឃើញមុខលោកថ្ងៃនេះ ក៏ពេញអំណរក្នុងចិត្តរកទីបំផុតគ្មាន។ **គួនអ៊ូ**តបថា ខ្លួនយើងនិងអ្នកពីដើមនោះក៏ជាទីស្រឡាញ់រាប់អានគ្នា គ្មាននរណាដូច គ្រានេះហេតុម្តេចបានជាអ្នកធ្វើការឲ្យកូនយើងចាញ់ដូច្នោះ?

**ស៊ីឡុង** ក៏ងាកទៅសួរពួកទាហានរបស់ខ្លួនថា បើនរណាអាចនឹងចូលទៅសម្លាប់**គួនអ៊ូ**បាន នឹងឲ្យមាសមួយពាន់តម្លឹង។ **គួនអ៊ូ**ឮដូច្នោះ ក៏ភ័យស្លុតក្នុងចិត្តឆ្លើយថា ហេតុម្តេចបានជាអ្នកឯងមកនិយាយដូច្នេះ? **ស៊ីឡុង**តបថា នាទីក្បួនសង្គ្រាម ទោះបីនឹងមានមេត្រីរាប់អានគ្នាប្រការម្តេច ក៏ត្រូវតែធ្វើយកជ័យជម្នះឲ្យបាន។ **ស៊ីឡុង**ថាដូច្នោះហើយ ក៏ឡើងសេះកាន់ពូថៅធំចេញមក **គួនអ៊ូ**ក៏ជិះសេះកាន់ដាវចូលច្បាំងគ្នានឹង**ស៊ីឡុង** បានប្រមាណប៉ែតសិបភ្លេង **គួនអ៊ូ**ជំនាញក្នុងក្បួនអាវុធយុទ្ធនា នឹងរកអ្នកឯណាផ្ទឹមស្មើគ្មាន តែថាវេលានេះព្រោះឈឺស្នាដោយរបួសព្រួញខ្លាំង កម្លាំងក៏ថយ បានជា**ស៊ីឡុង**អាចតទល់បាន។

ឯ**គួនប៉េង**នោះ លុះឃើញបិតាឈឺរបួស ខ្លាចក្រែងតនឹង**ស៊ីឡុង**មិនបាន ក៏វាយឃ្មោះសម្គាល់ឲ្យថយ **គួនអ៊ូ**ក៏បំផាយសេះចូលបន្ទាយ។ **ចោយិន**ដែលនៅក្នុង

ស្រុកអ៊្លូនសៀដឹងថា ព្រះចៅ**វុយអេង**លើកទ័ពមកជួយក៏សប្បាយចិត្តណាស់ ទើបលើកទ័ពចេញពីស្រុកអ៊្លូនសៀញែកគ្នាទៅគ្រប់ទិសទាំងបួន ហើយឲ្យទាហានស្រែកហ៊ោឡើងព្រមគ្នា។ **គួនអ៊ូ**បានឮសំឡេងស្រែកហ៊ោទៅបួនទិសដូច្នោះ ក៏ភ័យណាស់។ **ចោយិន**ក៏វាយប្រសព្វចូលមក **ស៊ីឡុង**ក៏វាយប្រសព្វពីម្ខាង។ ឯទាហានក្នុងបន្ទាយ**គួនអ៊ូ**ក៏ភិតភ័យជ្រួលច្របល់។ **គួនអ៊ូ**ក៏ឆ្លងទន្លេសុងកាំងរត់ទៅតាមផ្លូវស្រុកសុងយ៉ុង។

ខណៈនោះមានបម្រើសេះនាំសេចក្ដីមកជម្រាប**គួនអ៊ូ**ថា ឥឡូវនេះស្រុកកេងជីវខូចនឹង**លីបង**ទៅហើយ បណ្ដាគ្រប់គ្រួរបស់លោកក៏គេចាប់បានទាំងអស់។ **គួនអ៊ូ**បានដឹងដូច្នោះហើយ ក៏គួរឲ្យតក់ស្លុតរន្ធត់ស្មារតី មិនអាចនឹងចូលទៅក្នុងស្រុកសុងយ៉ុងបាន ក៏តម្រង់ទៅតាមផ្លូវស្រុកកាំងអាន់ ទើបដឹងដំណឹងច្បាស់ថា **ប៉ៅស៊្វយិន**ដែលនៅឈររក្សាស្រុកកាំងអាន់នោះ ទៅចូលនៅនឹង**ស៊ុនគួន**។ **គួនអ៊ូ**ក៏រឹតតែទោមនស្សតូចចិត្តណាស់ របួសចាស់ដែលត្រូវព្រួញក៏ត្រឡប់ចាប់ពើតពិសលើសដើម **គួនអ៊ូ**ក៏ស្ទុះដង្ហើមចុកធ្លាក់ពីលើខ្នងសេះសន្លប់នៅទីនោះ។ ទាហានទាំងអស់ក៏ស្ទុះទៅគ្រាប់ត្រកងលើកឡើងបានដឹងស្មារតី ទើបស្រដីនឹង**ហាងហ៊្វ**ថា ហេតុដែលបង្កើតឡើងនេះ ក៏ព្រោះយើងមិនជឿស្ដាប់ពាក្យអ្នកដែលបានរំឭក។ **គួនអ៊ូ**ក៏សួរទៅបម្រើសេះថា កាលដែលសត្រូវលើកចូលទៅ ហេតុម្ដេចបានជាមិនដុតភ្លើងជាសម្គាល់ឡើង តាមពាក្យយើងបង្គាប់? បម្រើសេះថា **លីបង**ក្លែងធ្វើជាពួកកូនឈ្មួលដង្ហៅសំពៅឡើងទៅ ហើយចាប់យកទាហានដែលរក្សារានភ្លើងបានទាំងអស់ បានជាមិនបានដុតរានភ្លើង។ **គួនអ៊ូ**ឮដូច្នោះក៏កន្ត្រំបាទាដកដង្ហើមធំ ហើយទើបចេញវាចាថា យើងខូចគំនិតគិតភ្លាត់ខ្លួនឲ្យចាញ់សត្រូវហើយ ធ្វើម្ដេចនឹងបានវិលទៅឃើញព្រះភក្ត្រព្រះចៅ**ឡៅពី**បាន? **ទៀវលុយ**នាយកងប្រចាំជួនឆ្លើយថា គ្រានេះ

យើងក៏អាប់ចុនណាស់ទៅហើយ គួរយើងនឹងឲ្យបម្រើសេះស្រូតទៅស្រុកសេងតោ សុំកងទ័ពមកជួយ ហើយយើងនឹងលើកក្បួនទ័ពគោក ទៅវាយយកស្រុកកេងជីវវិញ។ **គួនអ៊ូ**ឮដូច្នោះក៏យល់ឃើញផង ទើបប្រើ**ម៉ាលៀង**និង**អ៊ីចៀ**ពីរនាយឲ្យនាំសំបុត្រចូលទៅស្រុកសេងតោ ឯ**គួនអ៊ូ**ក៏លើកទាហាននឹងទៅច្បាំង ឲ្យ**គួនប៉េង**និង**លៀវហ៊ួ**ជានាយទ័ពក្រោយ។

ឯ**ចោយិន**នោះ លុះមានជ័យជម្នះហើយ ក៏ចេញទៅគាល់ព្រះចៅ**វុយអេង**ក្នុងកងទ័ព ហើយស្រែកយំអង្វរសូមទោសខ្លួន។ ព្រះចៅ**វុយអេង**ទ្រង់ត្រាស់ប្រាប់**ចោយិន**ថា ដែលជាហេតុដូច្នេះ គឺគ្រោះថ្នាក់ស្រុកទេសយើងទេ យើងក៏មិនបានប្រកាន់ទោសអ្នកឡើយ ថាហើយក៏ប្រទានរង្វាន់ដល់ទាហានទាំងពួង តាមមានគុណបំណាច់តាមសមគួរ ហើយលើកទ័ពទៅតាំងនៅបន្ទាយស៊ូថុង ឃើញប្រដាប់ប្រដាជាទីពិជ័យមាំមួនណាស់ ទើបត្រាស់នឹងទាហានទាំងពួងថា បន្ទាយច្រើនជាន់មាំមួនដល់ប៉ុណ្ណេះហើយ **ស៊ីឡុង**ក៏អាចយកជ័យជម្នះបាន ដែលយើងប្រើឲ្យទាហានទៅធ្វើសង្គ្រាមដល់សាមសិបប្លាយឆ្នាំហើយ មិនដែលនឹងយកជ័យជម្នះឲ្យដូច**ស៊ីឡុង**យ៉ាងនេះបាន ឯ**ស៊ីឡុង**នេះពេញជាមនុស្សមានប្រាជ្ញាដឹងការដែលនឹងបង់នឹងបានប្រាកដណាស់។ ទាហានទាំងពួងក៏ភ្លយសរសើរ**ស៊ីឡុង**គ្រប់គ្នា។

ព្រះចៅ**វុយអេង**ក៏លើកកងទ័ពត្រឡប់ទៅតាំងនៅខផៅ **ស៊ីឡុង**លុះដឹងដូច្នោះក៏លើកតាមទៅ ព្រះចៅ**វុយអេង**ឃើញ**ស៊ីឡុង**លើកមកតាម ក៏ចេញទៅទទួល**ស៊ីឡុង**នាំចូលទៅក្នុងបន្ទាយ ឃើញ**ស៊ីឡុង**លើកទ័ពទៅនោះ មិនមានខុសនឹងរបៀបក្បួនសោះ ព្រះចៅ**វុយអេង**ក៏រឹតតែពេញព្រះទ័យណាស់ ត្រាស់តាំង**ស៊ីឡុង**ជាទាហានឯកសម្រាប់បង្ក្រាបសត្រូវខាងទិសទក្សិណ ទើបឲ្យ**ហែហ៊ួសុង**ទៅឈររក្សាស្រុក

សុងយ៉ុងជាមួយនឹង**ស៊ីឡុង** សម្រាប់នឹងបានតទល់នឹង**គួនអ៊ូ** ឯព្រះចៅ**វុយអេង**ក៏តាំងបោះទ័ពនៅទីខផៅ ចាំស្តាប់ដំណឹងរាជការពីស្រុកកេងជីវ នឹងជាប្រការម្តេច។

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លក៖*

www.khmerliterature.wordpress.com

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៦១

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**គួនអ៊ូ**លើកទ័ពទៅឈប់កណ្ដាលផ្លូវ ដែលនឹងទៅលើស្រុកកេងជីវ ហើយចេញសំបុត្រទៅសួរ**លីបង**ស្រុកកេងជីវថា ហេតុម្ដេចបានជាត្រឡប់ធ្វើសត្រូវនឹងគ្នាវិញ រហូតដល់**គួនអ៊ូ**ស្លាប់ **ស៊ុនគួន**កាត់ក្បាលបញ្ជូនទៅឲ្យ**ចូឆូ** ។សួរចំអកក្បាល**គួនអ៊ូ** ។ខមង្អែកក្រឡេកក្រឡប់ឲ្យ**ចូឆូ** ។ឲ្យយកក្បាលទៅបញ្ចុះ។)*

**ឯគួនអ៊ូ** ដែលលើកទ័ពទៅបញ្ឈប់កណ្ដាលផ្លូវ ដែលទៅលើស្រុកកេងជីវនោះ ប្រឹក្សានឹង**ទៀវលុយ**ថា ដ្បិតវេលានេះ ទាហាន**ស៊ុនគួន**នៅតាំងស្កាត់ផ្លូវខាងមុខ ទាហាន**ចូឆូ**ក៏នៅស្កាត់ពីក្រោយ យើងមកតាំងទ័ពជាប់ក្នុងចន្លោះពួកសត្រូវ ឯកងទ័ពដែលយើងឲ្យទៅសុំក៏មិនទាន់ឃើញមកដល់ យើងនឹងគិតរកឧបាយកលយ៉ាងម្ដេច ទើបបានស្រួល? **ទៀវលុយ**ឆ្លើយថា កាលគ្រា**លីបង**ទៅតាំងទ័ពឈប់រក្សាបន្ទាយឡុកខៅនោះ ក៏បានបកសំបុត្រទៅដល់លោកថា នឹងចង់ឲ្យ**ស៊ុនគួន**ហើយនឹងព្រះចៅ**ឡៅពី**ចងស្ពានមេត្រី ដោយសេចក្ដីស្មោះត្រង់នឹងគ្នា ដើម្បីនឹងព្រួតគ្នាលើកទ័ពទៅកម្ចាត់**ចូឆូ**ចេញ ឥឡូវហេតុម្ដេចបានជា**លីបង**ត្រឡប់ទៅគប់ខាង **ចូឆូ**? បើដូច្នេះ សុំលោកចាត់បម្រើឲ្យទៅសួរសាក**លីបង**ចង់ដឹងមើល តើ**លីបង**នឹងតបមកថាម្ដេចវិញ? **គួនអ៊ូ**ឮដូច្នោះក៏យល់ឃើញត្រូវ ទើបចាត់បម្រើឲ្យនាំសំបុត្រទៅ។

**លីបង**បានទទួលសំបុត្រពីបម្រើ**គួនអ៊ូ** មើលដឹងសេចក្ដីហើយថា យើងនិង**គួនអ៊ូ**ពីដើមក៏ប្រកបអធ្យាស្រ័យស្រឡាញ់គ្នា ដោយសេចក្ដីសុចរិតពិតមែន ពាក្យដែល**គួនអ៊ូ**និយាយមកទាំងប៉ុន្មាន យើងក៏មិនបានជាធំសម្រេចរាជការដោយខ្លួនឯង

បានទេ ឯការនេះ យើងមិនដឹងនឹងឆ្លើយថាម្ដេច។ អ្នកឯងចូរទៅជម្រាបឲ្យគិតមើលតាមការគួរចុះ។ **លីបង**ថាដូច្នោះហើយ ក៏ឲ្យរៀបតុលៀងអាហារឲ្យបម្រើនោះបរិភោគ ហើយឲ្យទៅនៅសំណាក់ក្នុងផ្ទះភ្ញៀវ។

ឯភរិយា**គួនអ៊ូ**និងភរិយាបុត្របណ្ដាពួកទាហាន ក៏បានមកសួរដំណឹងសុខទុក្ខរបស់អ្នកដែលនៅក្នុងទ័ពនោះគ្រប់គ្នា ខ្លះក៏ផ្ញើបញ្ញើបណ្ដាំទៅឲ្យប្ដីនិងបងប្អូនកូនចៅ ហើយផ្ដាំឲ្យទៅប្រាប់ថា យើងរាល់គ្នានៅឯអាយសុខសប្បាយជាទេ **លីបង**មិនបានបៀតបៀនឲ្យបានសេចក្ដីព្រួយលំបាកពីអ្វីៗឡើយ។ ឯបម្រើដែលមកនោះ ក៏គំនាប់លា**លីបង**វិលទៅជម្រាប**គួនអ៊ូ**តាមដំណើរគ្រប់ប្រការ ហើយជម្រាបថាភរិយាបុត្ររបស់លោកនិងពួកទាហានទាំងប៉ុន្មាន ក៏បានសេចក្ដីសុខសប្បាយទាំងអស់គ្នា។ **គួនអ៊ូ**បានឮដូច្នោះ ក៏ខឹងណាស់ដោយយល់ថា ដែល**លីបង**ធ្វើជាមិត្តភក្ដិមកពីដើមនោះ សុទ្ធតែជាឧបាយទាំងអស់ បើនៅមានអាយុជីវិត អញត្រូវគិតសម្លាប់**លីបង**ឲ្យបាន ហើយក៏ស្រែកគំហកបណ្ដេញអ្នកកាន់សំបុត្រនោះ ឲ្យចេញទៅក្រៅបន្ទាយ។

អ្នកកាន់សំបុត្រនោះ ចេញទៅហើយ ទាហានទាំងពួងក៏នាំគ្នាទៅសួរដំណឹងពីរឿងសុខទុក្ខរបស់បុត្រភរិយាញាតិសន្ដាន ដែលនៅក្នុងស្រុកកេងជីវនោះ តើគេធ្វើទុក្ខបុកម្នេញដូចម្ដេច? អ្នកកាន់សំបុត្រអធិប្បាយថា ជាសុខសប្បាយទាំងអស់គ្នាទេ។ ទាហានទាំងពួងបានឮដូច្នោះ ក៏មានសេចក្ដីត្រេកអរសាទរព្រមគ្នា ហើយគិតនឹកដល់គុណ**លីបង**ណាស់។

ខណៈនោះ **គួនអ៊ូ**ក៏លើកទ័ពចូលទៅនឹងវាយយកស្រុកកេងជីវវិញ តែថាទាហានទាំងអស់មិនស្រុះចិត្ត ក៏នាំគ្នាលបរត់ចូលទៅរកគ្រប់គ្រួក្នុងស្រុកកេងជីវអស់ជាច្រើន។ **គួនអ៊ូ**ឃើញទាហានរត់ចូលទៅក្នុងស្រុកកេងជីវអស់ ក៏ខឹងណាស់

ទើបនាំទាហានដែលសល់នោះ លើកទៅវាយយកស្រុកកេងជីវឲ្យបាន លុះលើកចេញពីទីនោះទៅ ក៏ស្រាប់តែឮសំឡេងស្រែកហ៊ោកងរំពង។ មានទាហាន**ស៊ុនគួន**មួយកង មានឈ្មោះ**ជីវឃឹម**ជានាយ លើកទៅស្ទាក់កណ្ដាលផ្លូវ លុះឃើញ**គួនអ៊ូ**លើកទៅ ក៏ជិះសេះវាំខ្លួនចូលមក ហើយស្រែកប្រាប់**គួនអ៊ូ**ថា ហេតុម្ដេចបានជាអ្នកឯងមិនប្រញាប់មកចូលនឹងយើង ឬអ្នកនឹងគិតប្រការម្ដេច?

**គួនអ៊ូ**ឮហើយឆ្លើយថា យើងជាទាហានព្រះចៅ**ឡៅពី** យើងនឹងទៅចំណុះរាជសត្រូវម្ដេចបាន? ថាហើយក៏បំបោលសេះចូលទៅច្បាំងនឹង**ជីវឃឹម** មិនទាន់ទាំងបានបីភ្លែង **ជីវឃឹម**ក៏ធ្វើជាចាញ់បាក់ទ័ពទៅក្រោយ **គួនអ៊ូ**ក៏ដេញបណ្ដោយតាមទៅបានចម្ងាយប្រហែលពីររយសិន (៨ គ.ម) មានទាហាន**ស៊ុនគួន**ពីរនាយ ឈ្មោះ**ហាន់តុង** និង**ជីវថាយ**តាំងស្កាត់នៅក្បែរផ្លូវទាំងសងខាង លុះឃើញ**គួនអ៊ូ**បំបោលសេះដេញ**ជីវឃឹម**ទៅតាមផ្លូវដូច្នោះ ក៏ស្រែកហ៊ោព្រមគ្នាចេញវាយប្រសព្វជុំវិញ**គួនអ៊ូ**។

ឯ**ជីវឃឹម**ដែលរត់ពី**គួនអ៊ូ**ទៅ លុះក្រឡេកឃើញពួកគ្នាឯង ចេញពីច្រកភ្នំមកជួយដូច្នោះ ក៏មានអំណរណាស់ ញាក់សេះត្រឡប់មកតដៃនឹង**គួនអ៊ូ**វិញ។ **គួនអ៊ូ**ភ័យណាស់ ត្រឡប់សេះរត់ទៅតាមជើងភ្នំទិសឯត្បូង ក្រឡេកឃើញមនុស្សនៅលើភ្នំ មានទង់សដោតនៅមុខបន្ទាយសរសេរជាអក្សរបួនតួថា ពួកស្រុកកេងជីវ។

ទាហានដែលនៅលើជើងភ្នំនោះ ក្រឡេកឃើញ**គួនអ៊ូ**ក៏ស្រែកថា បើនរណាជាពួកស្រុកកេងជីវ ក៏ឲ្យស្រូតឡើងមកស្ម័គ្រនៅនឹងយើងចុះ។ **គួនអ៊ូ**ឮដូច្នោះក៏ខឹងណាស់ បង្ហំបរសេះឡើងទៅសម្លាប់មនុស្សពួកនោះចេញ។ ឯ**ស៊ីសេង, តេងហាង**ដែលឃុំទាហាននៅទីច្រកភ្នំសងខាងផ្លូវ លុះឃើញ**គួនអ៊ូ**នឹងឡើងទៅដេញមនុស្សលើភ្នំដូច្នោះ ក៏នាំទាហានមកស្កាត់ពីមុខមិនឲ្យទៅបាន ទទួល**ជីវឃឹម, ហាន់តុង**និង

**ជីវថាយ**ដេញប្រកិតតាម**គួនអ៊ូ**ទៅ លុះឃើញ**ស៊ីសេង, តេងហាង**ស្កាត់ពីមុខហើយ ក៏ស្រូតលើកទាហានឈូនព័ទ្ធពីក្រោយ**គួនអ៊ូ**។ **គួនអ៊ូ**ឃើញសត្រូវចូលចោមព័ទ្ធដូច្នោះ ក៏ឱ្យទាហានបង្ខំចូលច្បាំងមិនឱ្យរួញរា។

ទាហានទាំងពួង លុះដល់ពេលយប់ហើយ ក៏គិតនឹករឭកដល់បុត្រភរិយា បបួលគ្នាគេចរត់ព្រាត់បាត់ជាច្រើន ទោះ**គួនអ៊ូ**ហាមឃាត់ក៏ពុំស្ដាប់ ជាប់ទាហាននៅជាមួយបានប្រហែលបីរយប្លាយ បានច្បាំងតទល់គ្នាទៅដល់វេលាកណ្ដាលអាធ្រាត្រ ទទួល**គួនប៉េង**និង**លៀវហ៊្វូ**ដែលជាកងក្រោយលើកតាមមកទាន់ ឃើញ**គួនអ៊ូ**ចូលនៅក្នុងចំណោមទ័ព ក៏បរពលពារទម្លាយចូលទៅជួយដោះយក**គួនអ៊ូ**ចេញពីក្នុងចំណោមបាន ហើយ**គួនប៉េង**ក៏ជម្រាប**គួនអ៊ូ**ថា វេលានេះទាហានយើងក៏កាន់តែថយដាបកម្លាំងណាស់ហើយ គួរយើងទៅឈប់សម្រាកក្នុងស្រុកបេកសៀ ដែលជាស្រុកតូច ដែលមានគូនិងកំពែងមាំមួន ល្មមនឹងការពាររក្សាខ្លួនឱ្យផុតអន្តរាយ ទម្រាំកងទ័ពស្រុកសៃឈួនលើកមកជួយទាន់។

**គួនអ៊ូ**ឮដូច្នោះ ក៏យល់ឃើញត្រូវផង ទើបបង្គាប់ទាហានឱ្យថយទ័ពទៅដល់ស្រុកបេកសៀ ហើយឱ្យរក្សាស្រុកនោះទុកជាមាំមួន ទើបប្រឹក្សានឹងទាហានទាំងពួងថា ការសឹកសង្គ្រាមគ្រានេះ ក៏ដល់អាប់ចុនហើយ នរណាគិតឃើញដូចម្ដេចខ្លះ? **ទៀវលុយ**ឆ្លើយថា ខ្ញុំបាទគិតឃើញថា បើយើងនឹងតាំងនៅទីនេះ គួរនឹងចាត់បម្រើឱ្យទៅសុំកងទ័ពឱ្យប្រញាប់លើកមកជួយ ទើបនឹងនៅក្នុងស្រុកបេកសៀនេះបាន។ ខណៈដែលកំពុងនិយាយគ្នានោះ ស្រាប់តែទាហាន**ស៊ុនគួន**លើកទ័ពមកទាន់ ក៏វាយព័ទ្ធស្រុកនោះជុំវិញគ្រប់ទិសទាំងបួន។ **គួនអ៊ូ**ដឹងដូច្នោះ ទើបប្រឹក្សានឹងទាហានទាំងពួងថា វេលានេះពួកសត្រូវមកចោមព័ទ្ធជុំវិញហើយ នរណានឹងមានអាសាចេញច្បាំងទម្លាយ ដើម្បីនឹងរត់ទៅសុំកងទ័ពពីស្រុកសុងយ៉ុងមកជួយបាន?

**លៀវហ៊្វ**ថា ខ្ញុំបាទនឹងសុំទទួលអាសាទម្លាយសត្រូវចេញទៅឥឡូវនេះ មិនឲ្យមានអន្តរាយ។ **គួនអ៊្វ**ក៏មានអំណរណាស់ ទើបសរសេរសំបុត្រឲ្យ**លៀវហ៊្វ** មានសេចក្ដីថា ឥឡូវនេះ**ស៊ុនគួន**លើកទ័ពមកច្បាំង យើងជាប់ដៃគ្នាហើយ ឲ្យ**ឡៅហង**និង**បេងតាត់**ប្រញាប់លើកទ័ពទៅជួយជាការរហ័ស កុំបង្អង់ឲ្យយឺតយូរឡើយ។ **គួនប៉េង**និង**លៀវហ៊្វ**ទទួលសំបុត្រហើយ ក៏បើកទ្វារនាំគ្នាចេញទៅ ទទួលប្រទះនឹង**តេងហង**ដែលមកព័ទ្ធនៅនោះ ក៏តាំងតែស្ទាក់**គួនប៉េង** និង**លៀវហ៊្វ**ទុក ហើយចូលប្រយុទ្ធគ្នានឹង**តេងហង** ៗស៊ូមិនបានក៏ថយរត់ **លៀវហ៊្វ**ក៏ទម្លាយទៅបាន ឯ**គួនប៉េង**ក៏ត្រឡប់ចូលស្រុកវិញ។

ឯ**ឡៅហង** និង**បេងតាត់** ទៅវាយយកស្រុកសុងយ៉ុងបាន **ស៊ិនតាំ**ជាចៅហ្វាយស្រុកមិនប៉ានតស៊ូ ក៏នាំទាហានមកសុំចំណុះចុះចូលនៅផង។ កាលបានស្រុកនោះហើយ ព្រះចៅ**ឡៅពី**ក៏តាំងឲ្យឡៅហង និង**បេងតាត់**នៅឈររក្សាស្រុកនោះជាមួយគ្នាទាំងពីរនាក់ លុះដឹងថា**គួនអ៊្វ**ចាញ់សត្រូវរត់ទៅ **ឡៅហង**និង**បេងតាត់**ក៏គិតព្រួយជាទុក្ខខ្លាំងណាស់ ទើបប្រឹក្សាគ្នាថា យើងនឹងគិតប្រការម្ដេច? លុះនិយាយគ្នាដូច្នោះហើយ ស្រាប់តែឃើញ**លៀវហ៊្វ**ចូលទៅគំនាប់ ទើបសួរថា អ្នកមកដោយធុរៈអ្វី? **លៀវហ៊្វ**ក៏ពណ៌នាសេចក្ដីឲ្យស្ដាប់គ្រប់ប្រការ។

**ឡៅហង**ឮដូច្នោះក៏និយាយនឹង**លៀវហ៊្វ**ថា យើងនឹងសុំបង្អង់ប្រឹក្សាគ្នាសិន លុះនិយាយដូច្នោះហើយ ក៏ឲ្យ**លៀវហ៊្វ**ទៅសំណាក់ឯផ្ទះទទួលភ្ញៀវ **ឡៅហង**ប្រឹក្សានឹង**បេងតាត់**ថា **គួនអ៊្វ**ជាមារបស់ខ្ញុំ ឥឡូវរត់ទៅស្រុកបេកសៀ **ស៊ុនគួន**ឲ្យលើកទ័ពមកព័ទ្ធនៅក្នុងចំណោម ជាទីអាប់ចុនទៅហើយ មិនមែនឲ្យ**លៀវហ៊្វ**មកសុំកងទ័ពទៅជួយទេ តើអ្នកនឹងយល់ឃើញប្រការម្ដេច?

**បេងតាត់**ឆ្លើយថា ទាហានស្រុកកាំងតាំងមានកម្លាំងច្រើនណាស់ ក្នុងដែនស្រុកកេងជីវទាំងប្រាំបួនខេត្ត ចាញ់សត្រូវអស់ហើយ ទៅគិតអ្វីប៉ុនស្រុកបេកសៀប៉ុណ្ណោះ ម្យ៉ាងទៀតឮគេនិយាយថា **ចូឆូ**លើកកងទ័ពមកសែសិប ទៅហាសិបម៉ឺនតាំងនៅទីវាយខផៅ បើទុកជាយើងនឹងលើកទ័ពទៅជួយ ក៏មុខជាតទល់ពុំបាន។ **ឡៅហង**ថា ខ្ញុំក៏គិតឃើញដូចអ្នកដែរ តែព្រោះ**គួនអ៊ូ**ជាមាខ្ញុំ បើខ្ញុំស្ងៀមសំងំមិនលើកទៅជួយ ក៏ដូចជាមិនគួរសោះ។ **បេងតាត់**អស់សំណើច ហើយថា អ្នកគិតដល់**គួនអ៊ូ**ថាជាមា តែក្រែង**គួនអ៊ូ**មិនបានគិតថា អ្នកត្រូវជាក្មួយទេដឹង? កាលពីគ្រាមុនខ្ញុំដឹងថា ព្រះចៅ**ឡៅពី**យកអ្នកចិញ្ចឹមជាកូនធម៌ **គួនអ៊ូ**មានសេចក្ដីឫស្យា គ្មានសប្បាយចិត្តសោះ។ កាលព្រះចៅ**ឡៅពី**បានឡើងយសជាម្ចាស់ស្រុកហាន់តុងហើយវេលាណា ក៏ប្រឹក្សានឹង**ខុងបេង**ថា យើងនឹងតាំង**ឡៅហង**បុត្រធម៌របស់យើងជាស្ដេចតាងក្រុម តើអ្នកនឹងយល់ឃើញដូចម្ដេច?

**ខុងបេង**ទូលថា ការទាំងនេះទូលបង្គំមិនដឹងថាដូចម្ដេចទេ សូមព្រះអង្គទ្រង់ប្រឹក្សានឹង**គួនអ៊ូ, តៀវហ៊ុយ** ដែលជាព្រះញាតិវង្សព្រះអង្គចុះ។ ព្រះចៅ**ឡៅពី**ក៏ឲ្យហៅ**គួនអ៊ូ**មកនិយាយសួរថា យើងនឹងតាំង**ឡៅហង**ជាស្ដេចតាងក្រុម តើខ្លួននឹងយល់ថាម្ដេច? **គួនអ៊ូ**ក៏ទូលតបដោយចិត្តឥច្ឆាថា **ឡៅហង**នេះជាមនុស្សខ្លៅអាប់ឥតប្រាជ្ញា រកជាតិត្រកូលគ្មាន ដែលនឹងឲ្យឡើងជាស្ដេចតាងក្រុមនោះមិនសមគួរ បើទោះបីនឹងឲ្យធ្វើរាជការនៅក្រុងសោត ក៏រកទុកចិត្តមិនទាន់បាន។ ចូរព្រះអង្គប្រើបម្រើឲ្យចេញទៅនៅស្រុកសុងយ៉ុងចុះ ឯសេចក្ដីទាំងអម្បាលនោះ អ្នកភ្លេចទៅអស់ហើយឬ?

**ឡៅហង**ថា ដែលអ្នកនិយាយមកទាំងប៉ុន្មាន ក៏គ្មាននិយាយពិតទាំងអស់ តែវេលានេះ **គួនអ៊ូ**ប្រើបម្រើឲ្យមកហើយ យើងនឹងរិះគិតប្រការម្ដេច? **បេងតាត់**ថា

អ្នកចូរប្រាប់**លៀវហ៊្វ**ឲ្យត្រឡប់វិលទៅប្រាប់**ស៊ុនគួន**ចុះថា វេលានេះស្រុកទើបនឹងតាំងថ្មី ទាហានទាំងឡាយក៏នៅមិនទាន់មានបរិបូរច្រើននៅឡើយ ដែលនឹងឲ្យលើកកងទ័ពទៅជួយនោះ ឃើញថា ជាការប្រញាប់ណាស់ លំបាកនឹងគិតឲ្យបាន។

**ឡៅហង**បានស្ដាប់ដូច្នោះ ក៏យល់ឃើញផង លុះព្រឹកឡើង ក៏ឲ្យរកហៅ**លៀវហ៊្វ**ចូលមកហើយប្រាប់ថា អ្នកឯងត្រូវវិលទៅប្រាប់**គួនអ៊្វ**ចុះ ថាយើងទើបតែនឹងមករក្សាស្រុកជាថ្មី ទាហានក៏មានស្ដើងស្ដួច មិនទាន់ព្រមមូលគ្នា ដែលនឹងលើកទៅជួយនោះឃើញលំបាកណាស់ អ្នកកុំតូចចិត្តនឹងយើងឡើយ។ **លៀវហ៊្វ**បានឮដូច្នោះក៏ស្ដុតស្មារតីភ័យណាស់ យកក្បាលបោកនៅក្នុងទីនោះទាល់តែបែកចេញឈាម ហើយថា ដែលអ្នកមកកាត់សេចក្ដីទុក្ខក្ដៅមិនព្រមលើកទ័ពទៅជួយគ្រានេះ **គួនអ៊្វ**នឹងមិនអន្តរាយហើយ?

**បេងតាត់**តបថា សត្រូវដែលនឹងចូលទៅវាយទម្លាយស្រុកកេងជីវគ្រានេះ ឧបមាដូចគំនរភ្លើងដ៏ធំ ឯដែលនឹងឲ្យយើងលើកទៅជួយនោះ ឧបមាបីដូចយកទឹកក្នុងពែងតូចទៅស្រោចលត់គំនរភ្លើងធំនោះ នឹងរលត់ឬ? អ្នកចូរប្រញាប់ត្រឡប់ទៅចាំកងទ័ពស្រុកសែឈួនចុះ។ **លៀវហ៊្វ**បានឮដូច្នោះ ក៏សែនតូចចិត្តពន់ពេកណាស់ ស្រែកយំហើយអង្វរករដោយពាក្យផ្សេងៗ។ **ឡៅហង**និង**បេងតាត់**បានស្ដាប់ក៏មិនបានតបថាប្រការម្ដេច ក្រោកឡើងរលាស់អាវដើរចូលទៅក្នុង។ **លៀវហ៊្វ**ក៏ទោមនស្សតូចចិត្ត ក្រោកឡើងដើរចេញទៅ ហើយស្រែកជេរទ្រគោះផ្សេងៗ រួចទើបឡើងសេះតម្រង់ទៅរកព្រះចៅ**ឡៅពី**ឯស្រុកសែឈួន។

ឯ**គួនអ៊្វ**នៅក្នុងស្រុកបេកសៀ មានទាហានប្រហែលប្រាំទៅប្រាំមួយរយ តែងតាំងចិត្តគិតចាំទន្ទឹងមើលផ្លូវកងទ័ព ដែលប្រើ**លៀវហ៊្វ**ទៅសុំពី**ឡៅហង, បេងតាត់**នៅស្រុកសុងយ៉ុងនោះ ក៏មិនឃើញបានមក ទាំងស្បៀងអាហារក៏អស់

ពួកទាហានទោះក៏កាន់តែគ្រាំគ្រារងាគ្រុនពន់ប្រមាណ។ ខណៈនោះ ស្រាប់តែឮសូរមាត់**ជូកាត់កិន** ស្រែកហៅពីក្រៅកំពែងថា កុំបាញ់យើង ៗមានការនឹងចូលទៅគំនាប់**គួនអ៊ូ** ហើយថា ឥឡូវ**ស៊ុនគួន**ឲ្យខ្ញុំចូលមកនិយាយបញ្ចុះបញ្ចូលអ្នក ខ្ញុំនឹងសុំនិយាយនឹងអ្នកខមួយ បុរាណលោកថា “ធម្មតាកើតជាមនុស្សនេះ ត្រូវឲ្យដឹងស្គាល់ទីបង់ទីបាន នឹងរិះគិតអានរក្សាជីវិតខ្លួន កុំឲ្យមានអន្តរាយ” យ៉ាងដូចខ្លួនអ្នក កាលពីដើមក៏បានធ្វើធំក្នុងស្រុកកេងជីវ ឥឡូវស្រុកកេងជីវនិងអាណាខេត្តដែលឡើងទាំងប្រាំបួនមណ្ឌលនោះ ក៏ខូចអស់ដោយសត្រូវទៅហើយ អ្នកមកនៅក្នុងស្រុកបេកសៀនេះ ដែលមានទាហានក៏តិច ស្រុកក៏តូច ស្បៀងអាហារក៏ពុំសូវមាន ឯកងទ័ពថានឹងលើកមកជួយនោះ ក៏មិនឃើញមានឡើយ ម្ល៉េះហើយអ្នកនឹងខំប្រឹងទៅដល់ណា! គួរតែស្ម័គ្រស្នេហាទៅនៅនឹងស៊ុនគួនចុះ បើអ្នកទៅនៅហើយ គង់នឹងបានសេចក្តីសុខធ្វើធំក្នុងស្រុកកេងជីវតទៅទៀត ស្ងម្បីទាំងភរិយាបុត្រញាតិសន្តានរបស់អ្នក ក៏នឹងបានជាប្រក្រតីដូចពីដើម ដែលខ្ញុំថាទាំងនេះ សូមឲ្យអ្នកត្រិះរិះគិតមើលតាមគួរចុះ។

**គួនអ៊ូ**ឮដូច្នោះ ក៏មិនបានច្រឡោតខឹងដូចពីដើម តាំងចិត្តថ្នមសម្តីតាមប្រក្រតីធម្មតា ហើយនិយាយថា យើងជាជាតិទាហាន កើតនៅស្រុកកៃលៀង ស្ងម្បីព្រះចៅ**ឡៅពី**ក៏បានតាំងសត្យាប្តេជ្ញាជាបងប្អូននឹងគ្នាថា ស៊ូតែស្លាប់រស់ជាមួយគ្នា បើដូច្នេះនឹងឲ្យយើងត្រឡប់ទៅចូលខាងសត្រូវធ្វើម្តេចបាន ទោះបីយើងចាញ់ក៏ត្រូវទទួលស្គាល់តាមភ័ព្វ កុំឲ្យតែបង់សត្យសុចរិត ធម្មតាជាជាតិកែវហើយ បើទោះបីជាបែកធ្លាយយ៉ាងណា ក៏នៅឈ្មោះថាជាកែវដដែល។ មួយទៀត ជាតិឈើក៏នៅជាឈើមិនក្លាយទៅជារបស់ដទៃឡើយ ទោះខ្លួនយើងនឹងស្លាប់ក៏ឲ្យប្រាកដឈ្មោះតទៅមុខ

កុំបាច់ឲ្យអ្នកមកនិយាយឡើយ ចូរអ្នកត្រឡប់ទៅប្រាប់**ស៊ុនគួន**ចុះថា យើងសុំធ្វើសង្គ្រាមតទៅ លុះត្រាតែអស់ជីវិតរៀងខ្លួន។

**ជូកាត់កិន**ថា ឯចិត្តនៃ**ស៊ុនគួន**នោះ គិតតែចង់ឲ្យអ្នកបានជាមេត្រីនឹងគ្នាដោយសុចរិត នឹងបានជួយគ្នាធ្វើការកម្ចាត់**ចូឆូ**ចេញ ហេតុម្តេចបានជាអ្នកមកប្រកាន់សត្យតែម្យ៉ាងដូច្នោះមិនត្រូវសោះ។ **គួនប៉េង**បានឮដូច្នោះ ក៏ហូតគ្របីចេញនឹងកាប់**ជូកាត់កិន**។ គួនអ៊ូក៏ចាប់គ្របីទុក ហើយឃាត់ហាមថា ដែលនឹងសម្លាប់**ជូកាត់កិន**នោះ មិនត្រូវទេ ព្រោះ**ខុងបេង**ជាប្អូនបង្កើតនៅធ្វើរាជការក្នុងព្រះចៅ**ឡៅពី** បើនឹងសម្លាប់ទៅ គេនឹងទាស់ចិត្តគិតចងព្យាបាទ ព្រោះយើងសម្លាប់បងគេ។ លុះនិយាយដូច្នោះហើយ ក៏ឲ្យទាហាននាំខ្លួន**ជូកាត់កិន**ចេញទៅក្រៅ។

**ជូកាត់កិន**មានសេចក្តីអាប់យសខ្មាសទាហានទាំងពួងណាស់ ក៏ត្រឡប់ទៅជម្រាប**ស៊ុនគួន**ថា **គួនអ៊ូ**នោះ ពេញជាមនុស្សត្រឹមត្រូវល្អណាស់ គឺជាមនុស្សចិត្តនឹងរឹងកតញ្ញូតាំងនៅក្នុងសេចក្តីសត្យពិតណាស់។ **ស៊ុនគួន**ថា គេមានសេចក្តីសត្យពិតត្រង់ដូច្នេះ យើងនឹងគិតយ៉ាងម្តេចឲ្យបានស្រួល? **លីហាម**ថា ខ្ញុំបាទនឹងចាប់យាមមើល បើ**គួនអ៊ូ**ធ្វើសឹកនឹងលោកចាញ់ឬឈ្នះប្រការម្តេច ក៏គង់តែដឹង។ **ស៊ុនគួន**ក៏ឲ្យចាប់យាមមើល។ **លីហាម**ក៏ទាយថា ក្នុងសែសយាមនេះថា សត្រូវនឹងរត់ទៅផ្លូវឆ្ងាយ។ **ស៊ុនគួន**បានឮដូច្នោះ ក៏ប្រឹក្សានឹង**លីហាម**ថា ក្នុងយាមថា សត្រូវរត់ទៅឆ្ងាយនោះ យើងនឹងគិតឧបាយប្រការម្តេច ទើបនឹងចាប់សត្រូវនោះបាន?

**លីបង**សើចហើយថា ក្នុងយាមទាយថា សត្រូវរត់ទៅឆ្ងាយនោះ ក៏ត្រូវដោយឧបាយរបស់ខ្ញុំបាទ ឯ**គួនអ៊ូ**នោះ ឧបមាដូចសត្វនៅក្នុងទ្រុងទៅហើយ ដែលនឹងឲ្យរួចពីដៃយើងនោះគ្មានទេ សូម្បីទាហានក៏មានតិចណាស់ ហើយទុរន់ទុរាផង ដែលនឹងរត់ទៅតាមផ្លូវធំនោះ មុខជាមិនទៅទេ ឯខាងទិសឧត្តរ ស្រុកបេកសៀមានផ្លូវ

តូចមួយអន្លើជាផ្លូវកាត់ ពីដើមដាច់ស្រយាល ព្រោះមានច្រកជ្រោះជ្រលងដងភ្នំជាច្រើន ជាផ្លូវលំបាកដើរក៏មែន តែខ្ញុំបាទយល់ថា មុខជា**គួនអ៊ូ**នឹងរត់ទៅតាមផ្លូវនោះ សូមលោកចាត់**ជូហៀន**លើកទាហានប្រាំពាន់ទៅនៅស្ទាក់ត្រង់ផ្លូវនោះ បើឃើញ**គួនអ៊ូ**រត់ចេញទៅ កុំឲ្យស្ទាក់ពីមុខទុកឡើយ ព្រោះ**គួនអ៊ូ**នោះមានកម្លាំងខ្លាំងណាស់ បើ**គួនអ៊ូ**រត់កន្លងហួសបន្តិចទៅហើយ សឹមឲ្យទាហានស្រែកហ៊ោដេញកាប់សម្លាប់ទាហានពីក្រោយបណ្ដោយទៅ មួយទៀត **ភូចៀង**លើកទាហានប្រាំរយទៅចាំនៅជើងភ្នំចៅសាន់ជាចុងផ្លូវនោះ ឲ្យរិះគិតរកឧបាយដែលនឹងចាប់**គួនអ៊ូ**ឲ្យខាងតែបាន មុខជា**គួនអ៊ូ**នឹងទន់កម្លាំងចុះ ហើយក្នុងពេលយប់នេះ អ្នកចូរបង្ខំទាហានឲ្យចូលលុកទម្លាយទ្វារស្រុកឲ្យខ្លាំងចុះ មុខជា**គួនអ៊ូ**នឹងអស់ទាហានទាំងនោះ រត់ចេញទៅជាប្រាកដ។

**ស៊ុនគួន** បានឮ**លីបង**និយាយដូច្នោះ ក៏ពេញអំណរណាស់ ទើបឲ្យ**លីហម**ចាប់យាមមើលទៀត។ **លីហម**ក៏ទំនាយថា ពេលយប់នេះ សត្រូវនឹងរត់ចេញពីស្រុកទៅទិសឧត្តរដល់ពេលកណ្ដាលអាធ្រាត្រនឹងចាប់បានជាប្រាកដ។ **ស៊ុនគួន**សប្បាយចិត្តណាស់ ទើបបង្គាប់**ជូហៀន** និង**ភូចៀង** លើកទាហានទៅតាមពាក្យ**លីបង**ថា។ **ជូហៀន**ក៏លើកទាហានប្រាំពាន់ទៅពួនបង្កប់នៅក្បែរផ្លូវនោះ។ ឯ**ភូចៀង**ក៏លើកទាហានប្រាំរយទៅដល់ភ្នំចៅសាន់ ឃើញច្រកភ្នំប្រហាកចង្អៀតមួយអន្លើ ហើយសងខាងផ្លូវនោះ សុទ្ធតែព្រៃស្បាតញឹកណាស់ **ភូជៀង**ក៏ឲ្យជិកអន្លុងមួយធំនៅចំកណ្ដាលផ្លូវ ហើយយកស្លឹកឈើគ្របពីលើ ហើយធ្វើអន្ទាក់វាត់សម្រាប់ដាក់ឲ្យសេះជាន់នៅក្បែរមាត់អន្លុងនោះ។ លុះពេលយប់ **ស៊ុនគួន**ក៏ចាត់ចែងទាហានដែលមានថ្វីដៃជាច្រើន លើកចូលទៅហែកបំបែកទម្លាយកំពែងស្រុកនិងទ្វារជាយ៉ាងសន្ធឹកសន្ធាប់ណាស់។

**គួនអ៊ូ**ឃើញសត្រូវហែកទម្លាយកំពែង និងទ្វារជាខ្លាំងសន្ធឹកសន្ធាប់ណាស់ ក៏ដេញទាហានឲ្យប្រុងប្រយ័ត្នទ្វារ តែដោយឃើញថាពលយោធារបស់ខ្លួនមានតិចប្រហែលបីរយប្លាយ ហើយឮមាត់ទាហានស្រែកហៅឈ្មោះទាហានដែលជាបងប្អូននឹងគ្នា មិត្តសម្លាញ់នឹងគ្នា ឲ្យចេញមកពីក្នុងស្រុកនោះ អស់ទាហានខាងក្នុងក៏ឡើងពារលើកំពែង លោតចុះចេញទៅជាច្រើនណាស់ ទាហានគួនអ៊ូក៏កាន់តែរលួសទៅនៅតិចស្តើងស្តួច ឯកងទ័ពដែលមានសំបុត្រឲ្យទៅសុំនោះ ក៏មិនឃើញមកដល់ នឹងរិះគិតរកកលឧបាយក្នុងកលសឹកប្រការម្តេច ក៏គិតមិនលេចមិនយល់សោះ ទើប**គួនអ៊ូ**និយាយនឹង**ហាងហ៊ូ**ថា យើងនឹករឭកដល់ពាក្យអ្នក ដែលនិយាយរំឭកខ្ញុំពីគ្រានោះ ព្រោះខ្ញុំមិនជឿស្តាប់ពាក្យអ្នក បានជាថ្លោះធ្លោយឲ្យលំបាកចិត្តដល់ទីនេះ បើដូច្នេះ យើងនឹងគិតប្រការម្តេច ទើបនឹងមានជ័យជម្នះដល់សត្រូវនេះបាន?

**ហាងហ៊ូ**ឮ**គួនអ៊ូ**និយាយដូច្នោះ ក៏យំហើយថា សត្រូវគ្រានេះមានកម្លាំងច្រើនណាស់ សព្វថ្ងៃនេះ ទោះបីជាមានល្បីកេរ្តិ៍ឈ្មោះដូចយ៉ាងលោក ពេញជាមនុស្សមានថ្វីដៃខ្លាំងពូកែយ៉ាងណាក្នុងការសង្គ្រាមនោះ ទោះបីជីវិតមិនស្លាប់ក្តី ក៏គិតកែខៃយកជ័យជម្នះសត្រូវ ទៅយកស្រុកវិញពុំបានទេ។ **ទៀវលុយ**ឮ**ហាងហ៊ូ**ថាដូច្នេះក៏ឆ្លើយថា យើងមានសំបុត្រទៅសុំកងទ័ព**ឡៅហាង** និង**បេងតាត់** ខាងទិសឯជើងឲ្យចុះមកជួយ ក៏បាត់ឈឹងស្ងូន្យមិនឃើញមកសោះ ខ្ញុំគិតឃើញថា គួរនឹងរំសាយទ័ពត្រឡប់រត់ចេញពីស្រុកបេកសៀទៅ ដូចជាស្រួលជាងនៅ បើកាលណាបានទៅដល់ស្រុកសែឈ្លួនហើយ សឹមចាត់ចែងតែងកងទ័ពរើសយកតែទាហានដែលមានថ្វីដៃឲ្យច្រើន លើកត្រឡប់មកនឹងវាយយកស្រុកកេងជីវវិញឲ្យបាន។

**គួនអ៊ូ**ក៏យល់ឃើញស្របដូច្នោះផង។ ខណៈនោះ **គួនអ៊ូ, ហាងហ៊ូ, ទៀវលុយ** ក៏នាំគ្នាឡើងទៅលើសើនបន្ទាយ ក្រឡេកមើលទីជុំវិញឃើញសត្រូវនៅចោមព័ទ្ធខាង

ទិសឧត្តរនោះ ស្ដើងស្ដួច ក៏ឲ្យហៅរាស្ត្រអ្នកស្រុកមកប្រឹក្សាថា យើងនឹងចង់ទៅស្រុកសែឈ្នួនតាមទិសឧត្តរនោះ នឹងបានឬមិនបាន? អ្នកស្រុកឆ្លើយថា បើនឹងទៅស្រុកសែឈ្នួនតាមទិសឧត្តរនោះក៏បាន ព្រោះមានផ្លូវកាត់មួយត្រង់ទៅប្រហែលសាមសិបថ្ងៃទើបដល់ តែផ្លូវនោះដាច់ស្រយាលឆ្ងាយភូមិស្រុក ព្រោះមានច្រកជ្រោះជ្រលងដងស្ទឹងក្នុងកៀនភ្នំជាច្រើនអន្លើណាស់។ **គួនអ៊ូ**ក៏បង្គាប់ទាហានថា ពេលយប់នេះ យើងនឹងលើកចេញទៅស្រុក**សែឈ្នួន**តាមទិសឧត្តរ **ហងហ៊ូ**ក៏ហាមឃាត់ថា ខ្ញុំបាទឃើញថានឹងទៅតាមផ្លូវតូចនោះមិនស្រួលទេ ក្រែងសត្រូវទៅពួនបង្កប់កងទ័ពទុកក្បែរផ្លូវនោះ បើទៅតាមផ្លូវធំយូរមែន តែដើរស្រួលមិនព្រួយនឹងភ័យភិត។

**គួនអ៊ូ**ថា ទោះបីនឹងមានកងទ័ពពួនបង្កប់យ៉ាងណា យើងក៏ឥតកោតញញើតសោះឡើយ អាចនឹងពារទម្លាយចេញទៅបាន។ ថាហើយក៏បង្គាប់ទាហានឲ្យរៀបសេះនិងគ្រឿងសាស្ត្រាវុធ នូវស្បៀងអាហារព្រមបរិបូរ ដើម្បីនឹងលើកចេញពីស្រុកបេកសៀ។ **ហងហ៊ូ**បានឃើញ**គួនអ៊ូ**រៀបដំណើរចេញទៅ ក៏អង្គុយទ្រហោយំ ហើយថា បើលោកនឹងទៅត្រូវទៅតាមផ្លូវធំ កុំទៅតាមផ្លូវតូចនោះឡើយ បើបានជាទៅហើយ ត្រូវឲ្យប្រុងប្រយ័ត្ន គិតការពាររក្សាខ្លួនឲ្យមាំមួន កុំបីប្រមាទ ខ្លួនខ្ញុំបាទនិងទាហានមួយរយប្លាយ សុំនៅរក្សាបន្ទាយក្នុងទីនេះ ទោះបីនឹងស្លាប់ក៏តាមភ័ព្វសំណាងចុះ ឯស្រុកបេកសៀនេះ បើប្រែបានទៅសត្រូវវេលាណា ខ្លួនខ្ញុំបាទក៏មិនបានព្រមទៅចំណុំចុះចូល**ស៊ុនគួន**ទេ សុំតែរត់គេចវេះលាក់ខ្លួនពួនជ្រក ទម្រាំតែលោកបានកងទ័ពត្រឡប់មកវិញ នឹងបានចេញខ្លួនមកចូលជួយធ្វើរាជការនឹងលោកតទៅ។

**គួនអ៊ូ**ឮ**ហាងហ៊ូ**និយាយដូច្នោះ ក៏អង្គុយយំសោកាល័យ ហើយក៏ធ្វើនូវបដិសណ្ឋារៈគំនាប់លាគ្នា។ **គួនអ៊ូ**ក៏ចាត់ឲ្យ**ជីវឆង**និងទាហានប្រមាណមួយរយប្លាយ និង**ហាងហ៊ូ**នៅត្រួតត្រារក្សាស្រុកបេកសៀ។ ឯ**គួនអ៊ូ, គួនប៉េង, ទៀវលុយ**ក៏លើកទាហានប្រមាណពីររយប្លាយចេញពីស្រុកបេកសៀ ទៅទិសឧត្តរតាមផ្លូវតូច។ **គួនអ៊ូ**កាន់ដាវដើរនាំមុខសេះនោះ បណ្តាទាហានដែលចោមព័ទ្ធស្រុក ក្រឡេកឃើញក៏ខ្លាច**គួនអ៊ូ** ទើបបើកចំហផ្លូវឲ្យចេញទៅ គ្មានទាហានណាទទឹងមុខសោះ។ **គួនអ៊ូ**ក៏នាំទាហានទាំងអស់ទៅតាមផ្លូវតូច លុះដល់ពេលយាមមួយចេញដំណើរទៅបានប្រហែលមួយរយសិន (៤ គ.ម) ប្រទះនឹង**ជូហៀន**នាយទាហានធំ ជិះសេះកាន់លំពែងនៅទទឹងពីមុខ។ **ជូហៀន**ក៏ស្រែកសួរ**គួនអ៊ូ**ថា លោកកុំអាលរត់ទៅ ត្រូវតែចុះពីលើសេះមកចំណុះយើងវិញ យើងនឹងទុកជីវិតឲ្យរស់នៅ។ **គួនអ៊ូ**ឮដូច្នោះក៏ខឹងណាស់ បំបោលសេះវាំដាវចូលទៅច្បាំងគ្នានឹង**ជូហៀន** ៗធ្វើជាខ្លាចញាក់សេះរត់ទៅមុខ **គួនអ៊ូ**ក៏ដេញតាមពីក្រោយបណ្តោយទៅ ឯទាហាន**ជូហៀន**ដែលឲ្យពួនបង្កប់នោះ ឃើញ**គួនអ៊ូ**ដេញជ្រុលហួសទៅ ក៏វាយឃ្មោះគោះគងហ៊ោកញ្ជ្រៀវស្ទុះចេញពីក្នុងព្រៃទាំងសងខាង ព័ទ្ធ**គួនអ៊ូ**ជុំវិញ **គួនអ៊ូ**ឃើញលើសកម្លាំងនឹងតទល់ ក៏បរសេះបំពារនាំទាហានរត់គេចទៅផ្លូវចៅសាន់ **ជូហៀន**ក៏នាំទាហានរុកចូលមកកាប់សម្លាប់ទាហាន**គួនអ៊ូ**អស់ជាច្រើន តែជាប់ដៃគ្នាប្រកាប់ប្រចាក់នៅទីនោះយូរណាស់ **គួនអ៊ូ**ក៏វាំងការបណ្តាទាហានខាងខ្លួនជួននឹងផុតកម្លាំងសោះ ព្រោះទាហាន**ជូហៀន**មានដល់ប្រាំពាន់ ចូលព្រួតគ្នាជាច្រើនជាន់ដល់បីប៉ែក។

ឯចំណែក**គួនអ៊ូ**ក៏វែកយកតែខ្លួន ហើយទាហានខ្លះរត់បំប៉ះចេញពីទីនោះប្រហែលហាសិបសិន (២ គ.ម) ទើបក្រឡេកឃើញគំនរភ្លើងកងទ័ព**ភូចៀង** ហើយឮសូរសំឡេងមនុស្សស្រែកហ៊ោច្រើនណាស់ ក្រឡេកទៅឃើញ**ភូចៀង**ជិះ

សេះកាន់ដាវចេញមក **គួនអ៊ូ**ខឹងណាស់ ក៏បំផាយសេះស្ទុះចូលទៅប្រយុទ្ធគ្នានឹង**ភូចៀង**បានបីភ្លែង **ភូចៀង**ធ្វើជាចាញ់រត់ទៅខាងគំនរភ្លើង **គួនអ៊ូ**ក៏មិនអាចនឹងតាមទៅ ញាក់សេះវេះគេចទៅតាមច្រកផ្លូវប្រហប់ ផ្ទាប់ជើងភ្នំថៅសាន់ **គួនប៉េង**ក៏ដើរឡើងទៅប្រាប់បិតាថា **ទៀវលុយ**ស្លាប់ក្នុងកងទ័ព ដែលកំពុងច្បាំងគ្នាអម្បាញ់មិញនោះទៅហើយ។ **គួនអ៊ូ**ឮដូច្នោះក៏ខំអត់សង្កត់ចិត្តមិនឲ្យស្រក់ទឹកភ្នែក ខ្លាចទាហាននឹងខូចចិត្តគំនិត ទើបបង្គាប់ឲ្យ**គួនប៉េង**ចុះទៅរាំងការពីក្រោយ **គួនអ៊ូ**ក៏លយទៅមុខមានទាហានដែលសល់ពីស្លាប់តាមទៅដប់ប្រាំនាក់ ចូលត្រង់ប្រហប់ភ្នំ។

ឯ**ភូចៀង**ក៏លើកទាហានហ៊ោពីក្រោយទៅ **គួនអ៊ូ**ឮទាហានហ៊ោខ្ជាន់ៗតាមមកបង្ខំស្រូតទាហានរត់ទៅនឹងផុតច្រកប្រហប់ភ្នំនោះ។ ខណៈនោះ ជួនជាពេលប្រហែលយាមបីប្លាយ ក៏បានទៅដល់មាត់រំលុង ដែលគេធ្វើទុកនោះ សេះ**គួនអ៊ូ**ក៏ជាន់អន្ទាក់ស្ទុះភ្ញាក់លោតទៅ **គួនអ៊ូ**ក៏របូតធ្លាក់ពីលើខ្នងសេះ អាវុធក៏របេះជ្រុះពីដៃ**គួនអ៊ូ**និងសេះនោះក៏ធ្លាក់ទៅក្នុងរំលុង **គួនអ៊ូ**ប៉ះផ្ទប់នឹងដុំថ្ម សេះក៏ធ្លាក់រណ្ដំជាន់ទៅលើភ្លៅ**គួនអ៊ូ**ទៀត **គួនអ៊ូ**ឈឺចុកភ្លៅនៅទីនោះ ស្ទុះក្រោកឡើងមិនរួចសោះ នោះ**ម៉ាតុង**ទាហាន**ភូចៀង** ដែលចេញពីពួនបង្កប់ឃើញ**គួនអ៊ូ**ធ្លាក់ត្រឡប់ពីខ្នងសេះចុះទៅក្នុងរំលុងក្រោកមិនរួច ក៏ចាប់យកដុំថ្មធំៗចោលរណ្ដំចម្រុះទៅត្រូវមុខមាត់ខ្លួនប្រាណ**គួនអ៊ូ**ទាល់តែទុរន់ទុរាអស់កម្លាំង ប្រឹងក្រោកមិនរួចសោះ ក៏នាំគ្នាស្ទុះស្រទៅចាប់**គួនអ៊ូ**ចងស្លាបសេកជាប់នាំឡើងមក ចាប់បានទាំងសេះមកទៀត **គួនប៉េង**ឃើញគេចាប់បិតាបាន ក៏បំពានរត់ចូលទៅជួយ **ភូចៀង** និង**ជូហៀន**លើកទាហានតាមទៅទាន់ក៏ព្រួតគ្នាចាប់ខ្លួន**គួនប៉េង**បាន ហើយឃុំនាំយកខ្លួន**គួនអ៊ូ**និង**គួនប៉េង**ទៅជូន**ស៊ុនគួន** ៗក៏មានអំណរណាស់ ទើបឲ្យហៅនាហ្មឺនមុខមន្ត្រីនិងទីប្រឹក្សាមកប្រជុំព្រមគ្នា។

**ស៊ុនគួន**ក៏និយាយនឹង**គួនអ៊ូ**ថា ពីដើមយើងគ្រាន់តែឮពាក្យគេនិយាយថា អ្នកជាមនុស្សត្រង់សុចរិត ចិត្តក៏មោះមុតផុតផែនដី ថ្វីដៃក៏ខ្លាំងពូកែហៅហានណាស់ យើងក៏មានចិត្តគិតស្វែងស្វះនឹងចង់បានអ្នកមកទុកធ្វើរាជការ ជាទីរាប់អានជាមួយនឹងយើង ៗក៏មិនដែលបានជួបនឹងអ្នកសោះ វេលានេះ អ្នកធ្វើសង្គ្រាមចាញ់យើងហើយ ពួកទាហានយើងចាប់ខ្លួនបាន គួរអ្នកស្ម័គ្រស្មានចូលមកនៅនឹងយើងចុះ យើងនឹងទុកជីវិតឲ្យរស់នៅធ្វើរាជការតទៅ យើងនឹងត្រូវចិញ្ចឹមរក្សាអ្នក ឲ្យមានយសស័ក្តពេញខ្នាត។

**គួនអ៊ូ**ឮហើយ ក៏ឲ្យនឹកខឹងក្នុងចិត្តពន់ប្រមាណាស់ ស្រែកជេរ**ស៊ុនគួន**ថា អាក្មេងច្រម៉ក់អាក្រក់ខ្លាំងណាស់ ខ្លួនអញចាស់ម្ល៉េះហើយ អញមិនស៊ូចំណុះអាឯងទេ ព្រោះអញបានក្រេបផឹកទឹកពិភទ្ធសច្ចាជាមួយនឹងព្រះចៅ**ឡៅពី, តៀវហ៊ុយ**ដើម្បីនឹងប្រចុយអាយុជីវិត គិតយកផែនដីថ្វាយព្រះចៅ**ឡៅពី** ជាពូជព្រះរាជវង្ស ឲ្យគង់ជាសុខរក្សាអាណាប្រជានុរាស្ត្រក្នុងផែនដីទាំងមូល បើអញទៅចូលនឹងអាឯងដែលជាគូសត្រូវរាជសម្បត្តិវិញ អញក៏មិនពេញជាជាតិប្រុស លុះដោយចិត្តជាសេនាទាហានបានឡើយ គ្រានេះខ្លួនអញចាញ់ដៃអាឯងហើយ អាឯងកុំបាច់មកល្បួងបញ្ឆោតខ្លួនប្រាណអញថ្វី ឲ្យព្រួយពាក្យសម្តី អញកើតមកក្នុងលោកិយជាជាតិទាហាន ហើយនឹងស៊ីបាយក្របាមបម្រើម្ចាស់ពីរនោះមិនបានទេ អញស៊ូតែស្លាប់។

**ស៊ុនគួន**បានឮ**គួនអ៊ូ**ថាដូច្នោះ ក៏បែរមុខទៅពិគ្រោះនឹងទីប្រឹក្សាទាំងពួងថា **គួនអ៊ូ**នេះជាមនុស្សទៀងត្រង់ចិត្តមួយប្រាកដណាស់ យើងចង់ចិញ្ចឹមរក្សាទុកតទៅ ទីប្រឹក្សាទាំងអស់គ្នា តើនឹងយល់ឃើញប្រការម្តេច? **ចោហម**សមុហបញ្ជីឆ្លើយថា បើនឹងចិញ្ចឹមរក្សា**គួនអ៊ូ**ទុកនោះខ្ញុំបាទមិនយល់ឃើញផងទេ ព្រោះកាលគ្រា**ចូឆូ**ចាប់**គួនអ៊ូ**បានពីមុនម្តង យកទៅតាំងឲ្យធ្វើជានាហ្មឺនធំ ឲ្យគ្រឿងឧបភោគបរិភោគជា

ច្រើន បីថ្ងៃលៀងអាហារម្ដង ប្រាំថ្ងៃលៀងអាហារម្ដង បម្រុងលៀងលោមថ្នមចិត្តដល់ប៉ុណ្ណោះហើយ ក៏នៅតែយកខ្លួន**គួនអ៊ូ**ទុកពុំបាន គង់តែ**គួនអ៊ូ**លបរត់ទៅរក**ឡៅពី**ជាបង បានសម្លាប់នាយគយដានដល់ប្រាំតំបន់ បើលោកចង់រក្សាទុក យូរទៅគង់នឹងកើតភ័យអន្តរាយដល់ខ្លួនលោកដូចគេ កាលគ្រាមុននោះពុំខាន។ **ស៊ុនគួន**បានស្ដាប់ដូច្នោះ ក៏ឈប់រំពឹងមួយស្របក់ហើយថា ដែលអ្នកនិយាយដូច្នោះ ខ្ញុំក៏យល់ឃើញផងដែរ ទើបបង្គាប់ទាហានឲ្យយកខ្លួន**គួនអ៊ូ**និង**គួនប៉េង**អាពុកនិងកូនទៅប្រហារជីវិតបង់។

កាល**គួនអ៊ូ**ស្លាប់នោះក្នុងខែកត្តិក អាយុគ្រប់៥៨ឆ្នាំ ព្រះចៅហៀនតេទៅគង់នៅក្រុងហ៊ូតោបាន២៤ឆ្នាំ (ពុទ្ធសករាជ៧៦២) **ម៉ាតុង**ក៏នាំយកសេះ**គួនអ៊ូ**ទៅឲ្យ**ស៊ុនគួន** ៗក៏ឲ្យម៉ាតុងចិញ្ចឹមរក្សា សេះនោះមិនស៊ីស្មៅជាយូរថ្ងៃ ក៏ស្លាប់ទៅទៀត។

ឯ**ហងហ៊ូ**ដែលនៅក្នុងស្រុកបេកសៀ ក្នុងពេលកណ្ដាលយប់នោះ ក៏ចេះតែក្ដៅក្រហាយក្នុងចិត្តណាស់ ដេកលក់ទៅយល់សប្តិឃើញប្លែក ក៏ទៅនិយាយនឹង**ជីវឆង**ស្ដាប់ថា ខ្ញុំយល់សប្តិឃើញ**គួនអ៊ូ**មកឈរពីមុខខ្ញុំ មានឈាមហូរប្រឡាក់ពេញទាំងខ្លួន ខ្ញុំភ័យណាស់ភ្ញាក់ឡើង មិនដឹងជា**គួនអ៊ូ**នឹងកើតហេតុយ៉ាងម្ដេចឡើយ **ហងហ៊ូ**និយាយនឹង**ជីវឆង**មិនទាន់ផុតមាត់ ស្រាប់តែបម្រើចូលមកប្រាប់ថា ឥឡូវនេះឃើញទាហាន**ស៊ុនគួន** យួរក្បាល**គួនអ៊ូ**និង**គួនប៉េង**មកស្រែកបញ្ចុះបញ្ចូលអ្នកស្រុកតាមក្បែរជើងកំពែង។ **ហងហ៊ូ, ជីវឆង**ឮដូច្នោះ ក៏តក់ស្លុតរន្ធត់ចិត្ត នាំគ្នាឡើងទៅមើលលើសើន ទទួលក្រឡេកទៅឃើញក្បាល**គួនអ៊ូ**និង**គួនប៉េង**ទាំងពីរ ក៏នឹកតូចចិត្តទោមនស្សណាស់ **ហងហ៊ូ**និង**ជីវឆង**ក៏និយាយគ្នាថា យើងអស់ម្លប់ជាទីពឹងហើយ នឹងរស់នៅថ្វីឥតប្រយោជន៍ ស៊ូស្លាប់ទៅជាខ្មោចស្រួលជាង ថាហើយ **ហងហ៊ូ**ក៏លោតទម្លាក់ខ្លួនពីលើកំពែងបាក់កស្លាប់ ឯ**ជីវឆង**ក៏យកដាវអារកខ្លួនឯង

ស្លាប់ទៅទៀត ស្រុកបេកសៀក៏ត្រូវស្លាប់បង្គាប់ស្រុកកាំងតាំងរហូតតាំងពីនោះមក។

ឯ**គួនអ៊ួ**នោះ លុះស្លាប់ទៅហើយ ក៏ទៅបង្កើតជាអសុរកាយនៅលើភ្នំជួនយ៉ុកសាន់ ក្នុងដែនស្រុកតេងអៀង លើកំពូលភ្នំនោះ មានលោកសង្ឃរាជចិនមួយអង្គឈ្មោះ**ផៅចេង** លោកសង្ឃរាជ**ផៅចេង**អង្គនេះ ពីដើមជាសង្ឃរាជនៅវត្តទិនកុកឈឺ ដែនស្រុកកីស៊ុន បាននិមន្តឡើងទៅលើភ្នំនោះ ជាទីរហោស្ថានចម្រើនមេត្តាភាវនា មានសាមណេមួយអង្គនៅបម្រើប្រណិប័តន៍ជានិរន្តរ៍។ ក្នុងថ្ងៃមួយនោះ ពេលអាធ្រាត្រស្ងាត់ ខែរះភ្លឺច្បាស់ប្រហែលយាមពីរប្លាយ លោកសង្ឃរាជ**ផៅចេង**អង្គុយចម្រើនភាវនាក្នុងកុដិ បានឮសំឡេងស្រែកថា យកក្បាលមកឲ្យយើងវិញ លោកផៅចេងក្រឡេកមើលទៅ ឃើញមនុស្សមុខក្រហមជិះសេះកាន់ដាវ ហើយមានមនុស្សតែងខ្លួនជាទាហាន ឈរអមសេះម្ខាងម្នាក់ ខាងស្តាំមុខស ខាងឆ្វេងមុខខ្មៅ មានពុកចង្ការអមតាង ចុះមកពីលើអាកាសឈរនៅក្បែរកុដិ លោក**ផៅចេង**ក្រឡេកមើលទៅស្គាល់ច្បាស់ជា**គួនអ៊ួ** ក៏បោយដៃស្រែកហៅថា មកនេះ**គួនអ៊ួ**។

ខណៈនោះ អសុរកាយ**គួនអ៊ួ** ក៏ចុះពីលើសេះចូលទៅឱនគំនាប់លោក**ផៅចេង** ហើយថា លោកគ្រូឈ្មោះអ្វី? លោកឆ្លើយថា យើងឈ្មោះ**ផៅចេង** ពីដើមនៅវត្តទិនកុកឈឺ បានស្គាល់គ្នានឹងអ្នកមកពីដើម អ្នកភ្លេចហើយឬ? អសុរកាយ**គួនអ៊ួ**ឱនគំនាប់ហើយថា សូមឲ្យលោកគ្រូសូត្រធម៌ចម្រើនភាវនាផ្សាយចំណែកបុណ្យកុសល ទៅឲ្យខ្ញុំព្រះករុណាផងចុះ ខ្ញុំព្រះករុណាធ្វើសង្គ្រាមចាញ់គេ ៗសម្លាប់ទៅហើយ។

លោកសង្ឃរាជ**ផៅចេង**ឆ្លើយឡើងថា កង់ត្រាចកង់ធ្លង់វិលត្រូវគ្រប់គ្នា គេសម្លាប់យើង ព្រោះយើងសម្លាប់គេ កាលអ្នកបានសម្លាប់**ង៉ាន់លៀង, ប៊ុនធីវ** និង

នាយគយល្បាតប្រាំតំបន់នោះ នរណាមកទារក្បាលពីអ្នកខ្លះ? គ្រានេះអ្នកចាញ់សត្រូវវិញហើយ ក៏ត្រូវតែស្លាប់ដូច្នេះ អ្នកនឹងមកស្រែកទារក្បាលពីរនរណាសោត? លោក**ផៅចេង**សម្តែងដូច្នេះហើយ ក៏សូត្រធម៌ចម្រើនកុសលផ្សាយទៅឲ្យ**គួនអ៊ូ** ៗ អសុរកាយទទួលអនុមោទនាចំណែកបុណ្យហើយ ក៏លាទៅអាស្រ័យនៅលើកំពូលភ្នំជួនយ៉ុងសាន់នោះ។ លោក**ផៅចេង**ក៏នាំយកព័ត៌មាននោះទៅប្រាប់ដល់មហាជនទាំងពួងថា **គួនអ៊ូ**ស្លាប់ទៅកើតជាអសុរកាយនៅលើភ្នំនោះ មនុស្សម្នាមហាជនក៏បង្កើតជ្រះថ្លារាប់អាន បានសាងសង់ជាសាលាឲ្យ**គួនអ៊ូ**អសុរកាយនៅលើកំពូលភ្នំនោះ ក៏បានទៅជាទេពារ័ក្សស័ក្តិសិទ្ធិតាំងពីនោះមក។

ឯ**ស៊ុនគួន**លុះបានស្រុកកេងជីវហើយ ក៏ឲ្យរង្វាន់ដល់សេនាទាហានដែលមានសេចក្តីគាប់ប្រសើរតាមគុណបំណាច់ ទើបលើក**លីបង**ឲ្យអង្គុយទីខ្ពស់លើសសេនាទាហានទាំងពួង ហើយក៏និយាយនឹងមុខមន្ត្រីទាំងអស់ថា យើងគិតថានឹងបានស្រុកកេងជីវដោយលំបាកណាស់ ឥឡូវក្រឡាស់មកបានដោយងាយ ដោយតម្រិះប្រាជ្ញា**លីបង**នេះ មិនទាន់នឹងក្រឡាស់បាតដៃក៏លៃលកយកបាន ហេតុដោយសេចក្តីរិះគិតរបស់**លីបង** សេចក្តីគាប់ប្រសើរនេះ ធំទូលាយជ្រៅឆ្ងាយណាស់។ **លីបង**ឮដូច្នោះក៏ក្រោកឡើងគំនាប់**ស៊ុនគួន** ហើយថា ព្រោះបុណ្យលោកទើបបានស្រុកកេងជីវនេះដោយងាយ។ **ស៊ុនគួន**ថា ពីដើមយើងបាន**ជីវយី**មានសតិបញ្ញាក្លាហានចំណានក្នុងកលសឹក **ចូឆូ**លើកទ័ពគោកទឹកមកជាច្រើនលើក មានទាហានដល់ប៉ែតសិបបីម៉ឺន បានច្បាំងគ្នានៅតំបន់សេកផេក ក៏អាស្រ័យសេចក្តីគិតរបស់**ជីវយី** ទើបមានជ័យជម្នះពី**ចូឆូ**ដោយងាយ **ជីវយី**ចាញ់សេចក្តីរិះគិតរបស់**ខុងបេង** បានជាស្លាប់ខ្លួនទៅនៅតែ**ឡោសុក** គ្រានោះ**ជីវយី**មិនទាន់ស្លាប់ **ចូឆូ**មានសំបុត្រមកបញ្ចុះបញ្ចូលយើង ទីប្រឹក្សាទាំងអស់ព្រមនឹងឲ្យយើងទៅចំណុះចុះចូល**ចូឆូ** តែ**ឡោសុក**មួយមិន

ព្រមផង យើងឲ្យហៅ**ជីវយី**មកប្រឹក្សាដើម្បីនឹងធ្វើសង្គ្រាមនឹង**ចូអ្វ** យ៉ាងនេះ ជាសេចក្តីគាប់ប្រសើររបស់**ឡោសុក** គ្រាក្រោយនោះ **ឡៅពី**ឲ្យមកខ្ចីស្រុកកេងជីវដើម្បីនឹងអាស្រ័យនៅជាបណ្តោះអាសន្ន យើងពិគ្រោះនឹង**ឡោសុក** ៗព្រមឲ្យ បានជាកើតរឹករវរដូច្នេះ យ៉ាងនេះគឺកំហុសរបស់**ឡោសុក**។ ឥឡូវយើងអាស្រ័យតម្រិះប្រាជ្ញារបស់**លីបង** បានជាបានស្រុកកេងជីវមកវិញដោយស្រួល។ តម្រិះគិតរបស់**លីបង**លើសតម្រិះប្រាជ្ញារបស់**ជីវយី** និង**ឡោសុក**ទៅទៀត។ **ស៊ុនគ្វន**និយាយហើយ ក៏ចាប់យកពែងស្រាហុចដៃពីរទៅឲ្យ**លីបង**ដោយសុភាពណាស់។

ឯអសុរកាយ ក៏ជាប់ចិត្តអាឃាតព្យាបាទ**លីបង**ជាខ្លាំង វេលានោះក៏មកចូលរូប**លីបង** ទទួល**លីបង**ចាប់យកពែងស្រានឹងផឹកចូលទៅ ក៏ឲ្យចោលពែងស្រាទម្លាក់ចុះ ហើយចង្អុលមុខ**ស៊ុនគ្វន**ស្រែកគំហកដោយសំឡេងខ្លាំងថា អាក្មេងច្រម៉ក់ភ្នែកក្រហម អាឯងស្គាល់អញឬទេ? ទីប្រឹក្សាទាំងពួង ក៏ភ័យស្លុតស្មារតីទាំងអស់គ្នា **លីបង**ក៏ស្ទុះឡើងទៅច្រាន**ស៊ុនគ្វន**ធ្លាក់ពីលើកៅអី ហើយក៏អង្គុយលើកន្លែង**ស៊ុនគ្វន**នោះ ភ្នែកក្រឡេកក្រឡាស់ទៅមក ស្រែកដោយសំឡេងខ្លាំងថា កាលពួកចោរជូតក្បាលលឿងដេញញាំញី រាស្ត្រប្រជាបានសេចក្តីក្តៅក្រហាយនោះ ខ្លួនអញនិងបងប្អូនបីនាក់ បានលើកគ្នាទៅប្រាបប្រាមពួកចោរ ៗក៏រាបទាបអស់ទៅ ប្រហែលសាមសិបឆ្នាំមកហើយ ឥឡូវអញចាញ់កលសឹករបស់ឯង ៗសម្លាប់អញស្លាប់ អញជាមនុស្សមិនចេះស៊ីសាច់ឯង អញស្លាប់ហើយនឹងកាច់កឯងឲ្យស្លាប់វិញ ឯងមិនស្គាល់អញទេឬ? អញនេះហើយឈ្មោះ**គួនអ៊ូ**។

**ស៊ុនគ្វន**បានឮដូច្នោះ ក៏ភ័យតក់ស្លុតរន្ធត់ចិត្ត ក្រាបសំពះដល់ដី លុះបាត់សម្តីមួយស្របក់ **ស៊ុនគ្វន**និងអស់ពួកសេនាទាហានងើបឡើង ស្រាប់តែឃើញ**លីបង**បាក់កដួលចុះ លោហិតនោះហូរចេញពីច្រមុះមាត់ជោកអស់ទាំងខ្លួន **លីបង**ក៏សូន្យជីវិត

ក្នុងខណៈនោះ **ស៊ុនគួន**និងអស់នាហ្មឺនមុខមន្ត្រីភ័យណាស់ ទើបរៀបចំយកសព**លីបង**ទៅបញ្ចុះតាមទំនៀម ហើយតាំង**លីប៉ា**ជាកូនឲ្យឡើងស្តីរាជការតំណាងអាពុកតទៅ។ ខណៈនោះ មានបម្រើចូលមកជម្រាប**ស៊ុនគួន**ថា **ទៀវចៀវ**មានការចូលមកគំនាប់ **ស៊ុនគួន**ក៏ឲ្យអញ្ជើញ**ទៀវចៀវ**ចូលទៅ។

**ទៀវចៀវ**គំនាប់**ស៊ុនគួន** ហើយថា ឮដំណឹងថា លោកចាប់បាន**គួនអ៊ូ, គួនប៉េង**ទាំងអាពុកនិងកូន លោកសម្លាប់ទៅហើយមែនឬ? បើមែនដូច្នោះ មិនយូរទេភ័យន្តរាយនឹងមានមកដល់លោកជាប្រាកដ ព្រោះ**គួនអ៊ូ**នោះបានស្បថស្បាន់ធ្វើបងប្អូននឹង**ឡៅពី, តៀវហ៊ុយ**សញ្ញាគ្នាទុកថា បើស្លាប់ក៏ស្លាប់ជាមួយគ្នា បើរស់ក៏រស់ជាមួយគ្នា ឥឡូវ**ឡៅពី**ក៏បានជាធំក្នុងស្រុកសែឈួន តាំងឈួនហើយ មានទាហានច្រើនណាស់ ទាំងស្បៀងអាហារក៏បរិបូរ មួយទៀតតម្រិះរិះគិតក្នុងកលសឹកនោះ នរណានឹងរំលងគំនិតរបស់**ខុងបេង**បាន បើនឹងនិយាយខាងថ្វីដៃវិញ ក៏គ្មានទាហានណានឹងឲ្យស្មើថ្វីដៃ**តៀវហ៊ុយ, ហងតុង, ម៉ាឈៀវ, ជូឡុង**បានឡើយ។ **ឡៅពី**ដឹងហើយថា **គួនអ៊ូ, គួនប៉េង**ស្លាប់ ក៏គង់នឹងលើកទ័ពមកអស់ពីក្នុងស្រុក នឹងមកបុកកម្ទេចស្រុកកាំងតាំងសងសឹកវិញ។ ខ្ញុំបាទយល់ឃើញថា យើងតទល់ពុំបានទេ។

**ស៊ុនគួន**បានឮដូច្នោះ ក៏ទន្ទ្រាំបាតជើងហើយថា អន្តរាយដែលនឹងមានមកដល់ស្រុកកាំងតាំងយ៉ាងនេះហើយ អ្នកនឹងជួយកែខៃរិះគិតយ៉ាងណា? **ទៀវចៀវ**ឆ្លើយថា បើលោកទុកធុរៈនេះលើខ្ញុំបាទ ៗសុំកុំឲ្យលោកព្រួយពេកឡើយ ខ្ញុំបាទមានឧបាយមួយ មិនឲ្យ**ឡៅពី**ធ្វើអន្តរាយស្រុកកាំងតាំងសោះ យើងនឹងមានចម្លោះថែរក្សាស្រុកឲ្យនឹងដូចផែនប្រថពី។

**ស៊ុនគួន**ឮដូច្នោះ ក៏សប្បាយចិត្តឡើងវិញ ទើបសួរទន្ទេញថា អ្នកនឹងប្រើឧបាយយ៉ាងម្តេច? **ទៀវចៀវ**ថា វេលានេះ**ចូឆ្វ**មានទាហានដល់មួយរយម៉ឺន ហើយនាយទាហានដែលមានថ្វីដៃខ្លាំងពូកែក្លាហានក៏មានយ៉ាងច្រើន បើ**ឡៅពី**លើកកងទ័ពមកសងសឹក ហើយឲ្យដំណឹងទៅ**ចូឆ្វ**ឲ្យលើកជាទ័ពប្រជួនមកខ្ទប់ប្រសព្វជួបទ័ព**ឡៅពី**ទៀត ស្រុកកាំងតាំងក៏គង់នឹងអន្តរាយព្រោះអស់ទីពឹងសោះ ខ្ញុំបាទគិតឃើញចន្លោះឧបាយមួយ គឺត្រូវចាត់ឲ្យនាំយកក្បាល**គួនអ៊ូ**ទៅឲ្យ**ចូឆ្វ** បើ**ឡៅពី**ដឹងហើយគង់ចូលចិត្តថា **ចូឆ្វ**គិតឧបាយប្រើឲ្យយើងធ្វើទេ **ឡៅពី**ក៏នឹងត្រឡប់ខឹងទៅរក**ចូឆ្វ**វិញ យ៉ាងម្តេចក៏គង់គេចលើកទ័ពទៅច្បាំងនឹង**ចូឆ្វ**ខាងណោះ ស្រុកកាំងតាំងក៏នឹងអស់គ្រោះថ្នាក់ទៅវិញ យើងគង់បានសេចក្តីសុខសប្បាយ បានមើលលេង តើនរណានឹងឈ្នះ នឹងចាញ់ ស្រេចនូវកម្លាំងរបស់គេ។

**ស៊ុនគួន**បានឮ**ទៀវចៀវ**និយាយដូច្នោះ ក៏យល់ឃើញត្រូវផង ទើបបង្គាប់ឲ្យជាងធ្វើហិបដាក់ក្បាល**គួនអ៊ូ** ហើយចាត់បម្រើឲ្យនាំស្រូតប្រញាប់ទៅជូន**ចូឆ្វ**ទាំងយប់ទាំងថ្ងៃ។ គ្រានោះ**ចូឆ្វ**ចេញពីស្រុកខធោទៅឈប់នៅស្រុកឡុកអៀង មានបម្រើចូលទៅទូល**ចូឆ្វ**ថា **ស៊ុនគួន**ប្រើបម្រើឲ្យក្បាល**គួនអ៊ូ**ចូលមកថ្វាយ។ **ចូឆ្វ**មានសេចក្តីត្រេកអរណាស់ ក៏និយាយនឹងនាហ្មឺនមុខមន្ត្រីទាំងពួងថា ឥឡូវនេះ **គួនអ៊ូ**ស្លាប់ហើយ យើងបានដេកធ្មេចភ្នែកជិត។

**សុម៉ាអ៊ី**ដឹងដល់កលឧបាយដែល**ស៊ុនគួន**គិតនោះ ក៏និយាយថា **ស៊ុនគួន**ធ្វើនេះប្រាថ្នានឹងយកសេចក្តីចង្រៃមកបាចសាចឲ្យយើង។ **ចូឆ្វ**សួរថា អ្នកយល់ឃើញដូចម្តេច បានជានិយាយដូច្នេះ? **សុម៉ាអ៊ី**ឆ្លើយថា ពីដើម**ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**បីនាក់នេះបានស្បថស្បាន់នឹងគ្នាទុកថា នឹងរស់នឹងស្លាប់ជាមួយគ្នា គ្រានេះ**ស៊ុនគួន**សម្លាប់**គួនអ៊ូ**ទៅហើយ ខ្លាចក្រែង**ឡៅពី**នឹងលើកទ័ពត្រឡប់ទៅសងសឹកវិញ បានជាបញ្ជូន

ក្បាល**គួនអ៊ី**ចូលមកថ្វាយនេះ ប្រាថ្នានឹងដោះអំពើដែលខ្លួនបានប្រព្រឹត្តនោះ ឲ្យ**ឡៅពី**ត្រឡប់ខឹងមករកព្រះអង្គឯនេះវិញ មុខជា**ឡៅពី**ខឹងមិនលើកទ័ពទៅវាយស្រុកកាំងតាំង គង់នឹងលើកទ័ពមកច្បាំងខាងយើង **ស៊ុនគួន**រួចខ្លួននៅជាកណ្ដាល ចាំមើលលេង។

**ចូឆូ**ឮ**សុម៉ាអ៊ី**ថាដូច្នេះ ក៏យល់ឃើញត្រូវផង ទើបឆ្លើយឡើងថា កលសឹកគេធ្វើមកយ៉ាងនេះ អ្នកគិតប្រការម្ដេច? **សុម៉ាអ៊ី**ថា ការតែប៉ុណ្ណោះ ខ្ញុំបាទយល់ឃើញថាមិនក្រប៉ុន្មានទេ សូមឲ្យលោកយកឈើក្រអូបមកធ្វើជាហិប ដាក់ក្បាល**គួនអ៊ី**នាំយកទៅបញ្ចុះតាមបែបនាហ្មឺនធំ បើ**ឡៅពី**ដឹងហើយក៏មិនខឹងនឹងលោកប៉ុន្មានទេ គង់តែនឹងខឹងទៅខាង**ស៊ុនគួន**វិញមិនខាន មុខជាមានលើកទ័ពទៅវាយស្រុកកាំងតាំងជាប្រាកដ យើងត្រូវចាំមើលលេង បើ**ស៊ុនគួន**និង**ឡៅពី**ធ្វើសង្គ្រាមនឹងគ្នាខ្ទេចខ្ទីទៅហើយ សឹមយើងនឹងរើសយកជាក្រោយ ឲ្យបានស្រួលតែម្ដង។

**ចូឆូ**បានឮដូច្នោះ ក៏យល់ឃើញត្រូវ មានចិត្តត្រេកអរណាស់ ទើបឲ្យហៅបម្រើ**ស៊ុនគួន**ចូលទៅ បម្រើនោះក៏នាំយកក្បាល**គួនអ៊ី**ចូលទៅថ្វាយ។ **ចូឆូ**ឲ្យបើកហិបឡើង ឃើញមុខ**គួនអ៊ី**នៅស្រស់ដូចប្រក្រតី ធម្មតាដែលរស់នោះ **ចូឆូ**អស់សំណើច ហើយថា **គួនអ៊ី**! អ្នកឯងនេះ កាលនៅរស់មិនទៅមករកយើងសោះ ឥឡូវនៅតែក្បាលទទេទើបបែរមករកយើងវិញ។ ថាមិនទាន់ផុតមាត់ ក្រឡេកទៅឃើញក្បាល**គួនអ៊ី**នោះហាមាត់ឡើង ហើយបើកភ្នែកក្រឡេកក្រឡាប់ខមឲ្យ**ចូឆូ** ៗភ័យតក់ស្លុតរលត់ស្មារតីដួលចុះពីលើកៅអី។ ពួកមន្ត្រីខ្ញុំរាជការទាំងពួងក៏ភ័យភិតទាំងអស់គ្នា ស្ទុះទៅគ្រាហ៍ត្រកងឱប លើកយក**ចូឆូ**ឲ្យអង្គុយឡើង។ **ចូឆូ**ក៏រលត់ស្មារតីទៅមួយស្របក់ លុះភ្ញាក់ដឹងខ្លួនឡើងក៏និយាយនឹងអស់នាហ្មឺនទាំងនោះថា **គួនអ៊ី**នេះពូកែស័ក្ដិសិទ្ធិណាស់ បម្រើ**ស៊ុនគួន**បានឮដូច្នោះ ក៏ពណ៌នារឿងដែល**គួនអ៊ី**ទៅចូល

រូប**លីបង** ហើយជេរ**ស៊ុនគួន** កាប់ក**លីបង**បាក់ស្លាប់ ចាប់កន្ត្រាក់**ស៊ុនគួន**ទម្លាក់ពីលើកៅអីនោះ សព្វសេចក្តីថ្វាយឲ្យ**ចូឆូ**ស្តាប់គ្រប់ប្រការ។

**ចូឆូ**បានឮដូច្នោះ ក៏រឹងរឹតតែខ្លាចជាងពីដើម ទើបបង្គាប់ឲ្យជាងយកឈើក្រអូបធ្វើហិបដាក់ក្បាល**គួនអ៊ូ** ហើយឲ្យតែងគ្រឿងសែនតាមបណ្តាស័ក្តនាហ្មឺនធំ ហើយក៏អញ្ជើញក្បាល**គួនអ៊ូ**ហែទៅបញ្ចុះនៅក្បែរស្រុកឡុកអៀង ខាងទិសទក្សិណ។ **ចូឆូ**និងអស់នាហ្មឺនធំតូច ក៏នាំគ្នាហែសពសង្ការ មានក្បួនហែជាទីរុងរឿងណាស់។ **ចូឆូ**ក៏បង្គាប់ឲ្យតាក់តែងទីបញ្ចុះតាមយសចៅហ្វាយខេត្តកេងជីវ ហើយក៏ចាត់នាហ្មឺនមានបណ្តាស័ក្តិឲ្យពិភ័ក្តិរក្សាជានិរន្តរ៍ ឯបម្រើ**ស៊ុនគួន**ក៏ត្រឡប់វិលទៅស្រុកកាំងតាំងវិញ។

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លុក៖*

www.khmerliterature.wordpress.com

# **រឿង សាមកុក**

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កាន** ប្រែរៀបរៀង

កណ្ឌទី ៦២

**ចារឹករឿងទាញដោយ ៖ ឈុល ដារ៉ា**

*(តាំងពីព្រះចៅ**ឡៅពី**លើកទ័ពលើកត្រឡប់ទៅគង់នៅស្រុកសែឈួន ហើយយកនាង**ង៉ស៊ី**ធ្វើជាព្រះស្នំឯក រហូតទៅដល់ព្រះចៅ**ឡៅពី** ឲ្យសម្លាប់**ឡៅហង**បុត្រធម៌ ព្រោះមិនឲ្យកងទ័ពទៅជួយ**គួនអ៊ូ** បានជា**គួនអ៊ូ**ចាញ់ទ័ព**ស៊ុនគួន** ៗសម្លាប់**គួនអ៊ូ**បាន)*។

**ឯព្រះចៅឡៅពី** ចេញចាកពីស្រុកតាំងឈួនទៅស្រុកសែឈួន បណ្ដានាហ្មឺនទាំងពួងក៏មកជួបជុំគង់គាល់គ្រៀបត្រា មានមន្ត្រីម្នាក់ឈ្មោះ**ហាមចេង**ទូលថា នាង**ប៊ីហ៊ូយិន**ជាធិតាព្រះអង្គក៏ទទួលអនិច្ចកម្មទៅហើយ នាង**ស៊ុនហ៊ូយិន**ក៏វិលទៅនៅនឹង**ស៊ុនគួន**វិញ ទូលបង្គំជាខ្ញុំយល់ឃើញថា មុខជានាងនោះមិនត្រឡប់មកវិញឡើយ បើដូច្នេះហើយ ព្រះអង្គក៏នឹងនៅតែឯង ឥតព្រះស្នំក្រមការ ការខាងក្នុងព្រះដំណាក់ ក៏ឥតអ្នកណាគ្រប់គ្រងរក្សាទូលបង្គំយល់ថា គួរព្រះអង្គនឹងរកព្រះមហេសីស្រីស្នំតាមបុរាណរាជប្រពៃណី។ ព្រះចៅ**ឡៅពី**ត្រាស់ថា អ្នកនិយាយដូច្នេះគួរហើយ តើនឹងត្រូវគិតប្រការម្ដេច? **ហាមចេង**ទូលថា ទូលព្រះបង្គំសម្លឹងមើលឃើញតែប្អូនក្រមុំ**ង៉អ៊ី**ម្នាក់ រូបភាពក៏ស្អាតល្អ មានសតិបញ្ញាចេះដឹង ការងារទាំងពួងចំណាប់មាំមួនណាស់ ឃើញថានាងនោះនឹងមានបុណ្យតទៅពុំខាន តែកាលពីដើមឮថា នាង**ង៉អ៊ី**នឹងចង់ឲ្យទៅ**ឡៅម៉**  ជាកូន**ឡៅអៀន** ឥឡូវនេះ**ឡៅម៉**ស្លាប់ទៅហើយ វេលានេះសូមឲ្យទ្រង់ទទួលយកប្អូនក្រមុំ**ង៉អ៊ី**នោះមកធ្វើព្រះស្នំចុះ ព្រោះជាទីសមគួរហើយ។ ព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្ដាប់**ហាមចេង**ទូលដូច្នោះ ទើបត្រាស់ថា **ឡៅម៉**នោះជាសែ

ជាមួយនឹងយើង អ្នកឃើញមានយ៉ាងទម្លាប់ទំនៀមនឹងធ្វើបានហើយឬ? **ហមចេង**ទូលថា ក្នុងទម្លាប់ទំនៀមនោះ ក៏រវាំងចំពោះតែបងប្អូនដែលជិតស្និទ្ធស្នាល ឯនេះទូលព្រះបង្គំឃើញថា ជាសាច់ឆ្ងាយណាស់ទៅហើយ បើនឹងយកមកធ្វើជាស្វាមីភរិយា ក៏ឥតមានទាស់ទេ។ ព្រះចៅ**ឡៅពី**យល់ឃើញត្រូវទើបប្រើភ្នាក់ងារឲ្យទៅទទួលនាង**ង៉ស៊ី**ដែលជាប្អូនក្រមុំ**ង៉អ៊ី** នាំយកមកតាំងជាព្រះស្នំ លុះអំណើះតមក នាង**ង៉ស៊ី**មានព្រះរាជបុត្រពីរព្រះអង្គ គឺទីមួយព្រះនាម**ឡៅអេង** ទីពីរព្រះនាម**ឡៅលី**។

ថ្ងៃមួយនោះ មានបម្រើចូលទៅជម្រាប**ខុងបេង**ថា **ស៊ុនគួន**ឲ្យបម្រើទៅដណ្ដឹងកូនក្រមុំ**គួនអ៊ូ** ៗមិនព្រមឲ្យ **ខុងបេង**ក៏និយាយនឹងទីប្រឹក្សាទាំងពួងថា មើលទៅស្រុកកេងជីវនោះ បើដូច្នោះមុខជានឹងកើតអន្តរាយហើយ គួរតែនឹងឲ្យហៅយកខ្លួន**គួនអ៊ូ**ឲ្យដើរចេញ ហើយចាត់មនុស្សដទៃឲ្យទៅឈរធ្វើរាជការជំនួសវិញ។ ក្រោយនោះ ស្រាប់តែឃើញ**គួនហ៊ិន** កូនប្រុស**គួនអ៊ូ**នាំសំបុត្រមួយច្បាប់ទៅជូន**ខុងបេង** ក្នុងសេចក្ដីសំបុត្រនោះថា **ចូឆ្វូ**ប្រើ**បាំងតេក**និង**អ៊ីគឹម**លើកទ័ពទៅវាយយកស្រុកអ៊ួនសៀ **គួនអ៊ូ**ធ្វើកលសឹកជាច្រើនប្រការមានជ័យជម្នះ។ ក្រោយនោះ មានបម្រើនាំសំបុត្រមួយច្បាប់ទៀតទៅដល់**ខុងបេង** ក្នុងសំបុត្រនោះថា **គួនអ៊ូ**តាក់តែងស្រុកកេងជីវ និងស្រុកអ៊ួនសៀ មានបន្ទាយគូស្នាមភ្លោះខ្ពស់ ទាំងសើនក៏មាំមួនមានគ្រប់ធុនទាំងទ័ពទឹក ទ័ពគោក **ខុងបេង**ក៏នាំយករឿងរ៉ាវនោះ និងសំបុត្រទាំងពីរច្បាប់ទៅក្រាបទូលព្រះចៅ**ឡៅពី** ៗទ្រង់ព្រះសណ្ដាប់ហើយក៏ពេញព្រះទ័យ។

ថ្ងៃក្រោយនោះ បណ្ដាលជាហេតុភេទប្លែកណាស់ ព្រះចៅ**ឡៅពី**មិនសប្បាយក្នុងព្រះទ័យសោះ នឹងគង់ក៏មិនសុខ ផ្ទំក៏មិនលក់ចេះតែរសាប់រសល់ខ្វល់ព្រះទ័យព្រួយរំខាន លុះវេលាយប់ចូលផ្ទំក៏មិនលក់សោះ ទើបចេញមកគង់លើកៅអី ហើយលើកសំបុត្រមកមើល ប្រយោជន៍នឹងឲ្យធូរទូលាយក្នុងព្រះទ័យ ខណៈកាលកំពុង

អានសំបុត្រនោះ ក៏ធ្វេសសតិលក់លើកៅអីបន្តិចទៅ យល់សប្តិឃើញថា ខ្យល់បក់ចង្កៀងភ្លើងហៀបនឹងរលត់ ហើយត្រឡប់ជាប់ឆេះឡើងវិញដូចប្រក្រតី ក្រឡេកទៅឃើញមនុស្សឈរក្បែរចង្កៀងនោះ ក៏សួរទៅថា នរណាហានក្លាអាចចូលមកដល់ទីនេះ? មនុស្សនោះមិនស្តីតបសោះ ព្រះចៅ**ឡៅពី**ពិភាល់ណាស់ ក៏ក្រោកឡើងមើលឃើញច្បាស់ជា**គួនអ៊ូ** ដើរទៅដើរមកក្បែរចង្កៀងនោះ ព្រះចៅ**ឡៅពី**ក៏ថា ប្អូនអើយអ្នកនៅសព្វថ្ងៃសុខសប្បាយទេឬ? ប្អូនមករកបងពេលថ្មើរនេះដោយធុរៈអ្វី? យើងទាំងពីរស្រឡាញ់គ្នាដូចបងប្អូនរួមពោះជាមួយនឹងគ្នា ប្អូនខឹងនឹងបងយ៉ាងណាបានជាសួរមិនស្តី? **គួនអ៊ូ**បានឮ**ឡៅពី**និយាយ ក៏ស្រែកយំហើយថា សូមឲ្យបងលើកកងទ័ពទៅសងសឹកឲ្យខ្ញុំបាទផង ទទួលខ្យល់បក់មកត្រូវខ្លួនព្រះចៅ**ឡៅពី**ត្រជាក់ណាស់ ក៏ភ្ញាក់ស្មារតីឡើងភ្លាម ក្រឡេកមើលទៅមិនឃើញ**គួនអ៊ូ**សោះ ក៏ស្ទុតព្រះទ័យ នឹកមមៃ ទើបដឹងថាយល់សប្តិ។ វេលានោះ ទទួលព្រះសណ្តាប់ស្គរយាមកណ្តាលអាធ្រាត្រ ព្រះចៅ**ឡៅពី**រំខានក្នុងព្រះទ័យណាស់ លុះព្រឹកឡើងចេញផ្ទៃព្រះរោងត្រាស់ពីកិច្ចការរាជការ ក៏ឲ្យអញ្ជើញ**ខុងបេង**ចូលគាល់ ព្រះចៅ**ឡៅពី**ក៏ខ្សឹបប្រាប់ហេតុដែលយល់សប្តិនោះឲ្យ**ខុងបេង**ស្តាប់។ **ខុងបេង**យល់ថា យល់សប្តិនោះកាចណាស់ ក៏ក្លែងទូលបាយបៀងបញ្ឆិតបញ្ឆៀងយកព្រះទ័យថា យល់សប្តិយ៉ាងនេះពីព្រោះព្រះអង្គព្រួយបារម្ភគិតដល់**គួនអ៊ូ**ណាស់ ទើបបានជាទ្រង់ឃើញដូច្នេះ ហេតុនេះ សូមកុំឲ្យព្រះអង្គទ្រង់ព្រះវិតក្កពេកឡើយ មិនជាអ្វីទេ។ ព្រះចៅ**ឡៅពី**មិនទាន់អស់សង្ស័យពីក្នុងព្រះទ័យសោះ ក៏ជជីកសួរម្តងជាពីរដង **ខុងបេង**ឃើញថាព្រះចៅ**ឡៅពី**ស្រឡាញ់អាល័យ**គួនអ៊ូ**ខ្លាំងណាស់ ក៏ទូលតែសេចក្តីល្អ ហើយ**ខុងបេង**ក៏ថ្វាយបង្គំលាទៅដល់ទ្វារ ប្រទះនឹង**ខៅចេង** ៗនិយាយថា ខ្ញុំបាទមកនេះជួបលោក

នឹងជម្រាបដំណឹងមួយ ព្រោះខ្ញុំបាទបានឮគេនិយាយថា **លីបង**លើកទ័ពទៅវាយយកស្រុកកេងជីវ **គួនអ៊ូ**ចាញ់ទៅហើយ សេចក្តីនេះជាមែនឬយ៉ាងម្តេច?

**ខុងបេង**ថា ខ្ញុំបានមើលផ្កាយសម្រាប់ស្រុកកេងជីវ ឃើញថាសៅហ្មងវិបរិតណាស់ ខ្ញុំគិតថា **គួនអ៊ូ**មុខជានឹងស្លាប់ហើយ តែថាខ្ញុំមិនទូលតាមត្រង់ ក្រែងព្រះចៅ**ឡៅពី**ព្រួយទុក្ខជាទម្ងន់ និយាយគ្នាមិនទាន់ផុតមាត់ ទទួលព្រះចៅ**ឡៅពី**យាងទៅដល់ បានឮសម្តីដែលនិយាយគ្នានោះ ក៏ទ្រង់ចាប់ជាយអាវ**ខុងបេង**ហើយថា ដំណឹងអាក្រក់ដល់ប៉ុណ្ណោះហើយ ហេតុម្តេចបានជាលោកមិនប្រាប់ខ្ញុំតាមត្រង់? **ខុងបេង**និង**ខៅចេង**ក៏ទូលថា ព្រោះឮតាមពាក្យផ្សារ នឹងយកជាការពុំទាន់បាន ៗជាមិនហ៊ានពិតទូល ការនេះ សូមកុំឲ្យទ្រង់ព្រះវិតក្កពេកឡើយ។ ព្រះចៅ**ឡៅពី**ថា **គួនអ៊ូ**និងខ្ញុំបានសុំប្តេជ្ញាគ្នាទុកថា បើនឹងរស់នឹងស្លាប់ជាមួយគ្នា វេលានេះ បើ**គួនអ៊ូ**ស្លាប់មែនហើយ ខ្ញុំក៏មិនត្រូវនៅរស់ធ្វើអ្វីឡើយ។

ខណៈនោះ មានបម្រើចូលមកទូលថា **ម៉ាលៀង** និង**អ៊ីចៀ**កាន់សំបុត្រមកថ្វាយ ព្រះចៅ**ឡៅពី**ឲ្យហៅចូលទៅទាំងពីរនាក់ **ម៉ាលៀង** និង**អ៊ីចៀ**ក៏ទូលថា ស្រុកកេងជីវខូចនឹង**ស៊ុនគួន**ទៅហើយ **គួនអ៊ូ**រំសាយទ័ពទៅតាំងនៅស្រុកបេកសៀ ឲ្យចូលមកសុំកងទ័ពទៅជួយ នៅមិនទាន់ទាំងហែកសំបុត្រនោះទតផង ស្រាប់តែឃើញ**លៀវហ្វ៊**នៅស្រុកកេងជីវ ចូលទៅគាល់ព្រះចៅ**ឡៅពី** ៗក៏ឲ្យហៅចូលមក។

**លៀវហ្វ៊**ថ្វាយបង្គំហើយក៏យំទូលថា **ស៊ុនគួន**លើកទ័ពទៅវាយស្រុកកេងជីវ **គួនអ៊ូ**មានសំបុត្រទៅដល់**ឡៅហង, បេងតាត់** ឲ្យលើកទ័ពទៅជួយ ក៏មិនព្រមលើកទៅជួយ។ ព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្តាប់ ក៏ស្តុតព្រះទ័យណាស់ ទើបត្រាស់ថា បើដូច្នោះ**គួនអ៊ូ**នឹងមិនអន្តរាយទៅហើយឬ? **ខុងបេង**ទូលថា បើ**ឡៅហង**និង**បេងតាត់**ធ្វើដូច្នោះមែន ទោសត្រូវស្លាប់ ទ្រង់កុំជាទុក្ខព្រួយអ្វីពេកឡើយ ទូលព្រះបង្គំជាខ្ញុំនឹង

សុំលើកកងទ័ពទៅជួយស្រុកកេងជីវនិងស្រុកអ៊្វនសៀទើបគួរ។ ព្រះចៅ**ឡៅពី**ត្រាស់ថា ចាំធ្វើសំបុត្រទៅប្រាប់**តៀវហ៊ុយ**ឲ្យលើកកងទ័ពទៅជួយ ខ្ញុំឯងក៏នឹងលើកទៅដែរ។ ថាមិនទាន់ផុតព្រះវាចា ស្រាប់តែមានទាហានក្នុងកងទ័ព**គួនអ៊ូ**ចូលមកទូលថា **គួនអ៊ូ**និង**គួនប៉េង**ជាកូនរំសាយកងទ័ព លើកទៅតាមផ្លូវភ្នំចៅសាន់ ទាហាន**ស៊ុនគួន**ចាប់បានសម្លាប់ទៅហើយ។

ព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្ដាប់ច្បាស់ ក៏ស្ទុះចុកព្រះឱរា ទ្រង់ព្រះកន្សែងសោកាពិលាបដាបដួលព្រះអង្គទៅលើក្រឡាមហាប្រថពី សន្លប់បាត់ព្រះស្មារតី អស់នាហ្មឺនមុខមន្ត្រីក៏ភ័យជ្រួលច្របល់ ស្ទុះរចល់ទៅគ្រាហ៍លើកព្រះអង្គ លុះដឹងព្រះស្មារតីឡើង ក៏អញ្ជើញស្ដេចចូលទៅក្នុងព្រះរាជវាំង។ **ខុងបេង**ទូលថា ប្រពៃណីបុរាណលោកមានពោលមកទុកថា ធម្មតាសេចក្ដីស្លាប់នោះចំពោះមានគ្រប់រូបកាយគេយើងទាំងឡាយនឹងវាងចៀសក៏មិនបាន ឯ**គួនអ៊ូ**នោះហៅហ៊ានណាស់ បានជាមានគ្រោះអន្តរាយដល់ខ្លួន សូមព្រះអង្គកុំទ្រង់ជាទុក្ខមួនពេកឡើយ ម៉្លេះទៅហើយគួរតែនឹងរក្សាព្រះអង្គឲ្យបានគង់ជាសុខទៅចុះ នឹងបានតាំងព្រះទ័យចំពោះគិតការតទៅទៀត ជាទីសងសឹកគ្នាមិនល្អឬ? ព្រះចៅ**ឡៅពី**ត្រាស់ថា **គួនអ៊ូ, តៀវហ៊ុយ**និងខ្ញុំទាំងបីរនាក់នេះ បានស្បថស្បាន់នឹងគ្នាទុកថានឹងស្លាប់ជាមួយគ្នា ឥឡូវនេះ **គួនអ៊ូ**មរណៈទៅហើយ ខ្ញុំនឹងសោយរាជ្យយកប្រយោជន៍អ្វី បើបានសេចក្ដីសុខសប្បាយក៏តែរូបកាយម្នាក់ឯងមិនគួរទេ។ ថាមិនទាន់ផុតព្រះវាចា ទទួល**គួនហ៊ិន**យំចូលទៅ ព្រះចៅ**ឡៅពី**ក៏ទ្រង់សោកាពិលាបដាបដួលព្រះអង្គ តែទ្រង់ព្រះវិយោគដូច្នេះអស់រយៈបួនប្រាំថ្ងៃ **ខុងបេង**និងបណ្ដាខ្ញុំព្រះរាជការទាំងប៉ុន្មាន ក៏បាននាំគ្នាចូលទៅល្បួងលោមថ្នមព្រះទ័យព្រះចៅ**ឡៅពី**ជានិច្ច។

ព្រះចៅ**ឡៅពី**ត្រាស់ថា បណ្តាអ្នកស្រុកកាំងតាំងនិងយើងនេះ អំណើះពីនេះទៅ ត្រូវតែបំផ្លាញ ឲ្យត្រាតែអស់អាយុជីវិត មិនសុំឲ្យជួបជាមិត្តរួមទឹកដីជាប់គ្នាឡើយ។ **ខុងបេង**ទូលថា ទូលព្រះបង្គំឮដំណឹងគេនិយាយថា **ស៊ុនគួន**ឲ្យនាំក្បាល**គួនអ៊ូ**ទៅឲ្យ**ចូឆូ** ៗឲ្យតែងសំស្ការសពជាទីរុងរឿងតាមបណ្តាស័ក្តិជានាហ្មឺនធំ ហើយឲ្យបញ្ចុះទុកក្នុងស្រុកឡុកអៀង។ ព្រះចៅ**ឡៅពី**សួរថា ហេតុម្តេចបានជាវាធ្វើយ៉ាងបែបនេះ? **ខុងបេង**ទូលថា **ស៊ុនគួន**ក្លែងធ្វើកល ប្រាថ្នាឲ្យយើងហើយនិង**ចូឆូ**ទាស់អធ្យាស្រ័យគ្នា **ចូឆូ**ក៏ដឹងដល់កល**ស៊ុនគួន**បានជាឲ្យរៀបចំស្ការសព**គួនអ៊ូ**ឲ្យរុងរឿងដូច្នេះ សំណោះនឹងឲ្យយើងផុតនិស្ស័យព្យាបាទនឹង**ចូឆូ** ៗប្រាថ្នាឲ្យយើងយល់ឃើញថា **ស៊ុនគួន**ទេតើដែលសម្លាប់**គួនអ៊ូ**នោះ។

ព្រះចៅ**ឡៅពី**ថា យើងនឹងលើកទ័ពទៅច្បាំងនឹង**ស៊ុនគួន** ដើម្បីសងសឹកគ្នាឲ្យបាន។ **ខុងបេង**ទូលថា សុំឲ្យព្រះអង្គឈប់ កុំអាលលើកទ័ពទៅសិនចុះ ព្រោះ**ស៊ុនគួន**ធ្វើការទាំងនេះ ក៏ប្រាថ្នាឲ្យយើងខឹងទៅនឹង**ចូឆូ** បើយើងដឹងមិនដល់ ហើយលើកពលទៅច្បាំងនឹង**ចូឆូ** នោះ**ស៊ុនគួន**ក៏នឹងត្រឡប់យកជ័យជម្នះយើងជាក្រោយវិញ ខាងឯ**ចូឆូ**នោះមិញ ក៏ចង់ឲ្យយើងច្បាំងនឹង**ស៊ុនគួន**ដែរ គេក៏ចាំយកជ័យជម្នះជាក្រោយដូចគ្នា ដូច្នេះបើយើងលើកទ័ពទៅក្នុងពេលឥឡូវនេះ ក៏ត្រូវនឹងគំនិតវាគិតទុកទាំងសងខាង ហេតុនេះគួរតែយើងចៀសវាងឲ្យផុត កុំឲ្យវាមើលងាយគំនិតយើងថាទាបជាងវា។ ទូលបង្គំសូមឲ្យទ្រង់ព្រះចិន្តាបង្អង់ការនេះទុកសិនចុះ ដើម្បីនឹងបានតែងការសពសែនព្រេនឲ្យ**គួនអ៊ូ**តាមទម្លាប់ប្រពៃណីបុរាណ ហើយនឹងបានចាំមើល**ស៊ុនគួន** និង**ចូឆូ**ស៊ូគ្នាដោយអាការកំហឹងផ្សេងៗ បើសត្រូវទាំងសងខាងនេះច្បាំងគ្នាវេលាណា គង់តែមានភ្លាត់ចំណាប់ម្ខាងៗ យើងនឹងធ្វើការជាក្រោយមុខជាងាយស្រួលណាស់។ ព្រះចៅ**ឡៅពី**ទ្រង់យល់ត្រូវផង ទើបបង្គាប់ដល់អស់អាណា

ប្រជានុរាស្ត្រក្នុងស្រុកសែឈ្នួន និងស្រុកដែលត្រូវឡើងស្តាប់បង្គាប់ទាំងប៉ុន្មាន ឲ្យស្លៀកសពាក់សកាន់ទុក្ខទាំងប្រុសស្រី ហើយឲ្យតែងគ្រឿងប្ពីការសែនព្រេន នៅទីព្រះទ្វារទិសទក្សិណ ព្រះចៅ**ឡៅពី**ក៏យាងចេញទៅសែនបួងសួងឲ្យ**គួនអ៊ូ**តាមប្រពៃណី ហើយទ្រង់ព្រះកន្សែងរឭកអាល័យ**គួនអ៊ូ**រាល់ថ្ងៃ។

ឯ**ចូអ្វ**នៅក្នុងស្រុកឡុកអៀង ចាប់ដើមពីថ្ងៃដែលទទួលក្បាល**គួនអ៊ូ**ទៅនោះ តែដេកធ្មេចភ្នែកវេលាណា ក៏ឃើញតែមុខ**គួនអ៊ូ**វេលានោះ **ចូអ្វ**ក៏រឹងរឹតតែមានសេចក្តីភ័យខ្លាចពន់ប្រមាណ ទើបប្រារព្វហេតុនេះឲ្យអស់ពួកខុំរាជការតូចធំ ប្រជុំស្តាប់ហើយពិគ្រោះថា ហេតុយ៉ាងនេះ តើនឹងធ្វើដូចម្តេច? នាហ្មឺនធំៗទូលថា ទីព្រះរាជវាំងចាស់នេះមានខ្មោចបិសាចច្រើនណាស់ សូមអញ្ជើញព្រះអង្គទៅសាងវាំងថ្មីទៀតចុះ ទើបនឹងបានសេចក្តីសុខ។ **ចូអ្វ**ថា យើងនឹងគិតដូច្នោះដែរថា នឹងសាងវាំងថ្មី ដើម្បីនឹងធ្វើជាព្រះទីនាំង តែថានៅខ្វះដៃជាងដែលជំនាញថ្វីដៃនោះ។

**កាសៀង**ទីប្រឹក្សាទូលថា ក្នុងស្រុកឡុកអៀងនេះ ទូលបង្គំយល់ឃើញជាងម្នាក់ឈ្មោះ**ឆៅអ្វត** ឯ**ឆៅអ្វត**នោះប្រកបទាំងថ្វីដៃ និងសេចក្តីរិះគិតចំណាប់ចំនួនណាស់ ចេះវិសេសលើសជាងឈើទាំងពួង។ **ចូអ្វ**ក៏ឲ្យហៅ**ឆៅអ្វត**ចូលមកគាល់ ហើយត្រាស់ថា ចូរអ្នកធៀបផែនដីវាំងតាំងឲ្យមានព្រះទីនាំង ស្តេចចេញជំនុំរាជការផែនដី ឯទីខាងមុខព្រះទីនាំងធំ ឲ្យធ្វើជាព្រះលាន មានសួនផ្ការចនាផ្សេងៗ ខាងល្វែងក្នុងមានសង់ជាមន្ទីរដំណាក់ប្រាំបួនខ្នង ខាងមុខមានព្រះរាជរោងធំមាំមួនណាស់ ខាងក្នុងមានដំណាក់ឆ្លូកឆ្លាស់ជាលំដាប់គ្នា។ លុះគូរផែនទីរួច ក៏យកទៅថ្វាយ**ចូអ្វ** ៗពិគ្រោះមើលសព្វគ្រប់ហើយ ត្រាស់ថា របៀបនេះល្អណាស់ សមគួរជាទីកន្លែងរបស់អ្នកមានបុណ្យ ស្អាតល្អគួរនឹងចិត្តយើងហើយ តែនៅខ្វះដើមឈើធំដែលត្រូវធ្វើសសរកន្លោង យើងមិនឃើញទីណានឹងមានឡើយ។

**ចៅអ្នក**ទូលថា មានព្រៃឈើមួយអន្លើ ឈ្មោះព្រៃអៀកឡុងចម្ងាយពីនេះ ប្រហែលបីរយសិន (១២ គ.ម) ជាយព្រៃនោះមានសាលទេវព្រ័ក្សមួយខ្ទងគេសង់ទុកមក ជិតសាលទេវព្រ័ក្សនោះមានដើមសាឡីមួយធំខ្ពស់ណាស់ កម្ពស់ប្រហែលម្ភៃព្យាម (៤០ ម) ទូលព្រះបង្គំឃើញថានឹងយកធ្វើជាសសរកន្តោងបាន។ **ចូឆ្វ**មានអំណរណាស់ ត្រាស់ថា បើដូច្នោះមានតែទៅកាប់ឈើនោះមកឲ្យយើងចុះ។ ខណៈនោះ មនុស្សទាំងពួងក៏នាំគ្នាទៅកាប់ឈើនោះ លុះទៅដល់ហើយ ក៏ឆ្ការកាប់នឹងដឹងឬនឹងយកពន្លាកដាប់ក៏ពុំមុតសោះឡើយ ហើយក៏នាំគ្នាទៅទូល**ចូឆ្វ**វិញ។ **ចូឆ្វ**មិនជឿ ក៏នាំគ្នាចេញទៅមើលប្រហែលបីរយនាក់ លុះទៅដល់មុខសាលទេវព្រ័ក្ស **ចូឆ្វ**ចុះពីលើសេះទៅ ឃើញដើមសំឡីខ្ពស់ធំ ត្រង់ល្អគ្មានវៀចសោះ ទើបឲ្យមនុស្សយកពូថៅចូលទៅកាប់ក៏មិនមុត អ្នកចាស់ប្រជាភ្នាក់ងារស្រុកនោះ ក៏នាំគ្នាទូលទាស់ឃាត់ថា ដើមសាឡីនេះជាឈើចាស់បុរាណ មានចាស់ទុំនាំនិយាយតៗគ្នាមកថា អាយុឈើនេះប្រហែលបីបួនរយឆ្នាំហើយ មានទេវព្រ័ក្សខ្មោចបិសាចបិតនៅលើដើមឈើនេះ សូមកុំឲ្យទ្រង់បង្គាប់ឲ្យកាប់ឡើយ។

**ចូឆ្វ**ឮដូច្នោះក៏ខឹងខ្លាំងណាស់ថា អញបានធ្វើជាធំសម្រេចរាជការក្នុងស្រុកនេះជាងសែសិបឆ្នាំហើយ អស់អាណាប្រជានុរាស្ត្រក្នុងស្រុកនិងអារក្សអ្នកតាឯណាដែលនៅតំបន់មណ្ឌលនានា ដែលត្រូវឡើងស្រុកនេះ ក៏សឹងតែជ្រកពឹងប្រស្រ័យនៃបុណ្យអំណាចអញទាំងអស់ អញត្រូវការនឹងយកឈើនេះទៅធ្វើប្រាសាទវិមាន បើមានទេវព្រ័ក្សអ្នកតានៅលើឈើនេះ ព្រមឲ្យយើងឬមិនព្រមឲ្យ ថាម្តេចក៏ថាមកចុះ ក៏ឮសំឡេងស្រែកយំទ្រហឹងលើចុងឈើ ជ័រឈើនោះក៏ហូរចេញមកជាឈាមស្រស់ៗ។ **ចូឆ្វ**ឃើញដូច្នោះក៏តក់ស្លុតរន្ធត់ស្មារតី បោះដាវចោលពីដៃ ហើយក៏ឡើងជិះសេះត្រឡប់ទៅវាំងវិញ។ លុះដល់ពេលយប់នោះ ក៏បណ្តាលឲ្យ**ចូឆ្វ**ក្តៅអន្ទះ

អន្ទែង នឹងដេកក៏មិនលក់ នឹងអង្គុយក៏មិនសុខ រសាប់រសល់ត្រឡប់ប្រែប្រួលទាល់តែដល់យាមពីរ ទើបក្រោកចេញទៅអង្គុយលើកៅអី ធ្វេសលក់ទៅយល់សប្តិឃើញថា មានមនុស្សសក់វែងដណ្តប់សំពត់ខៀវ ដៃកាន់ដាវដើរតម្រង់ចូលមកឈរចំពីមុខ **ចូឆ្វ** ហើយលើកដៃចង្អុលមុខ**ចូឆ្វ** ស្រែកគំហកថា អញជាទេវព្រ័ក្សនៅលើដើមឈើសាឡី អញមិនព្រមឲ្យឈើនោះទេ គឺឈើនេះជារបស់អញ ឯងនឹងយកធ្វើទីលំនៅនៅទទឹងនឹងព្រះចៅ**ហៀនតេ** អញដឹងថាបុណ្យវាសនាឯងអស់ប៉ុណ្ណឹងហើយ អញនឹងសម្លាប់ឯងចេញឥឡូវនេះ។

**ចូឆ្វ**ភ័យណាស់ ស្រែកយំឲ្យទាហានជួយ ទេវព្រ័ក្សកន្ត្រាក់ដាវកាប់**ចូឆ្វ** ៗ ភ័យណាស់ភ្ញាក់ឡើងស្រែកដោយសំឡេងខ្លាំង ចេះតែឲ្យឈឺក្នុងលលាដ៍ក្បាលខ្លាំងណាស់ លុះវេលាព្រឹកក៏ឲ្យហៅពេទ្យមកមើលអាការរោគ។ ពេទ្យបានមករួតរឹតលាបថ្នាំទាល់តែអស់ចំណេះ រោគនោះក៏មិនបាត់ឈឺ។ បណ្តានាហ្មឺនទាំងធំទាំងតូចឃើញដូច្នោះក៏ជាទុក្ខព្រួយទាំងអស់គ្នា។

ខណៈនោះ មានទីប្រឹក្សាម្នាក់ទូលថា មានគ្រូពេទ្យម្នាក់ឈ្មោះ**ហ្វ៊ូតោ** ចេះរក្សារោគវិសេសណាស់ ទ្រង់ជ្រាបស្គាល់ទេ? **ចូឆ្វ**ឆ្លើយថា ពេទ្យនោះហើយឬដែលរក្សារបួស**ជីវថាយ** នៅស្រុកកាំងតាំងនោះ? **ហ្វ៊ូហ៊ឹម**ទូលថា នោះឯងហើយ។ **ចូឆ្វ**ថា យើងស្គាល់ដែរ តែថាពេទ្យនោះចេះវិជ្ជាមិនជាប៉ុន្មានទេ។ **ហ្វ៊ូហ៊ឹម**ទូលថា ពេទ្យនោះសព្វថ្ងៃនៅស្រុកជីវគួន ស្រុកថៃកុក សម័យនេះគ្មាននរណាពូកែស្មើទេ បើមើលរោគនរណាៗ ជួនកាលក៏ឲ្យថ្នាំផឹកខ្លះ លាបខ្លះ ជួនកាលក៏វះ ពុះ ដុត រំលាងចេញតែត្រឹមដកដៃចេញផុត ជំងឺក៏បាត់ឈឺចាប់ភ្លាម បើជារោគក្នុងពោះ ឲ្យផឹកថ្នាំចូលទៅ ម្ចាស់ខ្លួនក៏សន្លប់បាត់ស្មារតីមិនដឹងខ្លួនប្រាណ ទើបយកកាំបិតវះពោះនោះស្រាវយកពោះវៀនចេញមកក្រៅ លាងជម្រះឲ្យអស់ស្មោគគ្រោក ហើយញាត់ចូលទៅវិញ

ឲ្យដូចដើម ហើយដេរសាច់នោះ រួចលាបថ្នាំ ជំងឺខ្លះក៏ជាក្នុងរវាងមួយខែ ខ្លះម្ភៃថ្ងៃ សះស្រឡះដូចដើមវិញ។

មានថ្ងៃមួយនោះ ពេទ្យ**ហ៊្វីតោ**ដើរទៅតាមផ្លូវថ្នល់ បានឮសំឡេងមនុស្សថ្ងូរលើផ្ទះក្បែរផ្លូវ ក៏ដឹងថា រោគនោះមានពស់ពិសនៅក្នុងខ្លួន។ ក៏ដើរចូលទៅស្រែកហៅអ្នកផ្ទះឲ្យចុះមកប្រាប់ថា អ្នកជំងឺនោះយើងនឹងមើលឲ្យជាបាន ទើបឲ្យយកខ្ទឹមគុយឆាយបុកឲ្យល្អិត ដាក់ទឹកលាយប្រហែលពីរនាឡិ ឲ្យអ្នកជំងឺនោះផឹកអស់ទៅក្អួតចេញមកវិញសុទ្ធតែដង្កូវមានក្បាលក្រហម នៅរស់រវើកចំនួនប្រហែលជាពីរនាឡិ។ **តាន់តេង**សួរថា ហេតុអ្វីបានជាខ្ញុំកើតរោគដូច្នេះ ពេទ្យ**ហ៊្វីតោ**ប្រាប់ថា ព្រោះអ្នកឯងយកសាច់ឆៅ ត្រីឆៅ ទៅភ្លាស៊ី បានជាកើតរោគដូច្នេះ ទោះបីនឹងក្អួតចេញមកប៉ុណ្ណេះហើយ ក៏នៅមិនទាន់ជាស្រេចស្រឡះទេ លុះដល់បីឆ្នាំរោគនេះ នឹងត្រឡប់កើតឡើងវិញទៀត កាលបើកើតឡើងទៀតហើយ មើលមិនជាទេ គឺដល់កំណត់អាយុរបស់អ្នកហើយ លុះកន្លងមកបីឆ្នាំ **តាន់តេង**ក៏ស្លាប់ដូចពាក្យហ៊្វីតោថាមែន។

គ្រាមួយ មានអ្នកជំងឺម្នាក់ ឈឺនឹងរោគពកប៉ោងឡើងខាងលើត្របកភ្នែកចេះតែពើតឈឺចាប់ខ្លាំងណាស់ ទើបយកគ្រូពេទ្យ**ហ៊្វីតោ**ទៅមើល ពេទ្យ**ហ៊្វីតោ**សម្លឹងមើលយល់ថា ដុំពកនោះមានសត្វបក្សីកើតនៅក្នុងនោះ អ្នកទាំងពួងឮដូច្នោះក៏នាំគ្នាសើច ពេទ្យ**ហ៊្វីតោ**ក៏យកកាំបិតវះពកនោះចេញ ស្រាប់តែឃើញសត្វចាបមួយលោតចេញមកហើរទៅ រោគនោះក៏ជាស្រឡះ។

គ្រាមួយ មានម្នាក់ឆ្កែខាំដាច់មេជើងបាត់ទៅ របួសនោះក៏បង្កើតជាដុំសាច់លេចយុរយារចេញមកពីរដុំ មួយដុំចេះតែឈឺចាប់ មួយដុំទៀតចេះតែរមាស់ ទើបរកគ្រូ**ហ៊្វីតោ**ទៅមើល គ្រូ**ហ៊្វីតោ**ឃើញហើយថា ដុំសាច់ដែលចេះតែឈឺនោះ មាន

ម្ចុលនៅខាងក្នុងចំនួនដប់ម្ចុល ឯសាច់ដុំដែលចេះតែរមាស់នោះ មានគ្រាប់ស្កា (កូនស្កាសម្រាប់ល្បែងមួយប្រភេទ ក្នុងពួកល្បែងចត្រង្គ) ពីរនៅខាងក្នុងមួយខ្មៅ មួយស អ្នកទាំងពួងមិនជឿ ពេទ្យ**ហ៊្វូតោ**ក៏យកកាំបិតវះចេញ បានម្ចុលនិងគ្រាប់ស្កាដូចពាក្យថា អ្នកទាំងអស់គ្នាក៏ជឿថាដូចទេពតា។ វេលានោះ ពេទ្យ**ហ៊្វូតោ**មកនៅក្នុងតំបន់គិមសៀ ឯទីនោះមិនឆ្ងាយណាស់ណាទេ សូមឲ្យទ្រង់ហៅយកមករក្សាព្រះរោគនេះចុះ មុខជាសះជាមិនខាន។

**ចូឆូ**បានឮ**ហ៊្វូហ៊ឹម**សរសើរខ្លាំងណាស់ ក៏ត្រាស់ប្រើបម្រើឲ្យស្រូតទៅហៅពេទ្យ**ហ៊្វូតោ** ៗក៏បានចូលមកគាល់ ហើយឲ្យវែកឆ្លងព្រះអង្គមើលសរសៃនៅកព្រះហស្ត ពេទ្យ**ហ៊្វូតោ**មើលហើយក៏ទាយថា ព្រះរោគនេះពីព្រោះខ្យល់សៀតចាក់ក្នុងព្រះកេសា ដែលទ្រង់សោយព្រះឱសថមកច្រើនណាស់ មិនមែនត្រូវនឹងព្រះរោគនេះទេ ដែលនឹងរក្សាព្រះរោគបែបនេះដោយថ្នាំសោយនិងថ្នាំលាបក៏មិនត្រូវដែរ រោគយ៉ាងនេះមានតែវះទើបជា។ **ចូឆូ**សួរថា អ្នកឯងនឹងត្រូវការវះយ៉ាងម្ដេច? ពេទ្យ**ហ៊្វូតោ**ទូលថា ទូលព្រះបង្គំនឹងថ្វាយព្រះឱសថឲ្យទ្រង់សោយ ទាល់តែស្រវឹងស្ងៀមទៅមិនដឹងព្រះអង្គ ទើបនឹងវះគាស់យកលលាដ៍ព្រះកេសា ដោយពូថៅដែលមុត ហើយនឹងលាងជម្រះព្រះរោគក្នុងលលាដ៍ព្រះកេសានេះ ឲ្យអស់រលីងស្អាត រួចលើកយកមកប្រកបគ្នាឲ្យដូចដើមវិញ ហើយដេរនឹងចេសលាបថ្នាំឲ្យអស់ស្នាម ទើបព្រះរោគនេះជាដាច់។

**ចូឆូ**ឮដូច្នោះ ក៏ទ្រង់ក្រោធខ្លាំងណាស់ ត្រាស់ថា ឯងនឹងក្លែងសម្លាប់អញឬបានជាមកនិយាយយ៉ាងនេះ? **ហ៊្វូតោ**ទូលថា កាលគ្រា**គួនអ៊ូ**ត្រូវព្រួញនៅចុងស្មាទូលព្រះបង្គំជាខ្ញុំបានទៅរក្សារបួសនោះ **គួនអ៊ូ**អង្គុយឲ្យទូលព្រះបង្គំវះដកយកព្រួញចេញ ហើយក៏កោសរូសទាល់តែអស់ពិសថ្នាំ ដែលជ្រាបជាប់នឹងឆ្អឹងនោះចេញអស់

ហើយ**គួនអ៊ូ**គ្មានខ្លាចស្ញើបសោះឡើយ។ ឯព្រះរោគព្រះអង្គនេះបន្តិចបន្តួចទេ ទូលព្រះបង្គំរះហើយក៏នឹងជាស្រឡះ មិនត្រូវខ្លាចទេ។

**ចូឆ្វ**ថា ដែលមានរបួសចុងស្នា នឹងត្រូវការអាររះក៏គួរ នេះឈឺនៅក្នុងខួរក្បាល មកពុះរះតើវាគួរណាស់ទៅឬ? អាមនុស្សយ៉ាងនេះ គឺវាគប់គិតគ្នាជាពួកម៉ាករបស់**គួនអ៊ូ** វាមកធ្វើកលមាយាក្លែងចង់សម្លាប់អញឲ្យស្លាប់។ **ចូឆ្វ**ក៏បង្គាប់ពួកទាហានឆ្វេងស្តាំ ឲ្យចាប់យកខ្លួនពេទ្យ**ហ៊្វាតោ**ទៅដាក់គុកក្នុងខណៈនោះ ហើយថា អញនឹងវាយពិចារណាសួរឲ្យឆ្លើយយកការណ៍ជាក្រោយទៀត។

**កាសៀង**ទីប្រឹក្សាក៏ទូលឃាត់ថា សូមទ្រង់ពិគ្រោះពិចារណាឲ្យល្អិតបន្តិចទៅទៀតសិន ព្រោះពេទ្យ**ហ៊្វាតោ**នេះ ចេះជំនាញណាស់ សព្វថ្ងៃនេះ បើនឹងជ្រើសរើសរកអ្នកឯណាមកប្រៀបផ្ទឹមឲ្យត្រឹមស្មើក៏ពុំបាន គួរតែទ្រង់សន្និដ្ឋានរំពឹងគិតសិន កុំអាលធ្វើឲ្យកើតសេចក្តីអន្តរាយឡើយ។ **ចូឆ្វ**ស្រែកគំហកហើយថា ពេទ្យយ៉ាងនេះវាគិតតែប្រទូសរ៉ាយនឹងយើងក្នុងគ្រានេះ ប្រាកដដូចកាលគ្រា**កៀតប៉ីង**ប្រុងនឹងធ្វើប្រទូសរ៉ាយដល់យើងពីកាលមុននោះ ត្រូវតែឲ្យក្រុមមឿងវាយសួរយកចម្លើយឲ្យច្បាស់។ ទាហានក៏នាំយកខ្លួនពេទ្យ**ហ៊្វាតោ**បញ្ជូនទៅឲ្យក្រុមមឿងដាក់គុកតាមបង្គាប់**ចូឆ្វ**។

**ង៉អាយ**ដែលជានាយភូឃុំពេទ្យ**ហ៊្វាតោ**ដឹងថា **ហ៊្វាតោ**ជាគ្រូពេទ្យចេះយ៉ាងពូកែ ក៏ប្រតិបត្តិជូនស្រា បាយ មានសាច់ជ្រូក មាន់ទា ឲ្យបរិភោគរាល់ពេលពុំដែលដាច់។ ពេទ្យ**ហ៊្វាតោ**មានកតញ្ញូដឹងគុណភូឃុំ ក៏និយាយថា ខ្ញុំនេះមុខជានឹងស្លាប់ប្រាកដហើយ ខ្ញុំមិនមានរបស់អ្វីនឹងតបស្នងសងគុណនាយទេ ខ្ញុំមានតែវិជ្ជាការខាងពេទ្យល្អណាស់ ខ្ញុំក៏មិនទាន់បានប្រាប់កូនសិស្សណានៅឡើយ ចូរអ្នកយកសំបុត្ររបស់ខ្ញុំនេះទៅឲ្យភរិយាខ្ញុំ យកតម្រាពីផ្ទះមក ខ្ញុំនឹងចង្អុលបំភ្លឺឲ្យយល់ទាល់តែអស់។ ភូឃុំ

បានឮដូច្នោះ ក៏មានអំណរណាស់ និយាយថា ខ្ញុំបាទបានវិជ្ជាការពេទ្យរបស់លោកហើយ ខ្ញុំបាទមិនធ្វើការតទៅទៀតឡើយ នឹងធ្វើការខាងពេទ្យរក្សារោគឲ្យល្បីឮរន្ទឺទៅ ដើម្បីនឹងយករង្វាន់ខាន់ខៅ ថ្លៃសារពីថ្នាំចិញ្ចឹមជីវិតអាត្មាប្រសើរជាង។

**ហ៊្សឹតោ**ក៏សរសេរសំបុត្រឲ្យភូឃុំ ៗក៏នាំយកសំបុត្រទៅឯតំបន់ភូមិគិមសៀជូនទៅភរិយា**ហ៊្សឹតោ**។ ភរិយា**ហ៊្សឹតោ**ក៏ប្រគល់តម្រារបស់ប្ដីតាមសំបុត្រនោះ មកឲ្យភូឃុំ ៗបានតម្រានោះហើយ ក៏យកទៅឲ្យ**ហ៊្សឹតោ** ៗក៏ចង្អុលបំភ្លឺប្រាប់វិជ្ជាពេទ្យដល់ភូឃុំនោះ លុះត្រាតែបានដឹងស្គាល់គ្រប់ប្រការ ហើយក៏ប្រគល់តម្រានោះឲ្យទៅភូឃុំទាំងអស់។ ភូឃុំបានតម្រានោះហើយ ក៏មានចិត្តត្រេកអរពន់ប្រមាណ បានយកតម្រានោះទៅទុកក្នុងទីលំនៅ។ លុះកន្លងយូរទៅ ពេទ្យ**ហ៊្សឹតោ**ក៏ធ្វើកាលកិរិយាក្ស័យជីវិតក្នុងគុកនោះទៅ។ ភូឃុំឲ្យមន្ត្រីភ្នាក់ងារនាំយកសេចក្ដីទៅទូលព្រះចៅ**វុយអេង**ថា ពេទ្យ**ហ៊្សឹតោ**ស្លាប់ហើយ។ ភូឃុំក៏តាក់តែងគ្រឿងសែនព្រេន នាំសពពេទ្យ**ហ៊្សឹតោ**ទៅបញ្ចុះតាមទំនៀម។

ឯភរិយាភូឃុំឃើញតម្រាក៏គិតថា ត្រូវការអ្វីនឹងរក្សាតម្រានោះទុក គ្រូដែលថាវិសេសណាស់ ម្ដេចក៏ស្លាប់ក្នុងគុក បើប្ដីអញយកទុកក៏គង់តែដូចគ្នា។ គិតហើយក៏យកតម្រានោះទៅដុតភ្លើងអស់ទៅ។ វេលានោះទទួលភូឃុំទៅផ្ទះ ក្រឡេកឃើញភរិយាយកតម្រាទៅដុតភ្លើងដូច្នោះ ក៏ស្ទុះទៅដណ្ដើមបានពីរបីសន្លឹក ក្រៅអំពីនោះក៏ឆេះអស់។ ភូឃុំខឹងណាស់ស្រែកជេរភរិយា ហើយថា ហេតុម្ដេចបានជាហងឯងយកតម្រាអញទៅដុតភ្លើងបំផ្លាញ? ប្រពន្ធឆ្លើយថា បើ**ហ៊្សឹតោ**គ្រូអ្នកឯងវិសេសណាស់ ម្ដេចក៏ស្លាប់ក្នុងគុក? អ្នកឯងយកតម្រានោះទុកប្រយោជន៍អ្វី? ឯភូឃុំទាល់គំនិត ក៏អង្គុយកើតទុក្ខស្ដាយតម្រានោះពន់ប្រមាណណាស់ ចេះតែដកដង្ហើមធំ

ហើយគិតថា អំណើះពីថ្ងៃនេះទៅ តម្រាវិសេសយ៉ាងនេះអស់មានហើយ ឯសន្លឹកដែលយកបាននោះ បានតែបែបមើលជ្រូក មាន់ ទា ប៉ុណ្ណោះ។

ខណៈនោះ ឯ**ចូឆ្វ**ដែលមានរោគឈឺក្នុងក្បាល ក៏បណ្ដាលឱ្យពើតចាប់ធ្ងន់ឡើងៗ ហើយព្រួយវិតក្ក ក្រែងកងទ័ពស្រុកកាំងតាំងនឹងស្រុកសែឈ្នួនលើកមកធ្វើអន្តរាយ មានបម្រើស៊ើបការណ៍ចូលទៅទូលថា **ស៊ុនគួន**ស្រុកកាំងតាំងមានសំបុត្រមកដល់ **ចូឆ្វ**ក៏ឱ្យហៅអ្នកកាន់សំបុត្រនោះចូលទៅ ហើយយកសំបុត្រនោះទៅមើលឃើញសេចក្ដីថា ខ្ញុំបាទ**ស៊ុនគួន**មានចិត្តស្វាមីភ័ក្តិចូលមកជ្រកកោនពឹងបុណ្យសម្ភារព្រះចៅ**វុយអេង**តទៅ ឯបណ្ដាអាណាខេត្តទាំងពួងក៏ឡើងទ្រង់អស់ហើយ ឃើញនៅសល់តែស្រុកសែឈ្នួន និងស្រុកតាំងឈ្នួនប៉ុណ្ណោះ ហេតុនេះសុំឱ្យទ្រង់លើកទ័ពទៅកម្ទេច**ឡៅពី**ចុះ មុខជាបានដោយងាយ។

**ចូឆ្វ**បានស្ដាប់ ក៏អស់សំណើច ហើយថា មើលចុះ**ស៊ុនគួន**វាបញ្ឆោតយើងឱ្យដើរជាន់លើគំនរភ្លើង ហើយទីប្រឹក្សាម្នាក់ឈ្មោះ**តាន់កុន**ឆ្លើយថា ផែនដីព្រះចៅ**ហៀនតេ**ក៏រៀវរោយមកយូរណាស់ហើយ គ្រានេះអាស្រ័យដោយព្រះតេជព្រះគុណទ្រង់ ទើបបានបរិបូរមាំមួនឡើង អស់អាណាប្រជានុរាស្ត្រក៏បានប្រកបសុខក្សេមក្សាន្ត ដោយសារបានជ្រកម្លប់ព្រះបរមពោធិសម្ភារបារមី ហើយមានទាំងសេចក្ដីស្ម័គ្រស្រឡាញ់ព្រះអង្គខ្លាំងណាស់ ឯ**ស៊ុនគួន**នេះក៏បន្ទាបខ្លួនចូលមកពឹងបុណ្យព្រះអង្គដោយត្រង់ហើយ គួរតែទ្រង់នឹងឡើងសោយរាជជាអម្ចាស់ផែនដីឱ្យពេញទីទៅ។

**ចូឆ្វ**ឮដូច្នោះក៏អស់សំណើចថា យើងបានទំនុកបម្រុងផែនដីរបស់ព្រះចៅហៀនតេមក សឹកសត្រូវក៏រាបទាប រាស្ត្រទាសក៏បានសេចក្ដីសុខក្សេមក្សាន្តមកហើយ ព្រោះគំនិតរបស់យើង ៗក៏បានសម្រេចរាជការជាធំបំផុតលើសអស់មុខមន្ត្រីទាំងឡាយ មិនមាននរណានឹងស្មើដល់ បើយើងតាំងខ្លួនជាម្ចាស់ផែនដី ផ្ទឹមនឹង

ព្រះចៅ**ហៀនតេ**ក៏ដូចជាមិនសមគួរ យើងត្រូវធ្វើតែល្មមល្មមដូច**ជីវប៉ូអង** ដែលធ្វើការទុកឲ្យកូនប្រុសរបស់ខ្លួនប៉ុណ្ណោះក៏បាន។ **សុម៉ាអ៊ី**ថា ចុះបើវេលានេះ**ស៊ុនគួន**បានព្រមចំណុះចូលមកជាខ្ញុំទ្រង់ហើយ គួរតែទ្រង់នឹងតាំងលើក**ស៊ុនគួន**ជាទីនាហ្មឺនធំ ដើម្បីជាពួកក្រុមរបស់យើង បម្រុងទុកឲ្យចាំស្កាត់ទ័ព**ឡៅពី**។ ព្រះចៅ**វុយអេង**យល់ឃើញត្រូវ ទើបតែងត្រាតាំង**ស៊ុនគួន**ចៅហ្វាយស្រុកកេងជីវ ហើយចាត់បម្រើឲ្យនាំត្រាតាំងចេញទៅប្រគល់ស្រុកកេងជីវឲ្យ**ស៊ុនគួន**។

ចំណែកខ្លួន**ចូឆូ** រោគបណ្ដាលកាន់តែខ្លាំងឡើង ក្នុងថ្ងៃមួយនោះ **ចូឆូ**យល់សប្តិឃើញថា សេះបីស៊ីស្មៅក្នុងរោងជាមួយគ្នា លុះព្រឹកឡើង ក៏ពណ៌នាយល់សប្តិនោះឲ្យទីប្រឹក្សាទាំងពួងស្ដាប់ ហើយថា កាលគ្រា**ម៉ាថេង, ម៉ាហ៊ីវ, ម៉ាឆៀត**បីនាក់អាពុកនិងកូនគិតប្រទូសរ៉ាយយើង យើងក៏យល់សប្តិឃើញយ៉ាងនេះដែរ ហើយយើងបានកម្ចាត់ចេញអស់ហើយ ឥឡូវយល់សប្តិឃើញដូច្នេះទៀត តើនឹងអាក្រក់ល្អប្រការម្ដេច? **កាសៀង**ទូលថា ទូលបង្គំពិគ្រោះឃើញលក្ខណៈយល់សប្តិនេះល្អណាស់ មុខជាទ្រង់នឹងមានបុណ្យឡើងទៀត ទ្រង់កុំព្រួយវិតក្កពេកឡើយ។ **ចូឆូ**ឮដូច្នោះ ក៏គ្មានសេចក្ដីពិភាល់សង្ស័យសោះ។

លុះថ្ងៃមួយនោះ ពេលកណ្ដាលយប់ **ចូឆូ**ឈឺក្បាលណាស់ ចេះតែក្ដៅក្រហល់ក្រហាយដេកមិនលក់សោះ លុះដល់ពេលយាមបីក៏ក្រោកចេញទៅអង្គុយនៅលើកៅអីខាងល្វែងក្រៅ បានឮសំឡេងបីដូចជាគេហែកព្រៃ បែរក្រឡេកមើលទៅស្រាប់តែឃើញព្រះនាង**ហុកហៅ** និងព្រះរាជឱរសទាំងពីរ ហើយនិង**ហុកអ៊ួន**បិតាព្រះនាង**ហុកហៅ** នូវ**តាំងស៊ិន** នាង**តាំងគុយហ៊ុយ** នូវអស់ស្ម័គ្របក្សពួកប្រហែលម្ភៃនាក់ មានឈាមហូរប្រឡាក់ក្រហមពេញអស់ទាំងខ្លួនឈរនៅលើអាកាសហើយថា **ចូឆូ**អើយ! អ្នកឯងយកអាយុជីវិតមកឲ្យយើងវិញ។ **ចូឆូ**ក៏កន្ត្រាក់គ្រប៊ីកាប់ទៅត្រូវ

មាត់ទ្វារ ហើយក៏ឲ្យក្រវល់ក្រវាយខ្លាំងណាស់ កម្លាំងក៏អស់ដួលចុះក្នុងទីនោះ។ បណ្តាមនុស្សម្នាដែលបម្រើថែទាំក៏នាំគ្នាគ្រាប់លើក**ចូឆ្វូ**ទៅឲ្យនៅក្នុងដំណាក់ដទៃ។

លុះនៅមកក្នុងថ្ងៃមួយនោះ នៅកណ្តាលយប់ **ចូឆ្វូ**ដេកមិនលក់សោះ ចេះតែឮសំឡេងខ្មោចបិសាចទាំងស្រីទាំងប្រុស ស្រែកយំឮទ្រហឹងអឺងកងទាល់តែភ្លឺ លុះព្រឹកឡើង **ចូឆ្វូ**ឲ្យប្រជុំនាហ្មឺនមុខមន្ត្រីទាំងពួងមកព្រមគ្នាហើយ និយាយថា យើងបានធ្វើសឹកសង្គ្រាមជាយូរណាស់ តាំងពីសាមសិបឆ្នាំមកហើយ មិនដែលបានឮសំឡេងខ្មោចបិសាចមកស្រែកយំឲ្យប្រាកដដូច្នេះឡើយ វេលានេះមានខ្មោចបិសាចមកលេងបន្លាច ស្រែកយំឮទ្រហឹងអឺងកងជាចម្លែកពេកណាស់ តើនឹងមានហេតុភេទដូចម្តេច?

ឯនាហ្មឺនទាំងពួងក៏ទូលថា សូមឲ្យទ្រង់រកគ្រូហ្មដឹងខ្មោចបិសាចមកសែនពលិការតាមរបៀបបុរាណ មិនយូរប៉ុន្មានគង់នឹងបាត់។ **ចូឆ្វូ**ដកដង្ហើមធំ ហើយថាបុរាណបាននិយាយទុកមកថា កម្មអកុសលមកដល់ខ្លួនហើយ ទោះនឹងចេះដោះស្រាយប្រការម្តេចក៏មិនផុតពីសេចក្តីស្លាប់បាន ឥឡូវបើកម្មមកដល់ហើយ ត្រូវស្លាប់ក៏គ្មាននរណានឹងជួយបាន។ **ចូឆ្វូ**ក៏មិនបានរៀបសែនខ្មោច។ រំលងមកក្នុងថ្ងៃមួយនោះ រោគក៏កាន់តែកម្រើកឡើងធ្ងន់ជាងដើម ចេះតែល្ងើងល្ងើយទន់ទៅៗ ទើបឲ្យហៅ**ហែហ្ស៊ូទុន**ចូលមក។

ឯ**ហែហ្ស៊ូទុន**មកដល់ទ្វារវាំង ក្រឡេកទៅឃើញព្រះនាង**ហុកហៅ** នាង**តាំងគុយហ៊ុយ** និងព្រះរាជបុត្រទាំងពីរ ហើយនឹង**ហុកអ៊្វិន, តាំងស៊ិន** នូវស្ន័គ្របក្សពួកឈរពីមុខលងបន្លាចជាខ្មោចស្រស់ៗ **ហែហ្ស៊ូទុន**ក៏ដួលសន្លប់នៅទីនោះ ពួកបាវព្រាវក៏នាំគ្នាគ្រាប់លើកទៅឯផ្ទះវិញ **ហែហ្ស៊ូទុន**ក៏ចាប់ជំងឺឈឺចាប់ព្រោះបិសាច។ **ចូឆ្វូ**ក៏ឲ្យហៅ**ចូហង, តាន់គុយ, កាសៀង, សុម៉ាអ៊ី**ឲ្យចូលទៅដល់គ្រែដំណេកខាងក្នុង

ទើបនិយាយផ្ដាំផ្ញើបុត្រភរិយា និងស្រុកទេស ការរាជការ ទឹកដី ឲ្យបណ្ដាមុខមន្ត្រីធំទាំងបួននាក់នោះ។ មន្ត្រីទាំងនោះក៏ទូលថា ព្រះរោគនេះមិនជាទម្ងន់ប៉ុន្មានទេ គង់តែមើលទៅជាវិញ។

**ចូឆូ**ថា យើងបានធ្វើការរណរង្គសង្គ្រាមលើសជាងសាមសិបឆ្នាំហើយ សត្រូវទាំងប៉ុន្មានយើងក៏បានបង្ក្រាបរាបទាបអស់ហើយ ផែនដីសព្វថ្ងៃក៏បានសេចក្ដីសុខក្សេមក្សាន្តទាំងអស់ ឃើញនៅចន្លោះតែស្រុកកាំងតាំងនិងស្រុកសែឈួន ដែល**ស៊ុនគួន** និង**ឡៅពី**ឈរជាធំ យើងបង្ក្រាបពុំទាន់បាន ឥឡូវជំងឺក្នុងប្រាណក៏កាន់តែធ្ងន់ណាស់ទៅហើយ ដែលនឹងសង្ឃឹមឲ្យបានទៅជាភឿន ធ្វើរាជការសង្គ្រាមតទៅជាមួយគ្នាទៀតពុំបានឡើយ ហេតុនេះយើងសូមផ្ដាំផ្ញើការធុរៈផែនដីនេះ ឲ្យអស់អ្នកទាំងឡាយ ចូរជួយយកចិត្តទុកដាក់ពិភ័ក្ដិរក្សាតាមការផងចុះ កូនប្រុសរបស់យើងឈ្មោះ**ចូង៉ាំង** កើតពីនាង**ឡៅស៊ី** ក៏ទទួលអនិច្ចកម្មក្នុងស្រុកអ៊ួនសៀទៅហើយ នៅតែកូនបួននាក់ ដែលកើតពីនាង**ពៀនស៊ី** ឈ្មោះ**ចូភី១, ចូចៀង១, ចូស៊ិត១, ចូហ៊ឹម១** យើងព្រួយវិតក្កណាស់នឹង**ចូស៊ិត**នោះ ព្រោះកូនមួយនេះសម្ដីមិនមាំទាំត្រង់ណាសោះ រមែងស្រវឹងស្រា នឹងកាន់ការមិនខ្ជាប់ខ្ជួន បើនឹងតាំងជាជំនួសខ្លួនយើងក៏ពុំបាន ឯ**ចូចៀង**នោះវាជាមនុស្សមានកម្លាំងពលំក៏មែន តែថាមិនសូវចេះគិតការអ្វីសោះ **ចូហ៊ឹម**នោះវាជាមនុស្សលោភទ្រព្យសម្បត្តិ ដែលនឹងឃើញគំនិតមាយាទមធ្យ័តតែ**ចូភី**ជាបុត្រច្បង មានប្រាជ្ញាកន្លងលើសអ្នកឯទៀត ព្រមទាំងសេចក្ដីឆ្លៀវឆ្លាតវាងវៃជាងគេ បើនឹងផ្ទុកផ្ទេរការរាជការឲ្យជាជំនួសខ្លួនយើងក៏បាន បើប្រសិនជាយើងអស់បុណ្យភ័ពវាសនាទៅហើយ អ្នកទាំងឡាយចូរជួយអនុគ្រោះតាំង**ចូភី**នោះឲ្យស្ដីទីរាជការជំនួសយើងទៅចុះ។

ខណៈនោះ **ចូហង, តាន់គុយ, កាសៀង, សុម៉ាអ៊ី**បានឮ**ចូឆ្វ**ថាជាពាក្យបណ្តាំសព្វគ្រប់ដូច្នោះ ក៏នាំគ្នាសោកាល័យសង្រែងសង្រេងវង្វេងស្មារតី មន្ត្រីទាំងនោះក៏នាំគ្នាចេញមកវិញ។ **ចូឆ្វ**ក៏ឲ្យបម្រើយកឈើក្រអូបយ៉ាងល្អឈ្មោះបេងហៀង មកចែកឲ្យភរិយាទាំងពួង ហើយក៏ផ្តាំប្រដៅថា បើយើងអស់បុណ្យវាសនាហើយ នាងរាល់គ្នាចូរឧស្សាហ៍យកចិត្តទុកដាក់ ហ្វឹកហាត់ក្នុងការដេរប៉ាក់គ្រឹប ជារបរចិញ្ចឹមជីវិតទៅថ្ងៃមុខ នាងចូរនាំគ្នាទៅនៅលើប្រាសាទតាំងស៊េតតៃ។

បើកាលណានាងនឹងសែនឲ្យយើងនោះ ត្រូវឲ្យមានភ្លេងមហោរីវង់ពិណពាទ្យឲ្យគ្រប់ទិវារាត្រី ហើយនាងត្រូវបង្គាប់ភ្នាក់ងារមេការឲ្យកសាងទីប៉ាឆា (គឺអនុស្សាវរីយ៍) បញ្ចុះសពយើងនៅទីព្រះលានក្រៅក្រុងឲ្យបានចិតសិបពីរឲ្យដូចៗគ្នា ដើម្បីកុំឲ្យមនុស្សនានាចាំសម្គាល់បានថា សពយើងនោះបញ្ចុះត្រង់ទីកន្លែងណា ពីព្រោះថាខ្លួនយើងនេះ មានមនុស្សវាស្អប់ច្រើនណាស់ ក្រែងវាលបលួចគាស់កាយយកសពនោះទៅចោលអសារឥតការ។ ចូឆ្វផ្តាំសព្វគ្រប់ហើយ ក៏ចេះតែដកដង្ហើមធំយំអណ្តឹតអណ្តក ទឹកភ្នែកក៏ហូរមកជោកអស់ទាំងមុខមាត់ បាត់ស្មារតីដួលចុះ អស់ជីវិតសង្ខារ។ កាល**ចូឆ្វ**ធ្វើកាលកិរិយានោះ ក្នុងខែមាឃអាយុ៦៦ឆ្នាំ ព្រះចៅ**ហៀនតេ**ទៅគង់នៅក្រុងហ៊ូតោបាន២៥ឆ្នាំ (ពុទ្ធសករាជ ៧៦៣)។

អស់បណ្តានាហ្មឺនសព្វមុខមន្ត្រីដឹងថា **ចូឆ្វ**ក្ស័យជីវិតហើយ ក៏នាំគ្នាទួញសោកាល័យ ហើយប្រើបម្រើឲ្យទៅអញ្ជើញបុត្រ**ចូឆ្វ** ដែលនៅឈរខេត្តទាំងបួននាក់ **ចូភី**នៅខេត្តងៀបកុន **ចូចៀង**នៅខេត្តអៀងឡេង **ចូស៊ិត**នៅខេត្តលិមឈី **ចូហ៊ឹម**នៅខេត្តសៀវហ្ស៊ួយ ឲ្យចូលមកឯស្រុកឡុកអៀង នាហ្មឺនទាំងពួងក៏នាំគ្នាតែងការសពជាធំពន្លឹកតាមរបៀបព្រះមហាក្សត្រ ហើយឲ្យរៀបគ្រឿងហែ សែងអញ្ជើញសពទៅទាំងកណ្តាលយប់កណ្តាលថ្ងៃ តម្រង់ទៅស្រុកងៀបកុន។

ឯ**ចូភី**ដឹងថាបិតាអនិច្ចកម្ម ក៏យំបោកខ្លួនប្រាណ ហើយនាំអស់ភ្នាក់ងារទាំងប៉ុន្មានចេញចាកខេត្តមកប្រហែលមួយរយសិន (៤ គ.ម) ក៏ប្រទះនឹងក្បួនហែសពបិតា **ចូភី**ក៏អញ្ជើញសពត្រឡប់ហែចូលទៅក្នុងស្រុកងៀបកុន ហើយឲ្យប៉ាវគងប្រាប់អស់នាហ្មឺនមុខមន្ត្រីនិងបណ្តារាស្ត្រក្នុងស្រុក ឬអាណាខេត្តដែលឡើងទាំងប៉ុន្មាន ឲ្យស្លៀកស ជួតក្បាលសំពត់ស តាមបែបម្ចាស់ផែនដីសុគត។ **ចូភី**និងបណ្តានាហ្មឺនមុខមន្ត្រីទាំងពួង ក៏នាំគ្នាសោកយំដំឱរាទូទាំងទីក្រុង។ ខណៈនោះមានមនុស្សម្នាក់មកស្រែកឃាត់ថា យើងរាល់គ្នាកុំអាលយំសោកថ្វី ឯសេចក្តីស្លាប់នោះមានគ្រប់រូបជាធម្មតា ត្រូវតែគិតការរៀបចំផែនដីសិន។ ពួកទាំងនោះក្រឡេកទៅឃើញ**សុម៉ាហ៊ូ** ក៏ដណ្តឹងសួរទៅវិញថា ហេតុអ្វីបានជាមកឃាត់ហាមដូច្នេះ?

**សុម៉ាហ៊ូ**ឆ្លើយថា ស្រុកទេសរបស់យើងមិនមានម្ចាស់គ្រប់គ្រងរក្សា ត្រូវតែបារម្ភខ្លាចក្រែងមានសត្រូវមកប្រមាថបៀតបៀន ហេតុនេះគួរតែលើក**ចូភី**ឲ្យឡើងស្តីទីរាជការម្ចាស់ស្រុក ទើបបណ្តារាស្ត្រទាំងពួងនឹងមានសង្ឃឹមទុកចិត្ត មិនគិតញញើតខ្លាចសឹកសត្រូវ ៗក៏មិនបាននឹងកម្រើកចិត្តគិតប្រទូសរ៉ាយបាន។ នាហ្មឺនទាំងអស់ឆ្លើយថា គំនិតអ្នកគិតនោះត្រូវណាស់ហើយ តែថាវេលានេះ ព្រះចៅ**ហៀនតេ**នៅមិនទាន់មានព្រះតម្រាស់ត្រាស់ឲ្យតាំងដូច្នេះនៅឡើយ យើងនឹងធ្វើតាមអំពើចិត្តនោះដូចពុំគួរទេ។

**តាន់កៀវ**ឆ្លើយថា ទំនៀមម្ចាស់ស្រុកទិវង្គតផុតទៅ ត្រូវតែឲ្យបុត្រច្បងឡើងនិយាយការជំនួស ថាហើយក៏ចាប់យកព្រះសែងដាវលើកឡើងកាន់ ហើយកាត់ជាយអាវផ្តាច់បន្តិចទម្លាក់ទៅលើផែនដី ដើម្បីបង្ហាញឲ្យមន្ត្រីទាំងពួងមើល ហើយស្រែកថា យើងត្រូវលើក**ចូភី**ឲ្យឡើងជាម្ចាស់ក្នុងពេលនេះ បើនរណារឹងទទឹងនឹងកាត់ក្បាលអ្នកនោះឲ្យដាច់ចុះ ដូចជាកំណាត់អាវដែលកាត់នេះ។ នាហ្មឺនទាំងអស់

ឃើញដូច្នោះ ក៏ភ័យទាំងអស់គ្នា ឥតនរណានឹងឆ្លើយតបថាអ្វី ទទួលពេលនោះ **ហ៊្វហ៊ុម**ជានាហ្មឺនធំ ទើបមកពីក្រុងហ៊្វតោ ដើរចូលទៅក្នុងទីប្រជុំធំ នាហ្មឺនទាំងពួងឃើញហើយ ក៏ឲ្យមានសេចក្តីខ្លាចណាស់ ទើបនាំគ្នាសួរដណ្តឹងថា លោកអញ្ជើញមកដោយកិច្ចការរាជការអ្វី?

**ហ៊្វហ៊ឹម**ឆ្លើយថា វេលានេះអត់ពីព្រះចៅ**វុយអេង**ទៅហើយ យើងបារម្ភក្រែងមានសត្រូវនឹងកម្រើក ហេតុនេះទើបយើងមកដើម្បីនឹងជំនុំគ្នា អញ្ជើញ**ចូភី**ឲ្យឡើងជាស្តេច និយាយរាជការផែនដីជំនួសបិតា។ នាហ្មឺនទាំងពួងឆ្លើយឡើងថា ឥឡូវបានប្រឹក្សាគ្នាហើយថា ត្រូវលើក**ចូភី**ឡើងជាម្ចាស់ តែនៅយល់ទាស់ ព្រោះមិនទាន់មានត្រាតាំងពីព្រះចៅ**ហៀនតេ**រាជទានមក។ **ហ៊្វហ៊ុម**ឆ្លើយថា ខ្ញុំបាទទូលសុំត្រាព្រះចៅ**ហៀនតេ** ហើយទ្រង់ព្រះរាជទានមកនេះ។ ទាំងអស់គ្នាឮដូច្នោះ ក៏មានអំណរណាស់ នាំគ្នាស្រែកហ៊ោកញ្ជៀវលោតរាំទ្រហឹងអឺងកង។ **ហ៊្វហ៊ុម**ក៏យកត្រាតាំងបង្ហាញឲ្យមើលរាល់គ្នា ឯ**ហ៊្វហ៊ឹម**នោះ នៅធ្វើរាជការផ្ទាល់ក្នុងព្រះចៅ**ហៀនតេ** តែជាពួកម៉ាករបស់**ចូឆូ** ចាំស៊ើបការណ៍ល្អអាក្រក់មកប្រាប់**ចូឆូ** លុះដឹងថា**ចូឆូ**ស្លាប់ហើយ នឹងចង់ឲ្យលើក**ចូភី**ជាម្ចាស់ជំនួសឡើង បានជាសរសេរត្រាតាំងសុំឡាយព្រះហស្តកាន់នាំមក។

ឯ**ចូភី**ក៏ឲ្យប្រមូលនាហ្មឺនចូលមកគាល់ មន្ត្រីទាំងពួងក៏ក្រាបថ្វាយបង្គំ ហើយ **ចូភី**ឲ្យរៀបតុលៀងអាហារដល់នាហ្មឺនមុខមន្ត្រីធំតូចទាំងពួង មានបម្រើស៊ើបការណ៍ចូលទៅ **ចូភី**ថា **ចូចៀង**ជាប្អូនទ្រង់ នៅស្រុកទៀងអាន់ លើកកងទ័ពធំ មានទាហានប្រហែលដប់ម៉ឺន។ **ចូភី**ឮដូច្នោះក៏ភ័យណាស់ ប្រឹក្សានឹងនាហ្មឺនទាំងពួងថា អាចោរខូចនេះ កាលដែលនៅជាមួយគ្នាវាជាមនុស្សរឹងរូសមោហោខ្លាំង ហើយ

ព្រហើនកោងកាច មិនខ្លាចក្នុងការចម្បាំងសោះ ដែលវាលើកទ័ពមកគ្រានេះ គឺប្រាថ្នានឹងដណ្តើមយករាជសម្បត្តិជាប្រាកដហើយ។

**គៀគុយ**ទូលថា ទូលបង្គំនឹងសុំចេញទៅនិយាយសម្រួលនឹង**ចូចៀង**មើល ដើម្បីឲ្យដឹងថាមកនេះល្អឬអាក្រក់ប្រការម្តេច។ នាហ្មឺនទាំងពួងឆ្លើយព្រមគ្នាថា អ្នកនិយាយនោះត្រូវណាស់ ទោះបីជាគេមកដោយកាច ក៏អាចសម្រួលបានទៅជាល្អ ដោយនូវវោហាររបស់អ្នក។ **ចូភី**ឮដូច្នោះក៏មានអំណរណាស់ ទើបត្រាស់ប្រើ **គៀគុយ**ឲ្យចេញទៅជួបនឹង**ចូចៀង**។

**ចូចៀង**ក៏សួរថា បិតាយើងមរណភាពទៅហើយ ព្រះចៅ**ហៀនតេ**ទ្រង់តាំងអ្នកឯណានិយាយរាជការជំនួសបិតានោះ? **គៀគុយ**ឆ្លើយថា ប្រពៃណីបុរាណ បើជាភ្នាក់ងារស្រុកនីមួយៗ បើអត់ពីអាពុកទៅ ត្រូវឲ្យកូនប្រុសច្បងដែលនៅក្នុងបន្ទុកនោះ ទទួលកាន់ការស្រុកជំនួសអាពុក បើជាស្តេចផែនដីវិញ ក៏ត្រូវឲ្យព្រះរាជឱរសច្បងឡើងសោយរាជ្យជំនួសព្រះវររាជបិតាដូចគ្នា ដូចជាខ្លួនអ្នកនេះសោត គឺមិនមែនជាបុត្រច្បងទេ ឬជាមន្ត្រីធំក៏មិនមែនផង នឹងត្រូវការអ្វីក៏មកសួររឿងនេះមិនត្រូវការ។

**ចូចៀង**បានឮដូច្នោះ ក៏គិតឃើញថា **គៀគុយ**លើកយកទម្លាប់ទំនៀមមកនិយាយជាត្រឹមត្រូវប្រាកដ ក៏នៅស្ងៀម ហើយនាំ**គៀគុយ**ចូលទៅក្នុងស្រុក លុះទៅដល់ជិតវាំងកំពែងហើយ **គៀគុយ**ក៏សួរថា អ្នកអញ្ជើញមកវេលានេះនឹងដណ្តើមរាជសម្បត្តិ ឬមករៀបចំសពបិតា? **ចូចៀង**ថា ខ្ញុំមកនេះនឹងបានតាំងចិត្តគិតដណ្តើមយកបុណ្យស័ក្តអ្វីក៏ឥតអង្គីមាន មកនេះប្រាថ្នានឹងធ្វើការសែនសពបិតាជាទីតបគុណទេ។ **គៀគុយ**ថា បើពិតដូច្នោះ ហេតុម្តេចបានជាអ្នកនាំទាហានមកច្រើនម្ល៉េះ? **ចូចៀង**ឮដូច្នោះ ក៏យល់ឃើញថា ខ្លួនធ្វើខុសមែន ទើបណ្តេញទាហានទាំងពួងឲ្យ

វិលត្រឡប់ទៅវិញ នៅតែខ្លួនមួយទៅជាមួយនឹង**គៀគុយ** ចូលទៅគាល់បង ៗក៏ចេញមកទទួល ឃើញមុខគ្នាហើយ ក៏កៀកកគ្នាយំសោកទាំងពីរនាក់ លុះអស់សំណោកហើយ **ចូចៀង**ក៏គិតថា ក្រែងបងសង្ស័យក៏និយាយថា ទាហានខ្ញុំបាទដែលមកវេលានេះ ខ្ញុំបាទសូមប្រគល់ជូនបងទាំងអស់ ហើយ**ចូចៀង**ក៏ចូលទៅគំនាប់សពបិតា។ ទើប**ចូភី**ប្រើ**ចូចៀង**ឲ្យទៅឈររក្សាស្រុកអៀនឡេង។ **ចូចៀង**ក៏ធ្វើការគំនាប់សពបិតាហើយក៏លាបងលើកទាហានទៅរក្សាស្រុកអៀនឡេង។ **ចូភី**ឲ្យតាក់តែងគ្រឿងឧបភោគបរិភោគ ឲ្យដូចគ្រឿងរាជបរិភោគព្រះចៅ**ហៀនតេ**គ្រប់ប្រការ។ កាល**ចូភី**បានឡើងជាស្ដេចនោះ ព្រះចៅ**ហៀនតេ**ទៅគង់នៅក្រុងហ៊ូតោបាន២៦ឆ្នាំ (ពុទ្ធសករាជ ៧៦៤)។

**ចូភី**ក៏តាំង**ហ៊្វហ៊ឹម**ជាសេនាបតីស្ដាំ តាំង**កាសៀង**ជាសេនាបតីឆ្វេង តាំង**អងឡង**ជាទីប្រឹក្សាធំ បណ្ដានាហ្មឺនទាំងពួងក៏ឲ្យឡើងទីតាមគុណានុរូប ហើយឲ្យតែងទីបញ្ចុះសពបិតាចិតសិបពីរអន្លើតាមពាក្យបណ្ដាំបិតា ហើយឲ្យចារឹកអក្សរពីមុខអនុស្សាវរីយ៍ថា ទីនេះជាកន្លែងបញ្ចុះសពព្រះចៅ**វុយអេង**តាមក្បែរជញ្ជាំងនោះពីខាងក្រៅឲ្យគួរជារឿង**អ៊ីគឹម**ទៅច្បាំងនឹង**គួនអ៊ូ**នៅតំបន់ស្រុកអ៊ួនសៀ **គួនអ៊ូ**ធ្វើកលឧបាយឲ្យនាំទាហានទៅទប់ទឹកឲ្យលិចកងទ័ព**អ៊ីគឹម** ៗបាក់ទ័ព **គួនអ៊ូ**ចាប់អ៊ីគឹមនិង**បាំងតេក**បាន។ **គួនអ៊ូ**អង្គុយលើទីខ្ពស់ ឲ្យ**អ៊ីគឹម**និង**បាំងតេក**អង្គុយទីទាប **បាំងតេក**ជាជាតិទាហានមិនខ្លាចសេចក្ដីស្លាប់ **អ៊ីគឹម**ខ្លាចស្លាប់ក៏ក្រោកសំពះ**គួនអ៊ូ**លន់តួទោសសុំអាយុជីវិត។ **ចូភី**ឲ្យធ្វើរឿងដូច្នេះ ប្រាថ្នានឹងផ្ចាញ់ផ្ចាល**អ៊ីគឹម**ឲ្យឃើញថា**អ៊ីគឹម**ខ្លាចស្លាប់មិនមែនជាជាតិទាហាន មិនមានសេចក្ដីអៀនខ្មាស បានជាអង្វរគេសុំអាយុជីវិត ក្រោយនោះក៏រស់រួចខ្លួនមកវិញ ដើម្បីមិនឲ្យទាហានទាំងពួងយកយឿងយ៉ាងតាមតទៅ ទើបប្រើឲ្យ**អ៊ីគឹម**ទៅឈររក្សាទីប៉ាឆា (អនុស្សាវរីយ៍) ដែល

បញ្ចុះសព**ចូឆ្វ**នោះ ឯ**អ៊ីគីម**កាលនៅរក្សាសព**ចូឆ្វ** ក៏បានឃើញគំនូររឿងដែលខ្លួនទៅធ្វើចម្បាំង ក៏ថា **ចូភី**ឲ្យផ្ចាញ់ផ្ចាលខ្លួន ក៏មានសេចក្ដីអៀនខ្មាសណាស់ អំណើះតមកក៏ដួលចិត្តទៅជាឈឺស្គមក្រំទ្រូងស្លាប់។

**ហ្វូហ៊ឹម**ក៏ទូល**ចូភី**ថា **ចូចៀង**ជាប្អូនទ្រង់នោះបានមកគំនាប់សពបិតា ហើយលើកយកពលទាហានថ្វាយប្រគល់អស់ តែ**ចូស៊ិត**នៅស្រុកលិមឈី **ចូហ៊ឹម**នៅស្រុកសៀវហ្វ៊ួយ ប្អូនទ្រង់ទាំងពីរនាក់នោះ មិនបានមកជួយរៀបចំសពបិតាសោះ ត្រូវឲ្យទ្រង់បង្គាប់ទៅឲ្យចុះអាជ្ញាតាមទោសានុទោសទើបគួរ។ **ចូភី**យល់ឃើញត្រូវ ទើបចាត់ប្រើនាយទាហានធំឲ្យនាំកងទ័ពទៅចុះអាជ្ញាប្អូនទាំងពីរនាក់។ នាយទាហានទាំងពីរនាក់ ក៏លើកពលចេញទៅតាមបង្គាប់**ចូភី**។ ពួកល្បាត**ចូហ៊ឹម** ក៏នាំព័ត៌មានទៅប្រាប់**ចូហ៊ឹម**ថា បងលោកខឹងនឹងលោក ពីព្រោះមិនទៅគំនាប់សពបិតា ឥឡូវប្រើទាហានឲ្យមកចុះអាជ្ញាធ្វើទោសលោកហើយ។

**ចូហ៊ឹម**បានឮដូច្នោះក៏មានសេចក្ដីភ័យខ្លាំងណាស់ ព្រោះខ្លាចអាជ្ញា ក៏ចងកស្លាប់ទៅ។ នាយទាហានដែលទៅចុះអាជ្ញានោះដឹងថា **ចូហ៊ឹម**ចងកស្លាប់ហើយ ក៏លើកទ័ពត្រឡប់ទៅទូល**ចូភី** ៗក៏បង្គាប់ឲ្យភ្នាក់ងារទៅរៀបចំសព**ចូហ៊ឹម**បញ្ចុះតាមប្រពៃណី ហើយឲ្យចារឹកអក្សរទុកនៅមុខអនុស្សាវរីយ៍ថា ទីបញ្ចុះសពចៅហ្វាយស្រុកសៀវហ្វ៊ួយ។

ឯពួកល្បាតស្រុក**លិមឈី**ដឹងថា មានបម្រើ**ចូភី**ទៅធ្វើទោស**ចូស៊ិត**ដូច្នោះ ក៏នាំព័ត៌មាននោះទៅប្រាប់**ចូស៊ិត** វេលានោះ**ចូស៊ិត**កំពុងអង្គុយផឹកស្រាជាមួយនឹង **តេងងី, តេងអ៊ី**។ **ចូស៊ិត**ដឹងសេចក្ដីហើយ ក៏មិនមានតក់ស្លុតកោតញញើតសោះ។

លុះនាយទាហានជាបម្រើកាន់តម្រាស់ចូលទៅហើយ ក៏អង្គុយព្រងើយបែបមិនដឹងខ្លួន គ្មានគំនាប់គ្មានគួរសមសោះ **តេងអ៊ី**ក៏និយាយនឹងអ្នកកាន់សំបុត្រតម្រាស់

នោះថា កាលគ្រាព្រះចៅ**វុយអេង**គង់ព្រះជន្មនៅ បានតាំងចៅហ្វាយយើងឲ្យធ្វើធំហើយ តែព្រោះមានមនុស្សញុះញង់ ទើបកើតរឿងហេតុមកដល់សព្វថ្ងៃនេះ ឥឡូវព្រះចៅ**វុយអេង**ទើបតែនឹងសុគតមិនទាន់បានប៉ុន្មានថ្ងៃ ស្រាប់តែមានតម្រាស់មកកាត់ទោសបងប្អូនឯង។ **តេងងី**ថា ចៅហ្វាយស្រុកយើងនេះ មានសតិបញ្ញាឆ្លៀវឆ្លាត នឹងរកនរណាស្មើគ្មាន គួរតែបានធ្វើធំជំនួសបិតា តែមានមនុស្សញុះញង់ បានជាមិនបានវិញ។

ឯ**ចូស៊ិត**ក៏បង្គាប់ទាហានឲ្យទាក់បម្រើកាន់សំបុត្រនោះឲ្យជាប់ ហើយឲ្យយកដំបងដេញវាយបម្រើនោះឲ្យចេញទៅ។ បម្រើនោះក៏វិលទៅទូល**ចូភី**តាមដំណើរ។ **ចូភី**ខឹងណាស់ ទើបប្រើ**ខៅធូ**ឲ្យនាំទាហានបីពាន់ លើកប្រញាប់ទៅដល់ស្រុកលិមឈី។ ឯពួកទាហានដែលយាមទ្វារស្រុកលិមឈីមិនព្រមបើកទ្វារឲ្យ**ខៅធូ**ចូលទៅ **ខៅធូ**ក៏សម្លាប់ទាហានយាមទ្វារនោះស្លាប់ លើកកងទ័ពចូលទៅដល់លំនៅ**ចូស៊ិត** ឃើញ**ចូស៊ិត**និង**តេងងី, តេងអ៊ី**កំពុងផឹកស្រាស្រវឹងដេកទាំងអស់គ្នា **ខៅធូ**ក៏ឲ្យទាហានចាប់ចងទាំងខ្លួនដាក់លើរទេះទាំងបីនាក់ ហើយបង្គាប់ទាហានឲ្យចាប់យកភរិយាបុត្របាវព្រាវក្នុងផ្ទះ**ចូស៊ិត**។ លុះទៅដល់ស្រុកងៀបកុនហើយ ក៏នាំខ្លួន**ចូស៊ិត**និង**តេងងី, តេងអ៊ី** ចូលទៅថ្វាយ**ចូភី** ៗក៏បង្គាប់ឲ្យយកខ្លួន**តេងងី, តេងអ៊ី**ទៅប្រហារជីវិតបង់ ហើយឲ្យយកខ្លួន**ចូស៊ិត**ទៅដាក់គុកទុក។ មាតា**ចូភី**ដឹងដំណឹងថា**ចូហ៊ឹម**ចងកស្លាប់ទៅហើយ ឥឡូវ**ចូភី**ចាប់ចងខ្លួន**ចូស៊ិត**មកសម្លាប់ទាំងស្ម័គ្របក្សពួកចេញទៀត ឯខ្លួន**ចូស៊ិត**ឲ្យដាក់គុកទុកដូច្នោះ មាតាក៏សោកាពិលាបអាណិតកូនណាស់ ហើយឲ្យហៅ**ចូភី**ចូលទៅ។ **ចូភី**ក៏ក្រាបសំពះមាតា ៗទូញយំអង្វរកូនសុំទោសថា ប្អូនប្រុសរបស់ចៅម្នាក់នេះ រមែងចូលចិត្តផឹកស្រា វាអួតថាខ្លួនវាល្អត្រឹមត្រូវ វេលានេះជីវិតម្តាយនៅរស់ នៅឲ្យកូនយល់មុខម្តាយម្តងចុះ ព្រោះវាជាប្អូន

ប្រុសរួមឧទរជាមួយគ្នានឹងកូន ៗកុំសម្លាប់វាឡើយ បើទៅទុកជីវិតវាហើយ ទោះបីម៉ែស្លាប់ក៏ឆ្អែតភ្នែកជិតទៅបាន។

**ចូភី**ជម្រាបមាតាថា ប្អូនខ្ញុំបាទនេះ វាជាអ្នកឆ្លៀវឆ្លាតណាស់ ខ្ញុំបាទក៏មានចិត្តស្រឡាញ់វាប្រាកដ ដែលខ្ញុំបាទធ្វើទោសវាយ៉ាងនេះប្រយោជន៍ឲ្យរាងចាល កុំឲ្យវាធ្វើអាក្រក់ទៅមុខទៀត ខ្ញុំបាទមិនមែនចង់សម្លាប់វាទេ អ្នកម្តាយកុំព្រួយបារម្ភឡើយ។ មាតាឮកូនថាដូច្នោះហើយ ក៏មានអំណរណាស់ ត្រឡប់ចូលទៅក្នុងវិញ។ **ចូភី**ក៏ត្រឡប់ទៅកាន់ទីនិយាយការ ហើយឲ្យយកខ្លួន**ចូស៊ិត**ចេញទៅសួរ **ហ៊្លួហ៊ឹម**ក៏ទូល**ចូភី**ថា មាតាទ្រង់បានសុំទោស**ចូស៊ិត**ឬ? **ចូភី**ប្រាប់ថា មាតាខ្ញុំសូមទោស**ចូស៊ិត**ខ្ញុំលើកជូនទៅហើយ។ **ហ៊្លួហ៊ឹម**ថា **ចូស៊ិត**នោះជាមនុស្សប៉ិនប្រសប់ណាស់ បើនឹងទុកជីវិតនៅមិនបានទេ ក្រែងយូរទៅនឹងកើតអន្តរាយ។ **ចូភី**ថា នឹងទទឹងប្រសាសន៍មាតាម្តេចបាន។ **ហ៊្លួហ៊ឹម**ថា ទូលបង្គំបានឮគេនិយាយល្បីថា **ចូស៊ិត**នេះចេះតែងឃ្លោងចំណាប់ណាស់ សូមទ្រង់ឲ្យហៅខ្លួនមកតែងឃ្លោងល្បងមើល បើចេះល្អមែនក៏មិនគួរនឹងសម្លាប់ទេ។ **ចូភី**ក៏ឲ្យហៅខ្លួន**ចូស៊ិត**ចូលមក **ចូស៊ិត**ភ័យណាស់ ចូលទៅដល់ហើយ ក៏ក្រាបសំពះបងអង្វរសុំទោស។

**ចូភី**ថា បងនិងចៅឯងជាបងប្អូននឹងគ្នាពោះមួយ ឥឡូវបងបានជាម្ចាស់ផែនដីហើយ គឺជំនួសបិតាយើង បណ្តានាហ្មឺនមុខមន្ត្រីធំតូច ក៏កោតខ្លាចបងទាំងអស់ ហេតុអ្វីចៅឯងមិនក្រែងខ្លាចយើងបន្តិចសោះ កាលបិតានៅរស់ តែងប្រើចៅឲ្យតែងឃ្លោងស្តាប់ បងនៅសង្ស័យថា ក្រែងអ្នកដទៃធ្វើឲ្យចៅឯងទេដឹង? បើធ្វើបានមែនពិត ត្រូវដើរចេញទៅប្រាំពីរជំហាន ហើយថាពាក្យឃ្លោងឲ្យបានសេចក្តីឲ្យបងស្តាប់ល្បងមើល ត្រូវពណ៌នាពីយើងបងប្អូន តែត្រូវយកសេចក្តីដទៃមកប្រៀបក្នុងបងប្អូនយើង កុំឲ្យចេញឈ្មោះបងប្អូន បើធ្វើបាន បងនឹងលើកទោស

ចោល បើធ្វើមិនបាន បងនឹងចុះទោសប្រហារជីវិត។ **ចូស៊ិត**ថា សូមទ្រង់ឲ្យហាមកុំឲ្យឮមាត់មនុស្សទាំងពួងនិយាយគ្នា រួចចាំស្ដាប់ចុះ ហើយដើរគិតថាពាក្យឃ្លោងនោះថាឲ្យល្អមតែប្រាំពីរជំហានឲ្យចប់សេចក្ដី។ ក្នុងសេចក្ដីនោះថា៖

“នឹងលីងសណ្ដែកនៅក្នុងឆ្នាំង ត្រូវដុតភ្លើងខ្លាំងតាំងឲ្យសុស
យកទងសណ្ដែកដុតធ្វើឧស គ្រាប់លីងឆ្អិនសុសព្រោះទងវា។
ដើម ទង និង ឫសដុះជាគ្រាប់ កើតជាប់ជាមួយដោយពូជធារ
ភ្លើងឆេះព្រោះទងផងផ្ដុំគ្នា ធ្វើឲ្យគ្រាប់វាឆ្អិនខ្លោចទៅ”។

ចូភីបានស្ដាប់ឃ្លោងដូច្នោះ ក៏នឹករឭកដល់សេចក្ដីស្រឡាញ់បងប្អូន ដែលជាប់ជាតិលោហិតជាមួយគ្នា ឲ្យបង្កើតសេចក្ដីខ្សឹកខ្សួលអាណិតមេត្តា ក៏សោកាពិលាប។ មាតាក៏ទទួលដើរមកឮ ទើបមកនិយាយថា ចៅជាបងគេ ហេតុម្ដេចមកធ្វើញាំញី ឲ្យប្អូនបានសេចក្ដីទុក្ខលំបាកក្ដៅក្រហាយដូច្នេះ? **ចូភី**បានឮមាតាថាដូច្នោះ ក៏ក្រោកឡើងគំនាប់ហើយជម្រាបថា នេះឯងជាទំនៀមផែនដីនៃអ្នកធំ បើឃើញថា អ្នកណាធ្វើខុសហើយ ក៏ត្រូវតែធ្វើទោសតាមទោសានុទោស បើមានសេចក្ដីឃោគយល់ត្រាប្រណី ច្បាប់ផែនដីក៏នឹងសាបរលាបខុសអំពីបុរាណរាជប្រវេណីទៅ ហើយ**ចូភី**ចាត់ឲ្យចូស៊ិតទៅឈររក្សាស្រុកអានហៀង ជាចុងស្រុកឆ្ងាយពីទីក្រុងចេញទៅ **ចូស៊ិត**ក៏ព្រមទទួលបង្គាប់ គំនាប់លាចេញទៅនៅអានហៀង ឯ**ចូភី**ក៏តម្កើងយសខ្ពស់លើសជាងបិតា ប្រើអាការសង្កត់សង្កិនព្រះចៅ**ហៀនតេ** លើសជាងអំណាច**ចូឆូ**មួយសាទៅទៀត។ សម័យនោះមានមនុស្សដែលស៊ើបការណ៍ នាំយកអាថ៌ព័ត៌មានទៅទូលព្រះចៅ**ឡៅពី**ឯស្រុកសែឈួន។

ព្រះចៅ**ឡៅពី**លុះទ្រង់ជ្រាបនូវព្រឹត្តិការណ៍សព្វប្រការដូច្នោះ ក៏ព្រួយព្រះទ័យណាស់ ត្រាស់ឲ្យប្រជុំអស់នាហ្មឺនមុខមន្ត្រី ដែលជាទីប្រឹក្សាទាំងពួងមកព្រមហើយ

ថា **ចូឆ្វ**ស្តាប់ទៅ ឥឡូវបាន**ចូភី**ជាកូនឈរនិយាយការជំនួស ហើយចេះតែសង្កត់សង្កិនព្រះចៅ**ហៀនតេ** លើសជាង**ចូឆ្វ**ទៅទៀត ឯចំណែកខាង**ស៊ុនគួន**ក៏បន្ទាបខ្លួនទៅចំណុះចុះចូលធ្វើជាខ្ញុំ**ចូភី**ហើយ វេលានេះ យើងគិតនឹងចង់លើកទ័ពទៅច្បាំងយកស្រុកកាំងតាំង សងសឹក**គួនអ៊ូ**ឲ្យបាន រួចសឹមទន្ទ្រានលើកទៅវាយកម្ចាត់អាសត្រូវរាជសម្បត្តិក្នុងដែនដីទាំងអម្បាលនេះ ឲ្យរាបទាបឲ្យបានទៀត។ **លៀវហ្វ៊ី**បានឮដូច្នោះក៏យំ ហើយទូលថា **គួនអ៊ូ, គួនប៉េង**ស្លាប់បង់គ្រានេះ ក៏ព្រោះតែ**ឡៅហង** និង**បេងតាត់** មិនលើកទ័ពទៅជួយ ឯពីរនាក់នេះមានទោសដល់ស្លាប់ គួរតែទ្រង់នឹងសម្លាប់ចេញទើបត្រូវ។ ព្រះចៅ**ឡៅពី**យល់ឃើញត្រូវ ក៏ឲ្យទៅយកខ្លួន**ឡៅហង** និង**បេងតាត់**មកដើម្បីនឹងសម្លាប់ចេញ។

**ខុងបេង**ឮដូច្នោះក៏ទូលទាស់ឃាត់ថា សូមឲ្យទ្រង់បង្អង់ឈប់សិនចុះ ព្រោះយើងគិតធ្វើការសង្គ្រាមជាធំណាស់ នឹងស្រួតរូតធ្វើការប៉ុណ្ណោះក្រែង**ឡៅហង, បេងតាត់**នឹងទៅជាសត្រូវឡើង សូមទ្រង់តាំងឲ្យអ្នកទាំងពីរនេះញែកគ្នាចេញទៅឈររក្សាស្រុកម្នាក់ស្រុកមួយ រួចសឹមយើងធ្វើការជាក្រោយឲ្យបានស្រួល។ ព្រះចៅ**ឡៅពី**ទ្រង់យល់ឃើញត្រូវ ទើបចាត់ឲ្យនាំត្រាតាំងទៅតាំង**ឡៅហង**ជាចៅហ្វាយស្រុកប៊ីតុក តាំង**បេងតាត់**ជាចៅហ្វាយស្រុកឃុាំងយ៉ុង។

ឯ**ផែអៀវ**ជាពួកបក្ស ត្រូវអធ្យាស្រ័យគ្នានឹង**បេងតាត់** កំពុងគាល់ព្រះចៅ**ឡៅពី**នៅទីនោះ លុះឮព្រះរាជតម្រាស់ដូច្នោះ ក៏លបធ្វើសំបុត្រចាត់បម្រើជាសម្ងាត់ទៅប្រាប់**បេងតាត់**ឲ្យដឹងខ្លួន បម្រើក៏កាន់សំបុត្រចេញទៅតាមផ្លូវទក្សិណស្រុកសែឈួន។

**ម៉ាឈៀវ**ទៅគយល្បាតចាប់បានបម្រើរបស់**ផែអៀវ** បានឃើញមានសំបុត្រក៏ស្រាយយកទៅមើល ដឹងសេចក្ដីនោះហើយ **ម៉ាឈៀវ**ក៏ទៅជួបនឹង**ផែអៀវ**ក្នុងផ្ទះ

**ផៃអៀវ**ក៏ឲ្យរៀបតុលៀងអាហារ ផឹកស្រាជោកកាលណា **ម៉ាឈៀវ**ក៏ល្បួងសួរយកការណ៍ថា អ្នកជាមនុស្សមានសតិបញ្ញា ពីដើមមកព្រះចៅ**ឡៅពី**បានជប់លៀងអ្នកច្រើនណាស់ មកដល់សម័យនេះ ខ្ញុំឃើញមិនដូចពីដើម ដូចជាគ្មានសេចក្ដីប្រោសប្រណីអ្វីសោះ។

**ផៃអៀវ**ស្រវឹងស្រាខ្លាំងណាស់ ឆ្លើយថា អា**ឡៅពី**កញ្ចាស់នេះ វាជាមនុស្សត្រឡប់ត្រឡិន មិននឹងនួនត្រង់ណាសោះ បើកាលណាមានឱកាស ខ្ញុំនឹងសងសឹកវាឲ្យបាន។ **ម៉ាឈៀវ**ក្លែងថា ខ្លួនខ្ញុំក៏មានសេចក្ដីគ្នាន់គ្នាញ់ក្នុងចិត្តមកជាយូរណាស់ហើយដែរ។ **ផៃអៀវ**បានឮដូច្នោះ ក៏ឆ្លើយថា បើដូច្នោះ ចូរអ្នកលើកទាហានរបស់អ្នកទៅគិតគ្នានឹង**បេងតាត់** ឲ្យវាយចូលមកចុះ ខ្លួនខ្ញុំនិងទាហានរបស់ខ្ញុំ នឹងចាំរិះគិតធ្វើកលខាងក្នុង មុខជានឹងកើតការដោយស្រួលមិនខាន។ **ម៉ាឈៀវ**ថា អ្នកគិតការយ៉ាងនេះស្រួលណាស់ ចាំថ្ងៃក្រោយយើងនឹងប្រឹក្សាគ្នាទៀត នឹងបានសងសឹកតាមគំនិតយើងគិត។ និយាយគ្នាហើយ **ម៉ាឈៀវ**ក៏លាចេញទៅ ហើយយកមនុស្សបម្រើ**ផៃអៀវ**និងសំបុត្រតាងនោះ ចូលទៅថ្វាយព្រះចៅ**ឡៅពី** ហើយចូលទៅខ្សឹមទូលសេចក្ដីតាមសម្ដីដែល**ផៃអៀវ**និយាយនឹងខ្លួននោះ ថ្វាយព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្ដាប់។ ព្រះចៅ**ឡៅពី**ទ្រង់ខ្ញាល់ខ្លាំងណាស់ ត្រាស់បង្គាប់ឲ្យទៅចាប់ខ្លួន**ផៃអៀវ**មកវាយពិចារណាសួរយកចម្លើយ នោះ**ផៃអៀវ**ក៏ឆ្លើយទទួលតាមស័ត្យ ហើយក៏ត្រាស់បង្គាប់ឲ្យយកខ្លួន**ផៃអៀវ**ទៅដាក់គុក។ ព្រះចៅ**ឡៅពី** ក៏ទ្រង់ប្រឹក្សានឹង**ខុងបេង**ថា **ផៃអៀវ**វាគិតក្បត់នឹងយើងដូច្នេះហើយ បើយើងនឹងចិញ្ចឹមវារក្សាទុកក៏ពុំបាន ឬនឹងគិតប្រការម្ដេច?

**ខុងបេង**ទូលថា អា**ផៃអៀវ**នេះ វាជាមនុស្សព្រើលចម្លួតសោះ បើនឹងចិញ្ចឹមវាទុកក៏ពុំបាន គង់មានពេលទៅថ្ងៃមុខ ១ជាប្រទូសរ៉ាយនឹងយើងវិញពុំខាន។

ព្រះចៅ**ឡៅពី**ក៏ត្រាស់ឲ្យដាក់គុក**ផែអៀវ**ទុកឲ្យស្លាប់ក្នុងគុកនោះ ឯការនោះមិនស្ងាត់ មានមនុស្សនាំដំណឹងទៅប្រាប់**បេងតាត់** ៗដឹងដូច្នោះក៏ភ័យខ្លាំងណាស់ ព្រោះដឹងថាខ្លួនមានទោសខុសមកស្រាប់ផង ថែមទាំងឃើញត្រាតាំងបំបែក**ឡៅហាង**ទៅឈរស្រុកប៊ីគុក ឯខ្លួនឯងក៏ទាល់គំនិត ព្រោះឥតមានទីប្រឹក្សាការសោះ ទើបឲ្យអញ្ជើញ**ស៊ិនតាំ**ជានាយទាហានធំក្នុងស្រុកសុងយ៉ុង ហើយនិង**ស៊ិនងី**ជានាយទាហាននៅស្រុកឡូងហាង ទាំងពីរនាក់នេះជាបងប្អូននឹងគ្នា ត្រូវអធ្យាស្រ័យគ្នានឹង**បេងតាត់** លុះនាយទាហានទាំងពីរមកដល់ហើយ **បេងតាត់**និយាយថា **ហ៊្វិតចេង**និងខ្ញុំបានធ្វើសេចក្តីគាប់ប្រសើរទុកដល់ព្រះចៅ**ឡៅពី**មកពីថ្ងៃមុនច្រើនណាស់ វេលានេះ**ហ៊្វិតចេង**ក៏ស្លាប់ទៅហើយ **ឡៅពី**ភ្លេចអស់សេចក្តីគាប់ប្រសើរនោះ ត្រឡប់គិតប្រទូសរ៉ាយខ្ញុំវិញ ខ្ញុំមិនដឹងនឹងគិតគំនិតយ៉ាងណា ទើបនឹងបានឲ្យរួចពីសេចក្តីស្លាប់នោះបាន។

**ស៊ិនតាំ**ថា ខ្ញុំមានឧបាយមួយមិនឲ្យព្រះចៅ**ឡៅពី**ធ្វើអន្តរាយដល់លោកបានឡើយ។ **បេងតាត់**មានអំណរណាស់ សួរថា ឧបាយរបស់អ្នកនោះគិតប្រការម្តេច? **ស៊ិនតាំ**ថា បងប្អូនខ្ញុំពីរនាក់នេះបានគិតគ្នាទុកជាយូរណាស់មកហើយថា នឹងចូលទៅនៅខាង**ចូភី** បើលោកនឹងចង់រួចពីសេចក្តីស្លាប់ ត្រូវធ្វើសំបុត្រមួយច្បាប់ទៅលាព្រះចៅ**ឡៅពី** អធិប្បាយអំពីគុណ និងទោសឲ្យឃើញហើយ សឹមលោករត់ចេញទៅនៅនឹង**ចូភី** ៗបានលោកហើយ ក៏គង់នឹងជប់លៀងឲ្យបានធ្វើជានាហ្មឺនធំ សឹមយើងពីរនាក់បងប្អូនឹងរត់ទៅតាមក្រោយ។ **បេងតាត់**យល់ឃើញត្រូវ ក៏តែងសំបុត្រមួយច្បាប់សេចក្តីថា ទូលបង្គំ**បេងតាត់** មានសេចក្តីខុសព្រោះមិនបានលើកទ័ពទៅជួយស្រុកកេងជីវ ៗក៏ខូច ស្លាប់ទាំង**គួនអ៊ូ**ទៅទៀត។ បើទ្រង់អត់ទោសទុកអាយុជីវិតទូលបង្គំ នឹងបានធ្វើរាជការកែខ្លួនតទៅ តែឥឡូវទូលបង្គំជាខ្ញុំដឹងថា ទ្រង់មិនប្រោស

ប្រណីឲ្យរួចពីសេចក្ដីស្លាប់ហើយ នឹងទ្រាំនៅក៏ពុំបាន ហេតុនេះទូលបង្គំសូមក្រាបបង្គំលាទៅនៅខាងព្រះចៅ**ចូភី**ហើយ ដែលទូលបង្គំទៅទាំងនេះ នឹងបានប្រែចិត្តទៅគិតប្រទូសរ៉ាយទ្រង់វិញក៏ទេ ទៅដើម្បីតែប្រាថ្នានឹងឲ្យរួចចាកសេចក្ដីស្លាប់ប៉ុណ្ណោះ។ លុះធ្វើរួចហើយ ក៏ឲ្យបម្រើនាំទៅថ្វាយព្រះចៅ**ឡៅពី** ឯចំណែកខ្លួនក៏នាំទាហានហាសិបនាក់រត់ចូលទៅនៅនឹង**ចូភី** តាំងពីពេលអាធ្រាត្រក្នុងថ្ងៃនោះ។

ព្រះចៅ**ឡៅពី**បានទទួលសំបុត្រ ទតឃើញសេចក្ដីសព្វគ្រប់ ក៏ទ្រង់ព្រះក្រោធខ្លាំងណាស់ត្រាស់ថា អាសត្រូវវាគិតក្បត់នឹងអញហើយ ថែមទាំងឲ្យសំបុត្រមកឡកបញ្ឈឺចិត្តឯងទៀត អញនឹងលើកទ័ពទៅតាមចាប់ខ្លួនវាឲ្យបាន។ **ខុងបេង**ទូលទាស់ឃាត់ថា ទ្រង់កុំអាលឲ្យលើកទ័ពទៅ ឲ្យព្រួយលំបាកពលទាហានឡើយ សុំឲ្យមានសំបុត្រទៅដល់**ឡៅហង** ឲ្យលើកទ័ពទៅចាប់**បេងតាត់**វិញស្រួលជាង បើ**ឡៅហង**ចាប់**បេងតាត់**បាន ក៏នាំខ្លួនមកយើង បើចាប់មិនបាន ក៏គង់តែ**ឡៅហង**មករកយើង ៗក៏នឹងចាប់ខ្លួនសម្លាប់ចេញបានដោយងាយណាស់។ ព្រះចៅ**ឡៅពី**យល់ឃើញត្រូវ ក៏ចាត់បម្រើឲ្យនាំព្រះតម្រាស់ទៅដល់**ឡៅហង** ក្នុងសេចក្ដីព្រះតម្រាស់នោះថា **បេងតាត់**ប្រែចិត្តគិតក្បត់រត់ទៅចូល**ចូភី** ឲ្យ**ឡៅហង**លើកកងទ័ពទៅចាប់ខ្លួននាំមកថ្វាយឲ្យខាងតែបាន។

ខណៈនោះ ព្រះចៅ**ចូភី**ចេញនិយាយរាជការផែនដី បណ្ដានាហ្មឺនមុខមន្ត្រីខ្ញុំរាជការ ក៏គង់គល់ត្រៀបត្រា មានបម្រើចូលទៅទូលថា **បេងតាត់**នាយទាហាន**ឡៅពី**ចូលមកសុំធ្វើរាជការថ្វាយ។ **ចូភី**ក៏ឲ្យហៅខ្លួនចូលទៅ ហើយត្រាស់សួរថា ឯងចូលមកនេះ អញយល់ឃើញថា មិនមែនចូលមកដោយត្រង់សុចរិតទេ គឺមកជាកលឧបាយបញ្ឆោតយើង។ **បេងតាត់**ទូលថា ទូលបង្គំជាមនុស្សមានទោស ព្រោះមិនបានលើកទ័ពទៅជួយ**គួនអ៊ូ**ឯស្រុកកេងជីវ ៗក៏ខូច **គួនអ៊ូ**ក៏ស្លាប់ ព្រះចៅ**ឡៅពី**

នឹងសម្លាប់ទូលបង្គំចេញ បានជាទូលបង្គំមានសេចក្ដីភ័យខ្លាច ពុំអាចនឹងនៅបានដោះប្រាណរត់ចូលមកជ្រកក្រោមម្លប់ព្រះបរមពោធិសម្ភារ ជាទីត្រជាក់ ដើម្បីនឹងបានផុតធុរៈពីសេចក្ដីស្លាប់ នឹងបានមកប្រែក្រឡាស់ជាឧបាយ ដោយចិត្តទុច្ចរិតដល់ល្អងធូលីក៏ទេ គឺជាសេចក្ដីពិតត្រង់ប្រាកដណាស់។ ប៉ុន្តែ**ចូភី**ក៏មិនអស់មន្ទិលសង្ស័យ មិនមានសេចក្ដីជឿ។

ឯ**ឡៅហង** បានឃើញព្រះតម្រាស់ព្រះចៅ**ឡៅពី** ក៏ស្រូតលើកទ័ពចំនួនប្រាំម៉ឺនទៅតាម**បេងតាត់**ដល់ស្រុកយ៉ាំងយ៉ុង ទើបឲ្យទាហានទៅស្រែកហៅ**បេងតាត់**ឲ្យចេញមកពីក្នុង មកតស៊ូគ្នា។ ខណៈនោះមានមនុស្សនាំសេចក្ដីទៅទូលព្រះចៅ**ចូភី**នៅចំពោះមុខ**បេងតាត់**ថា **ឡៅហង**បានលើកទ័ពដិតតាមបេងតាត់មកដល់ស្រុកយ៉ាំងយ៉ុង។ **ចូភី**ក៏ត្រាស់នឹង**បេងតាត់**ថា បើអ្នកឯងមានស្វាមីភក្តិត្រង់នឹងយើងដោយសុចរិតពិតមែន ចូរលើកទាហានចេញទៅតច្បាំងនឹង**ឡៅហង** យកក្បាល**ឡៅហង**មកឲ្យយើងចុះ យើងនឹងបានឃើញសេចក្ដីពិតត្រង់របស់អ្នកឯង។ **បេងតាត់**ទូលថា **ឡៅហង**នោះក៏មានទោសខុសដូចទូលបង្គំដែរ មិនត្រូវទៅច្បាំងនឹងគ្នាទេ បើប្រសិនទូលបង្គំចេញទៅប្រាប់ឲ្យដឹងខ្លួនជាមានទោសហើយ ក៏គង់នឹងសរសើរទ្រង់ថា ចេះលើកតម្កើងពួកទាហានដែលមានថ្វីដៃ **ឡៅហង**ក៏អស់សង្ស័យគង់នឹងចូលមកនៅជាខ្ញុំទ្រង់ទៀត។

**ចូភី**ឮដូច្នោះក៏មានអំណរណាស់ ត្រាស់តាំង**បេងតាត់**ជានាយទាហានធំ ឲ្យឈរនៅធ្វើចៅហ្វាយស្រុកអ៊្លួនសៀផង។ គ្រានោះ**ហែហៅសៀង**និង**ស៊ីឡុង** នាយទាហាន**ចូភី** ដែល**ចូភី**ឲ្យទៅនៅស្រុកយាំងយ៉ុង ដើម្បីទៅបញ្ចុះបញ្ចូលមនុស្សក្នុងស្រុកយ៉ាំងយ៉ុង លុះឃើញ**បេងតាត់**ទៅនៅស្រុកយ៉ាំងយ៉ុង **ហែហៅសៀង**និង**ស៊ីឡុង**ក៏ចេញទៅទទួលគំនាប់ដោយបដិសណ្ឋារ ហើយក៏នាំចូលទៅក្នុងស្រុកនោះ ថ្លែង

ពណ៌នាប្រាប់**បេងតាត់**ថា **ឡៅហង**លើកទ័ពមកតាំងបន្ទាយនៅជិតស្រុកឃុំងយ៉ុង ចម្ងាយផ្លូវប្រហែលប្រាំរយសិន (២០ គ.ម) **បេងតាត់**ក៏សរសេរសំបុត្រមួយច្បាប់ ឲ្យបម្រើកាន់ទៅបញ្ចុះបញ្ចូល**ឡៅហង** ៗក៏អានសំបុត្រហើយក៏ខឹងណាស់ថា អាក្បត់វាចង់ធ្វើឲ្យអញខុសជាមួយផង វាជាមនុស្សមិនត្រង់នឹងម្ចាស់ ស៊ីបាយក្រហម ថែមទាំងឲ្យយើងមានសេចក្ដីខុសទៀត ថាហើយក៏ហែកសំបុត្រនោះចោលទៅ ហើយបង្គាប់ឲ្យចាប់ខ្លួនបម្រើដែលកាន់សំបុត្រនោះសម្លាប់បង់។

**បេងតាត់**បានដឹងដូច្នោះខឹងណាស់ ប្រឹក្សានឹង**ហែហៅសៀង**, **ស៊ីឡុង**ថា ពេលព្រឹកស្អែក ចូរអ្នកទាំងពីរលើកទាហានទៅបង្កប់នៅសងខាងផ្លូវ ឯខ្លួនខ្ញុំនឹងលើកទាហានចេញទៅច្បាំងនឹង**ឡៅហង** ហើយនឹងធ្វើជាថយមកតាមផ្លូវនោះ បើ**ឡៅហង**ដេញតាមផ្លូវនោះមក អ្នកទាំងពីរចូរលើកទាហានចេញទៅវាយប្រសព្វគ្នា ចាប់យកខ្លួន**ឡៅហង**ឲ្យបាន។ **ហែហៅសៀង**និង**ស៊ីឡុង**យល់ឃើញត្រូវ ក៏លើកទាហានទៅពួនបង្កប់សងខាងផ្លូវដែលគិតទុកនោះ។

លុះវេលាព្រឹកឡើង **ឡៅហង**លើកទាហានចេញពីបន្ទាយ ឲ្យទាហានចូលទៅស្រែកជេរ**បេងតាត់** ហៅឲ្យចេញមកតស៊ូគ្នា **បេងតាត់**ក៏ជិះសេះកាន់លំពែងចេញមុខទាហាន **ឡៅហង**ក្រឡេកឃើញ ក៏ចង្អុលមុខហើយស្រែកថា អាចោរចិត្តក្បត់ម្ចាស់ ផ្លាស់ស៊ីបាយក្រហម ហេតុម្ដេចបានជាមកលួងលោមអញឲ្យអាក្រក់ទាមឯងទៀត? **បេងតាត់**ស្រែកថា ឯងជាមនុស្សទោស នឹងដល់នូវសេចក្ដីស្លាប់ឆាប់ហើយ ម្ដេចក៏មិនទាន់ដឹងថា សេចក្ដីស្លាប់នោះនឹងមានមកដល់ឡើយដូច្នោះ។ អាចោរដកទង ម្ដេចនៅលើកតម្កើងថាខ្លួនឯងល្អទៅវិញ។ **ឡៅហង**ខឹងណាស់ បំបោលសេះវាំងារចូលទៅប្រយុទ្ធគ្នានឹង**បេងតាត់**បានបីភ្លែង **បេងតាត់**ក៏ធ្វើជារត់ទៅក្រោយ **ឡៅហង**ក៏ដេញបណ្ដោយតាមទៅ បានចម្ងាយប្រហែលពីររយសិន (៨

គ.ម) នោះ**ហៃហៅសៀង** និង**ស៊ីឡុង**ដែលពួនបង្កប់ ក៏លើកទាហានចេញទៅវាយប្រសព្វទាំងសងខាង **បេងតាត់**ក៏ស្ទាក់កាត់ពីម្ខាងចូលមកទៀត។ **ឡៅហាង**ឃើញកងទ័ពវាយផ្ទប់ទាំងបីផ្លូវ នឹងបំពារទៅមិនរួច ក៏នាំទាហានពារទម្លាយរត់ទៅតាមផ្លូវត្រូវលើកស្រុកសុងយ៉ុង។ **បេងតាត់** និង**ហៃហៅសៀង**, **ស៊ីឡុង**ក៏លើកទាហានដេញតាមទៅ។

**ស៊ីឡុង**និយាយថា ឥឡូវកងទ័ព**ឡៅហាង**ខ្ទេចខ្ទីអស់ហើយ បើអ្នកទាំងពីរលើកតាមទៅទៀត ក៏គង់នឹងបានជ័យជម្នះមិនខាន ឯស្រុក**សុងយ៉ុង**ដែល**ឡៅហាង**រត់តម្រង់ទៅនោះ ជាទីមាំមួនណាស់ ក្រែងតែស្រុកហាងឡេង ជាទីកន្លែងមិនសូវមាំមួន ខ្ញុំនឹងសុំលើកទ័ពទៅចាំរក្សាទីនោះ **បេងតាត់**និង**ហៃហៅសៀង**ក៏យល់ឃើញត្រូវ **ស៊ីឡុង**ក៏លើកទាហានតម្រង់ស្រូតទៅនៅដល់ស្រុកហាងឡេង ឯ**ឡៅហាង**នោះលុះរត់ទៅដល់ស្រុកសុងយ៉ុងក្នុងវេលាកណ្តាលយប់ស្ងាត់ ក៏ចូលទៅគោះទ្វារឲ្យអ្នកយាមបើកទទួល។

ខណៈនោះ **ស៊ិនតាំ** ដែលនៅរក្សាស្រុកសុងយ៉ុង ក៏ចូលទៅចំណុះខាង**ចូភី**អស់ហើយ លុះដឹងថា **ឡៅហាង**ទៅហៅឲ្យបើកទ្វារ ក៏ម៉ីម្នាដេញទាហានឲ្យឡើងរក្សាសើនបន្ទាយ ហើយឲ្យវាយទាហានបាញ់ធ្នូចម្រុះទៅត្រូវទាហាន**ឡៅហាង**ស្លាប់ច្រើនណាស់។ **ស៊ិនតាំ**ក៏ឡើងទៅលើសើនពីខាងមុខហើយស្រែកថា យើងស្ម័គ្រនៅចំណុះជាខ្ញុំព្រះចៅ**ឡៅពី**ហើយ។ **ឡៅហាង**ឮដូច្នោះ ក៏រឹតតែខឹងណាស់ គិតនឹងឲ្យទាហានទម្លាយយកស្រុកសុងយ៉ុងឲ្យបានវិញនោះ ស្រាប់តែកងទ័ពកងទ័ព**ហៃហៅសៀង**លើកទៅដល់វាយខ្នប់ពីក្រោយ **ឡៅហាង**ក៏នាំទាហានរត់បណ្តោយតម្រង់ទៅស្រុកហាងឡេង ក្រឡេកទៅឃើញទង់ដោតនៅលើសើន មានអក្សរក្នុងទង់នោះថា ស្រុកនេះជាចំណុះព្រះចៅ**ចូភី**។

**ស៊ិនង៉** ដែលនៅរក្សាស្រុកនោះ ឡើងឈរលើសើនគ្រវីទង់ជ័យសញ្ញាហៅទាហានឲ្យទៅជម្រាប**ស៊ីឡុង** ។ក៏លើកទាហានទៅចោមវាយកងទ័ព**ឡៅហាង** ។ តទល់ពុំបាន ក៏នាំទាហានរត់ទៅ **ស៊ីឡុង**ក៏បរពលដេញសំដៅទៅក្រៅ កាប់សម្លាប់ទាហាន**ឡៅហាង**ស្លាប់ច្រើនណាស់ **ឡៅហាង**ក៏នាំទាហានដែលសល់ខ្លះរត់ទៅដល់ស្រុកសែឈ្ងួន ហើយចូលទៅគាល់ព្រះចៅ**ឡៅពី** ក្រាបវន្ទាហើយក៏យំទូលរៀបរាប់តាមដំណើរការណ៍ ដែលបានលើកទ័ពទៅចាប់**បេងតាត់**តាំងពីដើមដល់ចុងអស់សេចក្តី។

ព្រះចៅ**ឡៅពី**ទ្រង់ខ្ញាល់ខ្លាំងណាស់ ស្រែកជេរថា អាកូនចោលម្សៀត កើតមកឲ្យបង់ជាតិ នៅមុខឆ្កែបែរមករកអញធ្វើអ្វី? **ឡៅហាង**ទូលថា កាលពីគ្រា**គួនអ៊ូ**ឲ្យមានសំបុត្រមកសុំកងទ័ពទៅជួយស្រុកកេងជីវនោះ ទូលព្រះបង្គំបានឲ្យបម្រុងពលទាហានត្រៀមទុកជាស្រេចហើយ ប្រុងនឹងលើកទៅជួយជាប្រាកដ តែ**បេងតាត់**ឃាត់ហាមមិនព្រមឲ្យលើកទៅ បានជាថ្លោះធ្លោយដោយហេតុនោះ។

ព្រះចៅ**ឡៅពី**ត្រាស់ថា អញខាតកម្លាំងបង់ចិត្ត ដែលអាណិតស្រឡាញ់ឯងប្រឹងស្វែងចិញ្ចឹមឯងមក ហាក់ដូចជាគេយកដុំឈើឬដុំដីមករក្សា វាគ្មានដឹងការខុសត្រូវបន្តិចសោះ គួរអ្វីវាទៅជឿស្តាប់ពាក្យសម្តីអា**បេងតាត់**នោះ វាជាសត្រូវក្បត់ បានជាវាមិនព្រមឲ្យលើកកងទ័ពទៅជួយ**គួនអ៊ូ**ជាប្អូនអញ ឲ្យចាញ់ស្លាប់អសារ។ ត្រាស់ហើយ ក៏បង្គាប់ឲ្យយកខ្លួន**ឡៅហាង**ទៅប្រហារជីវិត។ កាលព្រះចៅ**ឡៅពី**ឲ្យសម្លាប់**ឡៅហាង**នោះ លុះក្រោយក៏ទ្រង់នឹករឭកឃើញសម្តីដែល**ឡៅហាង**ទូលរៀបរាប់ថា **បេងតាត់**មានសំបុត្រមកបញ្ចុះបញ្ចូល**ឡៅហាង** ។ហែកសំបុត្រចោល ហើយសម្លាប់អ្នកកាន់សំបុត្រនោះចេញ ក៏ឃើញថាជាចិត្ត**ឡៅហាង**នោះមិញ ជាមនុស្សត្រង់សុចរិត នឹងព្រះអង្គប្រាកដណាស់ ទ្រង់នឹកឃើញច្បាស់ ក៏គិតអាណិតស្តាយ

ពន់ប្រមាណ មានព្រះទ័យអាល័យស្តាយទៅដល់**គួនអ៊ូ**ទៀត ក៏រឹតតែចង្អៀតព្រះទ័យសព្វគ្រប់ ព្រះរោគក៏បណ្តាលឲ្យឈឺខ្លាំងខ្ទប់សព្វមំសា។ ការដែលគិតនឹងលើកពលយោធាទៅច្បាំង ក៏បង្អង់ខានវិញ។

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លក៖*

www.khmerliterature.wordpress.com

# **រឿង សាមកុក**

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៦៣

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូភី**លើកខ្លួនជាព្រះចៅ**វុយអេង** ជំនួស**ចូឆូ**ជាបិតា **ហែហ៊្ស៊ូទុន**ឈឺស្លាប់រហូតទៅដល់**ហាមកៀង**និង**ទៀវកាត់** លបកាត់ក្បាល**តៀវហ៊ុយ**ស្លាប់នាំរត់ទៅស្រុកកាំងតាំង។)*

**ឯចូភី**នោះ លុះបានឡើងយសជាស្តេចសម្រេចរាជការហើយ ក៏តាំងខ្លួនជាព្រះចៅ**វុយអេង**ជំនួសបិតា បើករង្វាន់បំណាច់ឲ្យខុំរាជការទាំងឡាយតាមគុណានុរូបនិងបណ្តាស័ក្តិ ហើយឲ្យកេណ្ឌទាហានបាន៣០ម៉ឺន លើកចេញអំពីទីក្រុងតម្រង់ទៅស្រុកចៀវក្ងួន ក្នុងដែនខេត្តផៃកុក ដែលធ្លាប់នៅពីដើមនោះ ប្រយោជន៍នឹងក្រសាលឲ្យសប្បាយផង លុះលើកទៅដល់ស្រុកផៃកុក ក៏សម្តែងយសដ៏ខ្ពង់ខ្ពស់អស្ចារ្យ។

អស់បណ្តាអ្នកស្រុកទាំងពួង ក៏មកប្រជុំគាល់ដោយសេចក្តីត្រេកអរសាទរសប្បាយណាស់ ខ្លះក៏តែងគ្រឿងបណ្ណាការមកថ្វាយដោយច្រើន ក្នុងខណៈនោះមានមនុស្សបម្រើស៊ើបការណ៍នាំអាថ៌សេចក្តី ទៅក្រាបទូលព្រះចៅ**វុយអេង**ថា **ហែហ៊្ស៊ូទុន**មានជំងឺធ្ងន់ណាស់ មើលទៅឃើញច្បាស់ជាជំងឺនោះ គង់នឹងស្លាប់ជាប្រាកដ។ **វុយអេង**ឮដូច្នោះក៏ស្លុតព្រះទ័យដោយសេចក្តីអាល័យរាប់អាន ស្តាយ**ហែហ៊្ស៊ូទុន**ណាស់ ក៏លើកទ័ពវិលត្រឡប់មកវិញ លុះមកដល់ស្រុកឡៀបកុនវេលាណា **ហែហ៊្ស៊ូទុន**ក៏ធ្វើកាលកិរិយា។ **វុយអេង**ក៏តាក់តែងរៀបសំស្ការរសពតាមទម្លាប់ប្រពៃណី។

កាល**ចូភី**ឡើងជាទី**វុយអេង**ជួសបិតាជាអំឡុងតមកប្រហែលប្រាំមួយឆ្នាំ ក្នុងខែភទ្របទ មានហង្សហើរទៅស្រែកយំនៅត្រង់ស្រុកសេងសឹក ហើយនឹងមានរាជសីហ៍ចូលមកដើរត្រាច់ក្នុងស្រុកលិមឆោ រួចត្រឡប់បាត់ទៅវិញ។ មហាជនទាំងឡាយក៏នាំយកហេតុនោះទៅទូល**វុយអេង** រួចអំពីនោះមាន មករ ពណ៌លឿងមានសក្តានុភាពណាស់ មកសម្តែងឫទ្ធិ អណ្តែតនៅលើអាកាសជាអស្ចារ្យធំ មហាជនទាំងពួងក៏ក្រឡេកឃើញ **ចូភី**ក៏ឃើញច្បាស់ទាំងអស់គ្នា។

**វុយអេង**ឃើញហេតុទាំងបីប្រការដូច្នេះ ជាអស្ចារ្យណាស់ ទើបឲ្យហៅ **លីតុក, ខៅជី** ដែលជាមន្ត្រីធំ ហើយជាចាស់ទុំជាងគេនូវអស់នាហ្មឺនឯទៀតមកប្រជុំប្រឹក្សា ហើយត្រាស់សួរថា អាភេទទាំងបីប្រការនេះ ឃើញចម្លែកអស្ចារ្យនៅក្នុងស្រុកយើង តើនឹងល្អ ឬអាក្រក់យ៉ាងណា? **លីតុក** និង**ខៅជី**ក្រាបទូលថា កើតអស្ចារ្យប្រាកដក្នុងស្រុកយើងដូច្នោះ ជាមង្គលប្រសើរណាស់ គឺនឹងឲ្យចម្រើនសួស្តីមង្គលដល់ទ្រង់ នឹងឲ្យបានគង់ព្រះកិត្តិយសជាទី**វុយអេង**មិនតែប៉ុណ្ណោះទេ ក្នុងបច្ចុប្បន្នជាតិនេះ បុណ្យនឹងចម្រើនឲ្យលឿនទីឡើងទៀត គឺទ្រង់នឹងបានឡើងសោយរាជសម្បត្តិជាមហាក្សត្រគ្រប់គ្រងផែនដីនេះ ទើបបណ្តាលចៃដន្យនៃមហាជនទាំងប្រុសស្រីឲ្យមានសេចក្តីស្នេហាស្រឡាញ់ ព្រះបរមពោធិសម្ភារបារមី ចង់ឲ្យទ្រង់ឡើងជាម្ចាស់ផែនដីតទៅ។

ខណៈនោះ អស់នាហ្មឺនមុខមន្ត្រីធំតូចក៏ប្រឹក្សាយល់ព្រមគ្នាថា យើងត្រូវក្រាបទូលព្រះចៅ**ហៀនតេ** សុំឲ្យប្រគល់រាជសម្បត្តិថ្វាយមកព្រះចៅ**ចូភី** លុះប្រឹក្សាយល់ព្រម ទើបចាត់ឲ្យ**ហ្ស៊ូហ៊ីម, អងឡុង, ស៊ិនលៀក**, កាសៀង, **កាត់កៀវ, តាន់កុន, តេងកែ**នូវអស់មន្ត្រីធំៗ ហើយនិងនាយទាហានប្រមាណសែសិបនាក់ នាំគ្នាចូលទៅក្រុងហ៊ូតោ ហើយក៏ចូលទៅគាល់ព្រះចៅ**ហៀនតេ**។ **ហ្ស៊ូហ៊ីម**ទូលថា **ចូភី**ជាទី

**វុយអេង**ជំនួស**ចូវឆូ**នោះ មានបុណ្យសម្ភារបារមីច្រើនណាស់ មានទាំងសតិបញ្ញាជ្រៅជ្រះឈ្លាសវៃ មានព្រះទ័យអាណិតអាណាប្រជានុរាស្ត្រទូទាំងផែនដី រាស្ត្រទាំងប្រុសស្រីក៏បានសេចក្ដីសុខក្សេមក្សាន្ត នាហ្មឺនមុខមន្ត្រីទាំងប៉ុន្មានក៏ប្រឹក្សាយល់ព្រមគ្នាទាំងនាយទាហាន និងរាស្ត្រប្រជា ឃើញថា វេលានេះជាឱកាសដ៏សមគួរ ដែលនឹងឧបត្ថម្ភទំនុកបម្រុងផែនដីបានចម្រើនទៅ សូមព្រះអង្គទ្រង់ប្រគល់នូវរាជសម្បត្តិខត្តិយរាជឱ្យ**ចូវភី**ពេញទីជាព្រះមហាក្សត្រចុះ ព្រះអង្គក៏នឹងបានគង់ជាសុខក្សេមក្សាន្តយឺនយូរតទៅ។

ព្រះចៅ**ហៀនតេ** ទ្រង់ព្រះសណ្ដាប់សព្វគ្រប់ ក៏ឱ្យស្ដុតរន្ធត់ក្នុងព្រះទ័យស្ងៀមនៅមួយស្របក់ ហើយក្រឡេកមើលមុខនាហ្មឺនទាំងពួង ក៏ទ្រង់ព្រះកន្សែងសោកាត្រាស់ថា យើងនឹកគិតអាណិតទៅដល់បុរាណក្សត្រ មានព្រះចៅ**ហាន់កោចោ**ជាដើម ព្រះបរមវង្សផងយើងពេកណាស់ អំណឺះតមកក៏មានព្រះរាជវង្សអង្គក្សត្របានសោយរាជសម្បត្តិជាលំដាប់គ្នាជាយូរប្រមាណ បួនប្រាំរយឆ្នាំមកហើយ ជាទីបំផុតត្រឹមអង្គយើង ៗនេះនៅក្មេងសេចក្ដីខ្លីតម្រិះប្រាជ្ញាក៏មែន តែថាបានទទួលរាជសម្បត្តិផ្ទាល់ពីព្រះវររាជបិតា ដោយសារសេនាបតីនាហ្មឺនសព្វមុខមន្ត្រីជំនុំយល់ព្រម យើងក៏បានអនុលោមទទួលរក្សារាជសម្បត្តិដោយសត្យានុធម៌តរៀងមកដល់សម័យនេះ យើងក៏មិនមានប្រព្រឹត្តឱ្យខុសទាស់ពីសណ្ដាប់ច្បាប់បុរាណរាជប្រវេណីឯណាឡើយ ម្ដេចឡើយអស់អ្នកទាំងឡាយមកនិយាយ ឱ្យយើងលើកយករាជសម្បត្តិរបស់យើងឱ្យទៅអ្នកដទៃវិញដូច្នោះ? យើងរំពឹងទៅឃើញខុសអំពីយុត្តិធម៌ច្បាប់ សុំឱ្យអស់អ្នកត្រឡប់វិលទៅប្រឹក្សាគ្នាម្ដងទៀតសិនចុះ។

**ហ្វ៊ូហ៊ីម**ឮដូច្នោះក៏ចេញទៅនាំយក **លីតុក, ខៅជី** ជានាហ្មឺនចាស់ទុំចូលទៅគាល់ព្រះចៅ**ហៀនតេ** ហើយទូលថា ព្រះអង្គចូរទ្រង់ប្រឹក្សាពិគ្រោះនឹងអ្នកចាស់ទុំពីរ

នាក់នេះចុះ ទោះបីគួរពុំគួរប្រការម្តេច ក៏ល្មមទ្រង់នឹងជឿស្តាប់បាន។ **លីតុក**ក៏ទូលថា តាំងពី**ចូភី**ឡើងជា**វុយអេង**ជំនួសបិតារៀងមក ទូលបង្គំបានឃើញស្រុកទេសកកើតឡើងបរិបូរគ្មានខ្វះកន្លះអ្វីសោះ មានហង្សសត្វដែលរូបល្អស្រស់ក៏ហើរចូលមកក្នុងស្រុក រាជសីហ៍ក៏ចូលមកដើរតត្រុកសព្វទីកន្លែងខេត្តខណ្ឌព័ន្ធសីមា ស្តេចមករដែលមានឫទ្ធិក្លា ក៏អណ្តែតត្រសែតមកនៅលើអាកាស សម្តែងឫទ្ធិឱកាសរុងរឿងកណ្តាលស្រុកទេស អាភេទទាំងបីប្រការនេះជាទីអស្ចារ្យប្លែកណាស់ ទូលបង្គំយល់ច្បាស់ថា **ចូភី**នឹងមានបុណ្យកុសល គួរដល់នូវរាជសម្បត្តិជាព្រះមហាក្សត្រតទៅ។ **ខៅជី**ទូលថា ពេលកណ្តាលយប់ស្ងាត់ ទូលបង្គំបានឃើញផ្កាយនក្ខត្តឫក្សអន្សាស្រុក ដែលប្រចាំបុណ្យរបស់ព្រះអង្គ មានរស្មីសៅហ្មងវិប្បរិត្តខុសអំពីធម្មតា សម្តែងអាការឲ្យឃើញថា ព្រះអង្គនឹងអស់បុណ្យក្នុងជាន់នេះហើយ ឯផ្កាយដែលប្រចាំបុណ្យចូភីនោះ មានជួនធំអស្ចារ្យ រស្មីភ្លឺថ្លាបរិសុទ្ធណាស់ សម្តែងហេតុឲ្យឃើញច្បាស់ថា **ចូភី**នឹងមានបុណ្យបារមីថ្លៃថ្លា ទាំងមនុស្សទាំងទេវតាក៏និយមសរសើររាប់អាន**ចូភី**ណាស់ បានជាបណ្តាលឲ្យឃើញអាភេទច្បាស់ទាំងបីប្រការជាទីប្រាកដដល់ភ្នែកអ្នកទាំងពួង ហេតុនេះ សមគួរឲ្យព្រះអង្គទ្រង់លើករាជសម្បត្តិឲ្យ**ចូភី**គ្រប់គ្រងជាម្ចាស់ផែនដីតទៅចុះ។

ព្រះចៅ**ហៀនតេ**ត្រាស់តបថា ដែលអស់អ្នកមកនិយាយដូច្នេះ ជាការមិនសមគួរនឹងជឿទេ ព្រោះមិនបានឃើញចំពោះនឹងភ្នែកយ៉ាងណា យើងនៅកំណត់ក្នុងចិត្តថា មិនគួរនឹងឲ្យលើករាជសម្បត្តិ ដែលជាព្រះកេររបស់ព្រះបរមក្សត្រអំពីបុរាណឲ្យទៅអ្នកដទៃសោះ។ **អងឡុង**ទូលថា ការទាំងនេះជាប្រវេណីមកអំពីបុរាណ មានល្អហើយ ក៏គង់ត្រឡប់ទៅជាអាក្រក់ៗ មានហើយក៏គង់នឹងត្រឡប់ទៅជាល្អវិញបាន យ៉ាងដូចប្រទេសស្រុកនីមួយៗ ធ្លាប់គង់នៅបរិបូរមាំមួនហើយ ក៏

កើតជាសឹកសង្គ្រាមជ័យ ឲ្យវិនាសខ្មេចខ្មីអស់ទៅ លុះខ្មេចខ្មីទៅហើយ ក៏ត្រឡប់បានចម្រើនមាំមួនឡើងជាធម្មតា ឯសម្បត្តិទ្រព្យសព្វសារពើទឹកដីដែលព្រះអង្គទ្រង់ទទួលអំពីព្រះបរមរាជវង្សច្រើនផែនដីមកហើយ ប្រមាណបួនប្រាំរយឆ្នាំនោះ ទូលបង្គំយល់ឃើញថា វង្សរបស់ព្រះអង្គនឹងត្រូវផុតរលត់ក្នុងសម័យនេះជាពិត ហេតុនេះសូមឲ្យព្រះអង្គពិនិត្យ លះរាជសម្បត្តិនេះឲ្យ**ចូភី**ចុះ បើព្រះអង្គនៅតែរឹងទទឹងដូច្នោះ មុខជានឹងមានសេចក្ដីភ័យអន្តរាយមកដល់ព្រះអង្គពុំខាន។

ព្រះចៅ**ហៀនតេ** បានទ្រង់ព្រះសណ្ដាប់គ្រប់ប្រការ ក៏អាក់អួលព្រះឱរាទ្រង់ព្រះកន្សែងពិលាប ហើយក៏យាងចូលទៅក្នុងក្រឡាព្រះបន្ទំ អស់មន្ត្រីតូចធំក៏នាំគ្នាសើចទ្រហឹងអឺងកង រួចនាំគ្នាដើរចេញត្រសងមកពីព្រះរាជវាំង។ លុះព្រឹកឡើងអស់នាហ្មឺនទាំងនោះក៏នាំគ្នាចូលទៅគាល់នៅទីព្រះរាជរោងម្ដងទៀត ហើយប្រើពួកខន្ទីឲ្យចូលទៅអញ្ជើញស្ដេចឲ្យយាងចេញមក។ ព្រះចៅ**ហៀនតេ**ក៏ទ្រង់នឹកខ្លាចមិនអាចចេញមកសោះ នោះនាង**ចូហៅ**ដែលជាប្អូន**ចូភី** ជាទីព្រះអគ្គមហេសីមានសេចក្ដីឆ្ងល់ក៏ក្រាបទូលសួរថា អស់មុខមន្ត្រីឲ្យបម្រើចូលមកអញ្ជើញស្ដេចចេញទៅក្រៅ ហេតុអ្វីព្រះអង្គទ្រង់មិនចេញទៅដូច្នោះ? ព្រះចៅ**ហៀនតេ**ក៏រឹតតែទ្រង់ព្រះកន្សែងសោកា ហើយមានព្រះរាជឱង្ការត្រាស់ប្រាប់ព្រះមហេសី តាមសេចក្ដីដែលបង្កើតឡើងថា បងប្រុសរបស់ប្អូនឯងឲ្យបម្រើមកកំហែងបង ប៉ងនឹងដណ្ដើមយករាជសម្បត្តិ បានជាពួកនាហ្មឺនទាំងនេះគិតគប់គ្នានឹងកម្ចាត់យើង ឲ្យយើងលើកស្វេតឆ័ត្រប្រគល់ឲ្យ**ចូភី**ដោយបង្ខំ។ ហេតុនេះបានជាបងនៅសំងំមិនចេញទៅ។

ព្រះនាង**ចូហៅ**បានឮដូច្នោះ ក៏ខឹងខ្លាំងណាស់ថា បងខ្ញុំម្ចាស់ហេតុម្ដេចបានជាមកគិតក្បត់ដូច្នោះ ព្រះនាងថាមិនទាន់ផុតពីមាត់ ស្រាប់តែ**ចូហាង** និង**ចូហ៊ីវ** សៀតគ្របីចូលទៅទូលអញ្ជើញស្ដេចឲ្យចេញទៅ។ ព្រះនាង**ចូហៅ**ក៏ស្រែកជេរថា

អាពួកក្បត់ទាំងអស់នេះវាស័ក្តិយសពីព្រោះនរណា ឥឡូវហេតុម្តេចវានាំគ្នាមកធ្វើជាសត្រូវក្បត់ប្រទូសរ៉ាយនឹងម្ចាស់ផែនដីវិញ? កាលគ្រាបិតាអញនៅរស់ក៏បានធ្វើសេចក្តីគាប់ប្រសើរ ទុកឈ្មោះគ្មាននរណាស្មើបាន ហើយបានរៀបចំស្រុកទេសទាំងប៉ុន្មានឲ្យរាបទាបស្រួលបួលទាំងអស់ បណ្តារាស្រ្តក៏ស្ម័គ្រស្មោះនិយមរាប់អានស្រឡាញ់ពេញទាំងផែនដី អស់ទាំងនាហ្មឺនមុខមន្ត្រីធំតូចក៏កោតក្រែងអំណាចខ្លាចគ្រប់គ្នា ម្តេចបិតាអញមិនមានចិត្តគិតពុះពារនឹងដណ្តើមយករាជសម្បត្តិម្ចាស់ផែនដី ឥឡូវហេតុអ្វីបងអញដែលបានស្តីការជំនួសបិតាប៉ុណ្ណោះ មកចេះប្រែចិត្តគិតប្រទូសរ៉ាយនឹងដណ្តើមយករាជសម្បត្តិដូច្នេះ? មនុស្សយ៉ាងនេះមិនមានចម្រើនប៉ុន្មាន ទេវតាសព្វឋានក៏មិនជួយឲ្យពរសព្វសាធុការទេ។ ថាហើយក៏ទួញយំដំឱរាត្រឡប់យាត្រាចូលទៅក្នុងវិញ អស់បណ្តាស្រីស្នំក្រមការដែលនៅក្នុងវាំងនេះមិញ ក៏សឹងជាទុក្ខទោមនស្សទួញយំទាំងអស់គ្នាទ្រហឹងអឹងកង។

ឯ**ចូហ៊ីវ**និង**ចូហង** ក៏បង្ខំព្រះចៅ**ហៀនតេ**ស្តេចចេញទៅពីព្រះរាជរោងរម្យជួបជុំនាហ្មឺនមុខមន្ត្រីទាំងពួង។ ព្រះចៅ**ហៀនតេ**ទទឹងពុំបាន ក៏ដោះព្រះសុភ័គយ៉ាងខ្ពស់មានរូបមករ ដែលធ្លាប់ទ្រង់ចេញប្រជុំមុខមន្ត្រីនោះចេញពីព្រះអង្គ ហើយក៏ទ្រង់ឆ្លងព្រះអង្គយ៉ាងថោកទាបចេញទៅ។ **ហ្វ៊ូហ៊ឹម**ទូលថា ព្រះអង្គនឹងព្រមប្រគល់រាជសម្បត្តិឲ្យ**ចូភី**តាមសេចក្តីជំនុំ នាហ្មឺនមុខមន្ត្រីក្រាបទូលឬទេ? បើព្រះអង្គទ្រង់ព្រមប្រគល់ហើយ ក៏ជាសិរីសុវត្ថិមង្គលប្រពៃមិនមានភ័យអន្តរាយឡើយ។ ព្រះចៅ**ហៀនតេ**ទ្រង់ព្រះសណ្តាប់ហើយ ក៏ទ្រង់ព្រះកន្សែងសោកាត្រាស់ថា នាហ្មឺនពីបុរាណក៏បានយសស័ក្តិនិងប្រាក់បៀវត្ស ដល់ព្រះមហាក្សត្រអម្បូរព្រះរាជវង្សរបស់យើង ទ្រង់ប្រទានប្រាណបានតកូនចៅរៀងមកដល់វេលានេះ ហេតុអ្វីឡើយក៏មិនមានត្រិះរិះគិតកតញ្ញូដល់ព្រះតេជព្រះគុណខ្លះសោះ នាំគ្នាមកប្រទូសរ៉ាយដូច្នេះ?

**ហ៊្សហ៊ឹម**ទូលថា បើព្រះអង្គមិនធ្វើតាមពាក្យមុខមន្ត្រីប្រឹក្សា ក្នុងថ្ងៃនេះ ឬថ្ងៃស្អែកនឹងមានអន្តរាយប្លែកៗមកដល់ព្រះអង្គមិនខានឡើយ។ ពាក្យនេះទូលបង្គំនឹងបានក្លែងទូលព្រះអង្គដោយទុច្ចរិតមុសាក៏ទេ។ ព្រះចៅ**ហៀនតេ**ត្រាស់ថា បើអស់លោកអ្នកទាំងឡាយរាល់គ្នាមិនបានគិតអាក្រក់នឹងយើងទេ នរណានឹងមកប្រទូសរ៉ាយនឹងយើងសោត? **ហ៊្សហ៊ឹម**ស្រែកគំហកដោយសំឡេងខ្លាំងថា បណ្ដារាស្ត្រទាំងអស់គ្នាឃើញថា ព្រះអង្គល្ងង់ខ្លៅមិនសូវមានតម្រិះប្រាជ្ញាចេះរក្សាផែនដី និងមិនចេះដឹងសេចក្ដីដែលនឹងគ្រប់គ្រងរាជសម្បត្តិ បានជាកើតចោរដើរស្កាត់ខ្វាត់លួចប្លន់គ្រប់តំបន់នានា រាស្ត្រប្រជាក៏កើតក្ដៅក្រហាយគ្រប់ស្រុក កើតកង្វល់កលិយុគខ្ទេចខ្ទីទាំងឡាយ ហើយខំខ្វល់ខ្វាយជួយទំនុកបម្រុងព្រះអង្គឲ្យគង់ជាសុខមកយូរហើយមិនមែននឹងក្លែងកម្ចាត់ព្រះអង្គឡើយ។ គួរហើយព្រះអង្គនឹងដឹងគុណូបការៈ**ចូភី**ដែលព្រះអង្គនៅរឹងមិនព្រមសាមគ្គីប្រគល់ផែនដីឲ្យដូច្នេះ នឹងចង់ឲ្យបណ្ដារាស្ត្របះបោរចលាចលឲ្យកើតអំពល់ដល់ព្រះអង្គឬ? ព្រះចៅ**ហៀនតេ**ឮដូច្នោះ ក៏ភ័យស្លាំងកាំង ទ្រង់ក្រោកយាងចូលទៅក្នុងវិញ។

**អងឡូង**ក៏ញាក់មុខឲ្យ**ហ៊្សហ៊ឹម** ៗស្ទុះក្រោកដើររន្ថាន់តាមទៅទាន់ ហើយក៏ចាប់ជាប់នូវជាយព្រះសុភ័គព្រះចៅ**ហៀនតេ**ទុក ហើយធ្វើទឹកមុខជាខឹងខ្លាំងណាស់ថា ប្រឹក្សាការផែនដីមិនទាន់បានសេចក្ដីយ៉ាងម្ដេច ស្ដេចមិនត្រូវក្រោកទៅណាទេ នឹងព្រមប្រគល់រាជសម្បត្តិឬមិនព្រម ថាមកចុះ? ព្រះចៅ**ហៀនតេ**ភ័យណាស់នឹងត្រាស់តបក៏មិនរួច ខ្លាចញ័រអស់ព្រះអង្គ។ **ចូហង** និង**ចូហ៊ីវ**ក៏ហ៊ូតគ្រប៊ីគ្រវីលើកឡើងហើយស្រែកថា ត្រាព្រះវលញ្ចករសម្រាប់រាជ្យនៅឯណា? **ចូប៊ិត**ឆ្លើយថា ត្រាព្រះវលញ្ចករខ្ញុំរក្សាទុកឯង។ **ចូហង**ថា បើត្រាសម្រាប់រាជ្យនៅលើអ្នកឯង ចូរទៅយកមកឲ្យយើងឆាប់។ **ចូប៊ិត**ថា ត្រាសម្រាប់រាជ្យនេះជារបស់ព្រះមហាក្សត្រ ព្រះ

អង្គមិនទាន់មានព្រះតម្រាស់ថាឲ្យឯងទេ។ **ចូហង**ខឹងខ្លាំងណាស់ ក៏បង្គាប់ទាហានឲ្យចាប់**ចូប៊ិត**នាំយកទៅសម្លាប់។ **ចូប៊ិត**ឥតតក់ស្លុតរន្ធត់ខ្លាចនឹងសេចក្តីស្លាប់សោះ ចេះតែស្រែកជេរ**ចូហង**ទាល់តែគេសម្លាប់។

ព្រះចៅ**ហៀនតេ**ទតឃើញដូច្នោះ ក៏តក់ស្លុតញ័រអស់ព្រះអង្គមិនបាត់ឡើយ ហើយក្រឡេកទៅឃើញទាហានប្រមាណប្រាំរយនាក់ គ្រឿងសាស្ត្រាវុធគ្រប់ដៃ សុទ្ធតែពួក**ចូភី**ទាំងអស់ មិនឃើញមានពួកព្រះអង្គសោះឡើយ គិតហើយក៏បញ្ចេញព្រះសូរសៀងថា យើងព្រមប្រគល់រាជសម្បត្តិឲ្យហើយ សុំតែជីវិតយើងទុកចុះ។ **កាសៀង**ថា បើព្រះអង្គព្រមប្រគល់ឲ្យហើយ ទូលបង្គំឃើញថា**ចូភី**នឹងថ្វាយជីវិតទុកតទៅ មិនបានធ្វើអន្តរាយដល់ព្រះអង្គទេ ត្រូវព្រះអង្គធ្វើព្រះចុតហ្មាយប្រគល់រាជសម្បត្តិឲ្យ**ចូភី**ចុះ។

ព្រះចៅ**ហៀនតេ**បានឮដូច្នោះ ក៏ត្រាស់បង្គាប់**តាន់គុយ** ឲ្យតែងព្រះចុតហ្មាយប្រគល់រាជសម្បត្តិ សេចក្តីថា យើងបានសោយរាជសម្បត្តិគ្រប់គ្រងផែនដី រក្សាសេចក្តីសុខអស់អាណាប្រជានុរាស្ត្រមកជាយូរយារ គណនារាប់ជាប់៣២ឆ្នាំហើយ ឥឡូវផ្កាយប្រចាំព្រះអង្គយើងសៅហ្មង សន្តានចិត្តនាហ្មឺនមុខមន្ត្រីផងនិងអស់អាណាប្រជានុរាស្ត្រទាំងឡាយ ក៏ឃើញថា រូបកាយនៃយើងមិនសមគួរនៅក្នុងរាជសម្បត្តិឡើយ ហើយឃើញថា ផ្កាយប្រចាំខ្លួន**ចូភី**ជាទីរុងរឿងស្វាងត្រចះ បុណ្យតេជៈរបស់គេក៏គួរដល់នូវរាជសម្បត្តិពេញបរិបូរ នាហ្មឺន និងរាស្ត្រក្នុងនគរក៏សាទរស្រឡាញ់រាប់អាន ឲ្យ**ចូភី**បានឋានពិភពគ្រប់គ្រងរាជសម្បត្តិ ជាព្រះមហាក្សត្រាធិរាជ។ យើងក៏ព្រមប្រគល់អំណាចរាជសម្បត្តិនេះឲ្យ**ចូភី**តាមទីប្រាថ្នាមហាជនចុះ។ លុះធ្វើរួចក៏ប្រគល់ឲ្យ**ហ្ស៊ូហ៊ឹម** និងអស់នាហ្មឺនទាំងពួង នាំយកទៅជាមួយនឹងត្រាសម្រាប់រាជ្យ ដើម្បីប្រគល់ឲ្យ**ចូភី**។

ឯ**ចូភី**នោះ លុះបានឃើញព្រះចុតហ្លាយនិងត្រាព្រះរលញ្ជករសម្រាប់រាជ្យ ក៏មានចិត្តត្រេកអរសាទរពន់ប្រមាណ គិតចង់បានទទួលយកក្នុងខណៈនោះ តែថាគឺមោះមានមាយាធ្វើជាវេរាស្ងៀមនៅ។ **សុម៉ាអ៊ី**ក៏ទូលទាស់ឃាត់ថា ទ្រង់កុំអាលទទួលយកឡើយ រឿងនេះហើយត្រូវតែទ្រង់ធ្វើរឿងរ៉ាវថ្វាយត្រានេះទៅវិញសិនទើបគួរសម ដើម្បីនឹងបំបាត់នូវពាក្យគរហានិន្ទាផង។ **ចូភី**យល់ឃើញត្រូវទំនង ទើបចាត់ប្រើ**អងឡូង**ឲ្យតែងចុតហ្លាយមួយច្បាប់ រៀបរាប់សេចក្ដីថា ទូលបង្គំ**ចូភី ទីវុយអេង**សូមថ្វាយត្រាព្រះរលញ្ជករសម្រាប់រាជ្យមកទ្រង់វិញ ព្រោះទូលបង្គំជាអ្នកមានសតិបញ្ញាតិចណាស់ នឹងរហ័សទទួលយករាជមសម្បត្តិតាមសព្វព្រះទ័យតែម្ដងពុំបាន ការនេះគួរតែទ្រង់គិតអានពិគ្រោះពិចារណាជ្រើសរើសរកអ្នកល្អ ដែលមានតម្រិះប្រាជ្ញាជាងទូលបង្គំ ដែលគួរនឹងគ្រប់គ្រងមហាជនក្នុងផែនដីនេះបាន សូមឲ្យទ្រង់ព្រះរាជទានសម្បត្តិទៅអ្នកនោះទើបគួរ។ ហើយចាត់ប្រើ**អងឡូង**និងមន្ត្រីទាំងពួង ឲ្យអញ្ជើញត្រាសម្រាប់រាជ្យនោះទៅថ្វាយព្រះចៅ**ហៀនតេ**ជាមួយនឹងចុតហ្លាយ។

ព្រះចៅ**ហៀនតេ**បានឃើញសំបុត្រនិងត្រា ក៏ឲ្យព្រួយព្រះចិន្តាគិតម្ដងទៀតទើបប្រឹក្សានឹងបណ្ដាខ្ញុំរាជការទាំងពួងថា ហេតុអ្វីបានជា**ចូភី**បង្វិលត្រាមកឲ្យយើងវិញ? **ហ៊្វូហ៊ីម**ទូលថា កាលព្រះអង្គតាំង**ចូឆ្វូ**ជាទី**វុយអេង ចូឆ្វូ**ក៏មិនព្រមទទួលដល់បីដង ឯក្រោយទើប**ចូឆ្វូ**ព្រមទទួល គ្រានេះត្រូវតែព្រះអង្គតាំងទៅទៀតទើប**ចូភី**ព្រមទទួល។ ព្រះចៅ**ហៀនតេ** នឹកខ្នាញ់ក្នុងព្រះទ័យអាល័យរាជសម្បត្តិណាស់ តែថាត្រូវការដោយសេចក្ដីខ្លាចគេ ទើបបង្គាប់ឲ្យ**ហាងកែ**តែងព្រះរាជតម្រាស់សេចក្ដីថា **ចូភី**នេះសមគួរណាស់ហើយ ដែលនឹងត្រូវទទួលរាជសម្បត្តិជំនួសយើងបាន។ ព្រោះយើងគិតយល់គួរទៅដល់**ចូឆ្វូ**ណាស់ ព្រោះពីដើមស្រុកទេសរាស្ត្រកើតបះបោរ

ចលាចលទាល់តែខ្ទេចខ្ទីវិនាសអស់ បណ្ដារាស្ត្រក៏រត់ទៅជ្រកពួនដោយព្រៃភ្នំក្រំថ្ម លុះតែ**ចូឆ្នូ**លើកទ័ពទៅប្រាបប្រាមសឹកសត្រូវ ទើបបានស្រុកភូមិរាបទាបដរាបមកដល់ឥឡូវនេះ។ គ្រានេះអស់បុណ្យ**ចូឆ្នូ**ទៅហើយ បាន**ចូភី**ជំនួសទីបិតា មានសតិបញ្ញាអានុភាពលើសជាងបិតាទៅទៀត អាណាប្រជានុរាស្ត្រទាំងពួងក៏និយមរាប់អានស្រឡាញ់ពេញចិត្តស្ម័គ្រ សុំឲ្យអ្នកឡើងសោយរាជសម្បត្តិជំនួសយើងចុះ។ លុះធ្វើរួចក៏ចាត់ប្រើ**ទៀវអ៊ឹម**ឲ្យនាំព្រះរាជសារនិងត្រាសម្រាប់រាជ្យទៅប្រគល់ឲ្យ**ចូភី**។

**ចូភី**បានឃើញព្រះបន្ទូលដូច្នោះ ក៏មានអំណរណាស់ ទើបនិយាយនឹង**កាសៀង**ថា ព្រះចៅ**ហៀនតេ**ប្រគល់ត្រាសម្រាប់រាជ្យមកឲ្យយើងដល់ពីរដងហើយ បើនឹងទទួលយកវេលានេះក៏មិនទាន់ផុតអស់សេចក្ដីនិន្ទា **កាសៀង**ឆ្លើយថា បើទ្រង់នៅបារម្ភពុំអស់ព្រះទ័យ ត្រូវត្រាស់ប្រើ**ទៀវអ៊ឹម**ឲ្យនាំយកត្រាទៅថ្វាយវិញម្ដងទៀត ឲ្យ**ទៀវអ៊ឹម**និយាយនឹង**ហ៊្វូហ៊ឹម** ឲ្យទូលព្រះចៅ**ហៀនតេ**ថា បើព្រះអង្គទ្រង់ព្រមប្រគល់រាជសម្បត្តិឲ្យ**ចូភី**ប្រាកដហើយ ចូរឲ្យចាត់ការសង់រោងពិធីអភិសេកឲ្យខ្ពស់មានថ្នាក់បីជាន់ ប្រដាប់ទីទៅដោយចាមរ បៃមន់ ទង ឆ័ត្ររួតនានា តាមបុរាណរាជប្រពៃណីធម្មតាឲ្យសព្វគ្រប់ លុះបានឫក្សពារពេលាល្អ ក៏ត្រូវឲ្យប្រជុំនាហ្មឺនសព្វមុខមន្ត្រីតូចធំឲ្យព្រមគ្នា ទៅប្រជុំក្នុងរោងរាជពិធី ហើយឲ្យ**ចូភី**ឡើងអង្គុយលើមហាបុស្បុកដែលខ្ពស់ អស់នាហ្មឺនក្រៅពីនោះ ឲ្យថ្វាយបង្គំជុំពីក្រោមរាជបល្ល័ង្គ ហើយត្រូវព្រះចៅ**ហៀនតេ**ទ្រង់ស្រោចទឹកស័ង្ខប្រគល់ព្រះខ័ន និងត្រាសម្រាប់រាជ្យថ្វាយព្រះចៅ**ចូភី** ជាទីរាជភិសេកឯកក្សត្រសោយរាជសម្បត្តទៅ បើព្រះចៅ**ហៀនតេ**ធ្វើតាមដូច្នេះហើយ ទ្រង់ក៏នឹងអស់សេចក្ដីគរហានិន្ទា។

**ចូភី**បានឮ**កាសៀង**ថាដូច្នោះ ក៏ពេញព្រះទ័យណាស់ ទើបត្រាស់ប្រើ**ទៀវអ៊ឹម**ឲ្យនាំត្រាទៅថ្វាយព្រះចៅ**ហៀនតេ**ទៀត ឲ្យ**ហ៊្វូហ៊ឹម**នាំឡើងទៅទូលតាមពាក្យ

**កាសៀង**គ្រប់ប្រការ។ ព្រះចៅ**ហៀនតេ**ទ្រង់សួរអស់នាហ្មឺនខ្ញុំរាជការថា ហេតុម្ដេចបានជា**ចូវភី**នៅមិនព្រមទទួលរាជសម្បត្តិឲ្យផុតតែម្ដងទៅ? **ហ៊្វហ៊ឹម**ទូលថា ដែល**ចូវភី**នៅមិនទាន់ទទួលនោះ ព្រោះឃើញថាព្រះអង្គប្រគល់រាជសម្បត្តិខុសពីទម្លាប់ច្បាប់រាជប្រវេណីបុរាណច្រើនប្រការ។ **ហ៊្វហ៊ឹម**ក៏ពណ៌នាតាមសម្ដី**កាសៀង**ឲ្យនិយាយនោះ ទូលព្រះចៅ**ហៀនតេ**គ្រប់ប្រការ ហើយទូលថា បើព្រះអង្គនឹងប្រគល់រាជសម្បត្តិឲ្យ**ចូវភី**នោះ ត្រូវចាត់ការធ្វើឲ្យបានដូចសេចក្ដីដែលទូលបង្គំទូលនេះ ទើប**ចូវភី**ព្រមទទួលជាប្រាកដ នោះទាំងខ្លួនព្រះអង្គនិងព្រះញាតិវង្សរបស់ព្រះអង្គ ក៏នឹងបានពឹងបុណ្យ**ចូវភី**ជាសុខតទៅ។

ព្រះចៅ**ហៀនតេ**បានទ្រង់ព្រះសណ្ដាប់ ក៏គ្រវីព្រះកេសាហើយដកដង្ហើមធំ ទើបបង្គាប់ឲ្យ**ថៃសៀង**ជាមេការ ទៅតាក់តែងរោងពិធីតាមទំនៀមបុរាណរាជាភិសេកស្រេចហើយ។ លុះដល់ខែកត្តិកថ្ងៃប្រាំកើត ជាឫក្សជោគជ័យល្អ លុះព្រឹកព្រាងស្វាងព្រះទិនករ ក៏អញ្ជើញ**ចូវភី**ឲ្យឡើងគង់បល្ល័ង្គបុស្បុក អស់ពួកនាហ្មឺនមុខមន្ត្រីតូចធំមកប្រជុំគ្នាប្រហែលបួនរយនាក់ ចូលទៅគង់គាល់ជុំវិញរោងរាជពិធីជាមហោឡារិក មានទាហានទាំងពួកជើងគោក ជើងទឹកប្រមាណដប់ម៉ឺនកាន់នូវគ្រឿងសាស្ត្រាវុធព័ទ្ធជាច្រើនជាន់ ដើម្បីការពារអន្តរាយផ្សេងៗ។

ខណៈនោះ ព្រះចៅ**ហៀនតេ**ក៏តាំងព្រះទ័យមានៈ ស្ទុះក្រោកកាន់ព្រះសែងគ្របីនិងត្រាសម្រាប់រាជ្យ ហើយនិងព្រះបន្ទូលសញ្ញា ឡើងទៅលើមហាបុស្បុក ក៏ហុចប្រគល់ទៅឲ្យ**ចូវភី** ៗក៏ទទួលយក ហើយហុចព្រះតម្រាស់នោះទៅអាល័ក្ខណ៍សូត្រប្រកាសប្រាប់អស់នាហ្មឺនមុខមន្ត្រី នូវអស់អាណាប្រជានុរាស្ត្រទាសករទាំងឡាយ សឹងថ្វាយសព្ទសាធុការពរជាកោលាហល អឺកក្រើកមហិមា សន្មតថ្វាយព្រះនាមថា ព្រះចៅ**អ្វយប៉ះ**។ **ចូវភី**ក៏តាំងនៅក្នុងទីសម្បត្តិក្សត្រខត្តិយរាជតាំងពីនោះ

មក (ព.ស ៧៦៣)។ ព្រះចៅ**ចូភី**ក៏តាំងទីក្រុងហ៊ូតោ ប្រែជាក្រុងតែវុយកុក ហើយត្រាស់ឲ្យលើកលែងយកពន្ធស្ទួយសារអាករអំពីរាស្ត្រប្រជាគម្រប់បីឆ្នាំ និងឲ្យបើកលែងមនុស្សទោសក្នុងគុក ហើយឲ្យចារឹកអក្សរនាទីអនុស្សាវរីយ៍ ដែលបញ្ចុះសពបិតាជាថ្មីហៅថាព្រះចៅ**ថៃឡហ៊ូហងតេ**។ **ហ៊្វហ៊ឹម**នាំយកសេចក្ដីក្រាបទូលថា ប្រវេណីបុរាណលោកមិនដែលឲ្យមានម្ចាស់ផែនដីដល់ពីរព្រះអង្គ គង់នៅក្នុងនគរជាមួយគ្នាទេ ដែលទ្រង់នឹងឲ្យព្រះចៅ**ហៀនតេ**ទៅគង់នៅទីតំបន់ណាឬប្រការម្ដេចក៏ត្រូវសម្រេចឲ្យឆាប់ប្រញាប់ទៅ។ ហើយ**ហ៊្វហ៊ឹម**បង្គាប់ឲ្យព្រះចៅ**ហៀនតេ**ប៉មស្ដាប់ព្រះតម្រាស់ព្រះចៅ**ចូភី** ៗក៏តាំងព្រះចៅ**ហៀនតេ**ឡើងជាទីវិសេស ហៅថា**សាន់អៀងកុង** ហើយឲ្យទៅនៅតំបន់សាន់អៀង ទីនោះមិនត្រូវឲ្យមានតំណែងគាល់ហៅឡើយ ឯបៀវត្សសម្រាប់ឆ្នាំក៏មិនត្រូវឲ្យមាន នោះ**សាន់អៀងកុង**ក៏លាចេញទៅ។ **ហ៊្វហ៊ឹម**ហូតគ្របីឡើងកាន់ ហើយស្រែកថា ជាទំនៀមប្រវេណីផែនដីវៀងមកបើមួយអង្គទ្រង់រាជសម្បត្តិហើយ ត្រូវកម្ចាត់មួយអង្គចេញ ព្រះចៅ**ចូភី**ប្រោសប្រណីទ្រង់ណាស់ ហើយបានទុកព្រះជន្មប៉ុណ្ណោះ ថែមតាំងជាទី**សាន់អៀងកុង**ទៀតជាព្រះតេជព្រះគុណគ្មានទីបំផុតទេ អំណើះពីនេះទៅ បើមិនមានព្រះតម្រាស់ឲ្យហៅទ្រង់ចូលមកគាល់ទេ នឹងចូលមកពុំបានជាដាច់ខាត។ **សាន់អៀងកុង**ទ្រង់ព្រះវិយោគ ក៏ក្រោកលាចេញទៅ ហើយឡើងគង់លើសេះនាំអស់គ្រប់គ្រួទៅនៅឯតំបន់សាន់អៀង។ ខណៈនោះ អស់បណ្ដាជនទាំងឡាយ ឃើញ**សាន់អៀងកុង**ត្រូវនិរទេសដូច្នោះ ទាំងអស់គ្នាក៏មានសេចក្ដីអាណិតអាសូរពន់ប្រមាណណាស់ សឹងតែយំស្រណោះអាឡោះអាល័យក្រៃពេក។

ឯព្រះចៅ**ចូភី**ពេញជាទីក្សត្រខត្តិយរាជ មានឫទ្ធិអំណាចលើសលុប ទ្រង់ប្រារព្ធនឹងអស់នាហ្មឺនទាំងពួងថា ការដែលយើងធ្វើទាំងអម្បាលនេះ ត្រូវតាមទម្លាប់

ទំនៀមបុរាណហើយឬម្តេច? អស់នាហ្មឺនខ្ញុំរាជការសឹងក្រាបទូលថា ដែលព្រះអង្គទ្រង់តម្រិះដូច្នេះ ជាត្រឹមត្រូវតាមបុរាណរាជប្រវេណីណាស់ហើយ ។ក៏នាំគ្នាសរសើរព្រះសតិបញ្ញាជាអនេកប្រការផ្សេងៗ ហើយថាគួរព្រះអង្គនឹងតាក់តែងគ្រឿងសក្ការបូជាពលីការទេពតាអារក្សដែលសក្តិសិទ្ធិ ចម្រើនបុញ្ញាឫទ្ធិឲ្យថ្កើងរុងរឿងឡើងទៀត។ ព្រះចៅ**ចូភី**ទ្រង់យល់ឃើញផង ក៏ត្រាស់ឲ្យភ្នាក់ងាររៀបតាក់តែងគ្រឿងសែនព្រេនតាមទំនៀម កាលព្រះចៅ**ចូភី**ចេញទៅរៀបសែនព្រេននៅទីពិធីនោះ ក៏បណ្តាលឲ្យកើតជាព្យុះខ្យល់ខ្លាំងធំអស្ចារ្យ បណ្តាគ្រឿងអាមិសពលីការជាធូបទៀនទាំងឡាយ ក៏រលំរលត់ខ្ចាត់ខ្ចាយទៅអស់ ផ្គេកបន្ទោរក៏ដាលច្រវាត់ព័ទ្ធពេញអាកាស ដុំថ្មក៏ច្រឡាសខ្ចាតឡើងទង្គិចគ្នាជាកោលាហល ខ្យល់ក៏បក់ផាត់ងងឹតអស់ទិសទី មេឃម្លូរមីរលឹមធ្លាក់មក មនុស្សម្នាក៏ភិតភ័យរត់ជ្រកពួនសព្វស្ថាននានា នឹងមើលគ្នាក៏ពុំឃើញពុំយល់សោះឡើយ។

ព្រះចៅ**ចូភី**ភ័យតក់ស្លុតរន្ធត់ស្មារតីដួលសន្លប់ទៅ លុះអស់ព្យុះខ្យល់ស្ងប់ស្ងាត់វេលាណា បណ្តានាហ្មឺនមុខមន្ត្រីក៏ក្រឡេកឃើញព្រះចៅ**ចូភី**ដួលសន្លប់ដូច្នោះ ក៏នាំគ្នាស្ទុះទៅលើកគ្រាប់ឡើងបានមួយស្របក់ ទើបរឭកដឹងព្រះអង្គ នាហ្មឺនទាំងពួងក៏អញ្ជើញស្តេចចូលទៅក្នុងព្រះរាជវាំង។ ព្រះចៅ**ចូភី**ក៏ទ្រង់ប្រឈួនជាប់ជាយូរថ្ងៃមិនបានចេញស្តីរាជការ លុះស្បើយព្រះឈួនកាលណាក៏ឧស្សាហ៍មានព្រះទ័យចេញទៅកាន់ទីព្រះរាជរោងរម្យ ទ្រង់និយមលើកសរសើរអស់ពួកខ្ញុំរាជការ ព្រះចៅ**ចូភី**មានព្រះទ័យសន្និះសង្ស័យ ក្រែងខ្មោចព្រៃព្រាយបិសាចកាចខូចនៅក្នុងទីព្រះរាជវាំងច្រើនណាស់ មកពាល់ប៉ះធ្វើឲ្យព្រះអង្គទ្រង់អាពាធមិនសះជា ព្រះអង្គក៏ទ្រង់ចិន្តាថា គួរនឹងប្រែទីឋានទៅរកវិមានប្រាសាទទីដទៃទៀតចុះ លុះគិតដូច្នោះក៏ត្រាស់បង្គាប់ភ្នាក់ងារឲ្យម្ចីម្នាទៅរកសាងវាំងកំពែងឯទីក្រុងឡុកអៀងវិញ អស់ពួក

ភ្នាក់ងារនោះមិញក៏ចេញទៅចាត់ការកសាងព្រះរាជវាំងថ្មី នៅទីស្រុកឡុកអៀង ហើយស្រេច ព្រះចៅ**ចូភី**ក៏ស្ដេចទៅគង់នៅទីនោះ។

ខណៈនោះមានបម្រើស៊ើបការណ៍នាំអាថ៌ព័ត៌មាន ទៅប្រាប់ព្រះចៅ**ឡៅពី**ថា តាមដំណឹងជាប្រាកដថា **ចូភី**ប្រហារជីវិតព្រះចៅ**ហៀនតេ** ហើយដណ្ដើមយកបានរាជសម្បត្តិឡើងសោយរាជ្យជាព្រះមហាក្សត្រគង់នៅស្រុកឡុកអៀង។ ព្រះចៅ**ឡៅពី**ឮដូច្នោះ ក៏ទ្រង់ព្រះកន្សែងពិលាបសោកាអាណិតអានាថណាស់ ត្រាស់បង្គាប់ឲ្យសព្វមុខមន្ត្រី និងអាណាប្រជានុរាស្ត្រប្រុសស្រីស្លៀកពាក់សកាន់ទុក្ខ ហើយឲ្យតាក់តែងគ្រឿងសែនព្រះសពតាមទម្លាប់ទំនៀម ហើយឲ្យចារឹកព្រះនាមព្រះចៅ**ហៀនតេ**ថា ព្រះចៅ**ហៅមិនថងេត** ដាក់ក្នុងក្ដារឈើក្រអូបតាំងទុកបូជា តាំងពីនោះមកព្រះចៅ**ឡៅពី**ក៏ទុរន់ទុរាក្ដៅក្រហាយ ពុំបានសប្បាយក្នុងព្រះទ័យសោះ ចាប់ព្រះរោគអាពាធសព្វអស់ព្រះរាងកាយ នឹងចេញនិយាយការរាជការក៏ពុំបាន ទ្រង់ប្រទានមុខងារឲ្យ**ខុងបេង**ចេញនិយាយរាជការជំនួសព្រះអង្គ **ខុងបេង**ក៏ឲ្យហៅ**ខៅចេង**និង**ជៀវជីវ** នូវអស់នាហ្មឺនទាំងពួងមកប្រឹក្សាថា វេលានេះ**ចូភី**វាវំលាងព្រះចៅ**ហៀនតេ**សាបសូន្យទៅហើយ គួរយើងលើកព្រះចៅ**ឡៅពី**ឲ្យពេញជាទីព្រះមហាក្សត្រ សោយរាជសម្បត្តិព្រះរាជវង្សព្រះចៅ**ហៀនតេ**តទៅចុះ។

**ជៀវជីវ**ថា ខ្ញុំបាទបានឃើញខនខ័ណ្ឌសីមាស្រុកសែឈួន មានទីអស្ចារ្យដោយប្រការផ្សេងៗប្លែកច្រើនណាស់ បានឃើញច្បាស់ជាផ្កាយប្រចាំខ្លួន**ឡៅពី**មានទីរុងរឿងដោយពន្លឺរស្មីភ្លឺស្មើព្រះចន្ទ្រ ដែលយើងនឹងលើក**ឡៅពី**ឡើងកាន់ទីជាក្សត្រក៏គិតឃើញគួរល្អណាស់ ព្រោះ**ឡៅពី**ជាព្រះរាជវង្សស្រាប់។ អស់មុខមន្ត្រីទាំងឡាយបានស្ដាប់ ក៏យល់ឃើញត្រូវទាំងអស់គ្នា ទើបធ្វើរឿងរ៉ាវតាមប្រាជ្ញាលើក**ឡៅពី**ជាទីក្សត្រឲ្យឡើងសោយរាជសម្បត្តិក្នុងផែនដី ក៏នាំសេចក្ដីនោះយកទៅ

ថ្វាយ **ឡៅពី**បានឃើញសេចក្តីចុតហ្មាយនោះ ក៏នឹកស្តុតរន្ធត់ចិត្តគិតថា បណ្តានាហ្មឺនទាំងអស់នេះ ដែលមកនាំឲ្យយើងធ្វើដូច្នេះ ដើម្បីមិនឲ្យតាំងចិត្តដោយសត្យនូវធម៌បាន។ គិតហើយក៏មានវាចារឆ្លើយប្រកែកពុំទទួល។ **ខុងបេង**ក៏ក្រាបទូលទៅថា បណ្តាជាខ្ញុំទាំងឡាយដែលខំខ្វល់ខ្វាយគិតគ្នាទាំងម្លេះ ព្រោះយល់ឃើញថា **ចូភី**ជាគូដណ្តើមយករាជសម្បត្តិជាតិលោហិតរបស់ព្រះអង្គ បានជាចង់លើកឲ្យទ្រង់គង់ជាម្ចាស់ផែនដីតទៅ។

**ឡៅពី**ថា បើយើងព្រមទទួលធ្វើជាម្ចាស់ផែនដីនេះហើយ ទោះបីបើយើងមិនបានដណ្តើមយករាជសម្បត្តិដូចគេ ក៏គង់មានគេថាដូចជាដណ្តើមយករាជសម្បត្តិដូចអាសត្រូវនោះដែរ។ ថាតែប៉ុណ្ណោះក៏ក្រោកឡើងចូលទៅក្នុង។ លុះកន្លងមកបីថ្ងៃ **ខុងបេង**ក៏ប្រជុំអស់នាហ្មឺនមុខមន្ត្រីចូលទៅគាល់ព្រមគ្នា **ខៅចេង**ទូលថា បណ្តានាហ្មឺន និងបណ្តារាស្ត្រនានាសឹងមានសេចក្តីស្នេហាស្រឡាញ់ទ្រង់ ចង់ឲ្យឡើងសោយរាជសម្បត្តិពិតណាស់ ទើបប្រជុំយល់ព្រមគ្នាលើកព្រះអង្គឡើងជាមហាក្សត្រសោយរាជសម្បត្តិតទៅ ដើម្បីនឹងលើកទ័ពទៅកម្ចាត់អាសត្រូវ**ចូភី**ឲ្យវិនាសចេញ បំផ្លាញវានោះមិញ ជាទីសងសឹកជំនួសព្រះចៅ**ហៀនតេ**ឲ្យបាន។...

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៦៤

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

**ខណៈ**កាលព្រះចៅ**ឡៅពី**ជ្រាបថា **ហងតុង**ត្រូវរបួសធ្ងន់ណាស់ ក៏ស្ដេចចេញរហ័សទៅសួរ ហើយទ្រង់យកព្រះហស្ដស្ទាបអង្អែលស្មា**ហងតុង** ហើយត្រាស់ថា អ្នកចេញទៅច្បាំងគ្រានេះ ក៏ដើមហេតុពីព្រោះខ្ញុំថាអ្នកចាស់ជរា នឹងធ្វើការរាជការមិនបានការ អ្នកខឹងព្រោះខ្ញុំថា បានជាចេញទៅច្បាំងឲ្យត្រូវរបួសខ្លាំងយ៉ាងនេះ ខុសព្រោះខ្ញុំៗសុំខមាទោសអ្នកចុះ។ **ហងតុង**ក៏ទូលថា ទូលព្រះបង្គំជាជាតិទាហានបានមកធ្វើរាជការថ្វាយឆ្លងព្រះតេជព្រះគុណជាច្រើនមកហើយ មិនត្រូវខ្លាចអ្វីឡើយនឹងសេចក្ដីស្លាប់នេះ អាយុទូលព្រះបង្គំជាខ្ញុំក៏បានដល់ចិតសិបប្លាយឆ្នាំហើយ គួរនឹងថ្វាយបង្គំលាស្លាប់ណាស់ តែថាព្រះអង្គនឹងទ្រង់ទំនុកបម្រុងផែនដីតទៅមុខនោះនឹងធ្វើការអ្វីក៏គប្បីពិគ្រោះពិចារណាតាមព្រះបញ្ញាដ៏សុខុម កុំកាន់ព្រះមានះឲ្យហួសទីប្រឹក្សា។ ថាតែប៉ុណ្ណេះ ពិសថ្នាំព្រួញក៏កម្រើកឡើងសព្វសព៌ាង្គកាយ **ហងតុង**ក៏ធ្វើកាលកិរិយាក្នុងពេលនោះទៅ។ ព្រះចៅ**ឡៅពី**ក៏ទ្រង់ព្រះកន្សែងសោកាពិលាបអាលោះអាល័យ ហើយបង្គាប់ឲ្យភ្នាក់ងាររៀបសំស្ការសពតាមបណ្ដាស័ក្តិ ហើយហែទៅបញ្ចុះទុកឯស្រុកសែឈ្នួន។ ព្រះចៅ**ឡៅពី**ទ្រង់គិតថា យើងមាននាយទាហានឯកប្រាំនាក់ បានធ្វើការរណរង្គសង្គ្រាមមកជាមួយគ្នាយូរហើយ គ្រានេះមានបាបគ្រោះស្លាប់អស់បីនាក់ទៅហើយ នៅមិនទាន់សងសឹកសត្រូវបាន ៗសេចក្ដីអប្បយសពេកណាស់ គួរឲ្យខ្មាសមនុស្សទាំងពួង ទ្រង់ព្រះចិន្ដាហើយក៏លើកទ័ពទៅប្រថាប់ឯតំបន់ជូតេង ហើយត្រាស់ឲ្យប្រមូលនាយកងនាយទ័ពមក

បង្គាប់ថា ឲ្យញែកពលយោធាចេញជាប្រាំបីកង ទាំងជើងទឹក និងជើងគោក ឯទ័ពគោកទ្រង់ត្រួតត្រាផ្ទាល់ព្រះអង្គ ខាងទ័ពទឹកឲ្យ**ហ្លួងគួន** ជានាយកងត្រួតត្រា។

ខណៈនោះ**ហាន់តុង**និង**ជីវថាយ**បាល័ដ្ឋទ័ពស្រុកកាំងតាំង និង**ភួចៀង**ជានាយទ័ពស្រួចដឹងថា ព្រះចៅ**ឡៅពី**លើកទ័ពទៅដល់ទីប្រទល់ដែន ក៏កេណ្ឌប្រមូលកងទ័ពលើកចេញទៅភ្ជាប់ទល់គ្នា លុះលើកទៅវេលាណា **ហាន់តុង**និង**ជីវថាយ**ក៏ឡើងសេះវាំងារលំពែងចេញទៅពីមុខទ័ព ក្រឡេកទៅឃើញគ្រឿងសម្រាប់យុទ្ធនានិងទង់ជ័យសុទ្ធតែពណ៌លឿងទាំងអស់ ក៏ដឹងច្បាស់ថា ព្រះចៅ**ឡៅពី**មកឯង ទើបស្រែកថា ព្រះចៅដែនស្រុកសៃឈួនមានសុទ្ធតែមនុស្សល្អ មានសតិបញ្ញា ជាទីទំនុកទុកព្រះទ័យណាស់ហើយ ម្ដេចឡើយក៏ចាំលើកទ័ពចេញមកនឹងព្រះអង្គឯង បើប្រសិនជាធ្វើការទៅថ្កោះថ្កោយដោយប្រការឯណា នឹងទុកដាក់អ្នកឯណាឲ្យរក្សាស្រុកទៅមុខទៀត? ព្រះចៅ**ឡៅពី**ទ្រង់ព្រះសន្ដាប់ច្បាស់ខ្ញាល់ណាស់ស្រែកថា អាពួកតិរច្ឆានស្រុកកាំងតាំង ឯងជាចោរអបាក្ដធ្វើអន្តរាយជីវិតប្អូនអញ ហាក់បីដូចជាលួចកាត់ជើងអញឲ្យដាច់ទាំងពីរមិនឲ្យដើរបាន អញបានចេញវាចាថាហើយ គឺពួកអាឯងនេះ អញមិនសុំឃើញមុខសោះ ទាំងដីមេឃអាកាសទាំងអស់ក៏មិនសុំឲ្យជាប់គ្នាដែរ។

ខណៈនោះ**ហាន់តុង** និង**ជីវថាយ**មិនឆ្លើយតបសោះ ក្រឡេកទៅសួរទាហានខាងក្រោយថា នរណានឹងអាសាចេញច្បាំង មានទាហានម្នាក់ឈ្មោះ**ហៃស៊ុន**ឆ្លើយទទួលអាសា ហើយក៏កាន់លំពែងជិះសេះចេញទៅ។ ព្រះចៅ**ឡៅពី**ប្រថាប់នៅពីមុខទ័ពនោះ **តៀវប៉ៅ**ជិះសេះកាន់លំពែងអមព្រះអង្គ លុះឃើញ**ហៃស៊ុន**ជិះសេះចេញមកវាំលំពែង **តៀវប៉ៅ**ក៏ខឹងណាស់ ស្រែកសង្ឃកហើយបំផាយសេះត្រង់ទៅប្រយុទ្ធគ្នា

នឹង**ហៃស៊ុន** ៗបានឮសំឡេង**តៀវប៉ៅ**ស្រែកសន្ធាប់ខ្លាំងណាស់ ក៏តក់ស្លុតនឹងរត់ចេញ។

ឯ**ជីវផេង**ជាប្អូន**ជីវថាយ**ឃើញ**ហៃស៊ុន**នឹងរត់ ក៏បរសេះស្ទុះព័ទ្ធទៅជួយ **គួនហ៊ិន**ឃើញ**ជីវផេង**ទៅជួយដូច្នោះ ក៏បំបោលសេះវាំដារចេញទៅតនឹង**ជីវផេង** ទាំងពីរខាងក៏តាំងតែប្រយុទ្ធគ្នាទៅវិញទៅមក។ **តៀវប៉ៅ**ស្រែកសង្ឃកហើយក៏ស្ទុះចូលទៅលើកលំពែងចាក់ត្រូវ**ហៃស៊ុន**ធ្លាក់ពីលើសេះស្លាប់ **គួនហ៊ិន**បានចំណាប់ក៏កាប់**ជីវផេង**ស្លាប់ទៅទៀត ហើយ**គួនហ៊ិន, តៀវប៉ៅ** ក៏បំផាយសេះត្រង់ទៅនឹងច្បាំងនឹង**ហាន់តុង, ជីវថាយ**ទៀត។ **ហាន់តុង, ជីវថាយ**ឃើញ**គួនហ៊ិន, តៀវប៉ៅ** មានថ្វីដៃខ្លាំងពូកែណាស់ ជាជាងខ្លួនជាចាស់ ក៏ក្រឡាស់បរសេះរត់ចូលបន្ទាយ។ **គួនហ៊ិន, តៀវប៉ៅ**ក៏បំបោលសេះដេញតាមទៅ។

ខណៈនោះព្រះចៅ**ឡៅពី**ទតព្រះនេត្រឃើញថ្វីដៃ**គួនហ៊ិន, តៀវប៉ៅ** ក៏គិតនឹករឭកដល់**គួនអ៊ូ, តៀវហ៊ុយ**ណាស់ លុះលាន់ព្រះឱស្ឋសរសើរពីរនាក់នោះថា មិនបង់ប្រយោជន៍ខ្មោចអាពុកបានបង្កើតកូននេះមកពេញជាកូនខ្លា ហើយបង្គាប់ពលទាហានជើងទឹក និងជើងគោកឲ្យភ្ជុំបញ្ចូលគ្នា លើកទៅព័ទ្ធហែកទម្លាយបន្ទាយបានសម្លាប់ទាហានស្រុកកាំងតាំងស្លាប់ជាច្រើនណាស់ ឈាមហូរជាថ្លុកត្រពាំងលិចត្រឹមស្មងជើង ឯ**កាំឡេង**នាយទ័ពទឹកក៏រក្សាវាំងខ្លួននៅក្នុងទូក លុះបានឮសំឡេងស្រែកហ៊ោគឹកកង បែកទាហានមកក៏នឹកភ័យណាស់ ផ្លាស់ថយទ័ពទូកទៅឡើងច្រាំងហើយជិះសេះរត់អស់ទៅ។

ពេលនោះ**សះម៉ោខោ**ចៅហ្វាយស្រុកឡុំម៉ាន់ ដែលលើកទ័ពមកជួយព្រះចៅ**ឡៅពី**នោះ លុះឃើញ**កាំឡេង**ជិះសេះរត់ទៅ ក៏ឲ្យទាហានយកធ្នូបាញ់សំដៅត្រូវកំផ្លៀង**កាំឡេង**ទៀបនឹងធ្លាក់ពីលើសេះ **កាំឡេង**កន្ត្រាក់ដកព្រួញមិនរួច ក៏បំបោល

សេះរត់ទៅតំបន់អ្ហ៊ូទី មានសេចក្ដីឈឺចាប់សព្វសព៌ាង្គកាយ ក៏ចុះពីលើសេះវេះទៅអង្គុយក្រោមម្លប់ឈើមួយធំ ផ្អែកសំងំឲ្យបាត់ពើតពិស ៗព្រួញក៏កម្រើកឡើងសព្វសាច់ **កាំឡេង**ក៏ដាច់ខ្យល់ស្លាប់ នោះមានក្អែកធ្វើសំបុកនៅលើចុងឈើនោះ ក៏ចុះមកចោមរោមសព**កាំឡេង**ជុំវិញ ទាហានដែលសេសសល់ពីស្លាប់រត់ទៅប្រទះ ក៏ហួសទៅទូលព្រះចៅ**ស៊ុនឃួន** ៗជ្រាបថា**កាំឡេង**ស្លាប់ហើយ ក៏សោកអាល័យរាំរ៉ៃស្ដាយ**កាំឡេង**ពន់ប្រមាណ ថាម្ល៉េះហើយមុខជាអស់រកបាននាយទាហានដូច្នេះ ទើបត្រាស់បង្គាប់ភ្នាក់ងារឲ្យទៅនាំសព្វនោះយកមក រៀបចំបញ្ចុះទុកនៅតំបន់អ្ហ៊ូទី ហើយសង់ខ្ទមអ្នកតាមួយនៅពីមុខសពនោះ។

ឯព្រះចៅ**ឡៅពី**បានជ័យជម្នះហើយ ក៏ឲ្យត្រឡប់កងទ័ពទៅចូលបន្ទាយ ហើយទ្រង់ត្រួតត្រាមើល ក៏ឃើញទាហានទាំងពួងនៅគ្រប់គ្នា បាត់តែ**ឃួនហ៊ុន**ម្នាក់ឯង ក៏ទ្រង់ចំបែងព្រះទ័យណាស់ ត្រាស់ប្រើ**តៀវប៉ៅ**ឲ្យលើកទាហានញែកគ្នាទៅតាមជាច្រើនផ្លូវ **តៀវប៉ៅ**ក៏លើកទាហានញែកទៅតាម។

**ឃួនហ៊ុន**ក៏បំបោលសេះដេញតាម**ភូចៀង** ទៅដោយក្ដៅចិត្តគិតតែសងសឹក**ភូចៀង**ឲ្យបាន ព្រោះឈ្មោះនេះសម្លាប់**ឃួនអ៊្ហូ**ជាបិតា ចេះតែឆ្ពេឆ្ពាដេញប្រកិតតាមទៅទាល់តែដល់ពេលព្រលប់ ឯ**ភូចៀង**ខ្លាច**ឃួនហ៊ុន**តាមសម្លាប់ក៏បំបោលសេះ វេះត្រឡប់ចូលត្រសុករុកព្រៃទៅតាមច្រកភ្នំ លុះយប់ងងឹងណាស់ក៏ប្រាសបែកពីគ្នា **ឃួនហ៊ុន**ក៏វាត្រឡប់ទៅរកទ័ពធំពុំឃើញ ចេះតែបរសេះវេះវិលវល់ពុំយល់មាគ៌ា ឃើញព្រះចន្ទ្រារឿងរះក៏បរសេះទៅតាមចន្លោះព្រៃប្រហែលយាមពីរ ទើបដល់ភូមិនៅក្បែរជើងភ្នំ មានផ្ទះមួយឃើញភ្លើងភ្លឺនៅចំពីមុខ **ឃួនហ៊ុន**ក៏លោតចុះព្រួសពីលើខ្នងសេះវេះចូលទៅក្នុងភូមិនោះ ដល់ទៅផ្ទះហើយក៏គោះទ្វារហៅ។

ពេលនោះតាចាស់ម្ចាស់ផ្ទះ បានឮសូរគេគោះទ្វារពីក្រៅ ក៏ក្រោកទៅម្នីម្នា បើកទ្វារចេញមកហើយសាកសួរថា អ្នកនេះមកពីណា មានការអ្វីពេលថ្មើរនេះ? **គួនហ៊ិន**ឆ្លើយថា ខ្ញុំជាទាហានបានដេញពួកខ្មាំងទាំងយប់ ត្រឡប់ត្រឡិនទាល់តែវង្វេងផ្លូវដើរមកត្រូវលើផ្ទះតានេះ ពេលថ្មើរនេះក៏ហួសវេលា សុំតាអាណិតឲ្យបាយទទួលទានមួយពេលហើយឈប់ស្នាក់មួយយប់ ព្រឹកស្អែកនឹងលាទៅទៀត។ តាចាស់មានចិត្តសប្បុរសក៏អញ្ជើញ**គួនហ៊ិន**ឲ្យចូលទៅថា អ្នកនៅអង្គុយលេងសិន ខ្ញុំនឹងចូលទៅចម្អិនអាហារឲ្យពិសា។ ថាហើយក៏អុជចង្កៀងមួយដាក់លើតុ ខ្លួនក៏ចូលទៅដាំស្លស្លុកនឹងលើកមកឲ្យ**គួនហ៊ិន**អាស្រ័យ លុះ**គួនហ៊ិន**ឃើញតាចាស់អុជចង្កៀងភ្លឺឡើង ក៏ក្រឡេកទៅឃើញរូបក្នុងព្រះបត់ពិតជារូប**គួនអ៊ូ**ជាបិតា ដែលតាចាស់ទុកបូជាលើហ៊ឹង **គួនហ៊ិន**សម្លឹងយល់ជាក់ក៏ដាក់មុខក្រាបទូញយំនៅទីនោះ។

តាចាស់ឆ្ងល់ណាស់ក៏សួរថា ហេតុម្ដេចបានជាអ្នកឃើញរូបក្នុងព្រះបត់នេះហើយ ក៏យំដូច្នេះ? **គួនហ៊ិន**ឆ្លើយថា រូបនេះហើយគឺបិតារបស់ខ្ញុំ។ តាចាស់ឮដូច្នោះក៏ពិគ្រោះ មើលបែបភាពរូបក្នុងឆាកនិងរូបមុខមាត់**គួនហ៊ិន**ប្រហែលគ្នា ទើបក្រាបសិរសាសំពះ**គួនហ៊ិន** ៗក៏សួរថា ហេតុប្រការម្ដេចបានជាគូររូបបិតាខ្ញុំទុកដូច្នេះ? តាចាស់ឆ្លើយថា រូបលោកនេះកាលនៅរស់នៅឡើយ រមែងរន្ទឺឮល្បី មនុស្សប្រុសស្រីស្រឡាញ់រាប់អានគ្រប់កន្លែង លុះលោកនេះធ្វើកាលកិរិយាក្ស័យជីវិតទៅ ក៏នៅបានជាទេវព្រ័ក្សស័ក្ដិសិទ្ធិពូកែណាស់ ហេតុនេះទើបមហាជនទាំងឡាយនាំគ្នាខ្វល់ខ្វាយគោរពរាប់អានជាទីពឹងពំនាក់ គូររូបលោកមកដាក់ទុកបូជាគ្រប់គ្រឹហាស្ថាន ថាហើយតាចាស់ក៏ចូលទៅលើកថាសចានអាហារមកឲ្យ**គួនហ៊ិន**បរិភោគ ហើយតាចាស់ក៏ចុះទៅដឹកសេះ**គួនហ៊ិន**មកចងទុកក្រោមផ្ទះ ហើយឡើងមកបិទទ្វារផ្ទះរៀបនឹងនិទ្រា។

ឯ**ភួចៀង**ដែលរត់ពី**គួនហ៊ុន**ទៅ លុះយប់ជ្រៅហើយក៏បរសេះគេចត្រឡប់រកផ្លូវនឹងវេះទៅឲ្យផុតពីដៃ**គួនហ៊ុន** ជាចៃដន្យកម្មនាំបណ្ដាលឲ្យ**ភួចៀង**វង្វេងមាគ៌ាទៅពារលើផ្ទះតាចាស់ដែល**គួនហ៊ុន**សំណាក់នោះ លុះ**ភួជៀង**ក្រឡេកទៅឃើញផ្ទះក្បែរភ្នំក៏តម្រង់ចូលទៅ ហើយចុះពីលើសេះ ដើរចូលទៅដល់មាត់ទ្វារផ្ទះគោះហៅពីក្រៅ គ្រានោះតាចាស់ កំពុងនិយាយនឹង**គួនហ៊ុន**ក្នុងផ្ទះ លុះឮស្នូរគោះទ្វារហៅពីក្រៅ គ្រានោះតាចាស់កំពុងនិយាយនឹង**គួនហ៊ុន**ក្នុងផ្ទះ លុះឮស្នូរគោះទ្វារហៅពីក្រៅ ក៏ក្រោកដើរសំដៅទៅសួរថា នរណាហៅមានការអ្វីមករកយើងថ្មើរនេះ? **ភួចៀង**ឆ្លើយថា ខ្ញុំឈ្មោះ**ភួចៀង**ទាហានស្រុកកាំងតាំង មកពីច្បាំងសុំសំណាក់មួយយប់ព្រឹកឡើងនឹងទៅ។

**គួនហ៊ុន**ឮច្បាស់ថាឈ្មោះ**ភួចៀង** ក៏ផ្អៀងខ្លួនលូកទៅចាប់ដាវក្រោកស្ទុះភ្លែតទៅដល់មាត់ទ្វារ តាចាស់ម៉ីម្នាបើកទ្វារឡើងភ្លើងចាំងទៅឃើញច្បាស់ **គួនហ៊ុន**ស្រែកវ៉ាសថា អាទាហានស្រុកកាំងតាំងជាហើយ អាឯងកុំរត់ **គួនហ៊ុន**ក៏លោតទៅកាប់។ **ភួចៀង**ក៏គេចប្រញាប់រត់ទៅដោយឮសំឡេងច្បាស់ជា**គួនហ៊ុន** ក៏ភ័យណាស់ទទួលក្រឡេកទៅឃើញ**គួនអ៊ូ**ដែលស្លាប់នៅឈរពាំងពីមុខ កាន់ដាវលើកឡើងនឹងកាប់ក៏ដូចគេភ្ញាក់ដួលចុះ។ **គួនហ៊ុន**ក៏ស្ទុះទៅទាន់កាប់**ភួចៀង**ស្លាប់នៅទីនោះ ហើយយកដាវរបស់**គួនអ៊ូ**ជាបិតា ដែល**ភួចៀង**យកបានទៅនោះបានមកវិញ ហើយក៏ពុះទ្រូងអារយកថ្លើមបេះដូង**ភួចៀង** ឡើងទៅធ្វើពលីការសែនឲ្យបិតាលើផ្ទះតាចាស់រួចកាត់យកក្បាល**ភួចៀង**ចងព្រនាក់នឹងកែបសេះ។ លុះព្រឹកឡើង**គួនហ៊ុន**ក៏លាតាចាស់ឡើងសេះត្រឡប់ទៅ ឯតាចាស់នោះ លុះឃើញ**គួនហ៊ុន**ទៅហើយគិតខ្លាចខុសក៏អូសខ្មោច**ភួចៀង**ទៅដុតរំលាយបង់។

ខណៈនោះ**ម៉ាតុង**ជិះសេះបែករត់ក្នុងព្រៃ ពួកទាហានក៏រៀសរវៃតាមទៅប្រហែលពីររយនាក់ ប្រទះនឹង**គួនហ៊ិន**ព្រនាក់ក្បាល**ភួថៀង**បរតម្រង់មកក៏នឹកខ្ញាល់ណាស់ បំបោលសេះចូលទៅព័ទ្ធ**គួនហ៊ិន** ។ឃើញ**ម៉ាតុង**ជាពួក**ភួថៀង**ក៏នឹកខឹងណាស់បរសេះចូលទៅប្រយុទ្ធគ្នា។ ពួកទាហាន**ម៉ាតុង**ក៏ស្រែកហ៊ោគឹកកងចូលទៅព័ទ្ធជុំវិញខ្លួន**គួនហ៊ិន**។

វេលានោះ **តៀវប៉ៅ**ដែលលើកគ្នាទៅតាមរក**គួនហ៊ិន** លុះឮសំឡេងហ៊ោ ក៏បង្ខំបរសេះដេញទាហានរុកបំពានចូលទៅ ខាង**ម៉ាតុង**ឃើញទ័ពជំនួយមកច្រើនណាស់ក៏ក្រលាស់ថយរត់ទៅ **តៀវប៉ៅ**ក៏សង្គុញដេញតាមពីក្រោយទៅប្រទះនឹង**គួនហ៊ិន**ហើយនាំគ្នាដេញសង្កិនទៅប្រហែលហាសិបសិនមិនទាន់ ក៏នាំគ្នាត្រឡប់មកវិញ។ **តៀវប៉ៅ**និង**គួនហ៊ិន**នោះមិញ ក៏លើកទ័ពចូលទៅក្រាបបង្គំគាល់ព្រះចៅ**ឡៅពី** ថ្វាយក្បាល**ភួថៀង**ហើយក៏ពណ៌នារឿងរ៉ាវថ្វាយទ្រង់ព្រះសណ្ដាប់គ្រប់ប្រការ។ ព្រះចៅ**ឡៅពី**ក៏ទ្រង់មានព្រះទ័យសោមនស្សពន់ប្រមាណ នឹកសរសើរទៅដល់**គួនអ៊ូ**ថា ប្អូនអញពេញជាជាតិទាហានមិនបង់សន្ដាន ដែលបានស្រឡាញ់គ្នាមកនោះឡើយ សូម្បីស្លាប់ទៅជាខ្មោចហើយ ក៏នៅឧស្សាហ៍តាមទៅជួយកូនឲ្យបានសងសឹកនឹងខ្មាំងសត្រូវជាគូព្យាបាទ ហើយត្រាស់បង្គាប់ឲ្យអាមាត្យរៀបចំតុលៀងភោជនាហារប្រទាន**តៀវប៉ៅ, គួនហ៊ិន**បរិភោគជាមួយនឹងទាហានទាំងពួង។

ឯ**ម៉ាតុង**ដែលរត់ទៅក៏ប្រទះនឹង**ហាន់តុង, ជីវថាយ** ហើយគិតគ្នាតាំងបន្ទាយបញ្ចុះបញ្ចូលប្រមូលទាហានដែលបែករត់ចូលព្រៃ លុះបានទាហានច្រើនហើយ ក៏ចាត់ចែងឲ្យយាមល្បាតលាតក្រវែលមើលផ្លូវ ក្រែងសត្រូវលើកទៅញាំញី។ **ម៉ាតុង**ក៏ថា នឹងតាំងនៅទីកន្លែងជាមួយគ្នាមិនស្រួលទេ ត្រូវឲ្យ**ហាន់តុង, ជីវថាយ**រក្សាបន្ទាយនៅទីនេះចុះ ខ្លួនខ្ញុំ និង**ប៊ីហង, ប៉ៅស៊្វយិន**នឹងលើកទាហានទៅតាំងបន្ទាយនៅ

តំបន់កាំងជូ នោះ**ហាន់តុង, ជីវថាយ**ក៏យល់ឃើញត្រូវ **ម៉ាតុង**ក៏ចាត់ចែងបែងទាហាន ហើយក៏លើកទ័ពទៅបោះបន្ទាយនៅតំបន់កាំងជូ។

ក្នុងពេលយប់នោះ ទាហានទាំងពួងក៏ស្រែកយំទ្រហឹងក្នុងបន្ទាយ **ប៊ឺហាង**ឮដូច្នោះក៏ពិភាល់ក្នុងចិត្តណាស់ ទើបផ្ទៀងត្រចៀកស្ដាប់សព្ទសម្ដី តើវានឹងនិយាយគ្នាប្រការម្ដេចខ្លះ ឮទាហានពួកមួយយំនិយាយគ្នាថា យើងរាល់គ្នាសុទ្ធតែទាហានស្រុកកេងជីវ ព្រោះកាលអា**លីបង**វាធ្វើកលឧបាយ ឯ**ប៊ឺហាង**និង**ប៉ៅស៊ូយិន**សោត វាក៏ជាតួកលសឹកខាងក្នុង បានជាខូចបង់ស្រុកកេងជីវ ទាំង**គួនអ៊ូ**ចៅហ្វាយយើងក៏ស្លាប់អសារ ខ្លួនយើងរាល់គ្នាក៏ធ្លាក់មកជាទាហានស្រុកកាំងតាំង ឥឡូវព្រះចៅ**ឡៅពី**ក៏លើកទ័ពមកច្បាំងព្រះអង្គឯងហើយ កាលណាឡើយស្រុកកាំងតាំងនឹងគង់នៅបាន មុខជាខ្ទេចខ្ទីពុំខានទេ។ យើងទាំងឡាយគួរតែបបួលគ្នាគិតសម្លាប់អា**ប៉ៅស៊ូយិន**និង**ប៊ឺហាង** ពីរនាក់នេះចេញ ហើយកាត់យកក្បាលវាទៅថ្វាយព្រះចៅ**ឡៅពី** នឹងបានសេចក្ដីគាប់ប្រសើរទេឬ? ពួកទាហានក៏យល់ឃើញព្រមគ្នាទើបថា បើដូច្នោះយើងចាំមើលកលការ បើបានឱកាសវេលាណានឹងនាំគ្នាសម្រេចវាចេញ។

ឯ**ប៊ឺហាង**បានឮដូច្នោះក៏ភ័យណាស់ ស្រូតទៅប្រាប់**ប៉ៅស៊ូយិន**ថា ពួកទាហានវាគិតព្រមគ្នានឹងសម្លាប់យើងទាំងពីរនាក់ហើយ យើងនឹងមិននាំគ្នាស្លាប់បង់សៀតទេឬ? បើដូច្នេះមានតែយើងគិតកែខ្លួនឲ្យបាន ព្រោះព្រះចៅ**ឡៅពី**លើកទ័ពមកគ្រានេះ ដោយទ្រង់ពិរោធក្រោធក្រៃពេកណាស់ ពីព្រោះ**ភួចៀង**និង**ម៉ាតុង**ជាតួសត្រូវ ឥឡូវ**ភួចៀង**ស្លាប់ទៅហើយ នៅតែ**ម៉ាតុង** យើងត្រូវនាំគ្នាកាត់យកក្បាល**ម៉ាតុង**ទៅថ្វាយព្រះចៅ**ឡៅពី**ឲ្យបានហើយ សឹមយើងកែខ្លួនថា ព្រោះយើងធ្លាក់ខ្លួនទៅនៅក្នុងកណ្ដាប់ដៃ**ភួចៀង, ម៉ាតុង** ហើយក៏ត្រូវតែធ្វើការតាមអំណាចគេ ៗវាយយកបានស្រុកកេងជីវវេលាណា អាជ្ញាសិទ្ធិនៅលើគេទាំងអស់ ឯខ្លួនយើងនឹងបានតាំងចិត្ត

នៅនឹងរហូតទៅក៏ទេ គឺបង្អង់នៅចាំតែនឹងយកក្បាល**ភួចៀង**, **ម៉ាតុង**ប៉ុណ្ណោះ ទម្រាំរកឱកាសបាន។ វេលានេះបានឱកាសហើយ ទើបកាត់ក្បាលយកមកថ្វាយ ទោះបីយ៉ាងណាក៏គង់តែព្រះចៅ**ឡៅពី**នឹងពេញព្រះទ័យមិនខាន ពុំមានប្រកាន់ទោសយើងឡើយ។

**ប៉ៅស៊ូយិន**មិនយល់តាមសោះ ដោះថា ព្រះចៅ**ឡៅពី**នោះមានសតិបញ្ញាជ្រៅល្អិតឆ្ងាយទូលាយណាស់ គង់ជ្រាបថាយើងធ្វើការនោះកែខ្លួន សឹកប្រចួននឹងចាញ់ហើយ ទើបក្លែងកាត់យកក្បាល**ម៉ាតុង**មកថ្វាយ។ ព្រះចៅ**ឡៅពី**នឹងងាយប្រហារជីវិតយើងអសារឥតការ។ **ប៊ីហង**ថា ខ្ញុំយល់ឃើញថា មុខជាមិនមែនដូច្នោះទេ ព្រោះព្រះចៅ**ឡៅពី**នោះមានសតិបញ្ញា ប្រាថ្នាតែនឹងល្បួងយកចិត្តមនុស្សទៅធ្វើទាហានច្បាំងតទៅ ឯ**អាតៅ**ជាព្រះរាជឱរសព្រះចៅ**ឡៅពី**ក៏ជាក្មួយខ្ញុំនឹងមិនគិតយោគយល់ខ្លះទេឬ? ទោះដូចម្ដេចក៏គង់តែនឹងមិនស្លាប់ បើយើងមិនប្រញាប់គិតដូច្នេះទេ មុខជានឹងស្លាប់អសារ។ **ប៉ៅស៊ូយិន**ក៏យល់ឃើញត្រូវ ទាំងពីរនាក់ក៏ប្រុងប្រៀបរៀបសេះទុកបម្រុងការ លុះពេលកណ្ដាលអាធ្រាត្រស្ងាត់ ក៏នាំគ្នាលបចូលទៅដល់ទីដំណេក ហើយកាត់យកក្បាល**ម៉ាតុង**ចងភ្ជាប់នឹងកែបសេះ រួចនាំគ្នាឡើងជិះសេះបរនាំទាហានចេញទៅកាន់កងទ័ពព្រះចៅ**ឡៅពី**។

ឯពួកយាមល្បាតព្រះចៅ**ឡៅពី** ក៏ចូលទៅចាប់ខ្លួនបានហើយសួរថា ខ្លួនអ្នកទាំងពីរនាក់នេះមកពីណា? **ប៊ីហង** និង**ប៉ៅស៊ូយិន**ក៏ប្រាប់ថា យើងខ្ញុំជាបក្សពួកជាមួយគ្នានឹង**ម៉ាតុង** យើងខ្ញុំកាត់យកក្បាល**ម៉ាតុង**មកថ្វាយព្រះចៅ**ឡៅពី**។ ទាហានក៏នាំខ្លួន**ប៊ីហង** និង**ប៉ៅស៊ូយិន**ចូលទៅទុកនៅខាងក្រៅទ្វារ ហើយក៏ចូលទៅទូលព្រះចៅ**ឡៅពី** ។បានស្ដាប់ក៏ហៅខ្លួន**ប៊ីហង** និង**ប៉ៅស៊ូយិន**ចូលទៅគាល់ ហើយ**ប៊ីហង**

និង**ប៉ៅស៊ូយិន**ក៏ចូលទៅដល់ផ្ទាល់ព្រះភក្ត្រ ទម្លាក់ក្បាល**ម៉ាតុង**ហើយក៏យំ ទូលរឿងរ៉ាវតាមប្រព្រឹត្តិហេតុគ្រប់ប្រការ។

ព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្តាប់ក៏ខ្ញាល់ខ្លាំងណាស់ត្រាស់ថា អញបានលើក កងទ័ពចេញពីស្រុកសែឈ្លួនយូរណាស់មកហើយ ឯងពួនមុខលាក់ខ្លួននៅទីឯណា បានជាមិនមករកអញ? វេលានេះយើងឃើញថា កម្លាំងឯងនឹងប្រុងចាញ់អញជា ប្រាកដ ទើបក្លែងកាត់យកក្បាល**ម៉ាតុង**មកជានុយបញ្ឆោតចិត្ត បើអញនឹងចិញ្ចឹម ឯងទុកឲ្យគង់ជីវិតក៏ឥតអំពើ ដូចជាអញមិនអើពើស្រឡាញ់**គួនអ៊ូ**សោះ។ អញក៏មិន ដឹងនឹងយកមុខទៅទុកឯណា ត្រាស់ហើយក៏បង្គាប់**គួនហ៊ិន**ឲ្យតាំងគ្រឿងបូជា និង ពលីការសែនឲ្យ**គួនអ៊ូ** ហើយឲ្យ**គួនហ៊ិន**ផ្លាស់ខោអាវអា**ប៊ីហង** និង**ប៉ៅស៊ូយិន**ចងឲ្យ ក្រាបនៅមុខតុគ្រឿងបូជា ហើយព្រះចៅ**ឡៅពី**ក៏ទ្រង់ដោះអាវពន្លះសាច់អា**ប៊ីហង, ប៉ៅស៊ូយិន**សែនឲ្យ**គួនអ៊ូ** ហើយកាត់យកក្បាលឲ្យទាហានអូសយកសាកសពទៅ ចោលបង់។

**តៀវប៉ៅ**ឃើញដូច្នោះក៏គិតអាណិតអានាថដល់ដល់បិតា ទើបក្រាបបង្គំទូល ព្រះចៅ**ឡៅពី**យំហើយទូលថា អស់ទាំងគេដែលបានធ្វើប្រទូសរ៉ាយ**គួនអ៊ូ**នោះ **គួនហ៊ិន**ជាកូនបានសងសឹកជាជំនួសអស់ហើយ នៅឡើយតែពួកអាកំណាចដែលវា បង្អាចសម្លាប់ព្រះបិតាទូលបង្គំជាខ្ញុំ ទូលព្រះបង្គំជាខ្ញុំមិនទាន់បានសងសឹកជំនួស បិតាសោះ។ ព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្តាប់ដូច្នោះ ក៏ត្រាស់ប្រាប់**តៀវប៉ៅ**ថា ចៅកុំ គិតតូចចិត្តឡើយ យើងបានតាំងចិត្តហើយថា ដែលមកធ្វើការទាំងនេះប្រាថ្នានឹង រំលាងបំផ្លាញស្រុកកាំងតាំង សងសឹកជួសបិតាចៅផង បើបានស្រុកកាំងតាំង ហើយ យើងនឹងស៊ើបចាប់យកខ្លួនអាពីរនាក់ ដែលវាប្រទូសរ៉ាយបិតាចៅនោះ មក សម្លាប់សែនឲ្យដូចគ្នា។ **តៀវប៉ៅ**បានឮព្រះរាជឱង្ការ ក៏មានចិត្តប្រីតាប្រាមោទ្រពន់

ពេកណាស់ ថ្វាយបង្គំលាចេញទៅ។ កាលព្រះចៅ**ឡៅពី**មានជ័យជម្នះ គ្រានោះកិត្តិស័ព្ទក៏រន្ទឺឮល្បីផ្សាយទូទៅក្នុងស្រុកកាំងតាំង អស់ទាំងពួកពលទាហាន ក៏មានចិត្តនោះស្ញប់ស្ញែងរអែងខ្លាចអំណាចព្រះចៅ**ឡៅពី**ពន់ប្រមាណណាស់។

គ្រានោះ**ហាន់តុង**និង**ជីវថាយ**ដែលរក្សាបន្ទាយនៅនោះ លុះឃើញទាហានទាំងពួងរួញរាអាដៃ ក៏ចេះតែស្រដីថ្នមលោមចិត្តដោយគំនិតឧបាយផ្សេងៗ នោះមានពួកល្បាតចូលទៅប្រាប់ថា **ប៊ីហង**និង**ប៉ៅស៊ូយិន**ប្រទូសរ៉ាយ**ម៉ាតុង** លបកាត់ក្បាល**ម៉ាតុង**ទៅថ្វាយព្រះចៅ**ឡៅពី** ឮថាព្រះចៅ**ឡៅពី**សម្លាប់**ប៊ីហង** និង**ប៉ៅស៊ូយិន**ទៅទៀត។ **ហាន់តុង** និង**ជីវថាយ**ឮដូច្នោះក៏រឹតតែភ័យណាស់ ទើបចាត់ចែងទាហានឱ្យនៅរក្សាបន្ទាយ ទាំងពីរនាក់ក៏នាំគ្នាស្រូតរូតទៅស្រុកកាំងតាំង នាំយកសេចក្ដីដែលបានតច្បាំងនោះទៅទូលព្រះចៅ**ស៊ុនគួន**ឱ្យបានជ្រាបគ្រប់ប្រការ។

ព្រះចៅ**ស៊ុនគួន**បានជ្រាបកាលណា ក៏មានព្រះទ័យតក់ស្លុតរន្ធត់ខ្លាចណាស់ ត្រាស់ឱ្យប្រជុំនាហ្មឺនមុខមន្ត្រីមកប្រឹក្សា។ **ប៉ៅជិត**ទូលថា ព្រះចៅ**ឡៅពី**ក្រោធខឹងតាំងលើកទ័ពមកគ្រានេះ ដើមកំហឹងនឹងឈ្មោះប្រាំពីរនាក់ គឺ**ភូចៀង**, **លីបង**, **ម៉ាតុង**, **ប៊ីហង**, **ប៉ៅស៊ូយិន** ទាំងប្រាំនាក់នេះប្រទូសរ៉ាយនឹង**គួនអ៊ូ**ក៏ស្លាប់អស់ទៅហើយ នៅតែ**ហាមកៀង** និង**ទៀវកាត់**ពីរនាក់ទៀត ដែលសម្លាប់**តៀវហ៊ុយ**ហើយមកនៅក្នុងស្រុកយើង គួរតែយើងនឹងចាប់ខ្លួនអ្នកទាំងពីរនោះ ឱ្យបម្រើនឃុំនាំទៅជាមួយក្បាល**តៀវហ៊ុយ**ទៅថ្វាយវិញ ហើយត្រូវបង្វិលខ្លួននាង**ស៊ុនហ៊ូយិន**និងស្រុកកេងជីវឱ្យទៅគេវិញផង រួចត្រូវថ្វាយផ្កាមាសប្រាក់ សុំជាព្រះរាជមេត្រីដោយសេចក្ដីរាប់អាន នឹងបានព្រួតគ្នាកម្ចាត់**ចូភី** មុខជាព្រះចៅ**ឡៅពី**នឹងថយទ័ពត្រឡប់ទៅវិញពុំខាន។

ព្រះចៅ**ស៊ុនគួន**យល់ឃើញត្រូវ ទើបបង្គាប់ភ្នាក់ងារឲ្យធ្វើហិបឈើក្រអូប ដាក់ក្បាល**តៀវហ៊ុយ** ហើយចាប់យកខ្លួន**ហាមកៀង** និង**ទៀវកាត់**ដាក់ទ្រុងដែក ហើយចាត់ឲ្យធ្វើផ្កាមាស-ប្រាក់ដាក់ជាគ្រឿងបណ្ណាការ តែងជាព្រះរាជសារជាសេចក្ដីមេត្រី តាមសម្ដី**ប៉ៅជិត**ក្រាបទូលគ្រប់ប្រការ ឯនាង**ស៊ុនហ៊ូយិន**នោះឲ្យទូលថា នឹងបញ្ជូនខ្លួនទៅថ្វាយជាក្រោយ ហើយឲ្យ**ជៀប៉េង**ជារាជទូតនាំសារនិងគ្រឿងបណ្ណាការ ទៅថ្វាយព្រះចៅ**ឡៅពី**។ **ជៀប៉េង**ក៏ឃុំនាំខ្លួនមនុស្សទោស និងសារបណ្ណាការ ចេញទៅតាមបង្គាប់។

ព្រះចៅ**ឡៅពី**ក៏ឲ្យរៀបកងទ័ព នឹងលើកទៅវាយយកស្រុកកាំងតាំង នៅមិនទាន់សម្រេច ទទួលមានទាហានល្បាតចូលមកទូលថា មានបម្រើពីស្រុកកាំងតាំងនាំសារ បណ្ណាការ និងមនុស្សទោសមកថ្វាយ។ ព្រះចៅ**ឡៅពី**មានព្រះទ័យត្រេកអរណាស់ ទះព្រះហស្តហើយស្រែកថា ជាបុណ្យរបស់យើង បានជាទេពតាបណ្ដាលនាំអាសត្រូវឲ្យគេចាប់មកឲ្យយើងសងសឹក។ ហើយបង្គាប់**តៀវប៉ៅ**ឲ្យតែងគ្រឿងបូជា និងសែនព្រេនឲ្យ**តៀវហ៊ុយ** ហើយបង្គាប់ឲ្យលើកហិបចូលមកនោះទាហានក៏លើកហិប និងទ្រុងមនុស្សចូលទៅចំពោះមុខព្រះភក្ត្រ ព្រះចៅ**ឡៅពី**ក៏ចុះពីលើកៅអីទៅបើកហិបលើកក្បាល**តៀវហ៊ុយ**មកដាក់លើតុគ្រឿងបូជា ឃើញមុខ**តៀវហ៊ុយ**នៅស្រស់ដូចមនុស្សធម្មតា ព្រះចៅ**ឡៅពី**ក៏ទ្រង់មានព្រះទ័យអាណិតណាស់ ទ្រង់ព្រះកន្សែងសោកានឹក**តៀវហ៊ុយ**ជាច្រើន។

ឯ**តៀវប៉ៅ**នោះ លុះឃើញក្បាលបិតាក៏យំសោក សេចក្ដីខឹងក្ដៅផ្សាក៏បណ្ដាលឲ្យឆេះឆួលឡើង នឹងអត់សង្កត់ចាំព្រះចៅ**ឡៅពី**ត្រាស់បង្គាប់ពុំទាន់ **តៀវប៉ៅ**ក៏ស្ទុះទៅចាប់កាន់ដាវ ហើយរត់ទៅហែកកន្ត្រាក់ទ្រុងដែកបែកបាក់អស់ អូសទាញយកក្បាល**ហាមកៀង** និង**ទៀវកាត់**ចេញផុតពីទ្រុងមក ហើយយកដាវ

កាប់វះសាច់ផ្តាច់ជាដុំតូចធំ ហើយលើកយកទៅសែនសពបិតា កាត់ទាំងសិរសាទៅដោតផ្កាល។ ព្រះចៅ**ឡៅពី**ក៏បណ្តាលឱ្យក្តៅក្នុងព្រះទ័យពន់ប្រមាណ មិនបានទតសំបុត្រសារ ត្រាស់ថា យើងនឹងច្បាំងឱ្យត្រាតែល្អិតខ្ទេចស្រុកកាំងតាំងទៅជាផង់ធូលី នោះ**ម៉ាលៀង**ទីប្រឹក្សាទូលថា ពួកអាកំណាចដែលវាបង្អាចប្រទូសរ៉ាយ**គួនអ៊ូ**និង**តៀវហ៊ុយ**ទាំងប៉ុន្មានយើងបានសងសឹកជំនួសវិញអស់រលីងហើយ គ្រានេះ**ស៊ុនគួន**ប្រើ**ធៀប៉េង**ឱ្យនាំសារ និងបណ្ណាការ ផ្កាមាស ប្រាក់មកថ្វាយជាចំណុះ ហើយសុំជូនខ្លួននាង**ស៊ុនហ៊្យូយិន**និងស្រុកកេងជីវថ្វាយវិញដូច្នោះ ដើម្បីនឹងសុំចងព្រះរាជមេត្រីជួយគ្នាកម្ចាត់**ចូភី**នោះ ទ្រង់នឹងប្រោសដូចម្តេចទៅវិញ។

ព្រះចៅ**ឡៅពី**ខ្ញាល់ខ្លាំងណាស់ថា យើងព្យាបាទគ្នានឹង**ស៊ុនគួន** ព្រោះបានចេញវាចាជាសត្យបដិញ្ញាណដល់**គួនអ៊ូ, តៀវហ៊ុយ**ជាប្អូនយើងហើយ ពេលនេះ**គួនអ៊ូ, តៀវហ៊ុយ**ស្លាប់ទៅហើយ យើងនៅរស់ ហើយត្រឡប់ទៅស្មោះស្ម័គ្រមេត្រីនឹង**ស៊ុនគួន**វិញនោះ មិនបង់ពាក្យសត្យទេឬ? យើងមិនស្តាប់ នឹងច្បាំងសម្លាប់អាពួកស្រុកកាំងតាំងឱ្យបាន រួចសឹមយើងលើកទាហានទៅសង្កត់**ចូភី**ទៀត។ ត្រាស់ដូច្នោះ ហើយបង្គាប់ឱ្យយកខ្លួនរាជទូតទៅសម្លាប់ បណ្តានាហ្មឺន និងទីប្រឹក្សាក៏នាំគ្នាទូលសុំជីវិត**ធៀប៉េង** លុះប្រោសឱ្យហើយ ក៏លែង**ធៀប៉េង**ទៅ។ **ធៀប៉េង**ក៏វិលទៅទូលព្រះចៅ**ស៊ុនគួន**ថា ព្រះចៅ**ឡៅពី**មិនព្រមស្តាប់ទេ រួចថានឹងលើកទ័ពមកវាយស្រុកកាំងតាំងឱ្យបាន រួចសឹមទៅវាយយកស្រុក**ចូភី**ទៀត ហើយទូលតាមសេចក្តីដែលដឹងឃើញទាំងប៉ុន្មាន ថ្វាយព្រះចៅ**ស៊ុនគួន**ស្តាប់គ្រប់ប្រការ។

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លក៖*

www.khmerliterature.wordpress.com

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៦៥

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពីព្រះចៅ**ស៊ុនគួន** ឲ្យយកខ្លួន**ឡុកស៊ុន**មកតាំងជាមេកងធំ ត្រួតលើនាយទាហាន នឹងលើកទ័ពទៅតនឹងព្រះចៅ**ឡៅពី** ១ចាញ់ទ័ព**ឡុកស៊ុក** ព្រះចៅ**ចូភី**លើកទ័ពមកច្បាំងទៀត ក៏ចាញ់ទ័ពស្រុកកាំងតាំង)។*

**ព្រះចៅស៊ុនគួន** បានទ្រង់ព្រះសណ្ដាប់ញាប់ញ័រព្រះទ័យភ័យទាល់តែស្លុតព្រះកាយា មិនបានតបថាប្រការម្ដេច។ **កាំចេក**ទីប្រឹក្សាទូលថា មានមនុស្សម្នាក់ល្អណាស់នៅក្នុងស្រុកយើងនេះ ហេតុម្ដេចថាទ្រង់មិនយកមកប្រើឲ្យធ្វើរាជការ? ព្រះចៅ**ស៊ុនគួន**ត្រាស់សួរថា នរណានោះ? **កាំចេក**ទូលថា **ឡុកស៊ុន**នៅស្រុកកេងជីវ ទូលបង្គំយល់ឃើញថាមានតម្រិះប្រាជ្ញាប្រហែលនឹង**ជីវយី** កាលគ្រាយើងទៅវាយយកស្រុកកេងជីវនោះ **ឡុកស៊ុន**ក៏បានជួយរិះគិតផងទើបបានស្រុកកេងជីវ សូមឲ្យទ្រង់យកមកធ្វើការចុះ បើមិនឈ្នះព្រះចៅ**ឡៅពី**ទេ ឲ្យធ្វើទោសទូលបង្គំជាខ្ញុំចុះ។

ព្រះចៅ**ស៊ុនគួន**បានឮដូច្នោះ ក៏ពេញព្រះទ័យណាស់ ត្រាស់ថា ខ្ញុំភ្លេចនឹកមិនឃើញ **ទៀវចៀវ**ទូលថា **ឡុកស៊ុន**នោះជាមនុស្សតូចទាប ធ្លាប់ធ្វើរាជការតែការឯណាតិចតួច ដែលនឹងយកមកធ្វើការធំតច្បាំងនឹងព្រះចៅ**ឡៅពី**នោះមិនកើតទេ។ **កោះយ៉ុង**ឆ្លើយឡើងទៀតថា **ឡុកស៊ុន**នោះជាមនុស្សតូចទាបណាស់ អាយុក៏នៅក្មេង សេចក្ដីខ្លីគំនិត មិនទាន់ចេះគិតធ្វើការធំ នឹងយកមកបន្ទំឲ្យកាន់ការជានាយកលើគេចាស់ទុំមិនសមគួរ គេក៏គង់នឹងមិនស្ដាប់។

**ប៉ៅជិត**ទូលថា **ឡុកស៊ុន**នោះជាមនុស្សក្មេងណាស់ ទោះបីនឹងចេះដឹងយ៉ាងណាក៏ធ្វើបានតែត្រឹមក្រមការស្រុកតូចតាច នឹងលើកឲ្យមានអំណាចពេញទីជាមេកងទ័ព បង្គាប់បញ្ជាលើទាហានដូចម្ដេចបាន? **កាំចេក**ស្រែកថា បើមិនយក**ឡុកស៊ុន**ចូលមកធ្វើការរាជការគ្រានេះទេ ស្រុកកាំងតាំងនឹងខូចជាប្រាកដហើយ។ បើអស់អ្នករាល់គ្នាយល់ថា**ឡុកស៊ុន**មិនល្អទេ ខ្ញុំនិងភរិយាបុត្រសូមទទួលធានាថា បើ**ឡុកស៊ុន**ធ្វើមេទ័ពទៅច្បាំងចាញ់ព្រះចៅ**ឡៅពី**វេលាណា សុំឲ្យយកខ្ញុំនិងភរិយាបុត្រទៅកាត់ក្បាលទាំងអស់គ្នាចេញចុះ។

ព្រះចៅ**ស៊ុនគួន**បានទ្រង់ព្រះសណ្ដាប់ច្បាស់ត្រាស់ថា អស់អ្នករាល់គ្នាកុំប្រកែកគ្នាអី **ឡុកស៊ុន**នោះខ្ញុំបានស្គាល់ច្បាស់ ត្រូវចិត្តខ្ញុំណាស់ហើយ ៗក៏ត្រាស់បង្គាប់ឲ្យទៅហៅ**ឡុកស៊ុន**ចូលមកគាល់។ បម្រើក៏ចេញទៅហៅ**ឡុកស៊ុន**ឯស្រុកកេងជីវ លុះមកដល់ហើយក៏ចូលគាល់ព្រះចៅ**ស៊ុនគួន**។ **ឡុកស៊ុន**ក្រាបថ្វាយបង្គំហើយក៏នៅស្ងៀម ព្រះចៅ**ស៊ុនគួន**ក៏ប្រស្រ័យសាកសួរតាមគួរសមថា ខ្លួនអ្នកមានសតិបញ្ញាល្អមែន តែយើងមិនបានចាប់ភ្លឹកនឹកឃើញសោះក៏ភ្លេចអស់ទៅ នេះហាក់ជា**កាំចេក**នឹកនិយាយឡើងបានជាយើងនឹកឃើញឲ្យទៅអញ្ជើញអ្នកមក ដើម្បីសុំឲ្យអ្នកជួយទប់ទល់ ធ្វើជាមេកងទ័ពបង្គាប់បញ្ជាលើសេនាទាហាន នឹងបានតស៊ូនឹងព្រះចៅ**ឡៅពី**គ្រានេះ។

**ឡុកស៊ុន**ទូលថា អស់លោកជាសេនាបតីធំៗ ក៏មាននៅជួបជុំពេញស្រុកកាំងតាំង សឹងតែជាខ្ញុំរាជការចាស់ ទូលបង្គំជាខ្ញុំនៅក្មេងណាស់ ទាំងសតិបញ្ញាក៏មិនសូវប៉ិនប្រសប់ផង។ ព្រះចៅ**ស៊ុនគួន**ត្រាស់ថា បើក្រែងអស់នាហ្មឺនធំៗ ឬនាយទ័ពនាយកងទាំងពួងនឹងរឹងទទឹងមិនស្ដាប់បង្គាប់បញ្ជា យើងនឹងឲ្យគ្រប៊ឹជាអាជ្ញាសិទ្ធិលើអ្នកកាន់ ប្រសិនបើឈ្មោះណារឹងទទឹងពុំស្ដាប់ ឲ្យអ្នកកាប់ផ្ដាច់ក្បាលតាម

អំណាចចុះ។ **ឡុកស៊ុន**ទូលថា ទ្រង់នឹងប្រោសប្រទានឲ្យទូលព្រះបង្គំជាខ្ញុំមានយសដូច្នោះហើយ ព្រឹកស្អែកនេះ សូមឲ្យទ្រង់ហៅអស់នាហ្មឺនតូចធំមកក្រាបបង្គំគាល់ទាំងអស់គ្នា រួចសឹមទ្រង់ប្រទានគ្រប៊ីអាជ្ញាសិទ្ធិឲ្យទូលបង្គំជាខ្ញុំ ចំពោះមុខអស់លោករាល់គ្នាតាមការចុះ។ **កាំចេក**ទូលថា ប្រវេណីបុរាណដែលនឹងតាំងមេទ័ពធំឲ្យបង្គាប់បញ្ជាលើទាហាននោះ ត្រូវតែព្រះរាជទានឲ្យអ្នកនោះឡើងអង្គុយលើទីខ្ពស់ឧត្តមសមគួរ ហើយទើបប្រគល់ត្រាអាជ្ញាសិទ្ធិសម្រាប់ខ្លួន ឲ្យនាហ្មឺននិងរាស្ត្រឃើញទាំងអស់គ្នា។ ព្រះចៅ**ស៊ុនគួន**យល់ឃើញត្រូវ លុះវេលាយប់ទើបត្រាស់បង្គាប់ឲ្យធ្វើផ្លូវនិងរបៀបរៀបតាំងមេកងទ័ពតាមទំនៀមទម្លាប់បុរាណ លុះព្រឹកឡើងត្រាស់ឲ្យប្រជុំអស់នាហ្មឺនតូចធំទាំងប៉ុន្មាន មាន**ឡុកស៊ុន**ជាប្រធាន ហើយព្រះចៅ**ស៊ុនគួន**ក៏ឲ្យអញ្ជើញ**ឡុកស៊ុន**ឡើងអង្គុយលើទីកន្លែងមេទ័ព ហើយក៏ប្រកាសព្រះរាជទានអាជ្ញាសិទ្ធិ និងប្រគល់គ្រប៊ីនិងត្រា គ្រឿងឧបភោគបរិភោគ សម្រាប់ឥស្សរិយយសមេទ័ពធំកណ្ដាលទីប្រជុំ នៃសេនាបតីនាហ្មឺនមុខមន្ត្រីទាំងពួងស្រេចហើយ ត្រាស់ឲ្យ**ឡុកស៊ុន**និយាយត្រួតត្រារាជការលើខេត្តខណ្ឌនានា បើអ្នកឯណារឹងទទឹងពុំស្ដាប់ បង្គាប់ឲ្យសម្លាប់តាមអាជ្ញាសិទ្ធិការរណរង្គសង្គ្រាម កុំឲ្យកោតញញើតឡើយ។

**ឡុកស៊ុន**បានទទួលយសជាមេទ័ពធំ ហើយក៏កាន់គ្រប៊ីដើរចេញទៅ ទើបបង្គាប់**ស៊ីសេង, តេងហាង**ជានាយកងស្ដាំឆ្វេង ឲ្យប្រុងប្រៀបរៀបពលយោធា ទាំងទ័ពគោក ទ័ពទឹកឲ្យព្រមព្រៀង ហើយលើកចេញទៅវេលានេះ នោះ**ស៊ីសេង** និង**តេងហាង**ក៏ចេញទៅចាត់ចែងកងទ័ពសព្វគ្រប់ប្រការ រួចស្រេចកាលណាក៏ចូលទៅជម្រាប**ឡុកស៊ុន** ៗក៏ចេញទៅត្រួតមើលហើយលើកចេញទៅ។ ឯ**ហាន់តុង** និង**ជីវថាយ**ដែលនៅរក្សាបន្ទាយខាងក្រៅ លុះដឹងថាព្រះចៅ**ស៊ុនគួន**តាំង**ឡុកស៊ុន**ជា

មេកងទ័ពធំលើកមក ក៏និយាយថា បណ្ដាហ្មឺនក្នុងស្រុកកាំងតាំងនោះអស់ហើយឬ បានជាស្ដេចយើងទៅយក**ឡុកស៊ុន**ក្មេងច្រម៉ក់ ឲ្យធ្វើជាមេទ័ពធំលើកចេញមក នឹងមិនខូចរាជការទៅហើយហ៎ះ! ចរចាគ្នាមិនទាន់ផុតមាត់ ទទួល**ឡុកស៊ុន**លើកទ័ពទៅដល់ នោះ**ឡុកស៊ុន**ក្រឡេកទៅឃើញអាការ និងកិរិយានៃ**ហាន់តុង, ជីវថាយ** នូវអស់នាយទ័ពនាយកងទាំងពួង មកជួបជុំប្រឹក្សាការសង្គ្រាម **ឡុកស៊ុន**ក៏កាន់គ្របីអាជ្ញាសិទ្ធិឈរស្រែកប្រកាសថា ព្រះចៅ**ស៊ុនគួន**បានទ្រង់ព្រះរាជទានយសឲ្យយើងឡើងជាមេទ័ពធំ ហើយដែលយើងលើកទ័ពមកនេះ ដើម្បីនឹងបង្គាប់បញ្ជាលើនាយទ័ពនាយកងរាល់គ្នាឲ្យទទួលស្គាល់ បើអ្នកឯណាធ្វើការបានល្អ ក៏នឹងឲ្យបំណាច់រង្វាន់យ៉ាងខ្ពស់ បើអ្នកឯណាធ្វើខុសក៏ត្រូវចុះទោសយ៉ាងរហ័សពុំត្រាប្រណីឡើយ បើនរណាហើយបានយល់ការដោយប្រការឯណាៗជាផ្លូវចម្រើន ក៏ដាស់តឿនសតិយើងចុះ យើងមិនប្រកាន់យកខុសទេ។ អស់បណ្ដាទាហានក៏ស្ងៀម។

**ជីវថាយ**និយាយនឹង**ឡុកស៊ុន**ថា **ស៊ុយហ្វួន**ជាក្មួយព្រះចៅ**ស៊ុនគួន**តាំងទ័ពនៅស្រុកអ៊ីឡេង ឥឡូវព្រះចៅ**ឡៅពី**ឲ្យទ័ពស្រុកនោះនៅក្នុងចំណោម មនុស្សដែលនៅក្នុងស្រុកនោះក៏អត់ស្បៀងអាហារ ខាងក្រៅស្រុកនោះក៏គ្មាននរណានឹងលើកទៅជួយបាន សូមអញ្ជើញលោកលើកទៅជួយដោយសតិបញ្ញាក្លាហាន ឲ្យបាន**ស៊ុនហួន**រួចចេញមក ដើម្បីឲ្យចៅហ្វាយនាយរបស់យើងសប្បាយព្រះទ័យ ហើយនិងកែខៃគិតធ្វើការតទៅទៀត។ **ឡុកស៊ុន**ថា **ស៊ុនហួន**នោះជាមនុស្សមានអធ្យាស្រ័យដឹងប្រណីសង្គ្រោះអស់ពលទាហាន មានគេរាប់អានស្រឡាញ់ច្រើន ទាំងសេនាទាហានក៏មានមនុស្សល្អច្រើននាក់ អាហារស្បៀងនៅក្នុងស្រុកក៏បរិបូរមិនទាន់ខ្វះខាតទេ គេមិនទាន់ថាអ្វីនៅឡើយ បើយើងវាយទ័ពព្រះចៅ**ឡៅពី**បែកហើយ **ស៊ុនហួន**ក៏គង់

នឹងរួចឯងមិនបាច់ទៅជួយ។ **ជីវថាយ**និងទាហានទាំងពួងឮ**ឡុកស៊ុន**ថាដូច្នោះ ក៏នាំគ្នាបែរមុខញញឹមហើយក៏លាថយចេញទៅក្រៅ។

**ហាន់តុង**និយាយនឹង**ជីវថាយ**ថា ព្រះចៅ**ស៊ុនគួន**តាំង**ឡុកស៊ុន**ឲ្យមកធ្វើជាមេទ័ពធំដូច្នេះ ស្រុកកាំងតាំងគង់នឹងខូចជាប្រាកដ។ **ជីវថាយ**ថា ខ្ញុំស្តាប់មើលគំនិតប្រាជ្ញាដែល**ឡុកស៊ុន**និយាយការនឹងខ្ញុំថ្ងៃនេះ មុខជានឹងខូចរាជការដូចពាក្យអ្នកថាជាប្រាកដមែនណាស់។ ឯ**ឡុកស៊ុន**នោះ លុះវេលាព្រឹកឡើង ក៏ឲ្យប្រជុំនាយកង នាយទ័ពមកព្រមគ្នា ហើយបង្គាប់ថា បើព្រះចៅ**ឡៅពី**លើកមកតតាំងច្បាំងនឹងយើង ៗ មិនត្រូវចេញទៅតទល់ទេ ត្រូវតែនៅរក្សាបន្ទាយពីខាងក្នុងប្រុងប្រយ័ត្នឲ្យមាំមួនចុះ នោះអស់នាយទ័ពនាយកងឮ**ឡុកស៊ុន**ថាដូច្នោះ ក៏នាំគ្នាសើចធ្វើហាក់ដូចជាមិនយកចិត្តទុកដាក់សោះ ហើយបបួលគ្នាលាថយចេញទៅ។ កាលដែលបង្គាប់ទាំងប៉ុន្មានក៏មិនបាននឹងធ្វើតាម **ឡុកស៊ុន**ដឹងថា ពួកនាយកងនាយទ័ពមិនទទួលស្តាប់បង្គាប់នឹងប្រុងប្រៀបរៀបធ្វើបន្ទាយ ដោយសេចក្តីមិនកោតក្រែងរអែងខ្លាចសោះ លុះព្រឹកឡើងក៏ឲ្យហៅនាយកងនាយទ័ពនូវទាហានទាំងពួងចូលមកប្រជុំព្រមគ្នា ហើយនិយាយថា ខ្ញុំបានបង្គាប់អស់អ្នកទាំងឡាយឲ្យរៀបធ្វើបន្ទាយរាយចម្រូងជីកគូធ្វើស្នាមភ្លោះ ដើម្បីនឹងការពាររក្សាខ្លួនឲ្យមាំមួន កុំឲ្យចេញតនឹងសត្រូវ ហេតុអ្វីអស់អ្នកមិនធ្វើតាមបង្គាប់យើងជាមេទ័ពដូច្នេះ?

**ហាន់តុង**ឆ្លើយថា ខ្ញុំបាទជាជាតិទាហានមានចិត្តស្រឡាញ់ព្រះចៅ**ស៊ុនគួន** បានប្តូរខ្លួនតាមទៅច្បាំងគ្រប់អន្លើមិនខ្លាចសេចក្តីស្លាប់ វេលានេះលោកបានតាំងជាមេកងទ័ពចេញមកបង្គាប់បញ្ជានឹងធ្វើសង្គ្រាម តនឹងព្រះចៅ**ឡៅពី** ដែលលោកមកបង្គាប់ឲ្យតាំងទីនៅតែក្នុងបន្ទាយកុំឲ្យចេញច្បាំងនោះ លោកនឹងយកទ័ពតាមមកជួយឬ? ទាហានទាំងពួងឮដូច្នោះក៏ស្រែកឡើងព្រមគ្នាថា **ហាន់តុង**និយាយត្រូវ

ណាស់ យើងទាំងអស់នឹងសុំចេញច្បាំងមិនខ្លាចស្លាប់ទេ។ **ឡុកស៊ុន**ឮ**ហាន់តុង**និងទាហានទាំងពួងថាដូច្នោះក៏ខឹងណាស់ ហូតគ្រប៊ីកាន់លើកឡើងហើយថា ទោះបីខ្លួនយើងនៅក្មេងយ៉ាងណា វេលានេះព្រះចៅ**ស៊ុនគួន**ព្រះរាជទានអាជ្ញាសិទ្ធិឲ្យយើងធ្វើមេទ័ពបង្គាប់ប្រើក្បាលអ្នករាល់គ្នាហើយ ត្រូវតែស្តាប់ បើនរណាល្មើសនឹងបង្គាប់មិនស្តាប់ពាក្យយើង ៗនឹងឲ្យកាត់ក្បាលនឹងផ្តែគ្រប៊ីនេះ។ ទាហានទាំងអស់បានឮក៏នឹកក្នុងចិត្ត មិនដឹងនឹងគិតតបឆ្លើយយ៉ាងណា នាំគ្នាដើរចេញទៅធ្វើបន្ទាយ រាយចម្រូងជីកគូធ្វើស្នាមភ្លោះជាមួនមាំ ប្រចាំយាមល្បាតលាតក្រវែលតាមបង្គាប់គ្រប់ប្រការ។

ឯព្រះចៅ**ឡៅពី**នោះ លុះសែនព្តីការ**តៀវហ៊ុយ**រួចស្រេចកាលណា ក៏ត្រាស់បង្គាប់នាយទ័ពនាយកងឲ្យតាំងបន្ទាយរាយជាលំដាប់គ្នា តាំងពីតំបន់អ៊ូតេងរៀងទៅដល់តំបន់ឈួនខៅចម្ងាយមួយពាន់សិន (៤០ គ.ម) ចំនួនសែសិបបន្ទាយ។ មានទាហានល្បាតនាំយកសេចក្តីទៅក្រាបទូលព្រះចៅ**ឡៅពី**ថា ព្រះចៅ**ស៊ុនគួន**តាំង**ឡុកស៊ុន**ជាមេកងទ័ពធំ នាំពលមកតាំងបន្ទាយរាយប្រទល់រៀបគ្នា ហើយហាមប្រាមពួកយោធាមិនឲ្យចេញច្បាំង។ ព្រះចៅ**ឡៅពី**បានទ្រង់ព្រះសណ្តាប់ ក៏ទ្រង់សង្ស័យណាស់ ត្រាស់ថា **ឡុកស៊ុន**នោះនៅឯណា? វាជាយ៉ាងម្តេច **ម៉ាលៀង**ទីប្រឹក្សាថា **ឡុកស៊ុន**នោះជាមនុស្សចំណុះស្រុកធម្មតា ទីលំនៅវានៅស្រុក**កេងជីវ**នៅក្មេងណាស់ តែបានរៀនសូត្រឆ្លៀវឆ្លាស់ប្រតិពលយល់ការជ្រៅទូលាយប្រហែលនឹង**ជីវយី** ស្រុកកេងជីវខូចអន្តរាយក៏ព្រោះឧបាយប្រាជ្ញាអាដែងនេះ។

ព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្តាប់ច្បាស់ ក៏ទ្រង់ព្រះក្រោធធំណាស់ ត្រាស់ថា តម្រិះប្រាជ្ញាអាដែងនេះហើយដែលវាសម្លាប់ប្អូនអញ លួហើយជាបុណ្យអញនាំវាឲ្យបានសងសឹកគ្នា។ អញនឹងលើកពលយោធាទៅវាយទម្លាយបន្ទាយវាក្នុងថ្ងៃនេះ

**ម៉ាលៀង**ទូលថា **ឡុកស៊ុន**នេះទូលបង្គំជាខ្ញុំស្គាល់បានថា មានតម្រិះប្រាជ្ញាជាជាង **ជីវយី** សូមឲ្យទ្រង់បង្អង់កុំអាលចូលច្បាំង សូមទ្រង់ព្រះតម្រិះមើលសិនចុះ។ ព្រះចៅ**ឡៅពី**ខ្ញាល់ណាស់ត្រាស់ថា យើងធ្វើសង្គ្រាមមកក៏ច្រើនណាស់ហើយ តាំងពីកំឡោះលុះដល់ចាស់ជរា នឹងខ្លាចអ្វីថ្វីដែរអា**ឡុកស៊ុន**ក្មេងពីម្សិលមិញ វានឹងជាយ៉ាងណាជាងយើង។ ត្រាស់ហើយក៏បង្គាប់ទាហានឲ្យបង្ហំលើកទ័ពចេញទៅ។ ឯ**ហាន់តុង** និង**ជីវថាយ**ដែលរក្សាបន្ទាយនៅនោះ លុះដឹងថាព្រះចៅ**ឡៅពី**លើកទ័ពមក ក៏ប្រើទាហានឲ្យទៅជម្រាប**ឡុកស៊ុន** ៗភ័យណាស់ ក្រែងទាហានទាំងនោះមិនស្តាប់ នឹងប្រញាប់ចេញច្បាំង ទើបឡើងសេះរលះរលាំងចេញទៅមើល ប្រទះនឹង**ហាន់តុង**ឈរនៅក្នុងបន្ទាយលើកំពូលភ្នំ។

**ហាន់តុង**ក្រឡេកទៅឃើញទាហានលើកមកច្រើនណាស់ ជាន់កណ្តាលនោះទាហានកាន់សុទ្ធតែទង់លឿង ទើបចង្អុលប្រាប់**ឡុកស៊ុន**ឲ្យមើលថា នោះព្រះចៅ**ឡៅពី**លើកមកឯង យើងនឹងស្ងៀមនៅថ្វី ត្រូវតែចេញច្បាំងឲ្យដឹងដៃគ្នា ហើយនឹងចាប់យកខ្លួនព្រះចៅ**ឡៅពី**ឲ្យបាន។ **ឡុកស៊ុន**ថា ព្រះចៅ**ឡៅពី**នោះប៉ិនស្ទាត់ក្នុងក្បួនពិជ័យសង្គ្រាមណាស់ រមែងច្បាំងឈ្នះគេមកច្រើនហើយ ពួកសេនាទាហានក៏មានថ្វីដៃខ្លាំងពូកែណាស់ អ្នកនឹងចេញទៅប៉ះម្តេចបាន? ចូររិះអានគិតតែរក្សាបន្ទាយឲ្យមាំសិនចុះ បើទាហានខាងគេលើកមកនឿយហាត់ដោយកំដៅនិងថ្ងៃ គេឈប់សម្រាកក្បែរភ្នំ និងម្លប់ឈើធំវេលាណា សឹមយើងគិតការចេញច្បាំងតែម្តង។ **ហាន់តុង**បានឮដូច្នោះក៏មិនយល់ឃើញផងសោះ តែទាល់គំនិតណាស់ព្រោះខ្លាច ក៏ស្ងៀមទៅ។

ព្រះចៅ**ឡៅពី**ឃើញទាហានស្រុកកាំងតាំងមិនចេញច្បាំងសោះ ក៏បង្ហំទាហានទាំងអស់ឲ្យព្រួតគ្នាចូលទៅស្រែកជេរដល់មាត់ទ្វារបន្ទាយ។ **ឡុកស៊ុន**ឮ

ហើយក៏បង្គាប់ទាហានទាំងឡាយថា ឲ្យខំអត់សង្កត់ចិត្តគិតតែយកក្រដាសចុកត្រចៀកទៅសិនចុះ។ នោះព្រះចៅ**ឡៅពី**ដែលប្រើទាហានឲ្យទៅស្រែកជេរដល់ទ្វារបន្ទាយហើយ ទាហានស្រុកកាំងតាំងមិនចេញច្បាំងសោះ ក៏ទ្រង់ឈឺក្តៅព្រះឱរាពន់ប្រមាណ។ **ម៉ាលៀង**ទូលថា **ឡុកស៊ុន**នោះមានគំនិតគិតជ្រៅណាស់ បានជាយើងប្រើមនុស្សឲ្យទៅជេរ គេមិនចេញមកច្បាំង មុខជាវានឹងធ្វើឲ្យយើងភ័ន្តភាំងធ្វេសទុកចិត្ត សូមទ្រង់ព្រះតម្រិះគិតមើលឲ្យល្អសិនចុះ។ ព្រះចៅ**ឡៅពី**ត្រាស់ថា សេចក្តីគិតវានឹងមានអាការយ៉ាងណា វាធ្លាប់តែចាញ់យើងទើបមិនចេញមុខមកច្បាំង ឃើញថាវាខ្លាចយើងពិតមែន។

**ប៉ងស៊ិប**ទើបទូលថា យើងលើកទ័ពមកពេលនេះ ជាទេសកាលរដូវក្តៅ នឹងអាស្រ័យម្លប់ឈើក៏មានតិច នឹងរកទឹកក៏នៅឆ្ងាយណាស់ ល្គឹកណាបើមានរាជការ ឬទ័ពលើកមក នឹងយកធុរៈមិនបានឆាប់រហ័សភ្លាមៗ។ ព្រះចៅ**ឡៅពី**ទ្រង់ព្រះសណ្តាប់ក៏យល់ឃើញត្រូវ ទើបត្រាស់ថា យើងត្រូវតែថយទ័ពត្រឡប់ទៅវិញ ក៏តាំងបញ្ឈប់ទ័ពនៅក្បែរមាត់ទឹក និងក្រោមម្លប់ឈើ ដើម្បីឲ្យទាហានបានសម្រាកកម្លាំង ទម្រាំហួសពេលក្តៅវេលាណា សឹមលើកមកតតាំងម្តងទៀត។ **ម៉ាលៀង**ទូលថា ដែលនឹងថយទៅបញ្ឈប់នៅក្បែរមាត់ទឹក និងម្លប់ឈើនោះវាស្រួលណាស់ហើយ តែខ្លាចក្រែង**ឡុកស៊ុន**ឃើញថាយើងថយទ័ព វានឹងត្រឡប់លើកគំហុកបំពារមកលើយើង ៗនឹងធ្វើប្រការម្តេច? ព្រះចៅ**ឡៅពី**ក៏ត្រាស់ថា បើដូច្នោះយើងត្រូវឲ្យ**ង៉ប៉ាន់**ឃុំទាហានមួយម៉ឺន ទៅតាំងនៅមាត់ផ្លូវ ដែលវានឹងលើកចេញមកនោះ ឯខ្លួនយើងនឹងឃុំទាហានដែលមានថ្វីដៃប្រាំបីម៉ឺនទៅបង្កប់នៅទីច្រកភ្នំ ហើយយើងឲ្យថយទ័ពធំចេញទៅ បើ**ឡុកស៊ុន**ឃើញថាយើងថយទ័ពវានឹងត្រឡប់ដេញចេញមកឲ្យ**ង៉ប៉ាន់**ច្បាំងតហើយធ្វើជាចាញ់ថយរត់ចេញទៅ បើបានចំណាប់វេលាណា ខ្ញុំឯង

នឹងលើកទាហានសេនាចេញកាត់ចុងទ័ពចាប់យកខ្លួន**ឡុកស៊ុន**ឲ្យបាន។ អស់នាហ្មឺននិងទីប្រឹក្សាទាំងប៉ុន្មានក៏យល់ឃើញត្រូវ ហើយសរសើរសេចក្ដីគិតរបស់ព្រះចៅ**ឡៅពី**ណាស់។

**ម៉ាលៀង**ទូលថា **ខុងបេង**ជាអាចារ្យណែនាំនៅចាំស្រុក ព្រះអង្គទ្រង់លើកទ័ពមក **ខុងបេង**មិនបានមកឃើញផង ទូលព្រះបង្គំជាខ្ញុំសូមគូរផែនទីផ្ញើទៅឲ្យ**ខុងបេង**មើលតាមរបៀបដែលតាំងបន្ទាយនោះ នឹងត្រូវតាមក្បួនពិជ័យសង្គ្រាមដែរឬប្រការម្ដេច? ព្រះចៅ**ឡៅពី**ទ្រង់យល់ត្រូវទើបត្រាស់ថា បើដូច្នោះឲ្យអ្នកគូរផ្ញើទៅនុះ បើ**ខុងបេង**ឃើញហើយនឹងថាប្រការម្ដេច អ្នកចូរស្រូតត្រឡប់វិញឲ្យឆាប់។ **ម៉ាលៀង**ក៏ទៅគូរផែនទីតាមព្រះតម្រាស់ ព្រះចៅ**ឡៅពី**ក៏ឲ្យថយទ័ពទៅធ្វើតាមគំនិតដែលគិតទុកនោះ។

ឯ**ហាន់តុង** និង**ជីវថាយ**ដឹងថា ព្រះចៅ**ឡៅពី**ថយទ័ពហើយ ក៏ទៅប្រាប់**ឡុកស៊ុន**ថា ព្រះចៅ**ឡៅពី**តាំងបន្ទាយរាយរៀងគ្នាទៅដល់សែសិបអន្លើ ហើយលើកថយទៅវិញ ខ្ញុំបាទគិតថាជាទេសកាលក្ដៅណាស់ ប្រហែលជាទៅតាំងនៅម្លប់ឈើ ឬមាត់ទឹក យើងបានចំណាប់ពេញសន្ធឹកហើយ នឹងសុំចេញទៅច្បាំងយកជ័យជម្នះ។

**ឡុកស៊ុន**បានឮដូច្នោះក៏មានអំណរណាស់ ទើបឡើងសេះលើកទាហានចេញទៅមើលឃើញតាំងនៅទ័ពមួយកង មានពលប្រហែលមួយម៉ឺន ទាហានចាស់ខ្លះក្មេងខ្លះមិនស្មើគ្នា ក៏គិតសង្ស័យ។ **ហាន់តុង, ជីវថាយ**ថា ឃើញទាហានមួយកងនេះក្មេងតិចចាស់ច្រើន ខ្ញុំបាទសូមចេញទៅច្បាំងនឹងវាយឲ្យបែកទៅតែម្ដង **ឡុកស៊ុន**ហាមឃាត់ថា ទ័ពនេះគេតាំងទុកបញ្ឆោតយើងទេ មុខជាគេមានយកទាហានទៅពួនបង្កប់ទុកក្នុងច្រកភ្នំជាប្រាកដ អ្នកកុំចេញទៅច្បាំងឡើយ។ ទាហានទាំងពួងឮ**ឡុកស៊ុន**ថាហើយ ក៏នាំគ្នាសើច ហើយទាំងអស់គ្នានិយាយថា **ឡុកស៊ុន**នេះខ្ចីប្រាជ្ញា

ស្មារតីពេកណាស់ ចេះតែភ័យខ្លាចសឹកសត្រូវ មិនសូវបានទម្លុះទម្លាយការអ្វីសោះ។

ឯ**ង៉ប៉ាន់**នាយទ័ពមុខ លុះព្រឹកឡើងក៏ដេញទាហានចូលទៅស្រែកឡុកចំអកជេរនៅមាត់ទ្វារបន្ទាយ នោះ**ឈីសេង, តេងហាង**នាយទ័ពបានឮ ក៏យកសេចក្ដីទៅប្រាប់**ឡុកស៊ុន**ថានឹងសុំចេញច្បាំង។ ឡុកស៊ុនថា អស់អ្នកទាំងអម្បាលនេះមិនចេះដឹងអ្វីសោះ ទោះនឹងគិតធ្វើការអ្វី សុទ្ធតែកាច់បំបាក់យកតាមកម្លាំង មិនរវាំងគិតតាមប្រាជ្ញាប្រើកលក្រាស់ក្រួន នឹងចេញខ្លួនទៅរងទទួលពីមុខដូចផ្ដុំភ្លើងពីក្រោមខ្យល់នឹងបានឬ? វេលានេះនឿយហត់ណាស់ហើយបានជាថយទៅ ឯអស់ពលទាហានក៏មានចិត្តភ្លើតភ្លើនមិនសូវគិត ព្រោះត្បិតថាមកគ្រាណាៗក៏មិនចេញច្បាំងគ្នា គង់នឹករារែកបែកចិត្តគិតទៅជ្រៀតជ្រកដកលេងឲ្យសប្បាយខ្ចាត់ខ្ចាយបែកចេញពីគ្នា យើងចាំមើលកលការត្រាតែបានចំណាប់ នឹងលើកទ័ពចេញទៅគំហុកវាយគង់នឹងបែកផ្កាយមិនខាន។

ពេលនោះ អស់នាយទ័ពនាយកងទាំងពួងបានស្ដាប់ក៏យល់ឃើញត្រូវណាស់ តាំងពីនោះមកក៏ឲ្យក្រែងខ្លាចប្រាជ្ញា**ឡុកស៊ុន** ៗក៏ចាត់ចែងបែងទាហានត្រៀមទុក ហើយធ្វើសំបុត្រមកប្ដឹងតាមផ្លូវរាជការ ឲ្យបម្រើកាន់ជារហ័សនាំចូលទៅថ្វាយព្រះចៅ**ស៊ុនគួន**សេចក្ដីថា ឃើញកម្លាំងព្រះចៅឡៅពីទន់ចុះហើយ ឥឡូវលើកទ័ពថយត្រឡប់ទៅតាំងក្រោមម្លប់ឈើនិងក្បែរមាត់ទឹក ក្នុងរវាងដប់ប្រាំថ្ងៃទៀត ទូលបង្គំជាខ្ញុំនឹងសុំវាយឲ្យបែក។ ព្រះចៅ**ស៊ុនគួន**ឃើញសេចក្ដីក្នុងសំបុត្រដូច្នោះ ក៏មានព្រះអំណរណាស់ ទើបកេណ្ឌទាហានថែមទៅបំពេញឲ្យ**ឡុកស៊ុន**ទៀត។

វេលានោះ ព្រះចៅ**ឡៅពី**ក៏ត្រាស់បង្គាប់នាយទ័ពជើងទឹក ឲ្យតាំងបន្ទាយទឹកល្អមបាំងទូកបាន ហើយវាយចុះទៅក្នុងដែនស្រុកកាំងតាំង **ហាងគួន**ទូលថា ដែលនឹង

ឲ្យលើកទ័ពលើកចូលទៅនោះឃើញមិនងាយសោះ ព្រោះនឹងត្រឡប់មកវិញពិបាកណាស់ ដោយច្រាស់ទឹកកំពុងឡើង ទូលបង្គំជាខ្ញុំនឹងសុំទៅតាំងជានាយទ័ពមុខនឹងបានជួយបទ័ពទឹកដោយងាយ ព្រះអង្គជាទ័ពក្រោយហើយ មុខជាមិនខូចខាតដោយសឹកសត្រូវនោះ។ ព្រះចៅ**ឡៅពី**ត្រាស់ថា វេលានេះអាពួកស្រុកកាំងតាំងវាគេចក្បាលខ្លាចយើងអស់ហើយ កាលណាឡើយវានឹងប៉ានលៀនមុខមកច្បាំង កុំសង្ស័យយើងត្រូវតែស្រួតចូលទៅចុះ។ ខណៈនោះ អស់នាហ្មឺនទីប្រឹក្សាក៏បានខាំងខាទូលទាស់ព្រះអធ្យាស្រ័យមិនឲ្យលើកទៅ។ ព្រះចៅ**ឡៅពី**ក៏ពុំព្រមស្តាប់ ទើបចាត់កងទ័ពជាពីរប៉ែក មួយប៉ែកឲ្យ**ហាងគួន** ជានាយកកងលើកឆ្លងទៅតាំងខាងទិសឯជើងខ្លាច**ចូភី**លើកមកវាយប្រសព្វខ្លួន ព្រះចៅ**ឡៅពី**ក៏តាំងបន្ទាយវាយនៅតាមក្បែរមាត់ទន្លេ ជិតគ្នានឹងទ័ពទឹក។

ទាហានល្បាត ក៏នាំសេចក្តីចូលទៅក្រាបទូលព្រះចៅ**ចូភី**ថា ព្រះចៅ**ឡៅពី**លើកទ័ពទៅវាយស្រុកកាំងតាំង តាំងបន្ទាយវាយទៅតាមក្បែរមាត់ទឹកចំនួនសែសិបបន្ទាយ ចម្ងាយមួយពាន់សិន ហើយឲ្យ**ហាងគួន**ឃុំទាហានលើកទៅតាំងខាងទិសឧត្តរផ្លូវនឹងមកស្រុកយើង ព្រះចៅ**ស៊ុនគួន**នោះតាំង**ឡុកស៊ុន**ជាមេទ័ពធំលើកទៅច្បាំងនឹងព្រះចៅ**ឡៅពី**។ ព្រះចៅ**ចូភី**បានឮដូច្នោះ ក៏ទ្រង់អស់សំណើចហើយថា ព្រះចៅ**ឡៅពី**គ្រានេះនឹងចាញ់**ស៊ុនគួន**។ អស់ពួកនាហ្មឺនខ្ញុំរាជការ និងទីប្រឹក្សាទាំងពួងឮហើយ ក៏ទូលសួរថា ព្រះអង្គទ្រង់ឃើញយ៉ាងម៉េច? **ចូភី**ថា ព្រះចៅ**ឡៅពី**មិនចូលចិត្តគិតការទ័ព បានជាតាំងបន្ទាយវែងជាប់ដល់មួយពាន់សិន ប្រសិនបើសត្រូវចូលច្បាំងខាងដើម ឬខាងចុងនឹងជួយគ្នាបានឬ? មុខជានឹងធ្លោះការរបស់**ស៊ុនគួន**ជាប្រាកដ យើងចាំមើលចុះ។ អស់នាហ្មឺន និងទីប្រឹក្សាទាំងនោះនៅមិនទាន់ជឿតែម្តង ក៏ទូលស្នងថា ទូលព្រះបង្គំជាខ្ញុំនឹងសុំរៀបចំកងទ័ពទុកឲ្យព្រមជាមុន។

ព្រះចៅ**ចូភី**ត្រាស់ថា **ឡុកស៊ុន**វាយទ័ពព្រះចៅ**ឡៅពី**បែកហើយ មុខជានឹងលើកដេញជិតប្រកិតតាមទៅដល់ស្រុកសែឈួន ខាងស្រុកកាំងតាំងមនុស្សក៏នឹងស្ងួចស្ងើងតិចទៅ ត្រូវយើងលើកទៅវាយយកស្រុកកាំងតាំង ធ្វើអាការបីដូចនឹងលើកទៅជួយឲ្យគេជឿទុកចិត្ត វេលានេះ យើងត្រូវត្រៀមទាហានទុកឲ្យស្រេចនឹងលើកទៅជាបីផ្លូវ ទើបចាត់**ចោយិន** ជានាយកងឃុំទាហានលើកទៅផ្លូវយូស៊ូ ឲ្យ**ចោហ៊ីវ**ឃុំនាំទាហានលើកទៅផ្លូវតុងខៅ ឯ**ចោហង**ឃុំទាហានលើកទៅផ្លូវណាំកុន ទាំងបីទ័ពនេះត្រូវតាំងបង្កប់នៅក្នុងដែនយើងសិន យើងនឹងចាំស្តាប់ដំណឹងល្បាត បើកាលណាបានឱកាសហើយសឹមលើកទៅឲ្យព្រមគ្នា ខ្លួនយើងត្រូវនៅជាទ័ពជំនួយ មុខជានឹងវាយបានស្រុកកាំងតាំងដោយងាយ។ ទីប្រឹក្សា និងបណ្តានាហ្មឺនទាំងពួងក៏យល់ឃើញត្រូវ ទាំងអស់គ្នាក៏លាថយចេញទៅចាត់ចែងបែងរំលែកកងទ័ពតាមត្រាស់បង្គាប់គ្រប់ប្រការ។

ឯ**ម៉ាលៀង**ដែលគូរផែនទីទៅឲ្យ**ខុងបេង**មើលនោះ លុះទៅដល់ស្រុកតាំងឈួន ក៏ចូលទៅរក**ខុងបេង** ហើយយកផែនទីដែលតាំងបន្ទាយនោះឲ្យ**ខុងបេង**មើល។ **ខុងបេង**នោះ លុះឃើញរបៀបផែនទីដូច្នោះហើយ ក៏ស្តុតរន្ធត់ស្មារតី លើកដៃទះតុហើយថា កម្មអើយកម្ម មុខជាចាញ់**ឡុកស៊ុន**ជាប្រាកដហើយ នរណាជាជាងគិតឲ្យព្រះចៅ**ឡៅពី**ធ្វើបន្ទាយដូច្នេះ ឲ្យយកខ្លួនមកសម្លាប់ចេញ។ **ម៉ាលៀង**ថា គ្មាននរណាដឹងដែងគិតតាមកំនិតរបស់ខ្លួនបានទេ គឺរបៀបទាំងអស់នេះជាតម្រិះរបស់ព្រះចៅ**ឡៅពី**ទ្រង់ព្រះចិន្តាឯង ដែលលោកថានឹងខូចថ្លោះការដោយថ្វីដៃ**ឡុកស៊ុន**នោះ លោកយល់ឃើញប្រការម្តេច? **ខុងបេង**ថា ព្រោះតាំងបន្ទាយសែសិបអន្លើ ហើយវែងដល់មួយពាន់សិននេះ បើសត្រូវចូលច្បាំង ឬដុតភ្លើងឆេះឡើងក្តី នឹងរត់ទៅមកជួយគ្នាកាលណានឹងទាន់ការ? ត្រូវតែរៀបបន្ទាយបញ្ជូលគ្នាជាថ្មី ឲ្យល្មមនឹង

ជួយការភ័យគ្នាបាន។ **ម៉ាលៀង**ថា ខ្ញុំបាទនឹងវិលត្រឡប់មុខជាមិនទាន់ការ ព្រះចៅ**ឡៅពី**មុខជាបែកទ័ពជាមុនហើយ ៗទ័ពសត្រូវនឹងមិនដេញមកដល់ស្រុកសែឈ្នួនទេឬ?

**ខុងបេង**ថា ទោះបីព្រះចៅ**ឡៅពី**បែកហើយក្តី **ឡុកស៊ុន**វាមិនមែនដេញតាមមកទេ ព្រោះវានៅគិតរិះរេរវាំងក្រោយ ក្រែង**ចូភី**នឹងចូលវាយយកស្រុកកាំងតាំងខាងព្រះចៅ**ឡៅពី**នោះទោះបែកហើយ គង់នឹងទៅសំណាក់អាស្រ័យនៅបេកតេ ឯស្រុកបេកតេនោះ បើយើងនៅមិនទាន់ចូលមកស្រុកសែឈ្នួនទេ យើងគង់បានចាត់ចែងទាហានទុកដល់ដប់ម៉ឺន តាំងទុកនៅទីតំបន់អ៊ីប៉ាក់ប៉ោ មាត់ផ្លូវនឹងចូលទៅស្រុកបេកតេនោះមួយកង។

**ម៉ាលៀង**ថា ខ្ញុំបាទក៏បានដើរមកតាមផ្លូវអ៊ីប៉ាក់ប៉ោ លោកថាមានទាហាននៅទីនោះមួយកង ហេតុម្តេចក៏ខ្ញុំបាទមិនបានជួបប្រទះឃើញសោះ? **ខុងបេង**ថា អ្នកកុំអាលនិយាយឡើយ បើកាលណាអ្នកវិលទៅវិញហើយ គង់នឹងឃើញសេចក្តីដែលយើងគិតទុកនោះជាក់នឹងភ្នែកប្រាកដ។ **ម៉ាលៀង**បានឮដូច្នោះក៏សុំសំបុត្រ**ខុងបេង**ឡើងសេះត្រឡប់ទៅវិញ។ **ខុងបេង**ក៏ចូលទៅក្នុងស្រុកសែឈ្នួន រៀបបម្រុងទាហានទុកឲ្យព្រម។

ឯ**ឡុកស៊ុន**នោះ លុះដឹងថា ព្រះចៅ**ឡៅពី**តាំងបន្ទាយរាយតាមក្បែរមាត់ទន្លេសែសិបអន្លើ វែងដល់មួយពាន់សិន ហើយឃើញទាហានទាំងអស់សុទ្ធតែភ្លឺភ្លើមិនអើពើនឹងរវាំងរក្សាខ្លួនដូច្នោះ ក៏មានអំណរណាស់ ទើបឲ្យប្រមូលនាយទ័ពនាយកងទៅប្រជុំព្រមគ្នាហើយបង្គាប់ថា វេលានេះឱកាសស្រួលរបស់យើងហើយ យើងនឹងឲ្យលើកទ័ពទៅកណ្តាលយប់ វាយយកបន្ទាយដែលតាំងនៅទីកាំងណាំឲ្យបាន នរណាមានចិត្តនឹងសុំអាសាចូលទៅវាយខ្លះ? **ហាន់តុង**និង**ជីវថាយ**, **ឡេងថង**ទទួល

ថា យើងខ្ញុំនឹងសុំអាសាទៅវាយយកបន្ទាយឲ្យបាន។ **ឡុកស៊ុន**ថា អ្នកទាំងបីនាក់កុំទៅចុះ ទើប**ឡុកស៊ុន**ហៅទាហានម្នាក់ឈ្មោះ**ទុនអ៊ីតាន់** ឲ្យលើកទាហានប្រាំពាន់ទៅវាយបន្ទាយ**តៀវប៉ៅ**ឲ្យបានក្នុងពេលយប់នោះ យើងនឹងលើកទ័ពជំនួយតាមទៅ **ទុនអ៊ីតាន់**ក៏លើកទាហានទៅតាមបង្គាប់។ **ឡុកស៊ុន**ក៏ប្រាប់ឲ្យ**ឈីសេង, តេងហង**នាយកងពីរនាក់នេះ ឲ្យឃុំទាហានម្នាក់បីពាន់ទៅពួនបង្កប់នៅមាត់ផ្លូវ បើឃើញ**ទុនអ៊ីតាន់**ចូលទៅច្បាំងចាញ់សត្រូវដេញមក ឲ្យចេញជួយស្កាត់ បើសត្រូវបែកខ្ចាត់ខ្ចាយទៅហើយកុំឲ្យដេញតាម។ **ឈីសេង, តេងហង**ក៏លើកទ័ពចេញទៅធ្វើតាមបង្គាប់។

លុះពេលយប់ស្ងាត់ **ទុនអ៊ីតាន់**ក៏ឃុំទាហានស្រែកហ៊ោចូលវាយបន្ទាយ**តៀវប៉ៅ** ៗឃើញដូច្នោះក៏ឡើងសេះ កាន់លំពែងដេញទាហានចេញតតាំងច្បាំងគ្នា **ទុនអ៊ីតាន់**តស៊ូមិនបាន ខ្លួនក៏ត្រូវព្រួញទៀតក៏បរសេះរត់ទៅ **ទៀវយ៉ុំង**និង**សះម៉ោខោ**តាំងបន្ទាយនៅក្រោយភ្នំ លុះឃើញទាហានស្រុកកាំងតាំងស្រែកហ៊ោគឹកកងចូលវាយបន្ទាយ**តៀវប៉ៅ**ដូច្នោះ ក៏លើកទាហានចេញស្កាត់តច្បាំង **ទុនអ៊ីតាន់**ក៏រលះរលាំងរត់ទៅ នោះ**ទៀវយ៉ុំង** និង**សះម៉ោខោ, តៀវប៉ៅ**ក៏លើកទ័ពដេញតាម**ទុនអ៊ីតាន់**ទៅទៀត។ ឯ**ឈីសេង, តេងហង**ដែលពួនបង្កប់ក្បែរផ្លូវ ក៏លើកចេញប្រសព្វខ្ទប់ទាំងសងខាង ទ័ពព្រះចៅ**ឡៅពី**ក៏បែករត់ចូលបន្ទាយវិញ **ឈីសេង, តេងហង**ក៏នាំគ្នាត្រឡប់ចូលបន្ទាយ **ទុនអ៊ីតាន់**ត្រូវព្រួញជាប់នៅខ្លួន ក៏ចូលទៅដល់**ឡុកស៊ុន**ហើយយំសុំទោសដែលបែកទ័ពរត់មកនោះ។

**ឡុកស៊ុន**ថា យើងមិនយកទោសទេ ដែលប្រើទៅធ្វើការគ្រានេះ គឺប្រាថ្នាចង់ដឹងកម្លាំងនឹងកលសឹកព្រះចៅ**ឡៅពី** ក៏បានឃើញអស់ហើយ អ្នកកុំវិតក្កឡើយ យើងនឹងវាយឲ្យបែកទាល់តែបាន។ **ឈីសេង, តេងហង**ថា យើងខ្ញុំបានដឹងច្បាស់ជា

ព្រះចៅ**ឡៅពី**មានទាហានខ្លាំងពូកែច្រើនណាស់ នឹងប្រាថ្នាវាយឲ្យបែកនោះមិនងាយ ក្រែងខូចខាតទាហានច្រើន។

**ឡុកស៊ុន**ឮហើយក៏អស់សំណើចហើយថា ប្រវេណីធ្វើសង្គ្រាមរមែងមានស្លាប់រស់ជាធម្មតា តែអ្នកមានតម្រិះប្រាជ្ញាចេះគិតឲ្យខូចតិច បានច្រើន ប្រការមួយ**ខុងបេង**ជាចៅបញ្ញាក៏មិនបានមកធ្វើការផងទេ យើងនឹងខ្លាចថ្វី វេលានេះគឺទេវតាឲ្យទំនងយើងមានចន្លោះនឹងយកជ័យជម្នះ ជាទីរុងរឿងនៃព្រះចេស្ដាព្រះចៅ**ស៊ុនគួន**ហើយ ៗក៏ឲ្យប្រមូលនាយទ័ពនាយកងមកប្រជុំគ្នា ទើប**ឡុកស៊ុន**ចាត់ឲ្យ**ជូហៀន**ជានាយកងខាងទ័ពទឹក មានទូកផ្ទុកចំបើងជាយ៉ាងច្រើន ឯខាងទ័ពគោកចាត់**ហាន់តុង**ឲ្យលើកទាហានមួយពួកទៅចាំវាយទ័ពផ្លូវទិសឧត្ដរ ចាត់**ជីវថាយ**ឲ្យលើកទាហានមួយពួកទៅចាំវាយទ័ពផ្លូវទិសទក្សិណ ឲ្យទាហានមានបាយក្រៀមជាអាហារបង្ការដែកភ្លើងចងគប់ចំបើង ហើយវេចរំសេវដាក់ក្នុងដៃ ស្ពាយបន្លាយឈ្នួនកាន់គ្រប់ខ្លួនចេញទៅ ដល់ថ្ងៃស្អែកពេលយប់មានខ្យល់ជំនោរផ្លាក់ ឲ្យទាហានទ័ពគោកទឹកព្រមគ្នាវាយចូលទៅឲ្យដល់បន្ទាយទាំងសែសិបអន្លើ ហើយឲ្យយកភ្លើងដុតឲ្យឆេះឡើងគ្រប់បន្ទាយ បើទ័ពនោះបែកវេលាណាឲ្យអស់រាល់គ្នាតាមដេញចាប់ព្រះចៅ**ឡៅពី**ឲ្យបាន។ ទាហានគ្រប់ក្រុមក៏ភ្ជុំគ្នារៀបចំធ្វើតាមបង្គាប់។

ឯព្រះចៅ**ឡៅពី**គង់លើកៅអីស្ដីរាជការ ចាត់ទាហាននឹងលើកទ័ពចេញច្បាំងមិនទាន់ស្រេចការ បង្កើតអស្ចារ្យអាភេទទង់ជ័យដែលដោតរឹងនៅមុខព្រះទីនាំងគ្មានខ្យល់បក់ជាខ្លាំងសោះ ដងទង់ជ័យនោះក៏បាក់ធ្លាក់ចុះដល់ដី ព្រះចៅ**ឡៅពី**ព្រួយព្រះទ័យណាស់ ត្រាស់សួរ**ឆៀគឺ**ទីប្រឹក្សាថា អាភេទនេះកាច ឬជាប្រការម្ដេច? **ឆៀគឺ**ក្រាបទូលថា អាភេទនេះកាចណាស់ មុខជា**ឡុកស៊ុន**នឹងលើកទ័ពមកវាយយកជ័យជម្នះយើងហើយ។ ព្រះចៅ**ឡៅពី**ថា ច្បាំងគ្រាណាយើងក៏វាយបែកគ្រប់គ្រាពុំ

ដែលខាន ទាហានពួកវាស្លាប់ច្រើនណាស់ហើយ យើងនឹងខ្លាចថ្វីមិនមែនវានឹងលើក មកវាយយើងទេ។...

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លក់៖*

www.khmerliterature.wordpress.com

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៦៦

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

**ជូឡុង-អ៊ុយអៀន**ក៏យល់ព្រមគ្នា ហើយនាំគ្នាឡើងសេះលបចេញទៅដុត បន្ទាយប្រហែលហាសិបសិន បានឮសំឡេងមនុស្ស ក៏ឡើងលើភ្នំសម្លឹងមើលឃើញ មនុស្សដើរប្រហែលម្ភៃនាក់ **ជូឡុង, អ៊ុយអៀន** ក៏បំផាយសេះចុះទៅដេញចាប់ មនុស្សបានប្រាំនាក់ ហើយចងដឹកយកមកដល់បន្ទាយ ក៏និយាយសួរថា ឯងចូរនាំ ផ្លូវអញទៅឲ្យដល់បន្ទាយ**គិមហ្វួន, សុនា** និង**ហ្វួយឡាំ** បើទៅដល់ហើយ អញមិន សម្លាប់ឯងទេ នឹងលែងឯងឲ្យរួចទៅវិញ។ ទាហាន**បេងហែក**ខ្លាចសេចក្ដីស្លាប់ ក៏ ឆ្លើយថា យើងខ្ញុំនឹងនាំផ្លូវលោកទៅ។ ឯ**គិមហ្វួន**នាយទ័ពនោះ តាំងបន្ទាយនៅផ្លូវ កណ្ដាលចន្លោះច្រកភ្នំ មានផ្លូវចូលទៅដល់បន្ទាយពីទិសឯលិចផ្លូវមួយ ទិសឯកើត ផ្លូវមួយ ហើយដើរទៅខាងលិចបន្តិចដល់ក្រោយបន្ទាយ**ហ្វួយឡាំ** ដើរទៅខាងកើត បន្តិចដល់ក្រោយបន្ទាយ**សុនា**។ **ជូឡុង, អ៊ុយអៀន**បានស្ដាប់ហើយ ក៏រៀបចាត់ចែង ទាហានដែលមានថ្វីដៃខ្លាំងពូកែម្ខាងប្រាំពាន់ ហើយលើកទៅពីពេលកណ្ដាលយប់ ស្ងាត់ យកទាហានដែលចាប់បានឲ្យនាំផ្លូវលុះទៅដល់បន្ទាយ**គិមហ្វួន** ពេល ប្រហែលម៉ោងដប់ ឃើញទាហានក្នុងបន្ទាយកំពុងដាំបាយ **ជូឡុងនិងអ៊ុយអៀន**ក៏ ញែកគ្នាចូលទាំងពីរផ្លូវ ហើយអុជផាវស្រែកហ៊ោដេញទាហានចូលទៅដល់បន្ទាយ។

ឯទាហាន**គិមហ្វួន**នោះ កំពុងតែរវល់ដាំបាយ លុះឃើញសត្រូវហ៊ោចូលទៅ ក៏ភ្ញាក់ផ្អើលច្រួលច្របល់ នឹងរាទៅចាត់ចែងគ្រឿងសាស្ត្រាវុធអ្វីក៏ពុំទាន់ តាំងតែភ័យ រត់ជាន់លើគ្នាបែកផ្កាយបន្ទាយចេញទៅ **គិមហ្វួន**ឃើញទាហានបែកផ្កាយរត់ចេញ

ទៅដូច្នោះ ក៏តក់ស្លុតស្មើរផុតព្រលឹង ខំប្រឹងប្រវាឡើងសេះបំផាយរេះចូលទៅក្នុងព្រៃ **ជូឡុង**ក៏រែដេញតាមទៅទាន់ **គិមហ្សួន**ត្រឡប់បែរមករន្ថាន់នឹងតស៊ូ **ជូឡុង**ក៏ចាក់នឹងលំពែងត្រូវ**គិមហ្សួន**ធ្លាក់ពីលើសេះស្លាប់ ហើយ**ជូឡុង**ក៏កាត់ក្បាលទុក ឯទាហាន**គិមហ្សួន**ទាំងប៉ុន្មាន សឹងតែត្រូវរបួសស្លាប់ខ្លះ ខ្លះក៏រត់រួចទៅ **ជូឡុង**ក៏លើកសំដៅទៅវាយបន្ទាយ**ហ្សួយឡាំ**ទិសឯលិចម្តងទៀត ឯ**អ៊ុយអៀន**ក៏លើកទៅវាយបន្ទាយ**សុនា**ខាងទិសឯកើត។

**ខុងបេង**ដឹងដំណឹងដោយទាហានចូលទៅជម្រាបថា **ជូឡុង**និង**អ៊ុយអៀន**ទៅចាប់បានមនុស្សមកដណ្តឹងសួរ ហើយលើកកងទ័ពទៅពីកណ្តាលយប់ដូច្នោះ ក៏មានអំណរណាស់ ទើបចាប់យកផែនទីមកពិនិត្យមើល ហើយហៅនាយទ័ពនាយកងដែលចាត់ទុកនោះមកប្រែកែជាថ្មី លុះមកមូលគ្នាហើយក៏បង្គាប់ថា ឥឡូវ**ជូឡុង**និង**អ៊ុយអៀន**លើកទៅវាយបន្ទាយដែលយើងប្រើអស់អ្នករាល់គ្នាទៅនោះហើយ ត្រូវឲ្យ**អងប៉េង** និង**ម៉ាតុង**លើកជាជំនួយទៅជួយជាប្រញាប់ ឲ្យ**ជូឡុង**វាយបន្ទាយ**សុនា**និង**ហ្សួយឡាំ** បើ**សុនា**បែកហើយ មុខជារត់ទៅតាមផ្លូវទិសឯកើតតាមច្រកភ្នំ ត្រូវ**ទៀវងី**លើកទាហានទៅចាំស្ទាក់ត្រង់ច្រកភ្នំទិសខាងកើត ឲ្យ**ទៀវអេក**លើកទាហានទៅចាំស្ទាក់នៅផ្លូវច្រកភ្នំទិសឯលិច ដើម្បីចាប់យកខ្លួន**ហ្សួយឡាំ** និង**សុនា**ឲ្យបាន។ ឯ**ហ្សួយឡាំ** និង**សុនា**នោះ បើបែកទ័ពហើយគង់នឹងរត់ទៅទិសឯកើតនិងឯលិច មួយផ្លូវម្នាក់ពុំខាន ហើយបង្គាប់**គួនសុក**ឲ្យលើកទ័ពជំនួយទៅចាំជួយ បើឃើញធ្ងន់ស្រាលខាងណាឲ្យខំជួយគ្នាយកជ័យជម្នះឲ្យបាន។ នាយទ័ពនាយកងទាំងបួនទទួលប្រសាសន៍ហើយ ក៏ស្រូតរូតលើកទ័ពទៅតាមពាក្យបង្គាប់។

ខណៈកាល**អ៊ុយអៀន**លើកទ័ពទៅដល់ក្រោយបន្ទាយ**សុនា** ទទួលវេលាព្រឹកភ្លឺច្បាស់ ក៏បង្ខំកងទ័ពឲ្យរូតរះចូលទៅ ហើយស្រែកហ៊ោពារទម្លាយបន្ទាយបាន។

ឯ**សុនា**កាលឃើញកងទ័ពចូលទៅប្រកាប់ប្រចាក់បាក់បែកបន្ទាយហើយ ក៏ដេញទាហានឲ្យចូលតស៊ូ វេលានោះទទួល**អងប៉េង**លើកមកដល់ ឮសំឡេងស្រែកហ៊ោកក្រើកដី ក៏ឃ្មាតខ្មីដេញទាហានឲ្យចូលវាយប្រសព្វពីមុខបន្ទាយ។ **សុនា**ឃើញសត្រូវពារទម្លាយចូលមកពីមុខពីក្រោយ វាយកាប់ចាក់សម្លាប់ទាហានស្លាប់ច្រើនណាស់ ឃើញថានឹងប៉ះពុំបាន ក៏បរសេះស្ទុះនាំទាហានចេញពីបន្ទាយរត់ទៅទិសឯកើត។

ឯ**ជូឡុង** លើកទ័ពទៅដល់ក្រោយបន្ទាយ**ហ្លួយឡាំ** ឃើញវេលាព្រឹកភ្លឺហើយ ក៏បង្ខំដេញទាហានឲ្យចូលហែកយកបន្ទាយ **ហ្លួយឡាំ**ឃើញសត្រូវលើកចូលមកគគុកគគាក់ដូច្នោះ ក៏ដេញទាហានឲ្យចូលតស៊ូគ្នា វេលានោះទទួល**ម៉ាតុង**លើកទ័ពទៅដល់ បានឮសំឡេងស្រែកហ៊ោ ក៏បង្ខំទាហានឲ្យចូលប្រកាប់ប្រចាក់ពីមុខបន្ទាយ **ហ្លួយឡាំ** ៗឃើញសត្រូវចូលប្រសព្វខ្ទប់ពីមុខពីក្រោយ មកកាប់សម្លាប់ទាហានស្លាប់ជាច្រើន ឃើញថានឹងតស៊ូមិនបាន ក៏ឡើងសេះនាំទាហានចេញពីបន្ទាយទៅទិសឯលិច។ វេលានោះ **ជូឡុង**និង**អ៊ុយអៀន**បានវាយបន្ទាយ**ហ្លួយឡាំ** និង**សុនា**បែកធ្លាយ រត់ចេញពីបន្ទាយទៅតាមទិសឯកើត និងឯលិចអស់ហើយ អ្នកទាំងពីរក៏លើកទាហានដេញទៅតាមទិសរៀងខ្លួន តែផ្លូវដែលនឹងដេញទៅនោះ ដើរពិបាកណាស់ លុះដេញមិនទាន់ហើយ ក៏នាំទាហានត្រឡប់មកវិញ។

**ទៀវងី**លើកទាហានទៅបង្កប់នៅទិសឯលិច **ទៀវអេក**លើកទាហានទៅបង្កប់នៅទិសឯកើត ចាំស្ទាក់ចាប់**ហ្លួយឡាំ** និង**សុនា** លុះ**ហ្លួយឡាំ** និង**សុនា**រត់ទៅទិសឯកើត និងឯលិច ដល់ទីដែលបង្កប់ទាហាន អ្នកទាំងសងខាងក៏ឲ្យទាហានស្រែកហ៊ោចេញមកស្ទាក់ពីមុខព័ទ្ធចាប់ខ្លួន**ហ្លួយឡាំ**និង**សុនា**បាន ហើយចងនាំមក។ ឯ**ជូឡុង**និង**អ៊ុយអៀន**ក៏បានលើកត្រឡប់មកមុន លុះដល់បន្ទាយហើយក៏យកក្បាល

**គិមហ្លួន**ចូលទៅជូន**ខុងបេង** ហើយជម្រាបថា ខ្ញុំប្របាទម្ចាស់វាយបន្ទាយ**សុនា**, **ហ្លួយឡាំ**បែកអស់ ហើយបានដេញដិតប្រកិត តាមទៅផ្លូវពិបាកណាស់ ដេញពុំទាន់ វារត់រួចអស់ទៅ ចាប់ពុំបាន។

**ខុងបេង**ឮហើយក៏អស់សំណើច ហើយថា អ្នកឯងទៅច្បាំងឲ្យវារត់រួចបាននោះ យើងឲ្យគេតាមដានស្ទាក់ចាប់បានទាំងពីរនាក់ហើយ។ **ជូឡុង**និង**អ៊ុយអៀន**បានឮ**ខុងបេង**ថាដូច្នោះ ក៏ឆ្លើយថា អាទាំងពីរនាក់នោះ ខ្ញុំប្របាទម្ចាស់ដេញវាទៅអម្បាញ់មិញនេះ ហេតុម្តេចមហាឧបរាជមានប្រសាសន៍ថាចាប់វាបានហើយ? នោះខ្ញុំប្របាទម្ចាស់ឆ្ងល់ណាស់។ កំពុងជជែកមិនទាន់ផុតមាត់ ទទួលឃើញ**ទៀវងី** និង**ទៀវអេក**នាំខ្លួន**សុនា** និង**ហ្លួយឡាំ**ទាំងចំណងចូលទៅឲ្យ**ខុងបេង**។ **ជូឡុង** និង**អ៊ុយអៀន**នូវអស់ទាហានទាំងពួង ឃើញគេចង**សុនា** និង**ហ្លួយឡាំ**នាំមកដូច្នោះ ក៏ដូចជាស្តុតស្មារតី ស្រដីសរសើរតម្រិះប្រាជ្ញាមហាឧបរាជច្រើនណាស់។

**ខុងបេង**ឃើញ**ជូឡុង** និង**អ៊ុយអៀន** នូវអស់សេនាទាហានទាំងពួងសង្ស័យឆ្ងល់ ក៏ពន្យល់សេចក្តីឲ្យស្តាប់ថា យើងត្រិះរិះគិតការនេះ ព្រោះដឹងក្នុងផែនទីសព្វគ្រប់ឃើញថា អាទាំងពីរនាក់នេះ វារត់ទៅប្រសព្វជួបផ្លូវនោះប្រាកដ ទើបមិនហើបមាត់ ប្រើអ្នកទាំងពីរឲ្យទៅធ្វើការ ប្រាជ្ញានឹងឲ្យអ្នកខឹងចិត្តគិតមានះទៅធ្វើការឯង ទើបក្លែងប្រើអ្នកឯទៀតឲ្យលើកទៅវិញ លុះអ្នកទៅផុតហើយ យើងក៏ត្រូវដេញឲ្យទាហានបួននាក់ទៅជួយចាំស្កាត់ចាប់ខ្លួន**សុនា** និង**ហ្លួយឡាំ**បានដូចគំនិតឥតខុសសោះ។ វេលានោះ**ខុងបេង**ក៏បង្គាប់ឲ្យស្រាយចំណង**សុនា** និង**ហ្លួយឡាំ**ចេញ ហើយឲ្យខោអាវសម្លៀកបំពាក់ លើកគុភោជនាហារមកឲ្យបរិភោគហើយថា អ្នកឯងទាំងពីរនាក់គ្មានសេចក្តីខុសអ្វីនឹងយើងទេ ព្រោះតែខ្លាច**បេងហោក**ជានាយចៅហ្វាយគេប្រើ បានជាលើកទ័ពមកធ្វើសង្គ្រាមនឹងយើង ៗគិតអាណិតទុកជីវិតមិនសម្លាប់

ទេ នឹងបើកលែងឲ្យអ្នកឯងទៅវិញ តែថាក្រោយទៀត អ្នកឯងកុំស្ដាប់បង្គាប់ **បេងហេក** លើកទ័ពត្រឡប់មកច្បាំងនឹងយើងទៀតឡើយ។

**សុនា** និង**ហ្លួយឡាំ** បានឮប្រសាសន៍មហាឧបរាជថាដូច្នោះ ក៏មានអំណរណាស់ឆ្លើយថា វេលានេះគឺព្រះបាទម្ចាស់មានសេចក្ដីករុណា ប្រោសទុកអាយុជីវិតឲ្យរស់រួចទៅវិញ ខ្ញុំប្របាទម្ចាស់មិនហ៊ានវិលត្រឡប់មកច្បាំងទៀតឡើយ ក្រាបសំពះហើយក៏លាចេញទៅ។ កាល**ខុងបេង**ដោះលែង**សុនា** និង**ហ្លួយឡាំ**ទៅហើយ ក៏មើលផែនទី ត្រិះរិះគិតកលឧបាយហើយនិយាយថា ព្រឹកស្អែកនេះមុខជា**បេងហេក**លើកទ័ពមកច្បាំងនឹងយើង ក៏ឲ្យ**ជូឡុង**លើកទាហានប្រាំពាន់ទៅចាំស្ទាក់នៅច្រមុះភ្នំគិមតៃ ឲ្យ**អ៊ុយអៀន**នាំទាហានប្រាំពាន់ទៅចាំនៅចុងភ្នំច្រកចង្អៀត ឲ្យ**អងប៉េក** និង**គួនសុក** ពីរនាយនាំទាហានទៅបង្កប់នៅព្រៃក្បែរផ្លូវទាំងស្ដាំទាំងឆ្វេង ជួយគ្នាវាយប្រសព្វចាប់យកខ្លួន**បេងហេក**មកឲ្យបាន។ នាយទ័ពនាយកងទាំងពួង ទទួលប្រសាសន៍ហើយ ក៏ចាត់ចែងលើកទ័ពចេញទៅតាមបង្គាប់។

ទាហានល្បាតក៏នាំសេចក្ដីទៅប្រាប់**បេងហេក**ថា **សុនា**និង**ហ្លួយឡាំ**នោះទាហាន**ខុងបេង**ព័ទ្ធចាប់បាន ឯ**គិមហ្លួន**ស្លាប់ក្នុងទីចម្បាំង។ **បេងហេក**ឮដូច្នោះក៏ខឹងណាស់ ទើបចាត់ទ័ពគ្រប់គ្រាន់ ហើយព្រឹកឡើងក៏លើកចេញទៅ **អងប៉េង**និង**គួនសុក**ទាំងពីរនាយ ឃើញ**បេងហេក**លើកទាហានសម្រុកចូលមកដូច្នោះ ក៏ឡើងសេះកាន់ដាវស្ទុះចេញមក។

**បេងហេក**ក៏និយាយនឹងទាហានទាំងពួងថា ដំណឹងឮគេនិយាយថា **ខុងបេង**នោះមានតម្រិះប្រាជ្ញាណាស់ ហេតុម្ដេចបានជាក្បួនទ័ពដូចជាមិនសមនឹងដំណឹងដែលឮនោះសោះ? បើយើងដឹងជារបៀបរបស់**ខុងបេង**យ៉ាងនេះ កាលណាយើងនឹងបង្អង់ឲ្យយូរដល់ពេលនេះឡើយ យើងនឹងទៅវាយយកស្រុកសែឈ្នួនឲ្យហើយមិន

បានឬ? ទើបសួរទាហានទាំងពួងថា នរណានឹងអាសារទៅច្បាំងចាប់យកនាយទ័ពមកឲ្យយើងបាន?

**ងៀមទៀង**ទាហានទទួលអាសាចេញទៅ កាន់ដាវបរសេះចូលច្បាំងនឹង**អេងប៉េង, គួនសុក** ៗចេញតនឹង**ងៀមទៀង**បានប្រាំក្បាច់ ហើយធ្វើជាថយរត់ទៅ។ **បេងហោក**ឃើញដូច្នោះ ក៏ដេញទាហានឲ្យតាមប្រកិតជិតទៅប្រហែលប្រាំរយសិន **ទៀវងី** និង**ទៀវអេក**ដែលបង្កប់ទាហានៅសងខាងផ្លូវនោះ ក៏ស្រែកហ៊ោចេញមកវាយប្រសព្វទាំងសងខាង។ **អងប៉េង** និង**គួនសុក**ក៏សម្រុកដេញចូលទៅវិញ តាំងតែប្រឡូកកាប់ចាក់ប្រពាក់ប្រពូនលើគ្នា ទាហាន**បេងហោក**ក៏របួសពិការ ស្លាប់ជាច្រើនណាស់។

**បេងហោក**ឃើញដូច្នោះក៏គិតថានឹងតស៊ូពុំបាន ទើបនាំទាហានពារទម្លាយរត់ទៅតាមផ្លូវចម្រុះភ្នំគិមតៃ។ **អងប៉េង, គួនសុក, ទៀវងី** និង**ទៀវអេក**ទាំងបួននាយក៏បំផាយសេះដេញតាមទៅ។

ឯ**ជូឡុង** ដែលនៅចាំច្រមុះភ្នំគិមតៃ ក្រឡេកឃើញ**បេងហោក**រត់ទៅ ក៏បរពលចូលទៅស្ទាក់ពីមុខ។ **បេងហោក**ក្រឡេកឃើញក៏ស្លុតស្មារតីភ័យណាស់ គេចពារព្រៃរត់ទៅតាមចន្លោះចុងភ្នំ។ **ជូឡុង**ក៏ដេញបង្ខំទៅចាប់បានទាហានចងទុកជាច្រើន។ **បេងហោក**ក៏គេចរត់ចូលទៅតាមប្រហាប់ចង្អៀត ទាហានដេញតាមទៅទៀតប្រហែលហាសិបនាក់ ផ្លូវនោះតូចចង្អៀតណាស់ នឹងជិះសេះបរទៅពុំបាន ក៏ចោលសេះចេញរត់ទៅតែខ្លួន លុះឃើញពួកសត្រូវស្ទាក់នៅពីមុខ ក៏តក់ស្លុតបាក់ស្មារតីមិនដឹងដោះដៃរត់ទៅខាងណា ក៏ប្រវាឡើងតោងទៅលើភ្នំ ឯ**អ៊ុយអៀន**ដែលចាំនៅចុងភ្នំ ឃើញ**បេងហោក**រត់ទៅចំ ក៏បង្ខំទាហានឲ្យស្ទុះទៅចោមចាប់បាន ទាហានក៏

ចង**បេងហោក**ចេញមក លុះទៅដល់បន្ទាយព្រមគ្នាហើយ ក៏នាំខ្លួន**បេងហោក**ចូលទៅជូន**ខុងបេង**ហើយពណ៌នាតាមការដែលច្បាំង ឲ្យ**ខុងបេង**ស្តាប់គ្រប់ប្រការ។

**ខុងបេង**បានខ្លួន**បេងហោក** នឹងស្តាប់សំណើកទាហានដែលធ្វើការនោះ ក៏សោមនស្សណាស់ ទើបបង្គាប់ឲ្យរៀបតុលៀងអាហារដាក់ស្រាបាយរាយចំណីឲ្យច្រើន ហើយចាត់ចែងផ្លូវ និងតម្រូវរៀបជាគូបន្ទាយរាយស្នាមភ្លោះ ឲ្យទាហានទាំងអស់ឈរតម្រៀបគ្នា កាន់គ្រឿងសាស្ត្រាវុធប្រាំពីរជាន់ ធ្វើជាទីសង្ហារអស្ចារ្យណាស់ ហើយ**ខុងបេង**ក៏ឡើងអង្គុយលើទីខ្ពស់ខាងលើជាជាន់ ទើបបង្គាប់ឲ្យយកទាហានដែលត្រូវចំណងនោះចូលមកមុន លុះពួកពិសេសលើកអាហារមកព្រមហើយ **ខុងបេង**ក៏បង្គាប់ឲ្យស្រាយចំណងចេញហើយស្រែកថា អស់អ្នករាល់គ្នាគ្រាន់តែជារាស្ត្រចំណុះស្រុក **បេងហោក**កេណ្ឌយកខ្លួនមកច្បាំងនឹងទទឹងមិនបាន ក៏ត្រូវមកទទួលការ ឥឡូវយើងចាប់បានខ្លួនហើយ កូនប្រពន្ធនិងបងប្អូននៅឯនាយក៏ចាំទន្ទឹងមើលផ្លូវគិតអនិច្ចាអាណិត ដ្បិតជាមនុស្សតូចទាប មិនសម្លាប់ទេ ត្រូវលើកលែងឲ្យទៅវិញដើម្បីយកបុណ្យកុសល ទើប**ខុងបេង**បង្គាប់ឲ្យយកស្រាមកតម្កល់លើតុ ព្រមទាំងចំណីចំណុកបាយទឹកឲ្យមនុស្សបរិភោគ ហើយក៏បើកលែងអស់ទៅ។ ទាហានទាំងនោះ លុះរួចអំពីមរណភ័យដូច្នោះ ក៏សោមនស្សត្រេកអរទាំងអស់គ្នា គិតដល់ព្រះតេជព្រះគុណ**ខុងបេង**ក្រៃមហិមា ក៏នាំគ្នាក្រាបក្បាលសំពះហើយក៏លាចេញទៅ។

កាល**ខុងបេង**បើកលែងទាហាន**បេងហោក**ទៅហើយ ទើបបង្គាប់ឲ្យយកខ្លួន**បេងហោក**ចូលមក។ **ខុងបេង**សួរថា ហេតុអ្វី**បេងហោក**ឯងហ៊ានមើលងាយប្រមាថលើកទ័ពមកវាយយកស្រុកអេងឆៀង ដែលជាអាណាខេត្តរបស់ម្ចាស់ផែនដីនៃយើង? **បេងហោក**ឆ្លើយថា ស្រុកអេងឆៀងនោះមិនមែនជាអាណាខេត្តរបស់លោក

ទេ គឺជាស្រុករបស់អ្នកដទៃឯទៀតទេតើ! តែលោកខ្លាំងពូកែ ហើយក៏ទៅរុករានទន្ទ្រានកាច់យករបស់គេទុក ហើយលើកមកវាយស្រុក**ម៉ាន់អង** កំហែងយើងទៀត ហើយថាយើងប្រមាថមើលងាយវិញ។ **ខុងបេង**ឮដូច្នោះក៏អស់សំណើចហើយថា យើងចាប់បានខ្លួនមកដូច្នេះហើយ ខ្លួនខ្លាចក្រែងយើងដែរឬទេ? **បេងហោក**ថា នេះហាក់តែយើងបែកទ័ពរត់ត្រឡប់ទៅ ចូលត្រង់ច្រកភ្នំចង្អៀតទើបឆ្លៀតចាប់យើងបាន បើយើងរត់ទៅតាមផ្លូវធំទូលាយ កាលណានឹងចាប់យើងបាន។ យើងឥតខ្លាចសោះទេ។

**ខុងបេង**អស់សំណើចហើយថា បើដូច្នេះ ខ្លួននឹងឲ្យយើងធ្វើប្រការម្ដេចទៅវិញទើបខ្លួនខ្លាចយើង? **បេងហោក**ថា បើលោកលែងយើងទៅវិញ យើងនឹងនាំទាហានមកច្បាំងនឹងលោកទៀត បើចាញ់លោកៗចាប់បានទៀត ទើបយើងកោតខ្លាចលោកតទៅ។ **ខុងបេង**ឮ**បេងហោក**ថាដូច្នោះ ក៏បង្គាប់ឲ្យស្រាយចំណងចេញ ហើយឲ្យគ្រឿងសម្លៀកបំពាក់និងសេះមួយ ហើយឲ្យលើកតុមកលៀងអាហារ លុះ**បេងហោក**បរិភោគរួចកាលណា ក៏បើកលែងទៅវិញ។ ពួកនាយទ័ពនាយកងនិងទាហានទាំងពួង ឃើញ**ខុងបេង**បើកលែង**បេងហោក**ទៅវិញដូច្នោះ ក៏នាំគ្នានិយាយថា អស់យើងខំលើកទ័ពមកច្បាំងទាំងម្ល៉េះ គឺប្រាថ្នាយកខ្លួន**បេងហោក**ជាមេខ្មាំងសត្រូវឲ្យបាន ឥឡូវចាប់បានមកហើយ មហាឧបរាជបើកលែងឲ្យរួចទៅដូច្នេះ តើនឹងប្រយោជន៍អ្វី?

**ខុងបេង**អស់សំណើចហើយថា អស់អ្នករាល់គ្នាកុំបីសង្ស័យ ឯខ្លួន**បេងហោក**នេះឧបមាដូចចាក់សោហិបបើកយកមាស ងាយណាស់ វេលានេះ យើងត្រូវធ្វើឲ្យវាកោតខ្លាចឲ្យណាស់។ នាយទ័ពនាយកង និងទាហានស្ដាប់**ខុងបេង**ថាដូច្នោះ ក៏គិត

សង្ស័យណាស់ តែមិនអាចនឹងថាប្រការម្តេច ទាំងអស់គ្នាក៏ក្រាបលាវិលទៅបន្ទាយរៀងខ្លួនវិញ។

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លុក៖*

www.khmerliterature.wordpress.com

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៦៧

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ខុងបេង**ចាប់បាន**បេងហេក** ហើយលែង ៗហើយចាប់បានវិញគ្រប់ប្អូនដង រហូតដល់**បេងហេក, បេងហ៊ីវ** បងប្អូនពឹង**តោស៊ូតៃអង**នៅភ្នំអ៊ីតងសាន់ឲ្យជួយច្បាំងនឹង**ខុងបេង**)។*

**ឯបេងហេក**នោះ លុះ**ខុងបេង**លែងផុតទៅហើយ ក៏ឡើងសេះស្រូតទៅដល់ឆ្នេរស្ទឹងឡុកស៊ុយ ប្រទះនឹងទាហានរបស់ខ្លួនដែលបែកខ្ញែករត់ទៅនៅក្នុងព្រៃរហោស្ថាន ក៏បានលួងលោមនិយាយយកចិត្តទាហាន ៗទាំងនោះលុះបានឃើញ**បេងហេក**ត្រឡប់វិលមកវិញ ក៏ចេញទៅគំនាប់ទាំងអស់ទាំងភ័យតក់ស្លុត សឹងតែលុតក្រាបហើយជម្រាបសួរថា គេចាប់យកខ្លួនលោកបានទៅហើយ ម្ដេចឡើយក៏លោកបានរួចខ្លួនមកវិញដូច្នេះ? **បេងហេក**បានឮទាហានសួរដូច្នោះក៏គិតរំពឹងថា **ខុងបេង**ចាប់យើងបានទៅ វាឲ្យទាហានឃុំយើងទុកនៅក្នុងបន្ទាយ មានមេនាយដប់នាក់ លុះដល់ពេលយប់ស្ងាត់យើងសម្លាប់ទាហានដប់នាក់នោះហើយ ក៏លបដោះខ្លួនរត់ចេញមកបាន ៗប្រទះនឹងពួកល្បាតជិះសេះ យើងក៏សម្លាប់ពួកល្បាតនោះ យកសេះជិះមក។ ពួកទាហានទាំងឡាយឮទាហាននិយាយដូច្នោះ ក៏មានអំណរគ្រប់ៗគ្នា។

**បេងហេក**ក៏ម្នីម្នានាំពួកទាហាននោះចុះទូកឆ្លងទៅត្រើយម្ខាង ហើយឲ្យតាំងធ្វើជាបន្ទាយនៅត្រើយខាងនោះ តាំងតែបញ្ចុះបញ្ចូលប្រមូលពលយោធា បណ្ដាដែលបែកព្រាត់គ្នាទាំងប៉ុន្មានឲ្យបានមកវិញ ហើយបង្គាប់ទាហាននោះមិញ ឲ្យដើរបញ្ចុះបញ្ចូលពួកអ្នកស្រុក ដែលចំណុះចុះចូលទាំងប៉ុន្មាន ដែលឡើងស្រុកម៉ាន់អង

នោះមកទាំងអស់ ហើយដឹងថា **សុនា** និង**ហ្លួយឡាំ**បានត្រឡប់វិលមកវិញដែរ ក៏ឲ្យបម្រើទៅហៅ**សុនា** និង**ហ្លួយឡាំ**ចូលមក។ ទាហានជាអ្នកបម្រើទទួលពាក្យហើយក៏ញែកគ្នាចេញទៅហៅតាមបង្គាប់។

ឯ**សុនា** និង**ហ្លួយឡាំ** នូវបណ្ដាទាហានស្រុកចំណុះ លុះដឹងដូច្នោះក៏នាំគ្នាស្រូតចូលទៅ លុះទៅដល់ព្រមគ្នាហើយក៏ចូលទៅគំនាប់**បេងហេក** ៗសួរថា **ខុងបេង**លើកទ័ពមកច្បាំងនឹងយើងគ្រានេះជាទេសកាលក្ដៅ ពួកទាហានមិនបានទីអាស្រ័យនោះ យើងទាំងអស់គ្នានឹងតាំងទ័ពឲ្យមាំមួននៅត្រើយខាងនេះ ត្រូវតែចាំមើលកលការសិន គួរឲ្យកេណ្ឌយកផ្ទះផែពីត្រើយម្ខាងមកទុកនៅត្រើយខាងនេះឲ្យអស់ កុំឲ្យពួកសត្រូវឆ្លងមកបាន ហើយឲ្យជីកដីពូនឡើងជាកំពែងបាំង តាំងប៉មរាយទៅតាមឆ្នេរស្ទឹង ឲ្យមានទាហានកាន់ធ្នូរក្សាបន្ទាយបាញ់ពីចម្ងាយ កុំឲ្យសត្រូវទៅបាន ឯស្បៀងអាហារទាំងប៉ុន្មាន ត្រូវកេណ្ឌយកពីគ្រប់ខេត្តខណ្ឌឲ្យបញ្ជូនមក ហើយយើងត្រូវសំកុកកុំឲ្យចេញច្បាំងឲ្យសោះ មើលចំណេះ**ខុងបេង** តើនឹងគិតប្រការម្ដេច? នោះនាយទ័ពនាយកង និងទាហានទាំងពួងបានស្ដាប់ហើយ ក៏យល់ឃើញត្រូវ ទើបនាំគ្នាចេញទៅចាត់ការតាម**បេងហេក**បង្គាប់គ្រប់ប្រការ។

ឯ**ខុងបេង**នោះ លុះបើកលែង**បេងហេក**ផុតទៅហើយ ក៏លើកទ័ពទៅទៀត លុះទៅដល់ឆ្នេរស្ទឹងឡុកស៊ុយហើយ ក៏ដើរមើលបែបភាពផ្លូវព្រៃតាមន័យដែលមានក្នុងទីនោះ លុះឃើញទំនងទឹកហូរធ្លាក់ទៅខ្លាំងណាស់ ផ្ទះផែក៏មិនឃើញមាន ក្រឡេកមើលទៅត្រើយម្ខាងឃើញទួលខ្ពស់ មានមនុស្សដើរលើកំពែងរៀងគ្នា មានទាហាននៅត្រៀបត្រារក្សាបន្ទាយ **ខុងបេង**ក៏ឲ្យហៅពួកនាយទាហានមកប្រឹក្សាថា **បេងហេក**ធ្វើការដូច្នោះ មុខជាមិនលើកទ័ពចេញមកតច្បាំងនឹងយើងទេ វានៅរង់ចាំទទួលទ័ពយើង។ បើដូច្នោះ ត្រូវតែយើងគិតការប្រាថ្នានឹងចូលហែកទម្លាយបន្ទាយ

វាយកជ័យជម្នះឲ្យបាន ទើបបង្គាប់**លិឃី**ថា អ្នកផ្គាប់ទៅមកស្គាល់យល់ច្រកល្ហកស្រុកនេះប្រាកដ ចូរទៅចាត់ចែងតាំងបន្ទាយវាយទៅតាមមាត់ច្រាំងឲ្យបានបួនបន្ទាយ ហើយឲ្យ**អងប៉េង, គួនសុក, ទៀវអេក, ទៀវងី**នៅរក្សាម្នាក់បន្ទាយមួយ ហើយដោយយើងលើកទ័ពមកគ្រានេះជាទេសកាលក្ដៅណាស់ ទាហានគ្មានទីបន្លាស់នឹងឈប់ស្នាក់អាស្រ័យនៅ ឲ្យទៅកាត់ឈើច្រូតស្មៅធ្វើបន្ទាយឲ្យមានម្លប់ប្រយោជន៍សេះ និងមនុស្សបានជ្រកឈប់សម្រាកគ្រប់ពួកគ្រប់ក្រុមក្នុងទ័ព។ **លិឃី**និងនាយទាហានបានទទួលបង្គាប់ ក៏នាំគ្នាទៅចាត់ការរួសរាន់តាមបង្គាប់។

**ចៀវអ្នួន**ឃើញ**លិឃី**តាំងបន្ទាយវាយជាជួរជាន់ដូច្នោះ ទើបចូលគំនាប់ជម្រាប**ខុងបេង**ថា **លិឃី**តាំងបន្ទាយវាយនៅតាមច្រាំងស្ទឹងដូច្នេះ ខ្ញុំបាទយល់ឃើញថា តម្រិះដូចកាលគ្រាព្រះចៅ**ឡៅពី**លើកទៅវាយស្រុកកាំងតាំង **ឡុកស៊ុន**ឲ្យទាហានសំរាំងលបដុតបន្ទាយព្រះអង្គអស់ បានជាថ្លោះការ។ ឥឡូវខ្ញុំបាទឃើញដូច្នេះ ក្រែង**បេងហេក**មានប្រាជ្ញាឲ្យលបដុតបន្ទាយយើងដូចគ្រានោះទៀត យើងមិនថ្លោះការទេឬ? **ខុងបេង**ឮដូច្នោះ ក៏អស់សំណើចហើយឆ្លើយតបប្រាប់**ចៀវអ្នួន**ថា អ្នកកុំសង្ស័យអ្វីឡើយ យើងបានគិតរួចអស់ហើយការនោះ បានជាបង្គាប់ឲ្យធ្វើ។

ឯព្រះចៅ**ឡៅសៀន**នោះ លុះដល់រដូវទេសកាលគិម្ហន្ត ទើបទ្រង់បង្គាប់**ម៉ាតាយ**ឲ្យនាំទាហានបីពាន់ យកស្បៀងដែលសម្រាប់បរិភោគខែក្ដៅទៅឲ្យ**ខុងបេង** លុះទៅដល់ហើយក៏ចូលទៅគំនាប់ ហើយលើកព្រះរាជទ្រព្យដែលប្រោសព្រះរាជទានទៅឲ្យ**ខុងបេង** ៗក៏លើកដៃឡើងថ្វាយបង្គំទទួលយក ហើយឲ្យចែករបស់នោះនៅគ្រប់នាយទ័ពនាយកង និងទាហានបានបរិភោគគ្រប់គ្នា ហើយក៏និយាយនឹង**ម៉ាតាយ**ថា យើងលើកទ័ពមកគ្រានេះ បានច្បាំងតាំងតគ្នាជាពន្លឹកណាស់ ទាហានជាន់ចាស់ក៏នឿយហត់គ្រប់ៗគ្នា នឹងចង់សុំឲ្យអ្នកដែលថ្មីថ្មោងទៅជួយរាជការ

តទៅបានឬទេ? **ម៉ាតាយ**ឆ្លើយថា ខ្លួនខ្ញុំបាទ និងពលទាហានទាំងអស់ ចំពោះជាខ្ញុំព្រះចៅ**ឡៅសៀន**បានត្រាស់ប្រើមក នឹងយកអាសាត្រាតែអស់ជីវិត ពុំគិតស្តាយស្រណោះឡើយ តាមតែប្រសាសន៍ហើយប្រើប្រាស់ចុះ។

**ខុងបេង**បានស្តាប់ឮដូច្នោះក៏ត្រេកអរមហិមា ទើបពណ៌នាថា **បេងហេក**តាំងទ័ពនៅត្រើយម្ខាង ទាហានរែកជញ្ជូនស្បៀងមកឲ្យផ្លូវក៏ឆ្ងាយ អ្នកចូរនាំទាហានទាំងឡាយចុះទៅតាំងក្រោមបន្ទាយវា ឲ្យឆ្ងាយប្រមាណមួយពាន់ប្រាំរយសិន (៦០ គ.ម) ទីនោះទឹករាក់ ចូរកាត់ឈើធ្វើផែចម្លងទាហានទៅចាំច្បាំងកាត់យកស្បៀងអាហារដែលវាជញ្ជូនមកនោះឲ្យបាន ហើយប្រាប់ថា**សុនា, ហ្លួយឡាំ**ដែលយើងលែងទៅនោះ ក៏នឹងបានជាកលសឹករបស់យើង។ **ម៉ាតាយ**បានស្តាប់សព្វសេចក្តីដែល**ខុងបេង**ស្រដីប្រាប់ដូច្នោះ ក៏លាចុះទៅ លុះដល់ទីឆ្លងក៏ដេញទាហានឲ្យកាត់ឈើធ្វើផែចម្លងទាហានទៅ។ ទាហានទាំងនោះក្តៅណាស់ឃើញទឹករាក់ ក៏ផ្លាស់សម្លៀកបំពាក់ចុះងូតទឹកហែលលេង នោះបណ្តាទាហានដែលចុះងូតទឹកទាំងប៉ុន្មានលុះបានឆ្លងទៅដល់ត្រើយហើយក៏ដួលចុះទាំងអស់គ្នា ធ្លាក់លោហិតចេញតាមទ្វារមាត់និងច្រមុះស្លាប់ប្រហែលមួយពាន់ប្រាំរយនាក់។ **ម៉ាតាយ**ឃើញទាហានស្លាប់ច្រើនណាស់ ក៏ភិតភ័យក្រៃពេក នាំគ្នាបំបែរឆ្លងត្រឡប់មកវិញទាំងវេលាយប់ ហើយចូលទៅជម្រាប**ខុងបេង**ថា ទឹកស្ទឹងនោះកាចខ្លាំងណាស់ ទាហានទាំងអស់មិនបានដឹងចុះងូតផឹកទឹកនោះ លោហិតក៏ពុះធ្លាយចេញពីមាត់ពីច្រមុះស្លាប់អស់មួយពាន់ប្លាយ។

**ខុងបេង**ឮហើយក៏ភ័យស្លុតស្មារតី ទើបបង្គាប់ទាហានឲ្យចេញឃ្លាតខ្ចីទៅចាប់អ្នកស្រុកឲ្យបានមកវេលានេះ។ ទាហានក៏ជិះសេះនាំគ្នាចេញទៅស្វែងចាប់បានអ្នកស្រុកមកជូន**ខុងបេង** ៗក៏សាកសួរយកការណ៍ថា ស្ទឹងនេះមានមនុស្សចុះងូត

ផឹកក៏ទៅជាដូច្នោះ តើដោយហេតុភេទប្រការម្ដេច? អ្នកស្រុកព្រៃឆ្លើយថា ទឹកស្ទឹងនេះមានពិសកាចណាស់ ទេសកាលនេះបើនរណាងូត ឬផឹកកំពុងថ្ងៃត្រង់ គង់នឹងអន្តរាយជីវិត បើនរណាងូតផឹកពេលអាធ្រាត្រស្ងាត់ ទើបមិនស្លាប់។

**ខុងបេង**បានដឹងដូច្នោះហើយ ទើបចាត់ទាហានឲ្យ**ម៉ាតាយ**ប្រាំរយនាក់បញ្ចូលគ្នាជាពីរពាន់ ឲ្យអ្នកស្រុកនោះនាំផ្លូវទៅ។ **ម៉ាតាយ**ក៏លើកទាហានចេញទៅតាមអ្នកស្រុកនាំ លុះទៅដល់ផែជាវេលាអាធ្រាត្រស្ងាត់ក៏ឆ្លងផុតទៅ អ្នកស្រុកក៏នាំផ្លូវទៅដល់ច្រកភ្នំ ដែលរួមផ្លូវជួបគ្នានឹងច្រកផ្លូវដែលទាហាន**បេងហេក**ជញ្ជូនស្បៀង។ **ម៉ាតាយ**ក៏ចាត់ចែងទាហានឲ្យចាំវាយស្ទាក់នៅទីនោះ។

ឯទាហាន**បេងហេក**ដែលនាំស្បៀង មិនដឹងថាសត្រូវមកចាំនៅទីនោះ លុះរែកជញ្ជូនស្បៀងដើររៀងៗទៅដល់ច្រកប្រហប់ភ្នំនោះ **ម៉ាតាយ**ក៏ឲ្យទាហានស្រែកហ៊ោចេញច្បាំងដណ្ដើមយកស្បៀងអាហារទាំងនោះ ហើយកាប់សម្លាប់ពួកទ័ពស្បៀងស្លាប់ខ្លះ ៗក៏ស្ទុះរត់រួចតែខ្លួនទៅ បានស្រូវជាស្បៀងទុកប្រមាណមួយរយប្លាយរទេះ ហើយតាំងបន្ទាយជាមាំមួនរក្សាស្បៀងនៅទីនោះ។

ឯ**បេងហេក**នោះ លុះចាត់ការឲ្យធ្វើបន្ទាយរាយជីកគូ តស្នាមភ្លោះចុះជាមាំមួនហើយ ក៏ទុកចិត្តគិតថាបានឈ្នះសឹកសត្រូវ ទើបសេពសុរាច្រៀងរាំសប្បាយនៅក្នុងបន្ទាយនោះ ហើយនិយាយនឹងទាហានទាំងពួងថា យើងតាំងទីម្ដងនេះមាំមួនស្រួលណាស់ ព្រោះត្រើយខាងនេះមានស្បៀងអាហារទាហានយើងដឹកនាំមកមិនដាច់ ធ្វើម្ដេច**ខុងបេង**នឹងធ្វើយើងបាន។ ព្រោះលើកមកពេលនេះជាទេសកាលក្ដៅនឹងទ្រាំនៅយូរពុំបានទេ គង់តែបន្តិចទៀតនឹងលើកទ័ពត្រឡប់ទៅឯង យើងនឹងលើកតាមទៅវាយឲ្យដល់កន្លែង មុខជានឹងចាប់ខ្លួន**ខុងបេង**បាន។ និយាយហើយក៏សើចក្អាកក្អាយសប្បាយណាស់។ ទាហានម្នាក់បានឮ**បេងហេក**និយាយដូច្នោះ ក៏ឆ្លើយថា

ខ្ញុំបាទឃើញថាទឹកក្រោយបន្ទាយចុះទៅមានទីរាក់នឹងឆ្លងបានមួយអន្លើ ខ្លាចក្រែង**ខុងបេង**នឹងចាប់មនុស្សអ្នកស្រុកលើបាន សួរដឹងការណ៍នឹងលើកមកតាមផ្លូវនោះ។ បើដូច្នោះសូមលោកចាត់ទាហានឲ្យលើកទៅតាំងបន្ទាយរាំងផ្លូវនៅទីនោះ កុំឲ្យសត្រូវលើកឆ្លងមកបានទើបស្រួល។

**បេងហោក**ឮដូច្នោះ ទើបឆ្លើយថា អស់អ្នករាល់គ្នានៅទីនោះមិនដឹងទេឬថាទឹកនោះកាច យើងក្លែងនឹងឲ្យវាឆ្លងមកទីនោះទៀត បើចុះងូតទឹកនោះវេលាណា ក៏នឹងស្លាប់ទាំងអស់ ទើបមិនបាច់ឲ្យលើកទាហានទៅស្កាត់ជាការឥតប្រយោជន៍។ លុះនិយាយគ្នាមិនទាន់ផុតពាក្យ ស្រាប់តែមានទាហានដែលជញ្ជូនស្បៀងបែកទៅនោះ ចូលទៅជម្រាបឲ្យការណ៍ថា **ម៉ាតាយ**នាំទាហានលើកឆ្លងទៅវាយស្កាត់យកស្បៀងបានអស់ហើយ ៗសម្លាប់ទាហាស្លាប់ច្រើនណាស់។ **បេងហោក**ឮដូច្នោះក៏សើចហើយថា វានឹងធ្វើអ្វីយើងបាន? ទើបបង្គាប់**ងៀទៀង**ឲ្យនាំទាហានបីពាន់ទៅវាយទ័ព**ម៉ាតាយ**។ **ងៀទៀង**ក៏ទទួលបង្គាប់លើកទ័ពចេញទៅ លុះទៅដល់ហើយក៏បរពលចូលច្បាំងនឹង**ម៉ាតាយ**។

ឯ**ម៉ាតាយ**នោះ លុះឃើញ**ងៀទៀង**លើកពលចូលទៅច្បាំងដូច្នោះ ក៏ស្ទុះកាន់ដាវឡើងសេះ ដេញទាហានចូលប្រយុទ្ធគ្នានឹង**ងៀទៀង**បានពីរភ្លែង **ម៉ាតាយ**កាប់**ងៀទៀង**ធ្លាក់ពីលើសេះស្លាប់ ហើយដេញកាប់ពល**ងៀទៀង**ស្លាប់វិនាសប្រាស់រត់ទៅ។ ទាហាន**ងៀទៀង**ដែលសល់នៅក៏ចូលទៅប្រាប់ដំណឹងដល់**បេងហោក**គ្រប់ប្រការ។ **បេងហោក**បានដំណឹងក៏ឲ្យប្រមូលពលយោធាមកជួបជុំ ហើយសួរថានរណានឹងអាសាទៅតនឹង**ម៉ាតាយ**បានខ្លះ? **សុនា**ឃើញទាហានទាំងអស់ស្ងៀម ក៏ឆ្លើយថា ខ្ញុំបាទនឹងសុំអាសាចេញទៅធ្វើការនឹង**ម៉ាតាយ**។ **បេងហោក**ក៏អរវីករាយសប្បាយចិត្ត ទើបចាត់ទាហានឲ្យ**សុនា**បីពាន់។ **សុនា**ក៏ទទួលបង្គាប់លើកចេញ

ទៅ។ **បេងហេក**និយាយនឹងទាហានដែលនៅជាមួយថា យើងស្មានថាទឹកស្ទឹងនោះកាច សត្រូវមិនអាចលើកឆ្លងមកបានទេ ហេតុម្តេចវាចេះគិតអានឆ្លងមកដល់ត្រើយខាងនេះ ហើយវាមានតម្រិះលើកទៅស្កាត់ខ្ចាត់វាយយកពួកនាំស្បៀងរបស់យើងបាន ត្រូវយើងចាត់ឲ្យមានទាហាមួយកងទៅស្កាត់នៅទីនោះ ថាយើងក៏បង្គាប់**ហួយឡាំ**ឲ្យនាំពលបីពាន់ ទៅតាំងបន្ទាយនៅទីទឹករាក់ដែលឆ្លងនោះ កុំឲ្យសត្រូវឆ្លងមកបាន។ **ហួយឡាំ**ទទួលបង្គាប់ហើយ ក៏នាំពលចេញទៅធ្វើតាមបង្គាប់**បេងហេក**។ ខណៈកាល**សុនា**លើកទ័ពទៅនោះ លុះលើកទៅជិតដល់ទីកន្លែងក៏តាំងតែឲ្យទាហានធ្វើបន្ទាយហើយចេញច្បាំង។

ឯ**ម៉ាតាយ**ឃើញកងទ័ពលើកមកដូច្នោះ ក៏ជិះសេះកាន់ដាវចេញទៅជាមួយនឹងទាហាន ៗដែល**ខុងបេង**ឲ្យមកផងនោះ លុះឃើញ**សុនា**ហើយក៏ប្រាប់**ម៉ាតាយ**ថា**សុនា**នេះហើយដែល**ទៀវងី**ចាប់បានម្តង **ខុងបេង**មហាឧបរាជឲ្យលែងមកវិញ។ **ម៉ាតាយ**បានឮទាហានប្រាប់ដូច្នោះក៏បំបោលសេះចូលទៅជិត**សុនា** ហើយស្រែកថា អាចោរនិរគុណ! ចៅហ្វាយយើងចាប់ខ្លួនឯងបានហើយមិនសម្លាប់ ព្រោះឃើញបុណ្យកុសល លែងឯងមកវិញឲ្យជួបញាតិមិត្តបុត្រភរិយា ឥឡូវឯងពាលាត្រឡប់មកច្បាំងដូច្នេះ ជាផ្លូវតបស្នងសងគុណហើយឬ? **សុនា**បានឮ**ម៉ាតាយ**ថាដូច្នេះ ក៏ឲ្យនឹកអៀនខ្មាសពន់ប្រមាណ ទើបធ្វើដំណើរអែអង់មិនចង់នឹងមានចិត្តគិតច្បាំង។ **ម៉ាតាយ**ឃើញទ័ព**សុនា**រារែកនៅដូច្នោះ ក៏ដេញទាហានទន្ទ្រានចូលទៅ ទ័ព**សុនា**បែកបាក់ខ្ចាត់ខ្ចាយព្រាត់ព្រាយគ្នាចូលទៅក្នុងព្រៃអស់។

**សុនា**ឃើញទ័ពបែកបាក់ទៅទីទៃ ក៏ដោះដៃរត់ចូលទៅដល់**បេងហេក** ហើយជម្រាបថា **ម៉ាតាយ**នោះជាមនុស្សមានថ្វីដៃខ្លាំងពូកែណាស់ ខ្ញុំបាទតស៊ូមិនបានទេ ដែលចាញ់គេរត់មកទាំងនេះ ស្រេចតែលោកនឹងមេត្តាចុះ។ **បេងហេក**បានស្តាប់

ហើយក៏ខឹងណាស់ ឆ្លើយរហ័សថា ឯងក្លែងច្បាំងឲ្យចាញ់គេបែកមកទាំងនេះ ក៏ព្រោះគិតដល់គុណ**ខុងបេង** បានជាមិនតាំងចិត្តនឹងច្បាំង យើងនឹងចិញ្ចឹមទុកក៏មិនបាន ហើយក៏បង្គាប់ទាហានឲ្យចាប់**សុនា**ចងនាំទៅសម្លាប់។ បណ្ដាពួកទាហានដែលបានអង្គុយនៅទីនោះ ក៏ស្រុះគ្នាស្រែកសុំទោស**សុនា**។ **បេងហោក**ថា អស់អ្នករាល់គ្នាសុំទោស**សុនា** យើងក៏ព្រមឲ្យ តែត្រូវធ្វើកុំឲ្យមានជាយឿងយ៉ាងតទៅ ទើបឲ្យវាយ**សុនា**មួយរយខ្នាប់ ហើយឲ្យស្រាយលែងទៅ។

ឯ**សុនា**បានទទួលទណ្ឌកម្មដែលគេវាយដំ ក៏ក្រំឈឺក្នុងខ្លួនពន់ប្រមាណ មានពួកម៉ាកលើកគ្រាប់នាំយកទៅដល់បន្ទាយខ្លួន ក៏ថែធូនមើលរបួសរាល់ថ្ងៃ នោះមានពួកទាហាន**បេងហោក**ដែល**ខុងបេង**ចាប់បានហើយលែងមកវិញ ក៏បបួលគ្នាទៅសួរគួរសមនឹង**សុនា** ឃើញ**សុនា**ឈឺនឹងរបួសវាយធ្ងន់ណាស់ ក៏នាំគ្នាកើតទុក្ខនឹកអាណិតអានាថ ហើយនិយាយថា ពីដើមមកមិនបានមានសឹកសង្គ្រាមចូលមកដល់ស្រុក គ្រានេះព្រោះ**បេងហោក**លើកទ័ពទៅវាយស្រុកអេងឆៀង ទើបបណ្ដាលឲ្យសឹករំលងលើកចូលមកក្នុងស្រុកបាន ឲ្យអស់យើងមានសេចក្ដីក្ដៅក្រហាយគ្រប់គ្នា។ ឯ**ខុងបេង**នោះជាមនុស្សចិត្តជា ល្បីឮថាមានសតិបញ្ញាជ្រៅឆ្ងាយ ព្រះចៅ**ស៊ុនគួន** និងព្រះចៅ**ចូភី**ទាំងពីរកាយ គង់ខ្លាចឧបាយប្រាជ្ញា**ខុងបេង**ណាស់។ គ្រានេះ**ខុងបេង**លើកទ័ពមកយកជ័យជម្នះចាប់អស់យើងបាន មិនសម្លាប់ជីវិត អាណិតបើកលែងយើងមកទាំងអស់គ្នា ជាបុណ្យគុណអស្ចារ្យនៅលើខ្លួនយើងច្រើនណាស់ បើនឹងពិគ្រោះមើលឲ្យច្បាស់ ឃើញថាទាហានស្រុកនេះ មិនឃើញមាននរណាក្លាហាននឹងបានចេញមុខទៅតនឹងគេបានទេ ស្រុកយើងគង់នឹងបែកបានទៅគេជាប្រាកដ បើយើងនឹងទ្រាំនៅស្ងៀម គង់**បេងហោក**នឹងតាមកេណ្ឌយកយើងទៅច្បាំងទៀតពុំខាន យើងរឹងទទឹងឯណាបាន នឹងនាំគ្នាទៅស្លាប់អស់ហើយ កុំនៅស្ងៀម

ឡើយ ត្រូវនាំគ្នាចាប់ខ្លួន**បេងហោក**នាំទៅជូន**ខុងបេង**ចុះ យើងនឹងមានកេរ្តិ៍ឈ្មោះគាប់គួរនឹង**ខុងបេង**ពុំលែង។ **សុនា**បានឮសំឡេងពួកទាហាននិយាយដូច្នោះ ក៏ត្រូវចិត្តរឹតតែមានអំណរណាស់ ទើបរហ័សឆ្លើយឡើងថា បើព្រមចិត្តគ្នាដូចនិយាយនេះហើយ ចូរទៅឃ្លាំមើល បើឃើញ**បេងហោក**ផឹកស្រាស្រវឹងពុំដឹងខ្លួនកាលណា អ្នករាល់គ្នាត្រូវប្រញាប់វិលត្រឡប់មកប្រាប់យើងភ្លាមៗ។ ពួកទាហានក៏ចេញទៅឃ្លាំមើលតាមពាក្យ**សុនា**។

ឯ**បេងហោក**នោះ ជាមនុស្សទ្រើសទ្រនង់អង់អាចណាស់ មិនបានគិតប្រយ័ត្នការឱ្យជាក់ច្បាស់ក្នុងកលសង្គ្រាម ចេះតែប្រកាន់ទំនៀមទម្លាប់ផឹកស៊ីជានិរន្តរ៍ តែស្រវឹងអ៊ូអរហើយក៏ដេកលក់ទៅ ឯទាហានដែលទៅឃ្លាំមើលបានការជា**បេងហោក**ផឹកស្រាស្រវឹងជោក ក៏ក្រោករត់ទៅប្រាប់**សុនា** ៗបានដឹងដូច្នោះ ក៏តែងខ្លួនស្លៀកពាក់កាន់ដាវសៀតលាក់ លើកទាហានរត់ស្រចូលទៅក្នុងបន្ទាយ**បេងហោក** ហើយព្រួតគ្នាចាប់ចង**បេងហោក**ខ្ជាប់ ប្រញាប់នាំចុះទូកឆ្លងសំដៅទៅត្រង់បន្ទាយ**ខុងបេង**ហើយប្រាប់ទាហានយាមឱ្យចូលទៅប្ដឹងមហាឧបរាជតាមការណ៍។ ទាហានយាមក៏ចូលទៅជម្រាបថា ពួកទាហានចាប់ខ្លួន**បេងហោក**នាំមកជូន។ **ខុងបេង**បានដឹងសេចក្ដីទើបបង្គាប់ពួកទាហានក្នុងបន្ទាយ ឱ្យតែងខ្លួនកាន់អាវុធគ្រប់ដៃ ហើយឈរតម្រៀបគ្នាជាទីសំញែងអំណាច ឱ្យសត្រូវកោតខ្លាចចេស្ដា ទើបបង្គាប់ឱ្យនាំខ្លួន**សុនា**នូវអស់ទាហានចូលទៅមុន។ **សុនា**និងបណ្ដាទាហានក៏ចូលទៅ លុះដល់ហើយទាំងអស់គ្នាក៏ក្រាបសំពះហើយជម្រាបថា យើងខ្ញុំទាំងអស់គ្នាគិតដល់គុណលោកម្ចាស់ ព្រោះលោកចាប់យើងខ្ញុំហើយមិនសម្លាប់ បើកលែងទៅវិញ យើងខ្ញុំគិតឃើញគុណនោះមិញ ទើបនាំគ្នាចាប់យក**ខ្លួនបេង**ហោកមកជូនលោក។

**ខុងបេង**ថា ការដែលអ្នករាល់គ្នាបានចាប់ខ្លួន**បេងហោក**មកឲ្យយើង ដោយដឹងគុណយើងនោះ យើងក៏គាប់ចិត្តណាស់ហើយ ទើបឲ្យរង្វាន់ជាគ្រឿងសម្លៀកបំពាក់តាមសមគួរ។ **សុនា** និងបណ្ដាទាហានបានទទួលរង្វាន់ហើយក៏លាទៅ ទើប**ខុងបេង**បង្គាប់ឲ្យទាហាននាំខ្លួន**បេងហោក**ចូលទៅជាក្រោយ ហើយនិយាយថា ដែលអ្នកឯងបានចុះខសញ្ញាទុកឲ្យយើងនោះ ឥឡូវឯងខ្លាចយើងហើយឬនៅ?

**បេងហោក**ឆ្លើយជម្រាបថា មិនមែនយើងច្បាំងចាញ់ថ្វីដៃទេ គឺទាហានយើងអាក្រក់លបចាប់ខ្លួនយើងយកមកជូនយកសេចក្ដីគាប់គួរ យើងនៅមិនទាន់កោតខ្លាចទេ។ **ខុងបេង**ឮហើយថា អ្នកឯងមិនទាន់ខ្លាចយើងនោះ តើនឹងចង់ឲ្យយើងលែងឬឲ្យធ្វើប្រការម្ដេច? **បេងហោក**ថា ទោះបីយើងជាអ្នកស្រុកក្រៅក្ដី ការសឹកប៉ុណ្ណោះក៏ល្មមតស៊ូនឹងលោកបាន បើលែងយើងទៅស្រុកវិញ យើងនឹងប្រមូលពលទាហានមកច្បាំងនឹងលោកទៀត បើចាញ់ម្ដងនេះទៀតទើបខ្លាចលោក។ **ខុងបេង**ឮហើយក៏អស់សំណើច ទើបបង្គាប់ឲ្យស្រាយចំណង**បេងហោក**ចេញ ហើយឲ្យលើកបាយទឹកឲ្យ**បេងហោក**បរិភោគ រួចនិយាយថា យើងធ្វើការសឹកមកច្រើនណាស់តាំងពីគ្រាព្រះចៅ**ឡៅពី**បានលើកទៅវាយយកកន្លែងណាតំបន់ណា មានតែជ័យជម្នះមិនដែលបរាជ័យសោះ អ្នកឯងត្រឹមតែជាទីចៅហ្វាយស្រុកប៉ុណ្ណោះ ហេតុម្ដេចបានជាមិនខ្លាចអំណាចយើង? **បេងហោក**នៅស្ងៀមមិនស្រដី ចេះតែបរិភោគអាហារលុះឆ្អែតកាលណា ទើប**ខុងបេង**នាំទៅជិះសេះបរមើលរបៀបបន្ទាយ និងរាយពលទាហានមានគ្រឿងសាស្ត្រាវុធ នូវឃ្លាំងដាក់ស្បៀងអាហារ ឃ្លាំងដាក់សាស្ត្រាវៀងរាយ ហើយថា របស់យើងមានព្រាក់ព្រមយ៉ាងនេះ ឃើញថាអ្នកឯងតស៊ូនឹងយើងមិនបានទេ ត្រូវតែចុះចូលមកនៅជាពួកយើងទៅវិញស្រួលជាង យើងនឹងពិតទូល

ព្រះចៅ**ឡៅសៀន**ឲ្យតាំងតែងមានតំណែងជាធំ សមនឹងកិត្តិយសសង្គ្រោះលើអស់ញាតិសន្តាន។

**បេងហោក**ឆ្លើយតបថ្កានថា ពលទាហាន និងបណ្ដារាស្ត្រចំណុះស្រុក មុខជាគេមិនព្រមចំណុះចុះចូលមតាមស្រួលទេ យើងនឹងព្រមទទួលម្នាក់ឯងម្ដេចបាន មានតែវិលទៅបបួលគ្នាមើលសិន បើគេព្រមល្មមរាល់គ្នាទើបនឹងត្រឡប់មកជម្រាបជាក្រោយ។ **ខុងបេង**ឮហើយក៏អស់សំណើច និយាយថា បើដូច្នោះអ្នកឯងវិលទៅវិញចុះ។ ថាហើយក៏បង្គាប់ឲ្យទាហានយកទូកចម្លង**បេងហោក**ទៅ។ កាល**ខុងបេង**បើកលែង**បេងហោក**ទៅផុតហើយ ទើបបង្គាប់ឲ្យហៅ**ម៉ាតាយ**លើកទ័ពវិលត្រឡប់មកវិញ។

ឯ**បេងហោក**នោះ លុះត្រឡប់ទៅដល់បន្ទាយខ្លួន ក៏ឲ្យមានចិត្តគិតខឹងក្ដៅនៅពុំសុខ ទើបប្រជុំអស់ពួកអ្នកស្រុក នូវពលទាហានដែលជាចិត្តមួយនឹងខ្លួនមកខ្សឹបបង្គាប់ថា អ្នកទាំងអស់គ្នាត្រូវប្រមូលគ្រឿងសាស្ត្រាវុធមកលាក់ទុកឲ្យព្រម ហើយឲ្យទៅប្រាប់**សុនា**និង**ហ្សួយឡាំ**ថា **ខុងបេង**ប្រើបម្រើឲ្យមកជួបជាការសម្ងាត់ នៅចាំឯក្រៅបន្ទាយ ឲ្យចេញទៅជួបជាឆាប់ បើ**សុនា** និង**ហ្សួយឡាំ**ចេញទៅវេលាណា ត្រូវឲ្យព្រួតគ្នាចាប់សម្លាប់ចេញឲ្យបាន នោះពួកទាហានក៏ចេញទៅធ្វើតាមបង្គាប់។ ខណៈទាហានទៅប្រាប់**ហ្សួយឡាំ** ជួនជា**សុនា**ទៅជួបជុំទីនោះដែរ ក៏ប្រាប់ថា **ខុងបេង**ឲ្យបម្រើមកសុំជួបនិយាយការសម្ងាត់ នៅអង្គុយចាំឯក្រៅបន្ទាយ សុំឲ្យលោកទាំងពីរអញ្ជើញចេញទៅជួបមួយរំពេច។ **សុនា** និង**ហ្សួយឡាំ**ឮដូច្នោះ មិនដឹងដល់គំនិតគិតថា **ខុងបេង**ឲ្យបម្រើទៅពិតៗ ក៏ឡើងសេះបរចេញទៅប្រញាប់ ទៅដល់ក្រៅបន្ទាយ ឃើញមានតែទាហានមួយកង ក៏ចុះដើរត្រសងទាំងពីរនាក់ទៅ នោះ

ស្រាប់តែអស់ពួកទាហានដែលក្លែងក៏ស្ទុះចេញមកកំហែងព្រួតគ្នាព័ទ្ធចាប់**សុនា** និង**ហួយឡាំ**សម្លាប់នៅទីនោះ ហើយអូសសពទៅចោលក្នុងព្រែកមួយអន្លើ។

ឯ**ម៉ាតាយ**នោះ លុះឃើញបម្រើទៅប្រាប់ដូច្នោះ ក៏ប្រញាប់លើកទ័ពវិលទៅបន្ទាយវិញ។ ចំណែកខាង**បេងហេក** លុះចាត់ឲ្យទាហានក្លែងទៅសម្លាប់**សុនា** និង**ហួយឡាំ**បានហើយ ក៏ប្រមូលកងទ័ពលើកត្រឡប់សំដៅតាមច្រកផ្លូវភ្នំទៅប្រុងច្បាំងនឹង**ម៉ាតាយ** លុះទៅឃើញតែបន្ទាយទទេឥតមានមនុស្សម្នា ក៏ឲ្យចាប់អ្នកស្រុកមកសួរថា **ម៉ាតាយ**លើកទ័ពទៅឯណា? អ្នកស្រុកឆ្លើយថា **ម៉ាតាយ**ឲ្យជញ្ជូនស្បៀងអាហារលើកឆ្លងទៅបន្ទាយត្រើយម្ខាងពីយប់មិញអស់ទៅហើយ។ **បេងហេក**ឮដូច្នោះក៏លើកទ័ពត្រឡប់ទៅវិញ តែមិនចូលបន្ទាយចាស់ទេ តម្រង់រហ័សចូលទៅឯខេត្តវិញ។

ខណៈនោះ **បេងហ៊ីរ**ជាប្អូនដឹងថា **បេងហេក**ជាបងលើកទ័ពត្រឡប់មក ក៏ចេញទៅគំនាប់ ហើយអញ្ជើញចូលទៅ **បេងហេក**ក៏ពោលរៀបរាប់សេចក្ដីពីដើមដល់ចុងឲ្យ**បេងហ៊ីរ**ស្ដាប់គ្រប់ប្រការ។ ហើយថា **ខុងបេង**នាំបងឲ្យទៅមើលរបៀបគ្រប់បន្ទាយ ដែលដាក់ទុកគ្រឿងសាស្ត្រាវុធ និងស្បៀងអាហារ បងក៏បានដឹងឃើញការណ៍ទាំងអស់។ វេលានេះបងគិតថានឹងឲ្យនាំយកភ្លុកដំរីនូវអស់គ្រឿងមាសប្រាក់ដែលមានតម្លៃ ឲ្យទាហានមួយរយនាក់ទៅជាមួយ ទៅឲ្យ**ខុងបេង** ៗគង់នឹងទុកចិត្តជឿ ឯបងនឹងនាំទាហានលើកតាមក្រោយទៅ ចៅត្រូវនៅឯក្នុងតាំងច្បាំងឡើងឲ្យជ្រួលច្របល់ មុខជា**ខុងបេង**នឹងមានកង្វល់រវល់រឹករវត្រាតែចាញ់យើង។ **បេងហ៊ីរ**ឮដូច្នោះក៏យល់ឃើញត្រូវផង តើបចាត់របស់គ្រប់មុខព្រមទាំងទាហានមួយរយនាក់ហើយក៏ឆ្លងដោយទូកទៅ។ លុះទៅដល់ទទួលប្រទះនឹង**ម៉ាតាយ** នាំទាហានយាមល្បាត លាតក្រវែល ទើប**បេងហីរ**ប្រាប់ថា **បេងហេក**ឲ្យយើងជាប្អូននាំបណ្ណាការ

មកជូនមហាឧបរាជ។ **ម៉ាតាយ**ឮដូច្នោះក៏ចូលទៅជម្រាប**ខុងបេង** ៗកំពុងអង្គុយនិយាយពីការសឹកសង្គ្រាមជាមួយនឹង**ម៉ាចេក, លិយី, ចៀវអួន, ប៊ីហ៊ុយ**ទាំងបួននាក់ លុះបានឮជាក់ទើបសួរ**ម៉ាចេក**ថា **បេងហ៊ីវ**នាំរបស់មកឱ្យយើងគ្រានេះ អ្នកឃើញថា វានឹងធ្វើប្រការម្ដេច? **ម៉ាចេក**ឆ្លើយថា ខ្ញុំបាទនឹងជម្រាបពុំបាន សុំសរសេរអក្សរជូនលោកមើល ហើយក៏សរសេរសេចក្ដីហុចទៅឱ្យ**ខុងបេង** ៗមើលហើយទះដៃសើចថាចំត្រូវនឹងគំនិតគិតរបស់ខ្ញុំណាស់ ទើបឱ្យហៅ**អ៊ុយអៀន, អងប៉េង, ម៉ាតុង, គួនសុក**ចូលមកហើយខិនខ្សឹបប្រាប់ថា អ្នកទាំងប្រាំនាក់ចូរនាំទាហានទៅរៀបចំបន្ទាយឱ្យមានផ្លូវចូល ផ្លូវចេញឱ្យស្រួលបួល ហើយនាំទាហានទៅពួនបង្កប់ជាកងៗនៅក្នុងព្រៃ ទុកបន្ទាយឱ្យនៅទទេចុះ បើឃើញ**បេងហោក**លើកទ័ពមក ត្រូវបណ្ដោយឱ្យចូលហួសមកដល់បន្ទាយ ហើយនាំគ្នាវាយប្រសព្វខ្ទប់ទាំងសងខាងចូលមក ឯ**ម៉ាតាយ**ឱ្យធ្វើអាការបីដូចទាហាន**បេងហោក**ជិះទូកទៅប្រចាំការ បើឃើញទ័ពបែកហើយ ឱ្យយកទូកចូលទៅទទួលហើយចាប់យកខ្លួន**បេងហោក**ឱ្យបាន។ ឯ**លិយី**ឱ្យរៀបតែងតុលៀងអាហារ ប្រកបលាយដោយថ្នាំស្រវឹងលើកទៅឱ្យបរិភោគ បើឃើញសត្រូវជោកភ្លឹកស្មារតីហើយ ត្រូវថយចេញទៅពីបន្ទាយ។ នាយទ័ពនាយកងទាំងពួងបានឮដូច្នោះ ក៏ចេញទៅរៀបធ្វើតាមបង្គាប់។

ខណៈនោះ **ខុងបេង**ក៏ឱ្យហៅ**បេងហ៊ីវ**ចូលទៅ។ **បេងហ៊ីវ**ក៏ឱ្យលើកគ្រឿងបណ្ណាការទៅជូនជាគំនាប់ ហើយក្រាបសំពះ**ខុងបេង**ថា **បេងហោក**ជាបងខ្ញុំបាទគិតដល់គុណលោកជាទម្ងន់ណាស់ ទើបឱ្យខ្ញុំបាទនាំយករបស់ទាំងអស់នេះមកជូនលោក ឯ**បេងហោក**នៅចាំរិះរករបស់ល្អមកជូនលោកជាក្រោយទៀត។ **ខុងបេង**បានស្ដាប់ទើបធ្វើជាសួរ**បេងហ៊ីវ**ថា ទាហានដែលមកជាមួយនឹងអ្នកឯងមានប៉ុន្មាន? **បេងហ៊ីវ**ឆ្លើយថា ទាហានមកជាមួយនឹងខ្ញុំបាទល្មមតែជួយកាន់របស់ និងចែវទូក

ចំនួនមួយរយនាក់។ **ខុងបេង**ក៏បង្គាប់ឲ្យហៅទាហាន**បេងហ៊ីវ**នោះចូលទៅទាំងអស់ លុះទាហានទាំងនោះចូលទៅព្រមគ្នាហើយ **ខុងបេង**ក៏សម្លឹងគន់មើលរូបភាពឃើញ សុទ្ធតែធំធាត់មុតមាំសមជាពួកពិជ័យសង្គ្រាម ខ្លះមុខខ្មៅ កែវភ្នែកខៀវ ខ្លះមុខស ភ្នែកក្រហម ពុកមាត់ទង់ដែង ផ្សេងៗគ្នា ក៏ចូលចិត្តថាជាឧបាយក្លែងចាត់ប្រើមក ទើបបង្គាប់**លិឃី**ទៅលើកតុមកលៀងអាហារ។

ខណៈកាល**បេងហ៊ីវ**និងទាហានកំពុងបរិភោគ្គា ពេលក៏សុរិយាហើយ ទើប **បេងហ៊ីវ**ខ្សឹបប្រាប់ថា ឲ្យម្នាក់ធ្វើជាត្រឡប់ចុះទៅឯទូក ហើយឲ្យឆ្លងទៅប្រាប់ **បេងហោក**ថា ពេលនេះបានកលការហើយ ឲ្យស្រូតលើកទ័ពទៅចុះ **បេងហោក**ឮ ដូច្នោះក៏មានអំណរណាស់ ទើបចាត់ចែងទាហានបានបីម៉ឺន ញែកជាបីកង សញ្ញា ឲ្យដុតភ្លើងជាសម្គាល់។ លុះដល់ពេលយប់ក៏លើកទ័ពឆ្លងទៅពីខាងលើបន្ទាយ ហើយដើរចុះមក។ **ខុងបេង**ឃើញ**បេងហ៊ីវ**និងអស់ទាហានស្រវឹងស្រាភ្លេចស្មារតី ក៏ឃ្លាតខ្លីនាំគ្នាថយចេញអស់ពីក្នុងបន្ទាយ។

ឯ**បេងហោក**លុះលើកមកជិតបន្ទាយហើយ មិនឃើញមនុស្សម្នា ក៏នាំពលយោធាស្វែងគន់មើលតាមជើងបន្ទាយ។ **បេងហោក**ជាតួនាយ នាំពល២០០រយស្រូតតម្រង់ទៅចូលបន្ទាយ**ខុងបេង** គយគន់សម្លឹងមើលមិនឃើញមនុស្សសោះ ឃើញតែ **បេងហ៊ីវ** និងពួកកូនទាហានស្រវឹងស្រាដេកដេរដាស។ **បេងហោក**ក៏ដាស់សួរថា ហេតុម្តេចបានជានាំគ្នាមកដេកដូច្នេះ? ទាហានម្នាក់និយាយមិនរួច បានតែយកដៃចង្អុលត្រង់មាត់។ **បេងហោក**ដឹងថា គេដាក់ថ្នាំបំពុលឲ្យស៊ី ទើបចូលទៅរក**បេងហ៊ីវ**ជាប្អូន ហើយនិងទាហានដែលមកជាមួយទាំងនោះឲ្យដឹងខ្លួន ហើយឲ្យមនុស្សលើកគ្រាហ៍នាំទៅក្រៅបន្ទាយ។

ឯ**ជូឡុង** និង**អ៊ុយអៀន, ម៉ាតុង, អងប៉េង, គួនសុក** ទាំងប្រាំនាក់ដែលនាំទាហានទៅពួនបង្កប់នៅក្បែរបន្ទាយនោះ លុះឃើញ**បេងហោក**ចូលទៅក្នុងបន្ទាយហើយត្រឡប់ចេញមកដូច្នោះ ក៏ដេញពលទាហានស្រែកហ៊ោចេញមកព័ទ្ធជុំវិញ **បេងហោក**និងពួកទាហានឃើញដូច្នោះ ទាំងអស់គ្នាក៏ភ័យស្លុតរត់បែកព្រាត់ព្រាយ ខ្លះទម្លាយទ័ពរត់ចុះទឹក ខ្លះភ័យវរវីករត់ទៅតាមផ្លូវគោក យកតែរួចខ្លួន **ជូឡុង**និងនាយទ័ពនាយកងទាំងពួង ក៏ដេញទាហានបំពានចាប់**បេងហ៊ីវ** និងទាហានបានជាច្រើន ហើយចងនាំមក។

ខណៈនោះ **បេងហោក**ភ័យខ្លាំងណាស់ ក៏ស្ទុះរបូតពីចំណងប៉ងនឹងឆ្លងទៅត្រើយម្ខាង លុះរត់ទៅដល់មាត់ទឹកឃើញទូកបណ្ដែតក្បែរច្រាំង ក៏គិតថាជាពួកទាហានចម្បាំងផងខ្លួន ទើបស្រែកហៅឲ្យចូលមកទទួល លុះទូកនោះចែវចូលមកដល់ ក៏លោតចុះប្រញាប់ ទូកនោះក៏ត្រឡប់ចែវចេញទៅ **ម៉ាតាយ**ដែលពួននៅក្នុងទូកនោះ លុះឃើញទូកនោះចេញផុតហើយ ក៏បញ្ចេញខ្លួនឡើង ហើយចាប់ចងខ្លួន **បេងហោក**ភ្ជាប់នឹងខ្នង់ទូក។ **ខុងបេង**ឃើញ**បេងហោក**បាក់ទ័ពទៅហើយ ក៏ឲ្យទាហានចែវតម្រង់ទៅបន្ទាយវិញ។

ខណៈកាល**បេងហោក**បែកទ័ពទៅនោះ **ខុងបេង**វិលទៅចូលបន្ទាយវិញ បានមួយស្របក់ស្រាប់តែឃើញ**ជូឡុង, ម៉ាតាយ**និងនាយទ័ពនាយកងទាំងពួងចាប់ **បេងហោក, បេងហ៊ីវ** និងទាហានឈ្លើយចងនាំយកទៅដល់ដែរ។ **ខុងបេង**ក៏បង្គាប់ឲ្យស្រាយចំណងពួកទាហានទាំងអស់នោះចេញ ហើយថា ពួកអ្នកឯងរាល់គ្នាទទឹងនឹងរកមិនបាន បានជាត្រូវមកច្បាំងឲ្យនឿយលំបាកខ្ទេចខ្ទីដូចស្មៅជើងក្រាស់ ឯប្រពន្ធកូននៅឯផ្ទះដឹងថា យើងចាប់ឯងបាន ក៏មានតែទុក្ខទោមនស្សទាំងអស់គ្នា យើងឃើញវេទនាទើបអាណិតគិតនឹងបើកលែងឲ្យឯងវិលទៅវិញចុះ បើឯងទៅ

ហើយចូរទៅនៅឯណោះកុំវិលមកច្បាំងនឹងយើងទៀតណ៎ា! ថាហើយ ក៏បណ្តេញពួកនោះឲ្យចេញទៅ។

**ខុងបេង**ទើបបង្គាប់**ជូឡុង, អ៊ុយអៀន** និង**ម៉ាតាយ**ទាំងបីនាយថា ត្រូវឲ្យអ្នកទាំងបីនាំទាហានឆ្លងទៅពីកណ្តាលយប់ស្ងាត់ក្នុងថ្ងៃនេះ ត្រូវទៅឲ្យដល់បន្ទាយ**បេងហេក** ហើយវាយគ្នាសងខាងបន្ទាយ។ **ជូឡុង, អ៊ុយអៀន** និង**ម៉ាតាយ**ទទួលបង្គាប់ហើយ ក៏លា**ខុងបេង**ចេញមកចាត់ចែងទាហានលើកជាទ័ពចេញទៅធ្វើតាមបង្គាប់។

**ខុងបេង**នោះ លុះអ្នកទាំងបីចេញទៅផុតហើយ ទើបបង្គាប់ឲ្យនាំខ្លួន**បេងហេក** និង**បេងហ៊ីវ**ចូលមក ហើយ**ខុងបេង**ក៏អស់សំណើច ទើបសួរ**បេងហេក**ថា អ្នកឯងធ្វើកលឧបាយប្រើឲ្យប្អូននាំយករបស់មកឲ្យយើង ហើយខ្លួនលើកទ័ពមកប្រទូសរ៉ាយយើងវិញ គិតថាយើងមិនដឹងដល់កលខ្លួនឬ? ឥឡូវយើងចាប់ខ្លួនបានទៀតដូច្នេះ តម្រិះប្រាជ្ញាខ្លួននឹងគិតម្តេចទៅទៀត? ខ្លួនខ្លាចយើងហើយឬនៅ? **បេងហេក**ឆ្លើយថា លោកចាប់យើងបានវេលានេះ ព្រោះប្អូនយើងឃើញតែខាងស៊ីទើបត្រូវថ្នាំបំពុលរបស់លោក យើងមិនទាន់ខ្លាចលោកទេ។ **ខុងបេង**ឮហើយក៏អស់សំណើច ហើយថា យើងចាប់ខ្លួនបានហើយលែង ហើយចាប់បានបីដងហើយ ហេតុម្តេចខ្លួននៅតែមិនទាន់ខ្លាចយើង? **បេងហេក**ក៏អង្គុយទ្រមឹងស្ងៀមមិនឆ្លើយ **ខុងបេង**ថា ខ្លួននឹងចង់ឲ្យយើងលែងទៅទៀតឬ? ឬក៏ឲ្យធ្វើប្រការម្តេចវិញ?

ឯ**បេងហេក**បានឮថានឹងលែងទៅវិញដូច្នោះ ក៏មានអំណរណាស់ឆ្លើយថា បើលោកបើកលែងទៅគ្រានេះ យើងនឹងស្វះស្វែងទៅប្រាប់អស់ញាតិសន្តានទាំងប៉ុន្មានឲ្យប្រមូលគ្នាចូលមកទាំងអស់ ហើយច្បាំងនឹងលោកទៀត បើចាញ់លោក ៗ ចាប់បានខ្លួនម្តងទៀតទើបខ្លាចលោក។ **ខុងបេង**ឮហើយថា គ្រានេះ អ្នកឯងត្រូវទៅ

រៀនតម្រិះឲ្យចេះដឹងវិជ្ជាការឲ្យច្រើន សឹមនាំគ្នាមកច្បាំងនឹងយើង បើចាញ់យើងៗចាប់បានទៀត យើងមិនលែងអ្នកឯងទៀតទេ។ ថាហើយក៏បង្គាប់ទាហានឲ្យស្រាយចំណងពី**បេងហេក** និង**បេងហ៊ីរ**ចេញ ហើយក៏បើកលែងឲ្យចេញទៅ។ **បេងហេក, បេងហ៊ីរ** ក៏នឹកកោតខ្លាចទើបក្រាបសំពះលា។ ពួកទាហាន**ខុងបេង**ក៏នាំទៅចុះទូកចម្លងដាក់ទៅត្រើយម្ខាង។

*លោកអ្នកអាចរកសៀវភៅផ្សេងទៀតតាមរយៈប្លក៖*

www.khmerliterature.wordpress.com

# រឿង សាមកុក

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៦៨

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ខុងបេង**បើកឲ្យ**បេងហេក**ជាទីគម្រប់៤ **បេងហេក, បេងហ៊ីវ**បងប្អូនរត់ទៅពឹង**តោស៊ូតែអង** រហូតដល់**ខុងបេង**ឈ្នះទ័ព**បេងហេក**គម្រប់៧ **បេងហេក**ទទួលចុះចាញ់ **ខុងបេង**លើកទ័ពត្រឡប់ទៅស្រុកសែឈ្លួនវិញ)។*

**ឯខុងបេង**នោះ លុះលែង**បេងហេក**ទៅហើយ ក៏ចាំមើលផ្លូវយូរថ្ងៃមិនឃើញ**បេងហេក**វិលមកគំនាប់សោះ ក៏មិនស្មោះថា**បេងហេក**គេចវេះ មិនខ្លាចតម្រិះប្រាជ្ញា **ខុងបេង**ក៏លើកពលយោធាចេញពីបន្ទាយស្រួតតាមទៅក្នុងផ្លូវទិសខាងជើង លុះទៅដល់កណ្ដាលផ្លូវក៏បោះទ័ពឈប់ធ្វើបន្ទាយ ហើយឲ្យទាហានទាំងឡាយស៊ើបស្ដាប់ដំណឹងថា **បេងហេក**លើកទៅតាំងនៅទីឯណា? បម្រើស៊ើបបានការក៏វិលមកជម្រាបវិញថា **បេងហេក**លើកទាហានឡើងទៅនៅលើភ្នំអិមតងសាន់ ហើយរំលំឈើរើថ្មបិទផ្លូវដែលនឹងឡើងទៅលើភ្នំនោះមាំមួនណាស ឃើញកូនទាហានប្ដូរផ្លាស់នៅយាមល្បាតជានិច្ច។ បើយើងនឹងលើកទៅតាមកម្មេចក៏ជាការលំបាក។ **ខុងបេង**ឮដូច្នោះ ក៏ពិគ្រោះសួរ**លិឃី**ដែលជាអ្នកនាំផ្លូវថា ផ្លូវនឹងឡើងទៅលើភ្នំអិមតងសាន់ចំពោះមានតែច្រកមួយប៉ុណ្ណោះ ឬមានក្រៅពីនោះទៅទៀតដែរ? **លិឃី**ឆ្លើយថា ឯភ្នំអិមតងសាន់នោះ ខ្ញុំបាទមិនធ្លាប់ទៅមកសោះ ទីនោះនឹងជាប្រការម្ដេចក៏ពុំអាចដឹង តែបានឮគេថាមានផ្លូវទៅទៀត។ **ខុងបេង**បានឮដូច្នោះ ក៏ប្រុងប្រៀបរៀបទាហាននឹងលើកទៅ។

**ចៀវអួន**នាយទាហានឆ្លើយថា លើកទ័ពមកធ្វើសង្គ្រាមគ្រានេះ ក៏មានចំណាប់នឹងចាប់ខ្លួន**បេងហោក**បានដល់បួនលើកហើយ **បេងហោក**ក៏ខ្លាចថ្វីដៃយើងខ្លាំងណាស់ កាលណាឡើយវានឹងហ៊ានលើកទាហាមកច្បាំងនឹងយើងទៀត? ឥឡូវក៏ជារដូវក្ដៅ ទាហានយើងសុទ្ធតែនឿយហត់បានសេចក្ដីអត់ឃ្លានលំបាកណាស់ សុំឲ្យលោកលើកទ័ពក្រឡះវិលទៅស្រុកសែឈ្វនវិញសិនចុះ ដើម្បីនឹងស្ដាប់ដំណឹង**បេងហោក**មើល បើនៅធ្វើការតនឹងយើងដូចពីដើម សឹមយើងត្រឡប់មកចាប់ខ្លួនឲ្យបាន។

**ខុងបេង**ថា ឥឡូវ**បេងហោក**ខ្លាចយើង បានជារត់ទៅឡើងលើភ្នំសំងំពួនមុខឲ្យកំបាំង បើយើងលើកទ័ពត្រឡប់ទៅមិននៅច្បាំង គង់**បេងហោក**នឹងបានចំណាប់ត្រឡប់ចេញមុខធ្វើការដោយកោតញញើត គួរតែយើងនឹងលើកតាមទៅទិសឯកើតចាប់ខ្លួនឲ្យបានកំពុងវាទុរន់ទុរាដូច្នេះ ទើបបានស្រួល ហើយ**ខុងបេង**ក៏ឲ្យ**អងប៉េង**នាំទាហានមួយរយទៅពិនិត្យមើលច្រកផ្លូវជាមុន **អងប៉េង**ក៏លា**ខុងបេង**ទៅដល់មាត់ផ្លូវខាងលិច នឹងចូលទៅភ្នំអិមតងសាន់។ ទាហានទាំងពួងស្រេកទឹកណាស់ ក៏បបួលគ្នាចុះទៅផឹកទឹកក្នុងជ្រោះអែស្នួន ទាហានទាំងនោះក៏ទៅជា-គទាំងអស់។

**អងប៉េង**ឃើញដូច្នោះក៏ភ័យណាស់ ត្រឡប់វិលមកប្រាប់**ខុងបេង**តាមរឿងសព្វគ្រប់ប្រការ។ **ខុងបេង**ឮហើយ ក៏ភ័យតក្កមានិយាយថា ទឹកក្នុងជ្រោះនោះជាហេតុដូចម្ដេចអេះបានជាដូច្នោះ ឬជាកលឧបាយ**បេងហោក**ដាក់ថ្នាំបំពុលទេដឹង! ចាំយើងទៅមើលឲ្យដឹងសិន។ ថាហើយ**ខុងបេង**ក៏ឡើងជិះរទេះតូចនាំទាហានស្និទ្ធដប់នាក់ទៅជាមួយនឹង**អងប៉េង**។ លុះទៅដល់ផ្លូវទិសខាងលិច **ខុងបេង**ពិគ្រោះមើលទឹកជ្រោះនោះថ្លាឆ្វង់ សម្លឹងមិនឃើញមានអ្វី ហើយស្ងាត់ឥតសព្ទម្រឹកបក្សីអ្វីដើរហើរទៅមកសោះ **ខុងបេង**គិតសង្ស័យណាស់ ទើបឡើងទៅមើលលើមាត់ជ្រោះ ឃើញ

មានខ្ទមអ្នកតាមួយចាស់យូរហើយនៅក្នុងព្រៃស្បាត **ខុងបេង**ក៏តោងវល្លិឡើង ប្រតោងខ្លួនទៅដល់ខ្ទមអ្នកតានោះ ឃើញគេធ្វើអំពីថ្ម មានរូបទេវព្រ័ក្សមួយអង្គ **ខុងបេង**ពិគ្រោះមើលឃើញអក្សរចារឹកនៅលើផែនថ្មសេចក្តីថា “កាលគ្រាព្រះចៅ**ហាន់បេងតេ**សោយរាជសម្បត្តិ **ម៉ាអ្នួន**នាំទាហានមកតាមផ្លូវនេះបាន” **ខុងបេង** ឃើញដូច្នោះ ក៏សប្បាយចិត្តណាស់ ទើបក្រាបសំពះទេវព្រ័ក្សនោះហើយថា ខ្ញុំម្ចាស់ឈ្មោះ**ខុងបេង** ត្រង់សុចរិតចិត្តប្រកដោយសត្យធម៌ តាំងចិត្តនឹងទំនុកបម្រុងព្រះបរមរាជវង្ស ៗឲ្យចេញមកបង្ក្រាបខ្មាំងសត្រូវផ្សេងភាសា បើការបានសម្រេច គិតនឹងកាច់យកស្រុកកាំងតាំងនិងស្រុកហ៊ូតោ ដើម្បីនឹងអញ្ជើញព្រះរាជវង្សព្រះចៅ**ហាន់បេងតេ**ឡើងសោយរាជសម្បត្តិតទៅ ឥឡូវខ្ញុំម្ចាស់បានមកដល់ទីនេះ មិនបានដឹងហេតុផលប្រការម្តេចសោះ ពួកទាហានទាំងអស់បានចុះផឹកទឹកជ្រោះនេះ ក៏វិបរិតទៅជា-គទាំងអស់គ្នា។ សូមអស់លោកចូរមេត្តាខ្ញុំម្ចាស់! ព្រោះខ្ញុំបាននឹករឭកដល់គុណព្រះចៅ**ហាន់បេងតេ** សូមព្រះអង្គទ្រង់មកជួយណែនាំបំភ្លឺស្មារតីប្រាជ្ញាខ្ញុំម្ចាស់ ឲ្យបានដឹងច្បាស់សេចក្តី ហើយ**ខុងបេង**ក៏គំនាប់ក្រាបសិរសីលាចេញមកស្រាប់តែឃើញតាចាស់ម្នាក់កាន់ឈើច្រត់ដើរតម្រង់មកតាមជើងភ្នំ។

**ខុងបេង**ក៏មានអំណរណាស់ ស្រែកអញ្ជើញតាចាស់នោះ ឲ្យឡើងអង្គុយលើខ្ទមអ្នកតា គំនាប់គ្នាគួរសមតាមទំនៀមហើយ **ខុងបេង**ក៏សួរថា អ្នកឈ្មោះអ្វី? សែអ្វី? **ម៉ាអ្នួន**ទេវព្រ័ក្សធ្វើជាមិនបានឮហើយថា ខ្លួនខ្ញុំចាស់ហើយបានឮកិត្តិស័ព្ទមកក៏យូរអង្វែង ថាមហាឧបរាជនេះមានចិត្តស័ត្យទៀងត្រង់ និងរាប់អានស្រឡាញ់អាណិតអាណាប្រជានុរាស្ត្រ ឥឡូវខ្ញុំឃើញអ្នកមកដល់ទីនេះ ទើបមានចិត្តអំណរមកសួរគំនាប់។ **ខុងបេង**សួរថា អ្នកជាចមក្នុងតំបន់នេះ តើបានដឹងខ្លះឬទេ? ទឹកជ្រោះនេះហេតុផលប្រការម្តេច?

**ម៉ាអួន**ទេវព្រ័ក្សឆ្លើយប្រាប់ថា ទឹកជ្រោះដែលទាហានមកងូតផឹកនេះឈ្មោះអែស្វួន។ បើងូតផឹកហើយរមែងធ្វើឱ្យខ្លួនអ្នកនោះនិយាយមិនចេញដូចមនុស្សគ ដល់កំណត់ប្រាំពីរថ្ងៃនឹងស្លាប់។ នៅមានជ្រោះរៀងៗគ្នាជាលំដាប់ទៅទៀតបីជ្រោះ។ ជ្រោះមួយទឹកត្រជាក់ បើនរណាងូតផឹកធ្លាក់ទៅដល់បំពង់កក៏ដាច់ខ្យល់ស្លាប់ ជ្រោះមួយទឹកខ្មៅ បើអ្នកណាងូតផឹកក៏ឡើងសម្បុរខ្មៅទៅអស់ទាំងខ្លួន ហើយឈឺក្រុំក្រួនទាល់តែដាច់ខ្យល់ស្លាប់ ជ្រោះមួយទឹកក្តៅ បើអ្នកណាងូតផឹកក៏ក្តៅរលួយទៅអស់ទាំងខ្លួន មានស៊ីទៅដល់ឆ្អឹងដាច់ខ្យល់ស្លាប់។ ទឹកក្នុងជ្រោះជាលំដាប់ទីបួននេះមានពិសកាចផ្សេងៗគ្នា ហើយមានផ្សែងពពកកើតឡើងពីជ្រោះតាំងពីព្រឹកដល់ថ្ងៃត្រង់ បើអ្នកដើរតាមត្រូវត្រង់ពេលនោះ ឱ្យត្រូវប៉ះលើពពកនោះ ហើយក៏ឱ្យឈឺចាប់សព្វសារពាង្គកាយអន្តរាយជីវិត។

**ខុងបេង**បានស្តាប់សព្វសេចក្តីទើបស្រដីថា បើដូច្នោះកាលណាខ្ញុំនឹងបង្ក្រាប**បេងហេក**ឱ្យបានដូចបំណង បើ**បេងហេក**នៅចងជាសត្រូវហើយក៏ជាសឹកចាំវាយខ្នប់ពីក្រោយបាន ព្រោះខ្ញុំគិតអាននឹងទៅវាយយកស្រុកហ៊ូតោ និងស្រុកកាំងតាំងទៀត មុខជាមិនសម្រេចការ ខ្លួនខ្ញុំជាមនុស្សឥតវាសនាអភ័ព្វណាស់ មិនបានមានតបះនឹងទំនុកបម្រុងព្រះចៅ**ឡៅសៀន**ហើយ នឹងស្លាប់ទៅវិញប្រសើរជាង។ **ម៉ាអួន**ទេវព្រ័ក្សថា មហាឧបរាជកុំព្រួយបារម្ភ ជាងារខ្ញុំនឹងបង្ហាញប្រាប់ថ្នាំឱ្យបំបាត់ទឹកពុលនោះបាន។ **ខុងបេង**ថា តាជាចាស់ទុំអាយុច្រើន បើជ្រាបឃើញប្រការម្តេច ត្រូវជួយណែនាំពន្យល់ខ្ញុំឱ្យបានការផងចុះ។

**ម៉ាអួន**ទេវព្រ័ក្សប្រាប់ថា ភ្នំសាន់អុកនៅទិសឯលិច ឆ្ងាយពីភ្នំអិមតងសាន់នេះប្រាំបីរយសិន (៣២ គ.ម) ឆ្លងភ្នំទៅទៀតម្ភៃសិន (៨០០ ម) ដល់ស្ទឹងប័នអ័នមានមនុស្សម្នាក់ឈ្មោះ**បេងចៀត** សង់ផ្ទះនៅក្បែរមាត់ស្ទឹងនោះជាងដប់ឆ្នាំហើយ

ក្រោយផ្ទះ**បេងចៀត** មានជ្រោះឈ្មោះអ័នលុកច្ឆ ទឹកជ្រោះនោះហូរធ្លាក់មកលើស្ទឹងប័នអ័ន បើនរណាកើតរោគបានផឹកទឹកងូតទឹកនោះ ក៏ជាសះរោគនោះទាំងអស់ មុខផ្ទះនោះមានដើមឈើក្រអូបឈ្មោះ ហុយហៀប ដុះនៅជាច្រើនប្រសិនបើមានអ្នកណានឹងផឹកងូតទឹកកាចនៅជ្រោះទាំងបួននោះហើយ បើបានស្លឹកឈើនោះមកដាក់ក្នុងមាត់តែមួយសន្លឹក ក៏កែពិសនោះបាន ការនេះបើមហាឧបរាជនឹងចង់ចូលទៅក្នុងស្រុកអិមតងសាន់ឲ្យបាន ក៏ចូរទៅរើសយកថ្នាំនោះមកចុះ។

**ខុងបេង**បានឮដូច្នោះ ក៏មានអំណរណាស់ ធ្វើអភិវាទក្រាបសំពះហើយសួរថែមថា តាឈ្មោះអ្វី? សែអ្វី? សុំអាណិតប្រាប់ខ្ញុំឲ្យដឹងផង បើសម្រេចសេចក្ដីប្រាថ្នាវេលាណា ខ្ញុំនឹងវិលមកតបស្នងសងគុណតា។ **ម៉ាអ្វូន**ទេវព្រ័ក្សបានស្ដាប់ហើយ ក៏ឡើងទៅលើសាលានោះអង្គុយលើទីខ្ពស់ ហើយប្រាប់ថា ខ្លួនយើងគឺ**ម៉ាអ្វូន**ហើយក៏អន្តរធានបាត់ទៅ។

**ខុងបេង**បានឃើញដូច្នោះ ក៏រឹតតែមានសេចក្ដីត្រេកអរពន់ប្រមាណណាស់ក្រាបសំពះ ដោយសច្ចគោរព ហើយក៏ចុះចាកសាលទេវព្រ័ក្ស ឡើងរទេះត្រឡប់មកបន្ទាយ។ លុះដល់ពេលព្រឹក **ខុងបេង**ក៏បបួល**អងប៉េង** និងទាហានទាំងពួងដែល-គមិនចេះស្ដី ស្រូតទៅរើសស្លឹកឈើតាមពាក្យទេវព្រ័ក្សថា លុះឆ្លងភ្នំស័នសុកទៅចម្ងាយម្ភៃសិន ឃើញដើមឈើធំនៅក្បែរមាត់ជ្រោះជាច្រើនណាស់ ហើយមានផ្ទះអ្នកស្រុកនៅក្នុងព្រៃនោះប្រមាណផ្ទះដប់ខ្នង **ខុងបេង**បានឃើញក្មេងម្នាក់ដើរមក ក៏អរណាស់ខំដើររូតរះចូលទៅជិត ទទួល**បេងចៀត** ពាក់អាវសម្លូកផ្ដៅ សក់លឿងភ្នែកក្រហមដើរចេញមកឃើញ**ខុងបេង**ក៏សួរថា អ្នកនេះឬជាមហាឧបរាជស្រុកសែឈួន? **ខុងបេង**សើចហើយថា ហេតុម្ដេចបានជាអ្នកស្គាល់ខ្ញុំ? **បេងចៀត**ឆ្លើយថា ខ្ញុំដឹងស្គាល់មកយូរហើយ ថាមហាឧបរាជលើកកងទ័ពមកច្បាំងនឹង**បេងហោក**

នឹងបង្ក្រាបក្នុងដែននេះ **បេងចៀត**ក៏អញ្ជើញ**ខុងបេង**ចូលទៅក្នុងផ្ទះអាត្មា។ ខណៈនោះ**ខុងបេង**និយាយនឹង**បេងចៀត**ថា តម្រាស់ព្រះចៅ**ឡៅសៀន**ឲ្យខ្ញុំលើកកងទ័ពមកប្រាបប្រាម**បេងហោក** ឲ្យចំណុះចុះចូលឡើងស្តាប់បង្គាប់ស្រុកសែឈ្វនឲ្យបាន ឥឡូវ**បេងហោក**មិនប៉ានតដៃ រត់ទៅនៅក្នុងព្រៃភ្នំអិមតងសាន់ ខ្ញុំលើកទាហានទៅដល់ផ្លូវទិសខាងលិចភ្នំ ពួកទាហានខ្ញុំចុះផឹកទឹកជ្រោះមួយអន្លើក៏ទៅជា-គទាំងអស់ ទេវព្រ័ក្សប្រាប់ខ្ញុំថា មានថ្នាំកែទឹកពុលនោះនៅតំបន់នេះ បានជាខ្ញុំខំស្រូតរូតមករកអ្នក ប្រាថ្នានឹងរកថ្នាំនោះ អ្នកចូរមេត្តាណែនាំបង្ហាញឲ្យខ្ញុំទៅរកផង ដើម្បីនឹងបានជួយជីវិតមនុស្សឲ្យរស់រួចតទៅ។

**បេងចៀត**ថា ខ្លួនខ្ញុំជាអ្នកព្រៃថោកទាបណាស់ មិនគួរមហាឧបរាជខំស្វែងស្វះមកខ្លួនឯងឲ្យព្រួយទេ បើប្រើតែកូនទាហានម្នាក់ឲ្យមករកខ្ញុំក៏បាន ឯថ្នាំសោតក៏មាននៅក្រោយភូមិច្រើនណាស់ បើមហាឧបរាជនឹងត្រូវការដូចម្តេចខ្លះ ក៏ឲ្យមនុស្សទៅរើសយកចុះ ហើយ**បេងចៀត**ក៏ឲ្យក្មេងម្នាក់នាំ**អងប៉េង**និងទាហានដែល-គនោះចេញទៅដល់ទីជ្រោះ ទាហានទាំងនោះបានផឹកទឹកជ្រោះទាំងអស់គ្នា ក៏ក្អួតធ្លាក់ស្លែស្អអាក្រក់ចេញមកអស់ ហើយបានស្តីនិយាយគ្នា ជាឡើងវិញដូចដើម។ **បេងចៀត**ក៏និយាយនឹង**ខុងបេង**ថា ផ្លូវដែលលោកនឹងទៅលើភ្នំអិមតងសាន់នោះឆ្ងាយដាច់ស្រយាលណាស់ ប្រកបទៅដោយសត្វកាចសាហាវផ្សេងៗ លោកចូររើសយកស្លឹកឈើហុយហៀបនេះទៅជាច្រើន នឹងបានការពារអន្តរាយតាមផ្លូវនោះ **ខុងបេង**បានស្តាប់ឮដូច្នោះក៏ឆ្លើយតបថា អ្នកមានសេចក្តីមេត្រីនឹងខ្ញុំច្រើនណាស់ “អ្នកឈ្មោះអ្វី? សែអ្វី? បើខ្ញុំបានធ្វើការសម្រេចសេចក្តីប្រាថ្នាហើយ ខ្ញុំនឹងបានតបស្នងសងគុណអ្នកវិញ។

**បេងចៀត**ឆ្លើយថា ខ្ញុំឈ្មោះ**ចៀត** សែ**បេង** ជាបង**បេងហោក**បង្កើត។ **ខុងបេង**បានឮជាក់ដូចជាភ្ញាក់លោះព្រលឹង ដកដង្ហើមធំហើយថា យី! ដូច្នោះឬ? **បេងចៀត**ថា លោកកុំមានពិភាល់ឆ្ងល់សង្ស័យចិត្ត ដ្បិតតែខ្ញុំជាបងប្អូនដូច្នោះ ព្រោះខ្ញុំជាបងរួមផ្ទៃមួយនឹង**បេងហោក**ក៏មែន តែថា**បេងហោក, បេងហ៊ីវ** វាជាមនុស្សអន្ធពាលចិត្តបាប វាមិនបានយកច្បាប់តម្រាខ្ញុំជាបង បានជាខ្ញុំលះលែងចងមេត្រីជាសាលោហិតនឹងវា ដកឃ្លាមកពួននៅទីនេះ ប្រាថ្នានឹងរកសេចក្ដីសប្បាយ ឥឡូវប្អូនខ្ញុំធ្វើការទាំងឡាយខុសមិនត្រូវនឹងផ្លូវប្រវេណី បានជាមហាឧបរាជមានទីលំបាកមកដល់ស្រុកនេះ ខ្លួនខ្ញុំជាបងក៏គង់មានតំណិះគេតិះដៀលបាន ហេតុនេះតាមតែមហាឧបរាជប្រោសប្រាណឲ្យមានអាយុជីវិតតទៅផងចុះ។

**ខុងបេង**ថា អ្នកកុំព្រួយបារម្ភឡើយ ឯ**បេងហោក, បេងហ៊ីវ**នោះ ឃើញថាវាជាមនុស្សជួជាតិមារយាទអាក្រក់ណាស់ វាប្រព្រឹត្តខុសទាស់តែពីខ្លួនវា ខ្លួនអ្នកជាមនុស្សមានសេចក្ដីសត្យត្រង់នឹងខ្ញុំ ៗក៏ត្រូវស្រឡាញ់រាប់អានដោយស្មោះ បើកាលណាខ្ញុំធ្វើការនេះរួចទាំងអស់ ត្រឡប់ចូលទៅស្រុកក្រុងវិញ ខ្ញុំនឹងក្រាបទូលព្រះចៅ**ឡៅសៀន** ឲ្យស្ដេចចេញប្រកាសតាំងអ្នកជាធំក្នុងដែនស្រុកនេះតទៅ។

**បេងចៀត**ថា ដែលប្រសាសន៍ប្រោសអនុកូលទាំងម្ល៉េះ ព្រះតេជព្រះគុណមិនមានទីបំផុត តែចិត្តខ្ញុំបាទស្រឡាញ់តែសេចក្ដីសប្បាយស្ងាត់ៗ មិនចូលចិត្តនឹងយសស័ក្តិសម្បត្តិភស្ដុឋានជាធំទេសោះ។ **ខុងបេង**ឮដូច្នោះ ក៏ឲ្យរបស់ទ្រព្យមានតម្លៃដល់**បេងចៀត**ជាច្រើន។ **បេងចៀត**ក៏មិនបានទទួលយករបស់នោះ បែរជាលើកប្រគល់ឲ្យ**ខុងបេង**វិញ **ខុងបេង**ក៏លា**បេងចៀត**ឡើងរទេះតូចនាំទាហានត្រឡប់មកបន្ទាយ។

**ខុងបេង**ក៏ឲ្យទាហានទាំងឡាយជីកអណ្ដូងក្នុងបន្ទាយដប់អន្លើ ជម្រៅសែសិបព្យាមប្រាថ្នានឹងអាស្រ័យទឹក **ខុងបេង**និងទាហានទាំងពួង ឃើញអណ្ដូង

នោះស្ងួតក្រៀមគ្មានទឹកសោះ ក៏ព្រួយបារម្ភពន់ប្រមាណ លុះវេលាយប់**ខុងបេង**ក៏អុជទៀនធូបអធិដ្ឋានបូជាទេវតា ហើយប្រកាសថា ខ្ញុំម្ចាស់**ខុងបេង** តាំងចិត្តធ្វើរាជការថ្វាយផ្គងព្រះតេជព្រះគុណព្រះចៅ**ឡៅពី**ដោយសុចរិត បានជាគិតលើកព្រះចៅ**ឡៅសៀន**ឡើងគ្រងរាជសម្បត្តិ តាំងចិត្តថា នឹងឲ្យបណ្ដារាស្ត្របានសេចក្ដីសុខសប្បាយតទៅ បើព្រះចៅ**ឡៅសៀន**គ្មានបុណ្យតទៅទៀតទេ ចូរបណ្ដាលឲ្យខ្ញុំ**ខុងបេង**ដ៏មានបុព្វេអភ័ព្វស្លាប់ក្នុងខណៈនេះទៅចុះ កុំបីឲ្យខ្ញុំមានអាយុរស់នៅឃើញមុខអ្នកឯណាឡើយ។ លុះផ្សងសច្ចារួចហើយក៏ចូលនិទ្រា។

លុះពេលព្រឹកភ្លឺស្រាងកាលណា ទាហានចូលទៅជម្រាប**ខុងបេង**ថា អណ្ដូងដែលជីកទុកទាំងប៉ុន្មានមានទឹកចេញពេញប្រៀបទាំងអស់។ **ខុងបេង**បានឮដូច្នោះក៏សប្បាយចិត្តសោមនស្សបង្គាប់ឲ្យពលយោធាដងងូតផឹកស្រេចហើយ ក៏លើកទ័ពគគ្រឹកឡើងទៅលើភ្នំអិនតងសាន់ ហើយឲ្យដងទឹកនោះទៅជាកំណាន់សម្រាប់ផឹកតាមផ្លូវ។

ឯទាហានល្បាត ក៏នាំរឿងទៅប្រាប់**បេងហោក**ថា ឥឡូវ**ខុងបេង**លើកទ័ពហ្លួងផ្លូងទៅទិសឯលិច ចូលមកបានហើយ **បេងហោក**ឮដូច្នោះក៏ភ័យណាស់ **តោស៊ូតៃអង**ក៏និយាយនឹង**បេងហោក**ថា អ្នកកុំអាលព្រួយបារម្ភដំណឹងដែលឮមកនេះនៅមិនទាន់សមប្រកបទេ ចាំពិនិត្យគិតគ្នេរឲ្យឮនឹងត្រចៀកឃើញច្បាស់នឹងភ្នែកសិន។ **តោស៊ូតៃអង**ក៏ឡើងទៅឈរសម្លឹងមើលលើកំពូលភ្នំ ឃើញ**ខុងបេង**លើកទ័ពធំជិតចូលមក ឃើញទាហាននាំយកទឹករែកសែងជាច្រើនណាស់ **តោស៊ូតៃអង**ពិភាល់ណាស់ក៏ត្រឡប់ចុះមកប្រាប់**បេងហោក**ថា **ខុងបេង**លើកទ័ពមកបានមែនហើយ ខ្ញុំសែនឆ្ងល់ណាស់ ប្រហែលជាទេវព្រ័ក្សអ្នកតាចរចាប្រាប់ដំណើរទំនង**ខុងបេង**ជាប្រាកដ។

**បេងហោក**ថា បើដូច្នោះ ខ្ញុំ និង**បេងហ៊ីរ**ពីរនាក់បងប្អូន ក៏លាលោកចេញទៅតស៊ូនឹង**ខុងបេង**ឲ្យត្រាតែអស់ជីវិតនៅទីនេះចុះ មិនឲ្យទាហានខាងណោះចាប់ចងទៅឲ្យ**ខុងបេង**មើលមុខទៀតទេ។ **តោស៊ូតែអង**ថា ខ្លួនអ្នកនិងខ្ញុំជាពួកជាមួយគ្នា បើអ្នកចាញ់ប្រៀប**ខុងបេង**កាលណា ខ្ញុំជាស្ម័គ្របក្សពួកដោយសារ **ខុងបេង**ក៏គង់មិនទុកអាយុជីវិតដែរ។

ខណៈនោះ**តោស៊ូតែអង** ក៏ឲ្យសម្លាប់គោក្របីលៀងស្រាបណ្ដាពលទាហានទាំងពួង ដើម្បីនឹងរៀបចំលើកកងទ័ពទៅច្បាំងនឹង**ខុងបេង** ទទួលមានទាហានចូលមកប្រាប់ថា **អៀវហាង**ដែលជានាយធំនៅភ្នំងិនតិសាន់លើកទាហានបីម៉ឺនមកជួយ។ **តោស៊ូតែអង**បានឮដូច្នោះក៏មានអំណរណាស់ ចេញទៅទទួលគំនាប់គ្នាតាមប្រវេណី ហើយនាំទាហាន និង**អៀវហាង**ចូលទៅក្នុងទីលំនៅ។

**អៀវហាង**អួតថា កូនខ្ញុំប្រាំនាក់នេះ មានសតិបញ្ញា និងថ្វីដៃខ្លាំងពូកែណាស់ ទាំងពលទាហានខ្ញុំក៏មានកម្លាំងក្លាហាន ពាក់ក្រោះដែកស្មើគ្រប់គ្នា បើ**ខុងបេង**លើកពលយោធាមួយរយម៉ឺនចូលមក សូម្បីតែត្រឹមកម្លាំងក៏នឹងសុំអាសាយកជ័យជម្នះឲ្យបាន ហើយក៏ហៅកូនទាំងប្រាំនាក់ឲ្យចូលមកគំនាប់**តោស៊ូតែអង** និង**បេងហោក**ៗឃើញបុត្រ**អៀវហាង**មានរូបរាងមុតមាំសមដូចខ្លាដ៏កាច ក៏មានសេចក្ដីត្រេកអរណាស់ ទើបរៀបតែងតុលៀងអាហារឲ្យ**អៀវហាង** និងបុត្រប្រាំនាក់បរិភោគជាមួយគ្នា។

ខណៈកាលកំពុងសេពសុរានោះ **អៀវហាង**តែងធ្វើស្រវឹងស្រា ហើយសម្ដែងឫទ្ធិក្អៀវក្លាផ្សេងៗ មានរាំភ្លែងលំពែង និងភ្លែងដែលលោតក្វែលគ្រវីអាវុធថា បើ**ខុងបេង**មកកាលណា យើងនឹងកាត់សិរសាដោយអាវុធនេះ ទទួលមានស្រីដប់នាក់ដែល**អៀវហាង**ធ្វើកលមកនោះរំសាយសក់ដើរចេញមកទះដៃធ្វើជាភ្លេង **អៀវហាង**ក៏

ឲ្យបុត្រយកពែងស្រា ងើបមុខឡើងនឹងផឹក **អៀវហង**ស្រែកឡើងតាមសញ្ញា បុត្រ**អៀវហង**ក៏ម្ចីម្នាស្ទុះស្រទៅព្រួតចាប់ចង**បេងហេក** និង**បេងហ៊ីវ**បាន **តោស៊ូតែអង**ឃើញដូច្នោះក៏ភ័យណាស់ ក្រោកឡើងគិតនឹងរត់ **អៀវហង**ក៏ព័ទ្ធរួចចាប់បានទាំងបីនាក់ ស្រីដប់នាក់ក៏ស្ទុះប្រពួនប្រពាក់ចូលទៅជួយចង**បេងហេក** ៗថា **អៀវហង**អ្នកឯង និងយើងមិនដែលមានទោសទាស់ខុសចិត្តគ្នាអំពីអ្វីសោះ ហេតុម្ដេចអ្នកឯងមានសេចក្ដីអាឃាតព្យាបាទយើងដូច្នេះ? ព្រោះប្រយោជន៍អ្វី? អ្នកឯងធ្វើដូច្នេះអំណឹះទៅមុខគង់នឹងមានទុក្ខក្ដៅក្រហាយ។ **អៀវហង**ថា មហាឧបរាជស្រុកសៃឈ្ងួនមានចិត្តសប្បុរសមេត្តាដល់បណ្ដាសត្វទាំងពួងណាស់ ចាប់បានកូនចៅយើងច្រើនក្រៃក្រាស់ ហើយទុកអាយុមិនសម្លាប់ ត្រឡប់បើកលែងមកវិញអស់ យើងគិតដល់គុណដែលគេមានសប្បុរសមេត្តា បានជានាំគ្នាមកចាប់អ្នកឯងយកទៅជូនមហាឧបរាជជាសេចក្ដីតបគុណ ព្រោះយើងឃើញអ្នកឯងជាមនុស្សអាក្រក់សឹងពន់ប្រមាណ គ្មានស្គាល់គុណទោសសោះ គឺជាមនុស្សទុរយសទ្រុស្តអ្នកល្អ ហើយ**អៀវហង**ស្រែកប្រកាសប្រាប់ទាហានទាំងពួងថា **បេងហេក**ធ្វើសេចក្ដីខុស ឲ្យអស់អ្នករាល់គ្នាបានសេចក្ដីក្ដៅក្រហាយ គ្រានេះយើងប្រើកលឧបាយចាប់ខ្លួននាំយកទៅជូន**ខុងបេង**ហើយ អ្នកទាំងឡាយចូរត្រឡប់វិលទៅកាន់ភូមិស្រុក នៅជាសុខដោយភរិយាបុត្រចុះ។ ហើយ**អៀវហង**នោះ ក៏នាំយកខ្លួន**បេងហេក**, **បេងហ៊ីវ**និង**តោស៊ូតែអង** ទាំងចំណងទៅជូន**ខុងបេង**ក្រោយបន្ទាយ។

**ខុងបេង**ដឹងដូច្នោះក៏សោមនស្សប្រីតា ហៅ**អៀវហង**ម្ចីម្នានាំទៅធ្វើបដិសណ្ឋារៈគំនាប់ដោយប្រពៃ ហើយ**អៀវហង**ក៏ស្រដីជម្រាប**ខុងបេង**ថា ខ្ញុំបាទជាមេឃុំត្រួតលើទីភ្នំងិនតិសាន់ មានចិត្តប្រតិព័ទ្ធនឹកដល់គុណមហាឧបរាជ ដែលបានទុកអាយុជីវិតលែងញាតិមិត្ត និងកូនចៅខ្ញុំបាទ ឲ្យវិលមកស្រុកភូមិវិញ បានជាខ្ញុំ

បាទអស់អញលំគេញចិត្តគិតកលឧបាយ ចាប់ខ្លួន**បេងហោក, បេងហ៊ីវ**នាំមកតបស្នងសងគុណលោក។ **ខុងបេង**ក៏ឲ្យបំណាច់រង្វាន់ជាគ្រឿងឧបភោគដល់**អៀវហង**ច្រើនណាស់ ហើយឲ្យយកខ្លួន**បេងហោក**ចូលទៅ។ **ខុងបេង**ក្រឡេកឃើញ**បេងហោក**ក៏សើចហើយថា អ្នកឯងនឹងព្រមចំណុះចុះចាញ់យើងហើយឬនៅ?

**បេងហោក**ឆ្លើយថា ដែលលោកនឹងឲ្យយើងព្រមចំណុះចុះចាញ់នោះ មិនត្រូវសោះ ពីព្រោះយើងមិនមែនចាញ់ដោយថ្វីដៃលរបស់លោកទេ គឺ**អៀវហង**ភឿនសម្លាញ់របស់យើងធ្វើកលឧបាយឲ្យយើងទុកចិត្ត ហើយគិតចាប់យើងមកឲ្យលោក បើលោកនឹងសម្លាប់យើង ក៏តាមចិត្តទៅចុះ ឯយើងមិនចំណុះចុះចូលជាដាច់ខាត។ **ខុងបេង**ថា គ្រានេះអ្នកឯងរត់ដោះខ្លួនពីយើងមកនៅក្នុងទីចង្អៀតពិបាក ប្រាថ្នានឹងបញ្ឆោតយើង និងពួកម៉ាកឲ្យអន្តរាយជីវិតដោយទឹកអាក្រក់មានពិសកណ្ដាលផ្លូវ តែហាក់ជាទេព្ដាលោកមកជួយតម្រង់បម្រុងរក្សាយើង ឲ្យចូលមកបានដល់ទីនេះហើយ ម្ដេចឡើយអ្នកឯងនៅតែកាន់ទិដ្ឋិមានះ មិនព្រមចំណុះចុះចាញ់យើងដល់ណាទៀត?

**បេងហោក**ថា បើយើងនៅក្នុងស្រុកងិនខែ មានទីស្ថានកំពែងបន្ទាយជាមាំមួនហើយលោកចាប់យើងបាននៅទីនោះ យើងក៏គួរចំណុះលោកតកូនចៅផៅសន្ដាន។ នេះយើងមិនមែននៅក្នុងទីនេះ ចំពោះមកនៅទីដទៃបានជាមានសេចក្ដីធ្លោយធ្លោះឲ្យលោកបញ្ឆោតចាប់បានដូច្នេះ យើងមិនអស់ចិត្តនឹងចាញ់សោះ។

**ខុងបេង**ឮដូច្នោះក៏គិតថា **បេងហោក**នៅមានមានះនៅឡើយ គិតហើយក៏ថា បើដូច្នោះយើងនឹងលែងអ្នកឯងទៅម្ដងទៀត អ្នកឯងត្រូវឆ្ពៀតរកទីជ័យភូមិឲ្យមួនមាំ ហើយត្រូវខំបម្រុងសេនាទាហានឲ្យព្រមព្រៀងទុកចុះ យើងនឹងលើកទ័ពទៅតស៊ូនឹងអ្នកឯង ៗក៏នឹងបានឃើញថ្វីដៃយើងប្រាកដ បើយើងចាប់អ្នកឯងបានម្ដង

ទៀត ហើយនៅតែនិយាយដូច្នេះយើងនឹងសម្លាប់ឲ្យអស់ទាំងជួរគោត្រ ថាហើយក៏បង្គាប់ឲ្យស្រាយចំណង**បេងហោក**ចេញ **បេងហោក**ក៏លា**ខុងបេង**ចេញទៅ។ **ខុងបេង**ក៏ឲ្យទាហានស្រាយចំណង**បេងហ៊ីវ** និង**តោស៊ូតែអង**ចេញទៅ រួចក៏តាំង**អៀវហាង**ជាទីមន្ត្រីធំ ហើយឲ្យបំណាច់រង្វាន់ដល់ស្រីទាំងដប់នាក់ និងទាហានទាំងពួងតាមសមគួរ។ **អៀវហាង**ក៏លាខុងបេងទៅកាន់ទីឋានវិញ ឯ**បេងហោក, បេងហ៊ីវ** និង**តោស៊ូតែអង** ក៏ស្រួតនាំគ្នាទៅទាំងយប់ទាំងថ្ងៃដល់ស្រុកសាំកាំង ក្រៅស្រុកនោះមានស្ទឹងព័ទ្ធទាំងបីជ្រុង ក្រៅពីនោះទៀត ខាងទិសឯជើងជាទីវាបទូលាយប្រមាណ៤០០សិន (១៦ គ.ម) មានផ្លែឈើផ្សេងៗជាច្រើនណាស់ ខាងទិសឯលិច២០០សិន (៨ គ.ម) ជាវាលស្រែអំបិល ខាងទិសឯត្បូងជិតក្បែរស្រុកបីរយសិន (១២ គ.ម) ដល់ស្រុកលងតងហើយ ទើបដល់ស្រុកក្រុងមានភ្នំព័ទ្ធជុំវិញ ក្នុងស្រុកនោះមានភ្នំធំមួយឈ្មោះងិនខែ លើកំពូលភ្នំនោះមានប្រាសាទឈ្មោះកងតៀន មានបន្ទាយជាទីលំនៅចៅ**ម័នអង** ក្បែរប្រាសាទនោះមានសាលទេវព្រ័ក្សជាសម្រាប់ផែនដីជាទីសក្តិសិទ្ធិ ពួកអ្នកស្រុកឆ្ងាយជិតទាំងពួងរមែងជឿរាប់អានកាន់ តែងកំណាន់ឡើងទៅតាំងគ្រឿងសែនថ្វាយចៅ**កែគុយ**នៅលើសាលាមួយឆ្នាំបួនដង អ្នកដែលសម្រាប់ប្រតិបត្តិទទួលគ្រឿងសែននោះឈ្មោះ **ប៉កគុយ** ហើយអ្នកស្រុកទាំងពួង ត្រូវឆ្លងទៅចាប់មនុស្សពីដែនស្រុកសែឈ្លួន យកមកសែនគ្រប់ឆ្នាំមិនដែលដាច់ បើរកមិនបាន ក៏បណ្តាលឲ្យឈឺថ្កាត់ជារោគវិបត្តិផ្សេងៗ។

ប្រការមួយ ក្នុងស្រុកងិនខែនោះ មិនមានរបៀបច្បាប់សម្រាប់ស្រុក និងទំនុកបម្រុងតាមទំនៀមទម្លាប់ ដូចជាច្បាប់ស្រុកឯទៀតនោះទេ បើនរណាហើយធ្វើជាចៅហ្វាយស្រុកនោះទាស់អាធ្យាស្រ័យ ដោយប្រការអ្វីនីមួយ ក៏ឲ្យយកខ្លួនទៅសម្លាប់ចេញ ប្រសិនបើមនុស្សនោះមិញជាស្រីបរទេសនៅក្នុងស្រុកនោះ នឹងធ្វើ

ល្មើសក្រៅពាក្យមាតាបិតា ឬស្វាមី ក៏មិនបានឲ្យមានទោស មួយទៀតបើមានភ្លៀងធ្លាក់មកមិនបរិបូរ ខ្វះខាតដោយស្រូវអង្ករស្បៀងអាហារពួកអ្នកស្រុករាល់គ្នា ក៏យកសាច់សត្វមានដំរី សេះជាដើម បរិភោគចិញ្ចឹមជីវិត។

ឯបេងហេកនោះ លុះទៅដល់ស្រុកផិនខែហើយ ក៏ចេះតែបញ្ចុះបញ្ចូលពលទាហានប្រមាណមួយពាន់ប្លាយ **បេងហេក**ក៏និយាយនឹងទាហានទាំងពួងថា យើងធ្វើសឹកមកនឹង**ខុងបេង**ក៏ចាញ់ប្រៀបគេច្រើនគ្រា បានសេចក្ដីវេទនាគួរឲ្យអាប់យសណាស់ អស់អ្នករាល់គ្នាដែលមានប្រាជ្ញាស្មារតី ចូរអ្នកមានសេចក្ដីឈឺចិត្តគិតជួយយើងឲ្យកែខ្លួនបានឡើងវិញ ធ្វើម្ដេចមិញនឹងបានជ័យជម្នះ**ខុងបេង**ឲ្យបាន **តួហៀ**ជាប្អូនប្រពន្ធ**បេងហេក**ឆ្លើយថា **ខុងបេង**លើកទ័ពតាមមក ខ្ញុំបាទនឹងសុំយកអាសាសងសឹកឲ្យបាន។ **បេងហេក**ថា អ្នកឯងមានប្រាជ្ញានឹងគិតធ្វើម្ដេច?

**តួហៀ**ឆ្លើយថា **បុកឡុកតៃអង** ចៅហ្វាយស្រុកប៉ុតហ្គ័បតង នៅខាងទិសឯលិចស្រុកយើងនេះ មានសេចក្ដីចេះដឹងឆ្លៀវឆ្លាស បើឡើងជិះលើដំរី ហើយរាយមន្តគាថា ហៅឲ្យកើតខ្យល់ព្យុះសង្ឃរា ហៅដុំថ្មសិលា ឲ្យខ្ទាតអណ្ដែតទៅត្រូវខ្មាំងសត្រូវ ឬហៅសត្វអសិរពិសកាចផ្សេងៗមកប្រើក៏បានតាមប្រាថ្នា ហើយមានព្រាយមាយាជាបិសាចអាចចេះសម្ដែងឫទ្ធិប្រមាណបីម៉ឺន តាមដិតដោយឲ្យប្រើប្រាស់មិនចេះដាច់ សូមឲ្យលោកតែងសំបុត្រមួយច្បាប់ និងចាត់គ្រឿងប្រដាប់ជាបណ្ណាការឲ្យមានតម្លៃ ខ្ញុំបាទនឹងនាំទៅគំនាប់ ប្រស្រ័យដល់**បុកឡុកតៃអង** សុំអង្វរឲ្យលើកទ័ពមកជួយលោកជាបងឲ្យបាន ការដែលយើងគិតទាំងប៉ុន្មានក៏នឹងសម្រេច។

**បេងហេក**បានឮហើយក៏ត្រេកអរណាស់ ក្រោកឡើងរហ័សទៅសរសេរសំបុត្រតាមគំនិតដែលគិតឃើញគ្រប់ប្រការ ហើយចាត់នូវរបស់ជាគ្រឿងបណ្ណាការ

ប្រគល់ឲ្យ**តួហ្វៃ** ៗក៏គំនាប់នាំរបស់ទ្រព្យ និងសំបុត្រចេញទៅ។ ឯ**បេងហោក**នោះកូវ ក៏ចាត់ប្រើ**តោស៊ូតៃអង**ឲ្យនាំពួកទាហានមួយកងទៅឈររក្សាស្រុកសាំកាំង។

**ខុងបេង**ក៏លើកកងទ័ពតាម**បេងហោក**ទៅដល់ស្រុកសាំកាំង ហើយឲ្យ**ជូឡុង**និង**អ៊ុយអៀន**នាំទាហានលើកទៅវាយស្រុកខាងទិសឯជើង នោះ**តោស៊ូតៃអង**ក៏ឲ្យទាហានដែលចំណានស្នាត់ (បាញ់ស្នា) ឡើងរក្សាសើនបន្ទាយជាមាំមួនណាស់។ ទាហានទាំងនោះក៏ត្រៀមស្នាសម្រាប់ដៃ លាបថ្នាំពិស បើបាញ់ត្រូវអ្នកណាក៏រលួយបែកទាល់ស្លាប់ លុះ**ជូឡុង**លើកទាហានចូលទៅជិត ទាហានលើកំពែងក៏យកស្នាបាញ់ចម្រុះត្រូវទាហានជូឡុងរបួសពិការស្លាប់ជាច្រើន។ **ជូឡុង** និង**អ៊ុយអៀន**ក៏ថយត្រឡប់ទៅរក**ខុងបេង** ៗឃើញទាហានត្រូវព្រួញរបួសពិការជាសាហ័ស ក៏យកថ្នាំផ្សះទៅលាបឲ្យពិស (ព្រួញ) នោះ ក៏សះជាបាត់ ហើយក៏ឡើងរទេះបរសំដៅទៅមើល ឃើញភូមិឋានមានរបៀបរៀបរយ **ខុងបេង**ក៏ថយទ័ពត្រឡប់ចេញទៅតាំងបន្ទាយជាមាំមួន ចម្ងាយពីទីក្រុងហុកសិបសិន (២,៤ គ.ម)។ ទាហានស្រុកសាំកាំងឃើញ**ខុងបេង**ថយទ័ពត្រឡប់ចេញទៅតាំងបន្ទាយពីចម្ងាយ ក៏មានសេចក្ដីមើលងាយប្រមាថធ្វេសសម្គាល់ថា **ខុងបេង**ចាញ់ថ្វីដៃខ្លួន មិនហ៊ានតស៊ូ។

លុះ**ខុងបេង**ថយចេញទៅតាំងនៅទីនោះអស់រវាងប្រាំពីរថ្ងៃ ក៏កើតព្យុះខ្យល់បក់បោកមកក្នុងបន្ទាយ **ខុងបេង**ក៏និយាយបង្គាប់ទាហានទាំងពួងថា យើងនឹងត្រូវការយកខោអាវឲ្យបានក្នុងម្នាក់មួយប្រដាប់គ្រប់គ្នាក្នុងវេលាយប់នេះ បើនរណាមិនមានយើងនឹងកាត់ក្បាលអ្នកនោះចេញ អស់ពួកទាហាននោះមិញឮដូច្នោះ ក៏នឹកសន្ទិះសង្ស័យណាស់ តែខ្លាចអាជ្ញា**ខុងបេង**ជាម្ចាស់ ក៏នាំគ្នាទៅរកខោអាវបានម្នាក់មួយប្រដាប់ចូលទៅជូន**ខុងបេង**។ លុះដល់ពេលយាមមួយ **ខុងបេង**ក៏ឲ្យទាហានយកគ្រឿងសម្លៀករុំបត់ម្នាក់មួយដុំ លើកចូលទៅតទល់នឹងកំពែងស្រុក ទាល់តែ

ខ្ពស់ឡើងស្មើសន្ធឹកសីមា ហើយនិយាយនឹងទាហានទាំងនោះថា បើនរណាចូលទៅក្នុងស្រុកបានមុនគេ យើងនឹងឲ្យបំណាច់រង្វាន់ឲ្យពេញចិត្ត។ អស់ពួកទាហានបានឮ**ខុងបេង**ដាក់កំហិតដូច្នោះ ក៏ស្ទុះដណ្ដើមគ្នាចូលទៅបានជាច្រើន ហើយសញ្ញាគ្នាដេញកាប់សម្លាប់ខ្លាំងជាជ្រួលច្របល់ **តោស៊ូតែអង**មិនទាន់ដឹងកលការច្បាស់ថាសត្រូវចូលទៅពីជើងពីត្បូង ក៏ឡើងសេះនាំទាហានចេញពីបន្ទាយ ទាហាន**ខុងបេង**ឃើញក៏ពារទម្លាយដេញសង្កុញតាម ហើយយកលំពែងចាក់ត្រូវ**តោស៊ូតែអង**ធ្លាក់ពីលើសេះស្លាប់ កងទ័ពក៏បែកធ្លាយខ្ចាត់ខ្ចាយគ្នា ខូចស្រុកក្នុងគ្រានោះ ខ្លះក៏រត់ទម្លុះទៅរក**បេងហេក**ប្រហែលពាក់កណ្ដាល **ខុងបេង**មានជ័យជម្នះ ក៏លើកទ័ពទាំងអម្បាលនោះចូលទៅតាំងនៅស្រុកសាំកាំង ហើយក៏ចាត់ការឲ្យត្រួតរវាំងរក្សា ហើយគិតនឹងលើកទៅស្រុកងិនខៃទៀត។

ឯ**បេងហេក**ដឹងថា **ខុងបេង**វាយយកបានស្រុកសាំកាំងហើយ ក៏មានសេចក្ដីព្រួយខ្លាំងណាស់ ខណៈនោះ មានទាហានចូលទៅប្រាប់ថា **ខុងបេង**លើកទាហានឆ្លងពីត្រើយម្ខាងចូលមកដែនខាងនេះហើយ **បេងហេក**ក៏ស្លុតព្រលឹងរឹងអស់ទាំងខ្លួន គ្រានោះនាង**ចុកយ៉ុង**ជាភរិយា**បេងហេក**លបអែបស្ដាប់ពីក្នុងឆាក ក្រឡេកឃើញប្ដីភ័យយ៉ាងលំបាកដូច្នោះ ក៏ស្ទុះចេញមកអស់សំណើចថា ខ្លួនអ្នកជាប្រុសឈ្មោះថាជាជាតិទាហានមានថ្វីដៃ គួរអីមកដល់សេចក្ដីគិតនឹងការសឹកប៉ុណ្ណោះ អ្នកកុំបីព្រួយជាទុក្ខឡើយ ងារខ្ញុំឯងហើយជាកូនស្រី នឹងសុំចរចេញទៅយកអាសាអ្នកជាស្វាមីធ្វើសឹកតថ្វីដៃនឹង**ខុងបេង**ឲ្យបាន។ **បេងហេក**បានឮភរិយាថាដូច្នោះក៏នឹកឡើងបានថា នាង**ចុកយ៉ុង**ដែលជាមនុស្សមានវិជ្ជាការប្រើអាវុធសាស្ត្របានដូចចិត្ត បើសត្រូវដេញជិតចូលមក ក៏បោះអាវុធនោះឡើងទៅលើអាកាសវេហាស៍ ដោយអំណាចនៃវិជ្ជានោះក៏បណ្ដាលឲ្យអាវុធធ្លាក់ចុះ រុះរោយត្រូវលើសត្រូវទាំងឡាយឲ្យវិនាស

អន្តរាយបាន ឃើញល្អមនឹងតស៊ូច្បាំងយកជ័យជម្នះ**ខុងបេង**បាន។ **បេងហោក**គិតហើយក៏ឲ្យមានសេចក្តីត្រេកអរពន់ប្រមាណណាស់ គំនាប់ទទួលគួរសមនឹងភរិយាហើយម្នីម្នាចេញទៅ ជ្រើសរើសបានទាហានឯកមួយរយនាក់ និងទាហានរងប្រាំម៉ឺនប្រគល់ឲ្យនាង**ចុកយ៉ុង**ជាភរិយា នាងក៏គំនាប់លាស្វាមីលើកយោធានិករចេញចាកស្រុកទៅ។ ខណៈនោះទទួល**ទៀវងី** និង**ម៉ាតង**ជាទាហាន**ខុងបេង**លើកមកដល់ទទួលតទល់គ្នា។

នាង**ចុកយ៉ុង**ឃើញកងទ័ពដូច្នោះ ក៏តែងខ្លួនកាន់អាវុធវិសេសសៀតបង្កប់ពីក្រោយខ្នងប្រាំអាវុធ ហើយឡើងជិះសេះកាន់លំពែងវែងបីព្យាម រាំភ្លែងអាវុធចូលប្រយុទ្ធគ្នានឹង**ទៀវងី**បានប្រាំបួនភ្លែង នាង**ចុកយ៉ុង**ធ្វើជាចាញ់ញាក់សេះរត់ **ទៀវងី**មិនបានដឹងក្នុងកលឧបាយ ក៏បំផាយសេះដេញតាមនាង**ចុកយ៉ុង**។ នាង**ចុកយ៉ុង**ក៏កន្ត្រាក់ដកយកអាវុធវិសេសបោះឡើងទៅលើអាកាស អាវុធនោះក៏ធ្លាក់ចុះមកត្រូវ**ទៀវងី**ធ្លាក់ពីលើសេះ ទាហានទាំងអស់ក៏ស្ទុះស្រូចូលទៅចាប់ខ្លួន**ទៀវងី**ចងបាន**ម៉ាតង**ឃើញដូច្នោះក៏បំបោលសេះចូលទៅដណ្តើម**ទៀវងី** ក្រឡេកឃើញនាង**ចុកយ៉ុង**បញ្ឈរសេះកាន់លំពែងនៅពីមុខ ក៏នឹកខឹងណាស់ បំផាយសេះចូលទៅច្បាំងនឹងនាង**ចុកយ៉ុង** នៅមិនទាន់ចាញ់ឈ្នះគ្នា នាង**ចុកយ៉ុង**ធ្វើកលយកខ្សែពួរបោះទៅរុំជើងសេះដួលចុះ **ម៉ាតង**ក៏របូតធ្លាក់ពីលើសេះ នាង**ចុកយ៉ុង**ក៏ឲ្យទាហានស្ទុះទៅចាប់ចងខ្លួន**ម៉ាតង**បាន ហើយឲ្យនាំខ្លួន**ទៀវងី** និង**ម៉ាតង**ចូលទៅក្នុងស្រុក។

**បេងហោក**ឃើញដូច្នោះ ក៏មានអំណរណាស់ ទើបតែងតុលៀងអាហារឲ្យនាង**ចុកយ៉ុង**បរិភោគផឹកសុរា នាង**ចុកយ៉ុង**ក៏បង្គាប់ទាហានឲ្យយក**ទៀវងី**និង**ម៉ាតង**ទៅសម្លាប់ **បេងហោក**ឆ្លើយឡើងថា យើងបានធ្វើការនឹង**ខុងបេង** ៗចាប់បានយើងប្រាំដង ហើយនៅទុកជីវិតយើងលែងមកវិញមិនបានធ្វើអន្តរាយ វេលានេះ បើយើង

នឹងសម្លាប់**ទៀវងី, ម៉ាតង**ចេញ ឃើញមិនគួរសោះ មនុស្សទាំងពួងក៏នឹងគរហានិន្ទាបាន គួរតែយើងបង្អង់ខានកុំសម្លាប់សិនចុះ បើយើងចាប់បាន**ខុងបេង**ទាំងរស់វេលាណា សឹមសម្លាប់ឲ្យព្រមគ្នាតែម្ដង នាង**ចុកយ៉ុង**យល់ឃើញត្រូវផង ទើបឲ្យទាហានយកខ្លួន**ទៀវងី, ម៉ាតង**ទៅឃុំទុក។

ឯទាហាន**ទៀវងី**ដែលបែកទ័ពទៅនោះ នាំរឿងហេតុទៅជម្រាប**ខុងបេង**គ្រប់ប្រការ **ខុងបេង**ក៏ហៅ**ម៉ាតាយ**មកបង្គាប់ថា ត្រូវឲ្យអ្នកឯងនាំទាហានទៅចាំនៅផ្លូវតូច បើឃើញនាង**ចុកយ៉ុង**ដេញ**ជូឡុង**និង**អ៊ុយអៀន**មក ឲ្យយកខ្សែពួរទាក់ជើងសេះចាប់យកខ្លួននាង**ចុកយ៉ុង**ឲ្យបាន។ **ម៉ាតាយ**ទទួលប្រសាសន៍ហើយ ក៏ចេញទៅចាត់ការ នាំទាហានទៅបង្កប់តាមទីកន្លែង ហើយ**ខុងបេង**ក៏បង្គាប់**ជូឡុង** និង**អ៊ុយអៀន**ឲ្យនាំទាហានទៅច្បាំងតដៃនឹងនាង**ចុកយ៉ុង** ហើយឲ្យធ្វើជាចាញ់ បញ្ឆោតឲ្យដេញទៅតាមផ្លូវដែល**ម៉ាតាយ**បង្កប់នៅទីនោះ **ជូឡុង**និង**អ៊ុយអៀន**ក៏ទទួលបង្គាប់**ខុងបេង**ហើយលើកទាហានចេញទៅ។

លុះដល់ពេលព្រឹក មានពួកល្បាតទៅប្រាប់**បេងហេក**ថា **ជូឡុង**លើកទាហានមកច្រើនណាស់ នាង**ចុកយ៉ុង**បានឮច្បាស់ក៏ឡើងសេះលើកទាហានចេញទៅច្បាំងនឹង**ជូឡុង**បានប្រាំបួនភ្លែង **ជូឡុង**ញាក់សេះវេះត្រឡប់ទៅក្រោយ បណ្ដោយឲ្យដេញជាកលបញ្ឆោត នាង**ចុកយ៉ុង**ខ្លាចក្រែង**ខុងបេង**នឹងប្រើកលឧបាយ ក៏ថយទាហាននឹងត្រឡប់ចូលទៅក្នុងស្រុកវិញ។ **អ៊ុយអៀន**ឃើញដូច្នោះ ក៏បង្រុះទាហានទន្ទ្រានដេញតាមទៅ។ នាង**ចុកយ៉ុង**ក៏កន្ត្រាក់សេះប្រែមកតដៃនឹង**អ៊ុយអៀន**វិញ **អ៊ុយអៀន**ធ្វើជាចាញ់ទាញសេះរត់ នាង**ចុកយ៉ុង**ក៏បញ្ឈប់កងទ័ពតាំងភ្ជាប់នៅក្រៅស្រុកមួយយប់។ លុះព្រឹកឡើង**ជូឡុង**ក៏នាំទាហានចូលទៅបបួលច្បាំងទៀត នាង**ចុកយ៉ុង**ក៏មិនបានលើកតាម ត្រឡប់សេះនឹងចូលទៅក្នុងស្រុក **អ៊ុយអៀន**ឃើញដូច្នោះក៏បំផាយ

សេះតាមទៅ ហើយស្រែកជេរនាង**ចុកយ៉ុង**ជាពាក្យទ្រគោះអសុរសផ្សេងៗ។ នាង**ចុកយ៉ុង**ឮហើយខឹងណាស់ ត្រឡប់វិលមកច្បាំងនឹង**អ៊ុយអៀន** ៗបំផាយសេះរត់ទៅ ហើយចេះតែស្រែកជេរបញ្ឆោរបណ្ដើរ នាង**ចុកយ៉ុង**ក៏បំផាយសេះតាមទៅដោយកម្លាំងទោសោ លុះទៅដល់ផ្លូវតូចក្បែរជើងភ្នំ ដែល**ម៉ាតាយ**បង្កប់ទាហាននៅនោះ **ម៉ាតាយ**ក៏ឲ្យទាហានស្ទុះស្រចេញមក យកខ្សែព្ងួរទាក់ជើងសេះដួលចុះ។ នាង**ចុកយ៉ុង**ក៏ភ្លាត់ធ្លាក់ពីលើសេះ **ម៉ាតាយ**និងទាហានក៏ស្ទុះពានទៅចាប់ខ្លួននាង**ចុកយ៉ុង**បាន ហើយចងនាំទៅជូន**ខុងបេង**។ **ជូឡុង**ក៏ដេញកាប់សម្លាប់កងទ័ពនាង**ចុកយ៉ុង**ស្លាប់ជាច្រើនណាស់ ខ្លះក៏រត់ត្រឡប់ចូលទៅក្នុងស្រុកបាន។

**ខុងបេង**ឃើញ**ម៉ាតាយ**ចាប់បានខ្លួននាងចុកយ៉ុងនាំទៅជូន ក៏មានអំណរណាស់ ឲ្យទាហានស្រាយចំណងចេញ ហើយអញ្ជើញនាង**ចុកយ៉ុង**ឲ្យឡើងតុផឹកស្រា ហើយ**ខុងបេង**ប្រើបម្រើឲ្យចូលទៅប្រាប់**បេងហេក**ថា ឲ្យបង្វិលខ្លួន**ទៀវងី** និង**ម៉ាតង**មកឲ្យវិញចុះ ទើបនឹងបើកខ្លួននាង**ចុកយ៉ុង**ឲ្យរួចទៅ។ ដងណោះ**បេងហេក**បានឮដូច្នោះ ក៏ដោះលែងខ្លួន**ទៀវងី** និង**ម៉ាតង**ឲ្យវិលទៅដល់បន្ទាយ**ខុងបេង** ទើប**ខុងបេង**បើកលែងខ្លួននាង**ចុកយ៉ុង**ទៅ **បេងហេក**ឃើញភរិយាចូលមកក៏មានអំណរណាស់ ទទួលទាហានចូលមកប្រាប់ថា **បុកឡុក**លើកទ័ពមកដល់។ **បេងហេក**ក៏មានអំណរណាស់ចេញទៅទទួលដល់ក្រៅស្រុក ឃើញ**បុកឡុកតែអង**ពាក់អាវថានមាស ប្រដាប់ត្បូងពេជ្រសៀតគ្រប៊ីធំផ្លែពីរ ជិះដំរីសម្បុរលឿងបញ្ឈរកណ្ដាលវណវង្គ មានទាហានដែលជាទ្រមាក់សម្រាប់ជិះសត្វកាចមួយពួក **បេងហេក**ក៏ចូលទៅគំនាប់សាសព្ទសេចក្ដីឲ្យ**បុកឡុកតែអង**ស្ដាប់គ្រប់ប្រការ។

**បុកឡុកតែអង**ថា អ្នកកុំវិតក្កឡើយ **ខុងបេង**ធ្វើការមកហើយឲ្យអ្នកបានសេចក្ដីអាប់យសនោះ យើងនឹងទទួលជួយជាធុរៈសងសឹក។ **បេងហេក**បានស្ដាប់ក៏

ចាប់ផ្ដើមរឹតតែសោមនស្សត្រេកអរ អញ្ជើញ**បុកឡុកតៃអង**ចូលទៅក្នុងស្រុក ហើយតែងតុលៀងអាហារស្រាបាយពួកពលទាំងឡាយ ក៏ឲ្យបរិភោគជាច្រើនណាស់។ លុះវេលាព្រឹក**បុកឡុកតៃអង**ក៏លើកកងទ័ពចេញអំពីស្រុក តម្រង់ទៅបន្ទាយ**ខុងបេង**ៗឃើញដូច្នោះ ក៏ចាត់ឲ្យ**ជូឡុង** និង**អ៊ុយអៀន**លើកពលចេញតខាងក្រៅបន្ទាយ លុះឃើញ**បុកឡុកតៃអង**លើកមកដល់ **ជូឡុង** និង**អ៊ុយអៀន**ក៏បំផាយសេះចេញទៅបំពារមុខទ័ព ឃើញទង់ជ័យក្បួនទ័ពរៀបរយ តែឃើញពួកពលទាំងឡាយមិនមានពាក់អាវក្រោះសោះ កិរិយានិងមុខមាត់ពលទាំងអស់ ក៏ខុសនឹងចរិតមនុស្សធម្មតា ហើយក៏មិនគោះគងទូងភេរីជាទីរបៀបសោះ គ្រាន់តែវាយឃ្មោះហៅពលជាសម្គាល់ ឯខ្លួន**បុកឡុកតៃអង**តួជាក្សត្រ ជិះដំរីលឿង សៀតគ្រឿងអាវុធដាវផ្លែពីរ មានទាហានកាន់ទង់ជ័យរំភាយភ្ញីហែមុខដំរីម្នាក់។

ពលទាហានទាំងសងខាងក៏បានចូលប្រយុទ្ធគ្នាជាកោលាហល **ជូឡុង** និង**អ៊ុយអៀន**ក៏បរសេះពារទម្លាយចូលក្នុងចំណោមទ័ព**បុកឡុកតៃអង** ពលទាហានដែល**ជូឡុង**កាប់ត្រូវក៏ដួលចុះ ហើយក៏រលាយខ្លួនបាត់តែម្ដង ធ្វើឲ្យ**ជូឡុង** និង**អ៊ុយអៀន**មានការភ្ញាក់ផ្អើលជាខ្លាំង ហើយនឹកក្នុងចិត្តថា នេះប្រាកដជាមន្តអាគមរបស់**បុកឡុកតៃអង**ហើយ ក៏បំបោលសេះបង្រុះទៅជិតដំរីរបស់**បុកឡុកតៃអង** ហើយក៏ចោលលំពែងសំដៅទៅត្រូវចំអ្នកនាំមុខដំរីដែលកាន់ទង់ ទង់ដួលចុះ មនុស្សនោះក៏រលាយបាត់ ឯដំរីក៏ស្រែករោទ៏យ៉ាងខ្លាំងដោយភ្ញាក់ ហើយក៏ស្ទុះរត់ទៅចូលក្នុងព្រៃ ទោះបី**បុកឡុកតៃអង**បញ្ជាឃាត់យ៉ាងណាក៏មិនឈប់ដែរ ហើយពួកទាហានរបស់**បុកឡុកតៃអង**ទាំងអស់ក៏រលាយបាត់អស់ទៅដែរ។ **ជូឡុង** និង**អ៊ុយអៀន**ក៏បរពលតម្រង់ទៅបន្ទាយ**បេងហោក**ទៀត **បេងហោក**ទទួលដំណឹងហើយក៏មានសេចក្តីភ័យតក់ស្លុតជាខ្លាំង ព្រោះទាល់ចំណេះមិនដឹងពឹងលើអ្វី ដើម្បីនឹងធ្វើសង្គ្រាមជាមួយ

នឹង**ខុងបេង**ទៀត ក៏បរសេះចេញពីស្រុកជាមួយនឹងភរិយា ចេញមកគំនាប់**ជូឡុង**និង**អ៊ុយអៀន**ដើម្បីសុំចូលជួបនឹង**ខុងបេង**។ **ជូឡុង** និង**អ៊ុយអៀន**ក៏នាំ**បេងហោក**និងភរិយាទៅជួបនឹង**ខុងបេង**នៅឯបន្ទាយ ទៅដល់**ខុងបេង**ក៏សួរថា តើអ្នកឯងព្រមចុះចាញ់យើងហើយឬនៅ? **បេងហោក**តបថា ពេលនេះខ្ញុំបាទសុំចុះចាញ់មហាឧបរាជហើយ ៗសុំចំណុះចុះចូលនឹងមហាឧបរាជ ទោសកំហុសរបស់ខ្ញុំបាទទាំងប៉ុន្មានសូមមហាឧបរាជមេត្តាអនុគ្រោះដល់ខ្ញុំបាទផងចុះ។ **ខុងបេង**មានអំណរណាស់ ក៏ស្ទុះចាប់លើក**បេងហោក** និងភរិយាឲ្យឡើងអង្គុយទីកន្លែងសមគួរ ហើយឲ្យរៀបតុលៀងអាហារ រួចរាល់ហើយ**បេងហោក**ក៏អញ្ជើញ**ខុងបេង**ព្រមទាំងកងទ័ពទាំងអស់ចូលទៅក្នុងស្រុក ហើយបានតាំង**បេងហោក**ជាទីចៅហ្វាយស្រុកដដែល ហើយចៅហ្វាយស្រុកទាំងប៉ុន្មានដែលឡើងស្តាប់បង្គាប់ ក៏ស្ថិតនៅក្រោមការគ្រប់គ្រងរបស់**បេងហោក**ទាំងអស់ ហើយបានរៀបចំឲ្យអាណាប្រជានុរាស្ត្រឋិតនៅជាសុខក្សេមក្សាន្ត។ បន្ទាប់ពីប្រាបប្រាមនិគមតូចធំបានរាបទាបអស់ហើយ **ខុងបេង**ក៏បានលើកពលទាហានទាំងអស់ វិលត្រឡប់មកកាន់ស្រុកសែឈួនវិញ។

**ខុងបេង**ក៏បានចូលទៅក្រាបថ្វាយបង្គំព្រះចៅ**ឡៅសៀន** ហើយទូលថា ទូលព្រះបង្គំជាខ្ញុំបានទៅធ្វើសឹកនឹង**បេងហោក**គ្រានេះក៏មានជ័យជម្នះ ហើយបានប្រាបប្រាមសព្វតាមនិគមធំតូចបានរាបទាបអស់ហើយ ដែលទូលព្រះបង្គំជាខ្ញុំនៅខំធ្វើការឲ្យយូរ ពុំបានឆាប់រហ័ស នាំឲ្យព្រះអង្គព្រួយព្រះទ័យទោមនស្សព្រោះកិច្ចការរាជការនោះ ទោសកំហុសលើទូលបង្គំជាខ្ញុំទាំងប៉ុន្មានសូមព្រះអង្គទ្រង់អនុញ្ញាតឲ្យគង់ជាខ្ញុំព្រះរាជការតទៅ។

ព្រះចៅ**ឡៅសៀន**ទ្រង់ព្រះសណ្តាប់ ក៏ចាប់ដៃ**ខុងបេង**ឲ្យឡើងលើរទេះ ហើយព្រះអង្គក៏ទ្រង់រថព្រះទីនាំង ត្រឡប់ចូលមកព្រះបរមរាជវាំង ព្រះចៅ**ឡៅសៀន**ទ្រង់

មានព្រះរាជហឫទ័យសោមនស្សប្រីតា ចាត់ឲ្យរៀបតុលៀងភោជនាហារក្នុងទីព្រះឋាន បានស្រេច ស្ដេចក៏អញ្ជើញ**ខុងបេង**មហាឧបរាជ និងសេនាទាហានទៅទទួលអាហារ ហើយទ្រង់ព្រះករុណាចែកបំណាច់រង្វាន់តាមគុណានុរូប។ **ខុងបេង**ក៏យកគ្រឿងបណ្ណាការយ៉ាងល្អៗ សម្រាប់អាណាខេត្តដែលវាយបានទាំងបីរយស្រុកនោះ នាំទៅក្រាបបង្គំទូលថ្វាយព្រះចៅ**ឡៅសៀន** ហើយក្រាបទូលឲ្យព្រះរាជទានបំណាច់រង្វាន់ ដល់ភរិយាបុត្រពួកពលទាហាន ដែលបានទៅស្លាប់ក្នុងសង្គ្រាម តាមគួរសមជាច្រើន ទាហានទាំងប៉ុន្មានក៏មានសេចក្ដីត្រេកអរគ្រប់ៗគ្នា ខំតាំងចិត្តគិតធ្វើការថ្វាយព្រះចៅ**ឡៅសៀន**ដោយសុចរិតអស់ពីចិត្ត។

ចប់ភាគទី ៨

សូមរង់ចាំអានភាគទី ៩ ជាភាគបន្ត។

សូមអរគុណ។

ណុល ដារ៉ា